

ព្រះរាជាណាចក្រកម្ពុជា

ជាតិ សាសនា ព្រះមហាក្សត្រ

# សៀវភៅ

# នីតិវិធីព្រហ្មទណ្ឌសម្រាប់នគរបាល






**អំណោយស្ថានទូតបារាំង**



ព្រះរាជាណាចក្រកម្ពុជា
ជាតិ សាសនា ព្រះមហាក្សត្រ

# សៀវភៅ

# នីតិវិធីព្រហ្មទណ្ឌសម្រាប់នគរបាល

អំណោយស្ថានទូតបារាំង
២០០៩

# មាតិកាទី១
# បរិស្ថានគតិយុត្តិនៃការស៊ើបអង្កេតរបស់នគរបាលយុត្តិធម៌

## ផ្នែកទី១
## រឿងក្តីព្រហ្មទណ្ឌ

រឿងក្ដីព្រហ្មទណ្ឌគឺជាចរិតលក្ខណៈយុត្តិធម៌នៃប្រតិកម្មសង្គម។

នៅគ្រប់ប្រទេស និងគ្រប់សម័យកាលទាំងអស់ កាលណាវិធានច្បាប់ជាមូលដ្ឋាននៃជីវិតសង្គមត្រូវបានរំលោភនោះ សង្គមត្រូវចាត់វិធានការដើម្បីការពារខ្លួន។ ទំនាក់ទំនងរវាងបទល្មើសដែលប្រព្រឹត្ត និងការដាក់ទណ្ឌកម្មហៅថា : **រឿងក្ដីព្រហ្មទណ្ឌ។**

សង្គមមានប្រតិកម្មប្រកបដោយគតិបណ្ឌិត និងស្របទៅតាមក្របខ័ណ្ឌច្បាប់ មិនមែនដោយងងឹតងងល់ និងគ្មានសណ្ដាប់ធ្នាប់នោះទេ ។ នៅពេលដែលបទល្មើសមួយត្រូវបានប្រព្រឹត្ត បណ្ដឹងចំនួន ២ ប្រភេទអាចកើតឡើង:

-បណ្ដឹងសំដៅដាក់ទណ្ឌកម្ម ដែលចែងដោយអត្ថបទច្បាប់ទៅលើពិរុទ្ធជន ហៅថា**បណ្ដឹងអាជ្ញា** (គន្ថីទី១-មាតិកាទី ២ នៃក្រមនីតិវិធីព្រហ្មទណ្ឌ) ។

បណ្ដឹងអាជ្ញាមានគោលបំណងដាក់ទណ្ឌកម្មទៅលើភាពរីករាលសង្គមដែលបង្កឡើងដោយបទល្មើស។ ដើម្បីកំណត់ទោសមួយដ៏សមស្រប ចៅក្រមផ្ដោតជាសំខាន់ទៅលើភាពធ្ងន់ធ្ងរនៃបទល្មើស និងបុគ្គលិកលក្ខណៈរបស់ចារី។

-បណ្ដឹងសំដៅជួសជុលព្យសនកម្មដែលកើតមានលើជនរងគ្រោះហៅថា**បណ្ដឹងរដ្ឋប្បវេណី** (គន្ថិ ទី១-មាតិកាទី ៣ នៃក្រមនីតិវិធីព្រហ្មទណ្ឌ) ។

បណ្ដឹងបែបនេះកើតមានបាន លុះត្រាតែជនរងគ្រោះ**ទទួលរងនូវ**ការខូចខាតដែលកើត ចេញពីបទល្មើស។ គេផ្ដោតជាសំខាន់ទៅលើការខូចខាត ដែលជាទំនាស់ផលប្រយោជន៍នៅក្នុងរឿងក្ដី ក្នុងការកំណត់តម្លៃជួសជុលការខូចខាត ដោយមិនគិតទៅលើបុគ្គលិកលក្ខណៈរបស់ភាគីនៃរឿងក្ដីឡើយ (ចារី-ជនរងគ្រោះ) ។

មាត្រា ៤ នៃក្រមនីតិវិធីព្រហ្មទណ្ឌបានចែងថាបណ្ដឹងអាជ្ញាត្រូវបានដាក់ឱ្យដំណើរការដោយអយ្យការ។ មាត្រា ៥ កថាខណ្ឌទី២ បានបញ្ជាក់ថាយុត្តាធិការព្រហ្មទណ្ឌអាចទទួលបណ្ដឹង ពីមន្ត្រីរាជការដែលច្បាប់ប្រគល់អំណាចអោយ។ នៅទីបញ្ចប់ បណ្ដឹងអាជ្ញាអាចត្រូវបានដាក់ឱ្យដំណើរ ការដោយភាគីដែលរងគ្រោះដោយអំពើនៃបទល្មើសព្រហ្មទណ្ឌ ដែលហៅថា**បណ្ដឹងដោយមានការតាំង ខ្លួនជាដើមបណ្ដឹងរដ្ឋប្បវេណី** (មាត្រា ៥ កថាខណ្ឌទី១នៃក្រមនីតិវិធីព្រហ្មទណ្ឌ) ។

ការរៀបចំ និងការប្រព្រឹត្តិទៅ ព្រមទាំងការជំនុំជំរះរឿងក្ដីព្រហ្មទណ្ឌត្រូវបានកំណត់ ដោយសំនុំវិធាន

**នីតិវិធីព្រហ្មទណ្ឌ** ដែលកំណត់ជាអាទិ៍នូវ :

- ការរៀបចំ និងសមត្ថកិច្ចរបស់យុត្តាធិការព្រហ្មទណ្ឌនានា ។

**- វិធាន និងទម្រង់ផ្សេងៗដែលត្រូវគោរពក្នុងការពិនិត្យកំណត់ហេតុ ការស្រាវជ្រាវ និងការចោទប្រកាន់បទល្មើស** ក៏ដូចជាការប្រមូលភស្តុតាង និងការជំនុំជំរះជនល្មើសនៅក្នុងសវនាការ ។

- អាជ្ញា និងអានុភាពនៃសាលក្រមព្រហ្មទណ្ឌ និងផ្លូវនៃបណ្តឹង ។

នីតិវិធីព្រហ្មទណ្ឌមានគោលបំណងបង្ក្រាបបទល្មើស និង ធានាអោយមានការគោរពផលប្រយោជន៍បុគ្គល ។ បុគ្គលនេះត្រូវតែ មានលទ្ធភាពទទួលបានការការពារពីសំណាក់មេធាវី និងទទួលការដាក់ទោសលុះត្រាតែពិរុទ្ធភាព និងការទទួលខុសត្រូវរបស់ជននោះត្រូវបានរកឃើញតែប៉ុណ្ណោះ ។ ប្រការនេះទាមទារនូវតុល្យភាពរវាងប្រសិទ្ធភាពនៃការបង្ក្រាបបទល្មើសដែលមានគោលដៅរក្សាសណ្តាប់ធ្នាប់សង្គម និងសិទ្ធិការពារខ្លួនដែលបំរើអោយផលប្រយោជន៍បុគ្គល ។

• រឿងក្តីព្រហ្មទណ្ឌមានគោលបំណងធានាអោយមានតុល្យភាព ។ ដំណើរការរឿងក្តីត្រូវបានបែងចែកជា ៤ ដំណាក់កាល :

**- ការស៊ើបអង្កេត**

**- ការចោទប្រកាន់**

**- ការស៊ើបសួរ**

**- ការជំនុំជំរះ**

នគរបាលចូលរួម ឬទទួលបន្ទុកផងដែរលើដំណាក់កាលទីមួយនៃរឿងក្តីព្រហ្មទណ្ឌ ( ការស៊ើបអង្កេត ) ។ មុនពេលដែលព្រះរាជអាជ្ញាសម្រេចពីកាលានុវត្តភាពនៃការចោទប្រកាន់ ដំណាក់កាលនេះអាចត្រូវបានពន្យារព្រោះ មន្ត្រីនគរបាលធ្វើការស៊ើបអង្កេតទៅតាមសេចក្តីបង្គាប់បញ្ជាដែលចេញដោយអយ្យការ ។

មន្ត្រីនគរបាលយុត្តិធម៌ក៏សហការផងដែរ នៅក្នុងដំណាក់កាលមួយផ្សេងទៀតនៃរឿងក្តីព្រហ្មទណ្ឌដែលហៅថាការស៊ើបសួរបឋម កាលណាចៅក្រមស៊ើបសួរចេញដីកាចាត់អោយស៊ើបសួរជំនួស ។

**<u>១.ការស៊ើបអង្កេត</u>**

ការស៊ើបអង្កេតទាមទារឱ្យមាននូវអត្ថិភាពជាមុននៃបទល្មើស ។

## ១.១-បទល្មើស

### ១.១.១-តើអ្វីទៅហៅថាបទល្មើស ?

យើងអាចអោយនិយមន័យបទល្មើសព្រហ្មទណ្ឌថា ជាគ្រប់អំពើព្យាបាទរបស់មនុស្សដែលមានលក្ខណៈបង្កអោយមានភាពវឹកវរដល់សណ្តាប់ធ្នាប់សាធារណៈ ។ អំពើនេះអាចជាការប្រព្រឹត្តបទល្មើសសកម្ម ដែលសំដៅលើ ការប្រព្រឹត្តអំពើវិជ្ជមានណាមួយ (ឧទាហរណ៍ ការលួច ឆបោក រំលោភ សម្លាប់...) ឬជាការប្រព្រឹត្តបទល្មើស អកម្មដែលសំដៅលើការប្រព្រឹត្តអំពើអវិជ្ជមានណាមួយ (ឧទាហរណ៍ : ការមិនផ្តល់ការជួយសង្គ្រោះដល់ជនម្នាក់ ដែលកំពុង ស្ថិតនៅក្នុងគ្រោះថ្នាក់) ។ **អំពើទាំងនេះ ត្រូវតែចែងក្នុងច្បាប់** និងផ្តន្ទាទោសដោយច្បាប់ ។

បទល្មើស គឺជាការរំលោភបំពានលើអ្វីមួយដែលស្ថាប័នបានកំណត់ទុកជាវិធាន ។ បើនិយាយតាមភាសាច្បាប់ គឺជាសកម្មភាព ឬចរិតមួយដែលមានចែងក្នុងច្បាប់ **និង ដាក់ទណ្ឌកម្មដោយច្បាប់** ។

ដើម្បីឱ្យអំពើមួយក្លាយជាបទល្មើសមួយចាំបាច់ត្រូវមានធាតុ ៣ :

-**ធាតុនីត្យានុកូល :** មានន័យថាបទល្មើស និងទោស ត្រូវតែមានចែងក្នុងច្បាប់ ។ គេមិនអាចដាក់ទោសអំពើមួយដែលគ្មានចែងក្នុងច្បាប់ថាជាបទល្មើសនោះទេ ។

-**ធាតុសត្យានុម័ត** គឺជាការប្រព្រឹត្តពិតប្រាកដនូវអំពើ ឬការប៉ុនប៉ងធ្វើអំពើនោះ ។ អំពើនោះអាចជាអំពើសកម្ម ឬអំពើអកម្ម ។

-**ធាតុអត្តនោម័ត** គឺជាការដឹងរបស់ជនល្មើសអំពីការហាមឃាត់ដោយច្បាប់ នូវអំពើដែលខ្លួនបានប្រព្រឹត្ត ។ ហើយក៏ជាឆន្ទៈ ឬចេតនាដែលជននោះមានដើម្បីបង្កអោយមានភាពវឹកវរ ដល់សណ្តាប់ធ្នាប់សាធារណៈ ឬព្យាបាទ ដល់អ្នកដទៃ ។

បទល្មើសត្រូវបានធ្វើចំណាត់ថ្នាក់ទៅតាមប្រភេទ ។ ចំណាត់ថ្នាក់ដែលត្រូវបានប្រើប្រាស់ញឹកញាប់បំផុតនោះគឺចំណាត់ថ្នាក់៣កម្រិត ដែលបែងចែកបទល្មើសជា៣ប្រភេទ ទៅតាមកម្រិតទម្ងន់នៃទោស មានបទលហុ បទមជ្ឈិម និងបទឧក្រិដ្ឋ ។

**បទលហុ** : គឺជាកំហុសស្រាលបំផុតដែលត្រូវដាក់ទណ្ឌកម្មដោយទោសស្រាលៗ ។

**បទមជ្ឈិម** : គឺជាបទល្មើសធ្ងន់មធ្យមដែលត្រូវបានដាក់ទណ្ឌកម្មដោយទោសមជ្ឈិម ពោលគឺដោយការ

ដាក់ពន្ធនាគារដែលអាចមានរយៈពេលរហូតដល់៥ឆ្នាំ និងមានការផាកពិន័យ (ឧទាហរណ៍ : បទល្មើសលួចសាមញ្ញ រំលោភសេចក្តីទុកចិត្ត឴ ឆបោក...) ។

**បទឧក្រិដ្ឋ** : គឺជាកំហុសធ្ងន់បំផុតដែលត្រូវផ្តន្ទាទោសជាប់ពន្ធនាគារ ដែលមានរយៈពេល ជាទូទៅលើសពី៥ឆ្នាំ និងមានការផាកពិន័យអាស្រ័យតាមករណីនីមួយៗ។ នេះគឺជាទោសឧក្រិដ្ឋ (ឧទាហរណ៍ : មនុស្សឃាត ការបំពុល ការរំលោភសេពសន្ថវៈ អំពើលួចប្រដាប់អាវុធ...) ។

### **១.១.២ ធ្វើការពិនិត្យកត់ហេតុអំពីអត្ថិភាពនៃបទល្មើស**

ធ្វើការពិនិត្យកំណត់ : ធ្វើការកត់សម្គាល់ សង្កេត ចុះបញ្ជី ចុះនិទ្ទេសន៍ជាលាយលក្ខណ៍អក្សរ ។

ដូចនេះ ការពិនិត្យកំណត់ហេតុអំពីអត្ថិភាពនៃបទល្មើសមួយ ដែលផ្ទុយនឹងច្បាប់ព្រហ្មទណ្ឌគឺជាការបញ្ជាក់ ជាលាយលក្ខណ៍អក្សរនូវចរិតដែលត្រូវបានផ្តល់និយមន័យដោយច្បាប់ និងផ្តន្ទាទោសដោយទណ្ឌកម្ម ។ **នគរបាល ត្រូវគិតតែទៅលើអង្គហេតុប៉ុណ្ណោះ** ដោយមិនត្រូវបញ្ចេញយោបល់ ឬមតិឡើយ ។

ការបំពេញបេសកកម្មនេះ ទាមទារអោយនគរបាលមានចំណេះដឹងច្បាស់លាស់ អំពីធាតុផ្សំនៃបទល្មើស ។ ចំណេះដឹងនេះទាក់ទងនឹង :

- នីតិព្រហ្មទណ្ឌទូទៅ
- នីតិព្រហ្មទណ្ឌពិសេស

ប៉ុន្តែក៏ទាក់ទងនឹងវិធានដែលត្រូវគោរពដើម្បីឈានទៅរកឃើញ និងបង្ហាញបទល្មើសនោះ និងជូនដំណឹងទៅចៅក្រមដែលមានអំណាចប្រកាសទណ្ឌកម្មដែលត្រូវអនុវត្ត ។ បែបនេះហៅថា**នីតិវិធី ព្រហ្មទណ្ឌ** ។

### **១.២. ការស៊ើបអង្កេតរបស់នគរបាលយុត្តិធម៌**

ការរកឃើញ និងការត្រួតពិនិត្យបទល្មើសជាតួនាទីរបស់អង្គភាពជំនាញទាំងអស់ដែលមិនស្ថិត ក្នុងអង្គចៅក្រម ប៉ុន្តែស្ថិតក្រោមបញ្ជាអង្គចៅក្រមគឺ : នគរបាលយុត្តិធម៌ ។

ដូចនេះ នគរបាលយុត្តិធម៌ គឺជាសំនុំបុគ្គលិកទាំងអស់ ប៉ុន្តែក៏ជាមុខងារមួយដែលអនុវត្ត ដោយតួអង្គជាច្រើនដែរ ។

### **១.២.១ អ្នកចូលរួមក្នុងការស៊ើបអង្កេតនគរបាលយុត្តិធម៌**

អ្នកចូលរួមក្នុងការស៊ើបអង្កេតនគរបាលយុត្តិធម៌មានរាយនាមក្នុងមាត្រា ៥៧ នៃក្រមនីតិវិធីព្រហ្មទណ្ឌ

ដែលចែងថានគរបាល យុត្តិធម៌រួមមាន :

**-មន្ត្រីនគរបាលយុត្តិធម៌**

**- ភ្នាក់ងារនគរបាលយុត្តិធម៌**

**-ភ្នាក់ងារសាធារណៈដទៃទៀត** ដែលប្រគល់អំណាចអោយដោយច្បាប់ដោយឡែក ដើម្បីធ្វើការត្រួតពិនិត្យបទល្មើសក្នុងសមត្ថកិច្ចដែនដីរបស់ខ្លួន។

**១.២.១.១ មន្ត្រីនគរបាលយុត្តិធម៌**

មន្ត្រីនគរបាលយុត្តិធម៌ ដែលដើរតួនាទីសំខាន់ក្នុងការដឹកនាំការស៊ើបអង្កេតតុលាការមានរាយនាមក្នុងមាត្រា ៦០ នៃក្រមនីតិវិធីព្រហ្មទណ្ឌ។

**មន្ត្រីខ្លះមានគុណសម្បត្តិជាមន្ត្រីនគរបាលយុត្តិធម៌ ទៅតាមឋានន្តរស័ក្តិ និងមុខងាររបស់ខ្លួន។**

-អភិបាល និងអភិបាលរង ខេត្ត-ក្រុង អភិបាល និងអភិបាលរងស្រុក-ខណ្ឌ និងមេឃុំ ចៅសង្កាត់។

-ប្រធាន និងអនុប្រធាននាយកដ្ឋានកណ្តាលនគរបាលយុត្តិធម៌ ប្រធាន និងអនុប្រធាននាយកដ្ឋានកណ្តាលសន្តិសុខ និងប្រធាន និងអនុប្រធាននាយកដ្ឋានកណ្តាលសណ្តាប់ធ្នាប់សាធារណៈនៃអគ្គស្នងការដ្ឋាននគរបាលជាតិ។

-ប្រធាន និងអនុប្រធាននាយកដ្ឋាន ប្រធាន និងអនុប្រធានការិយាល័យ ប្រធាន និងអនុប្រធានផ្នែកដែលទទួលបន្ទុកកិច្ចការព្រហ្មទណ្ឌ និងស្ថិតក្រោមឱវាទរបស់នាយកដ្ឋានកណ្តាលនគរបាលយុត្តិធម៌ និង-នាយកដ្ឋាន កណ្តាលសន្តិសុខ និងនាយកដ្ឋានកណ្តាលសណ្តាប់ធ្នាប់សាធារណៈ។

-ប្រធាន និងអនុប្រធាននាយកដ្ឋាន ប្រធាន និងអនុប្រធានការិយាល័យ ប្រធាន និងអនុប្រធាន ផ្នែកនៃ :

- នាយកដ្ឋាននគរបាលព្រំដែន "ចំពោះបទល្មើសឆ្លងដែន"
- មន្ទីរប្រឆាំងគ្រឿងញៀន
- នាយកដ្ឋាននគរបាលទេសចរណ៍
- ស្នងការពិសេសការពារបេតិកភ័ណ្ឌ
- ស្នងការ ស្នងការរងនគរបាល ខេត្ត-ក្រុង
- ប្រធាន និងអនុប្រធានការិយាល័យ ប្រធាន និងអនុប្រធានផ្នែកដែលទទួលបន្ទុកការងារព្រហ្មទណ្ឌ

**ចំណុះស្នងការនគរបាលខេត្ត-ក្រុង ដូចជា :**

-ការិយាល័យនគរបាលព្រហ្មទណ្ឌកំរិតធ្ងន់ និងការិយាល័យព្រហ្មទណ្ឌកំរិតស្រាល

-ការិយាល័យប្រឆាំងការជួញដូរមនុស្ស និងការពារអនីតិជន

-ការិយាល័យនគរបាលសេដ្ឋកិច្ច

-ការិយាល័យបច្ចេកទេសវិទ្យាសាស្ត្រព្រហ្មទណ្ឌ

-ការិយាល័យប្រឆាំងគ្រឿងញៀន

-ការិយាល័យប្រឆាំងភេរវកម្ម និង

-ការិយាល័យជនបរទេស ។

-អធិការ និងអធិការរង ប្រធាន និងអនុប្រធានផ្នែកព្រហ្មទណ្ឌនៃអធិការដ្ឋាននគរបាលស្រុក-ខណ្ឌ ។

-ប្រធាន និងអនុប្រធានការិយាល័យនគរបាលចរាចរ ប្រធាន និងអនុប្រធានផ្នែកនគរបាលចរាចរ "ចំពោះបទល្មើសចរាចរ" ។ ប្រធាន និងអនុប្រធានការិយាល័យគ្រប់គ្រងអាវុធជាតិផ្ទុះ និងប្រធាន និងអនុប្រធាន ផ្នែកនៃការិយាល័យគ្រប់គ្រងអាវុធជាតិផ្ទុះ ឪចំពោះបទល្មើសអាវុធជាតិផ្ទុះឪ។ ប្រធាន និងអនុប្រធានអង្គភាព ប្រធាន និងអនុប្រធានការិយាល័យនគរបាលទេសចរណ៍ និងប្រធាន និងអនុប្រធាន ផ្នែកនៃការិយាល័យនគរ បាលទេសចរណ៍ ។

-ប្រធាន និងអនុប្រធានប៉ុស្តិ៍នគរបាលរដ្ឋបាលឃុំ-សង្កាត់ "ចំពោះបទល្មើសព្រហ្មទណ្ឌ" ។

-មេបញ្ជាការ និងមេញ្ជាការរងនៃកងរាជអាវុធហត្ថ ដែលទទួលបន្ទុកកិច្ចការព្រហ្មទណ្ឌ ។

-មេបញ្ជាការ និងមេញ្ជាការរងនៃកងរាជអាវុធហត្ថប្រចាំខេត្ត-ក្រុង ទទួលបន្ទុកកិច្ចការ ព្រហ្មទណ្ឌ ។

-មេបញ្ជាការ និងមេញ្ជាការរងនៃកងរាជអាវុធហត្ថប្រចាំស្រុក-ខណ្ឌទទួលបន្ទុកកិច្ចការព្រហ្មទណ្ឌ ។

-ប្រធាន និងអនុប្រធានការិយាល័យ ប្រធាន និងអនុប្រធានផ្នែកនៃកងរាជអាវុធហត្ថទទួលបន្ទុក កិច្ចការព្រហ្មទណ្ឌ ។

-ប្រធាន និង អនុប្រធានអង្គភាពផ្សេងទៀតដែលទទួលបន្ទុកិច្ចការស៊ើបអង្កេតបទល្មើសព្រហ្មទណ្ឌ ដែលត្រូវបង្កើតឡើងក្នុងករណីចាំបាច់ ។

**មន្ត្រីដទៃទៀតជាមន្ត្រីនគរបាលយុត្តិធម៌ ដោយសារតែខ្លួនបានប្រឡងជាប់វិជ្ជាជីវៈ និងត្រូវ**

**បានតែងតាំងក្នុងតួនាទីមួយ ដែលតម្រូវឱ្យខ្លួនបំពេញបេសកកម្មជានគរបាលយុត្តិធម៌ ។**

មាត្រា ៦០នៃក្រមនីតិវិធីព្រហ្មទណ្ឌ កថាខណ្ឌទី១ :

" មន្ត្រីនគរបាលជាតិ មានឋានន្តរសក្តិចាប់ពីអនុសេនីយ៍ត្រីឡើងទៅ ដែលបានបំរើការងារយ៉ាងតិចបំផុត២ (ពីរ) ឆ្នាំ ក្នុងនគរបាលជាតិរួចហើយ ហើយបន្ទាប់ពីបានទទួលសញ្ញាប័ត្រជាន់ខ្ពស់ខាងនគរបាលយុត្តិធម៌ ។"

មាត្រា ៦០ នៃក្រមនីតិវិធីព្រហ្មទណ្ឌ កថាខណ្ឌទី២ :

" នាយទាហាននៃកងរាជអាវុធហត្ថ ដែលបានបំរើការងារយ៉ាងតិចបំផុត ២ (ពីរ) ឆ្នាំ ក្នុងកងរាជអាវុធហត្ថរួចហើយ ហើយបន្ទាប់ពីបានទទួលសញ្ញាប័ត្រជាន់ខ្ពស់ខាងនគរបាលយុត្តិធម៌ ។"

លក្ខខណ្ឌទទួលបានសញ្ញាប័ត្រជាន់ខ្ពស់ផ្នែកនគរបាលយុត្តិធម៌មានចែងក្នុងមាត្រា ៦១ នៃក្រមនីតិវិធីព្រហ្មទណ្ឌ :

" សញ្ញាប័ត្រជាន់ខ្ពស់នៃនគរបាលយុត្តិធម៌ ត្រូវផ្តល់ជូនបន្ទាប់ពីឆ្លងកាត់ការប្រលង បែបវិជ្ជាជីវៈដែលរួមមានវិញ្ញាសាជាមូលដ្ឋានដូចខាងក្រោម :

១ -វិញ្ញាសាស្តីពីនីតិព្រហ្មទណ្ឌ

២-វិញ្ញាសាស្តីពីនីតិវិធីព្រហ្មទណ្ឌ

៣-វិញ្ញាសាស្តីអំពីករណីយកិច្ចសាស្ត្រ ដូចដែលមានចែងនៅក្នុងក្រមសីលធម៌ ដែលគាត់តែងដោយអង្គការសហប្រជាជាតិ ។

សញ្ញាប័ត្រនេះត្រូវចុះហត្ថលេខារួមដោយរដ្ឋមន្ត្រីក្រសួងយុត្តិធម៌ និងរដ្ឋមន្ត្រីពាក់ព័ន្ធ និងមានបោះត្រាផង ។"

សមាសភាពគណៈមេប្រយោគនៃការប្រលង ដែលទទួលបន្ទុកពិនិត្យសមត្ថភាពវិជ្ជាជីវៈបេក្ខជនប្រលងសញ្ញាប័ត្រនគរបាលជាន់ខ្ពស់មានចែងក្នុងមាត្រា ៦២ នៃក្រមនីតិវិធីព្រហ្មទណ្ឌ :

មន្ត្រីនគរបាលយុត្តិធម៌ត្រូវធ្វើសច្ចាប្រណិធាន : មាត្រា ៦៣ នៃក្រមនីតិវិធីព្រហ្មទណ្ឌ : "មន្ត្រីនគរបាលយុត្តិធម៌ម្នាក់ៗត្រូវស្បថថា ខ្លួននឹងបំពេញដោយភក្តីភាពនូវមុខងាររបស់ខ្លួន ។ សម្បថត្រូវធ្វើនៅមុខសាលាឧទ្ធរណ៍ ។ សម្បថមិនចាំបាច់ធ្វើជាថ្មីម្តងទៀតឡើយ នៅពេលដែលទទួលបាននិតិសម្បទាជាមន្ត្រីនគរបាល·

យុត្តិធម៌នាពេលក្រោយទៀត ។ រូបមន្តសម្បថត្រូវកំណត់ដោយប្រកាសរបស់រដ្ឋមន្ត្រីក្រសួងយុត្តិធម៌ ។»

នៅទីបញ្ចប់ មន្ត្រីនគរបាលយុត្តិធម៌ដែលបានប្រព្រឹត្តកំហុសវិជ្ជាជីវៈ ក្នុងពេលបំពេញមុខងាររបស់ខ្លួន ត្រូវទទួលទណ្ឌកម្មពី :

-មន្ត្រីនគរបាល ដែលមានឋានានុក្រមខ្ពស់ជាង

-អធិការកិច្ចក្រសួងមហាផ្ទៃ

-អាជ្ញាធរតុលាការ

**១.២.១.២ ភ្នាក់ងារនគរបាលយុត្តិធម៌**

ភ្នាក់ងារនគរបាលយុត្តិធម៌មានរាយនាមក្នុងមាត្រា ៧៦ នៃក្រមនីតិវិធីព្រហ្មទណ្ឌ :

"មានគុណសម្បត្តិជា ភ្នាក់ងារនគរបាលយុត្តិធម៌ :

១ -នាយនគរបាល និងនាយនគរបាលរង ដែលមិនមានគុណសម្បត្តិជាមន្ត្រីនគរបាលយុត្តិធម៌ ។

២ -ភ្នាក់ងារនគរបាលជាតិផ្សេងទៀត ។

៣ -នាយទាហាននៃកងរាជអាវុធហត្ថ ដែលមិនមានគុណសម្បត្តិជាមន្ត្រីនគរបាលយុត្តិធម៌ ។

៤ -យោធិនផ្សេងទៀតនៃកងរាជអាវុធហត្ថ ។"

ភ្នាក់ងារនគរបាលយុត្តិធម៌ត្រូវធ្វើសច្ចាប្រណិធាន ។ ពួកគាត់ត្រូវជួយដល់មន្ត្រីនគរបាលយុត្តិធម៌ ជាពិសេស ក្នុងបេសសកកម្មត្រួតពិនិត្យបទល្មើស ហើយក៏ត្រូវទទួលទណ្ឌកម្មផងដែរក្នុងករណីមាន កំហុស ។

ភ្នាក់ងារនគរបាលយុត្តិធម៌ជាអ្នកសរសេររបាយការណ៍ ។

**១.២.២ បេសកកម្មរបស់នគរបាលយុត្តិធម៌**

បេសកកម្មនគរបាលយុត្តិធម៌ត្រូវបានបញ្ជាក់ក្នុងមាត្រា ៥៦ នៃក្រមនីតិវិធីព្រហ្មទណ្ឌ :

-ត្រួតពិនិត្យបទល្មើស ( ជូនកាលត្រូវរកបទល្មើសជាមុន ព្រោះបទល្មើសខ្លះត្រូវបានលាក់កំបាំង)

-ប្រមូលភស្តុតាង

-កំណត់អត្តសញ្ញាណ និងចាប់ខ្លួនចោរ

នគរបាលយុត្តិធម៌ ត្រូវបើកការស៊ើបអង្កេតមួយនៅពេល ដែលបានដឹងពីអត្ថិភាពបទល្មើសមួយដោយ :

-ការស្រាវជ្រាវរបស់ខ្លួនផ្ទាល់

-ពាក្យប្ដឹងពីជនរងគ្រោះ

-ឮដោយបណ្ដឹងបរិហារពីតតិយជន

ការស៊ើបអង្កេតនេះ មានដំណើរការប្លែកៗពីគ្នាគួរឱ្យកត់សម្គាល់ អាស្រ័យទៅតាមក្របខណ្ឌតតិយុត្តិ នៃការស៊ើបអង្កេត ដែលមានចែងក្នុងក្រមនីតិវិធីព្រហ្មទណ្ឌ :

- ការស៊ើបអង្កេត**បទល្មើសជាក់ស្ដែង**

- ការស៊ើបអង្កេត**បឋម**

- ការអនុវត្ត**ដីកាចាត់ឱ្យស៊ើបសួរជំនួស**

របៀបស៊ើបអង្កេតទាំងបីប្រភេទដែលអ្នកស៊ើបអង្កេតត្រូវចេះយ៉ាងស្ទាត់ជំនាញខានមិនបាននោះនឹងត្រូវលើកយកមកសិក្សាឱ្យបានស៊ីជំរៅនៅពេលក្រោយ ។ :

នៅពេលបញ្ចប់ការស៊ើបអង្កេត មន្ត្រីនគរបាលយុត្តិធម៌ត្រូវបញ្ជូននីតិវិធីធ្វើរួចទៅចៅក្រមមានសមត្ថកិច្ច ហើយជាយថាហេតុបង្ហាញចារីបទល្មើសម្នាក់ ឬច្រើននាក់ដល់គាត់ ។

### <u>១.២.៣ សមត្ថកិច្ចដែនដីរបស់មន្ត្រីនគរបាលយុត្តិធម៌ និងភ្នាក់ងារនគរបាលយុត្តិធម៌</u>

មាត្រា ៦៧, ៦៨ និង ៦៩ នៃក្រមនីតិវិធីព្រហ្មទណ្ឌបានកំណត់សមត្ថកិច្ចដែនដី របស់មន្ត្រីនគរបាលយុត្តិធម៌ :

មាត្រា ៦៧ នៃក្រមនីតិវិធីព្រហ្មទណ្ឌ : " មន្ត្រីនគរបាលយុត្តិធម៌ម្នាក់ៗ មានសមត្ថកិច្ចនៅក្នុងព្រំប្រទល់ដែនដីនៃអង្គភាពដែល ខ្លួនត្រូវបានចាត់តាំងឱ្យទៅបំពេញការងារ ។

នៅភ្នំពេញ មន្ត្រីនគរបាលយុត្តិធម៌មានសមត្ថកិច្ចលើវិសាលភាពនៃក្រុងទាំងមូល ទោះបីជាអង្គភាពដែលខ្លួនផ្លាស់ទៅកាន់នោះ នៅកន្លែងណាក៏ដោយ ។

សេចក្ដីសម្រេចតែងតាំង មន្ត្រីនគរបាលយុត្តិធម៌ត្រូវតែបញ្ជាក់មណ្ឌលរដ្ឋបាល ដែលមន្ត្រីនោះត្រូវចាត់តាំងឱ្យទៅបំពេញការ ។ សេចក្ដីសម្រេចនេះត្រូវផ្ដល់ដំណឹងដល់អគ្គព្រះរាជអាជ្ញាអមសាលាឧទ្ធរណ៍ ។ "

មាត្រា ៦៨ នៃក្រមនីតិវិធីព្រហ្មទណ្ឌ : " ក្នុងករណីបទឧក្រិដ្ឋ ឬបទមជ្ឈិមជាក់ស្ដែង តាមអត្ថន័យនៃមាត្រា ៨៦ (និយមន័យបទ ឧក្រិដ្ឋ ឬបទមជ្ឈិមជាក់ស្ដែង) និងមាត្រា៨៧ (ការចាប់ ខ្លួនក្នុងករណីបទឧក្រិដ្ឋ ឬបទមជ្ឈិមជាក់ស្ដែង) នៃក្រមនេះ ហើយប្រសិនបើមានការបន្ទាន់ ព្រះរាជអាជ្ញាអាចអនុញ្ញាតឱ្យមន្ត្រីនគរបាល

យុត្តិធម៌ធ្វើប្រតិបត្តិការលើវិសាលភាព នៃដែនដីជាតិទាំងមូល ។ ការអនុញ្ញាតអាចធ្វើដោយផ្ទាល់មាត់ ប៉ុន្តែការអនុញ្ញាតនេះត្រូវតែចុះនិទ្ទេសន៍នៅក្នុងលិខិតស៊ើបអង្កេត ។

ក្នុងក្របខ័ណ្ឌនៃការ ស៊ើបសួរកាលណាចៅក្រមស៊ើបសួរចេញដីកាចាត់ឱ្យស៊ើបសួរជំនួស ក្នុងករណីបន្ទាន់ ចៅក្រមនេះអាច អនុញ្ញាតឱ្យមន្ត្រីនគរបាលយុត្តិធម៌ធ្វើប្រតិបត្តិការលើវិសាលភាព ដែនដីជាតិទាំងមូល ។

ចំណែក**ភ្នាក់ងារនគរបាលយុត្តិធម៌** មានសមត្ថកិច្ចក្នុងព្រំប្រទល់ដែនដីដែលខ្លួនបំពេញមុខងារខ្លួនតាមធម្មតា ។ នៅពេលជំនួយដល់មន្ត្រីនគរបាលយុត្តិធម៌ម្នាក់ ភ្នាក់ងារនគរបាលយុត្តិធម៌មានសមត្ថកិច្ចក្នុងព្រំប្រទល់ដែនដីដែលមន្ត្រីនគរបាលយុត្តិធម៌នោះបំពេញមុខការរបស់ខ្លួន ។

ភ្នាក់ងារនគរបាលយុត្តិធម៌មិនអាចធ្វើការពន្លាតសមត្ថកិច្ចដោយខ្លួនឯងនោះទេ ប៉ុន្តែខ្លួនអាចអម ដំណើរមន្ត្រីនគរបាលយុត្តិធម៌ដែលធ្វើដំណើរទៅក្រៅដែនសមត្ថកិច្ចរបស់ខ្លួនតាមការអនុញ្ញាតឱ្យពន្លាតសមត្ថកិច្ច ។

ក្របខ័ណ្ឌស៊ើបអង្កេត (ការស៊ើបអង្កេតបទល្មើសជាក់ស្តែង ការស៊ើបអង្កេតបឋម ការអនុវត្តដីកាចាត់ឱ្យស៊ើបសួរជំនួស) មិនមានឥទ្ធិពលលើសមត្ថកិច្ចដែនដីដំបូងរបស់មន្ត្រីនគរបាលយុត្តិធម៌ និងភ្នាក់ងារនគរបាលយុត្តិធម៌ឡើយ ។

ដើម្បីប្រយុទ្ធប្រឆាំងនឹងបទល្មើសមួយចំនួនឱ្យកាន់តែមានប្រសិទ្ធិភាព (ការជួញដូរគ្រឿងញៀន ភេរវកម្ម ចោរកម្មទ្រង់ទ្រាយធំ ការជួញដូរវត្ថុបូរាណ ការប្រយុទ្ធប្រឆាំងនឹងបទល្មើសផ្លូវភេទប្រព្រឹត្តចំពោះកុមារ ។ល។) អាជ្ញាធរអាចសម្រេចបង្កើតអង្គភាពផ្សេងៗដែលមានសមត្ថកិច្ចថ្នាក់ជាតិ ។ ដូចនេះមន្ត្រីនគរបាលយុត្តិធម៌ ដែលតែង តាំងក្នុងអង្គភាពនេះ អាចធ្វើដំណើរលើវិសាលភាពដែនដីជាតិទាំងមូលដោយមិនចាំបាច់សុំការអនុញ្ញាតពន្លាត សមត្ថកិច្ច ។

**២.ការចោទប្រកាន់**

ការចោទប្រកាន់ស្តែងឡើងតាមរយៈការដាក់ឱ្យដំណើរការបណ្តឹងអាជ្ញាប្រឆាំងនឹងចារី និងអ្នកសមគំនិត សន្មត់នៃបទល្មើសដែលបានរកឃើញ ។

អង្គការអយ្យការ (អយ្យការ) ជាអ្នកទទួលបន្ទុកបំពេញបេសកកម្មនេះ ។

**២.១ ព្រះរាជអាជ្ញាចាប់ផ្តើមធ្វើការចោទប្រកាន់ពីបទព្រហ្មទណ្ឌ**

មាត្រា ៤ នៃក្រមនីតិវិធីព្រហ្មទណ្ឌ : « បណ្តឹងអាជ្ញាត្រូវអនុវត្តក្នុងនាមផលប្រយោជន៍ទូទៅដោយអយ្យការ។ អយ្យការធ្វើការចោទប្រកាន់ពីបទព្រហ្មទណ្ឌ ហើយសុំអោយអនុវត្តនច្បាប់នៅ ចំពោះមុខយុត្តាធិការ ស៊ើបសួរ និងយុត្តាធិការជំនុំជំរះ » ។

ដើម្បីបំពេញមុខងាររបស់ខ្លួន ព្រះរាជអាជ្ញាអាចចេញបញ្ជាអោយមន្ត្រីនគរបាលយុត្តិធម៌បើក ការស៊ើបអង្កេតមួយក្នុងក្របខ័ណ្ឌនៃការស៊ើបអង្កេតបឋម ឬបទល្មើសជាក់ស្តែង (ប្រសិនល័ក្ខខ័ណ្ឌនានាត្រូវបានបំពេញ) ។

**អំណាចព្រះរាជអាជ្ញាមានវិសាលភាពធំធេងណាស់** ជាអាទិ៍ដូចមានចែងក្នុងមាត្រា ៣៧ នៃក្រមនីតិវិធីព្រហ្មទណ្ឌ : "ព្រះរាជអាជ្ញាដឹកនាំ និងសម្របសម្រួលសកម្មភាពរបស់មន្ត្រី និងភ្នាក់ងារនគរបាលយុត្តិធម៌ទាំងអស់នៅក្នុងសមត្ថកិច្ចដែនដីរបស់ខ្លួន។ ប៉ុន្តែកាលណាអនុវត្តដីកាសម្រេចចាត់អោយស៊ើបសួរជំនួសមន្ត្រីនគរបាលយុត្តិធម៌ ត្រូវស្ថិតក្រោមអំណាចរបស់ចៅក្រមស៊ើបសួរ » ។

ព្រះរាជអាជ្ញាមានអំណាចទាំងអស់ដែលក្រមនេះទទួលស្គាល់ចំពោះមន្ត្រីនគរបាលយុត្តិធម៌ ក្នុងការស៊ើបអង្កេត។

ព្រះរាជអាជ្ញាអាចចុះទៅកាន់កន្លែងស៊ើបអង្កេត និងផ្តល់គ្រប់ការណែនាំមានប្រយោជន៍ដល់មន្ត្រី និងភ្នាក់ងារនគរបាលយុត្តិធម៌។ ក្នុងករណីចាំបាច់ ព្រះរាជអាជ្ញាអាចដកសិទ្ធិស៊ើបអង្កេតពីមន្ត្រី និងភ្នាក់ងារនគរបាល យុត្តិធម៌ ហើយរៀបចំអ្នកជំនួសមន្ត្រី និងភ្នាក់ងារទាំងនោះ។

ព្រះរាជអាជ្ញាអាចធ្វើអធិការកិច្ចបានគ្រប់ពេលវេលា នៅអង្គភាពនគរបាលយុត្តិធម៌។ គាត់អាចចូលរួមក្នុងការស្តាប់ចម្លើយ ត្រួតពិនិត្យការអនុវត្តវិធានការឃាត់ខ្លួន ជាពិសេសការគោរពទម្រង់ច្បាប់ និងការចុះបញ្ជីព្រមទាំងទីកន្លែងឃាត់ខ្លួន។

គាត់ទទួលពាក្យបណ្តឹងដែលបញ្ជូនដោយមន្ត្រីនគរបាលយុត្តិធម៌ ជនរងគ្រោះ ឬជនណាម្នាក់ផ្សេងទៀត។

**២.២. ព្រះរាជអាជ្ញាសំរេចចំណាត់ការបន្ទាប់សម្រាប់ការស៊ើបអង្កេត**

ព្រះរាជអាជ្ញាត្រូវតែជ្រើសរើសរវាងដំណោះស្រាយជាច្រើន ហើយមានអំណាចសម្រេចនូវកាលានុវត្តភាពនៃការចោទប្រកាន់ :

មាត្រា ៤០ នៃក្រមនីតិវិធីព្រហ្មទណ្ឌ :" ព្រះរាជអាជ្ញាថ្លឹងថ្លែងអំពីចំណាត់ការលើពាក្យប្តឹង និងពាក្យបរិហារដែលខ្លួនបានទទួលដោយផ្ទាល់ ឬដែលមន្ត្រីនគរបាលយុត្តិធម៌បញ្ជូនមក។"

ដូចនេះ ព្រះរាជអាជ្ញាអាច :

-ចេញដីកាសម្រេចតម្កល់រឿងទុកមិនចាត់ការ (ការចោទប្រកាន់មិនអាចទទួលយកបាន បណ្តឹងអាជ្ញាគ្មានមូលដ្ឋានគ្រប់គ្រាន់ ការចោទប្រកាន់មិនអំណោយផល)...(មាត្រា ៤១ នៃក្រមនីតិវិធីព្រហ្មទណ្ឌ)

-ផ្តល់សេចក្តីណែនាំដល់នគរបាលយុត្តិធម៌ដើម្បីចាត់ការសំនុំរឿងបន្ត (មាត្រា ៣៧ និង ៤០ នៃក្រមនីតិវិធីព្រហ្មទណ្ឌ)

-ប្រើប្រាស់ដីកាបញ្ជូនទៅជំនុំជំរះផ្ទាល់ ដូចដែលឈ្មោះដីកានេះបញ្ជាក់ស្រាប់ ដីកានេះមានឥទ្ធិពលប្តឹងផ្ទាល់ទៅយុត្តាធិការជំនុំជំរះ (មាត្រា ៤៦ នៃក្រមនីតិវិធីព្រហ្មទណ្ឌ)

-អនុវត្តនីតិវិធីនៃការបង្ហាញខ្លួនភ្លាម (មាត្រា ៤៧ នៃក្រមនីតិវិធីព្រហ្មទណ្ឌ)

-ប្តឹងចៅក្រមស៊ើបសួរតាមរយៈ ដីកាសន្និដ្ឋានបញ្ជូនរឿងស៊ើបសួរបឋម (មាត្រា៤៤ នៃក្រមនីតិវិធីព្រហ្មទណ្ឌ) ដែលបើកការស៊ើបសួរ។

## ៣.ការស៊ើបសួរត្រៀម

យោងតាមមាត្រា ៤៤ និង ១២៧ នៃក្រមនីតិវិធីព្រហ្មទណ្ឌ ការស៊ើបសួរមានគោលបំណងឈានទៅដល់ការបង្ហាញការពិត។ ការស៊ើបសួរត្រូវបានប្រគល់ទៅឱ្យចៅក្រមឯករាជ្យម្នាក់ហៅថា **ចៅក្រមស៊ើបសួរ** ដែលមិន មានមុខងារជំនុំជំរះទេ ប៉ុន្តែមានមុខងារធ្វើការស៊ើបអង្កេតស្វែងរកអង្គហេតុ និងកំណត់អត្តសញ្ញាណចារី និង អ្នកសមគំនិតជាយថាហេតុ។

### ៣.១-ការបើកការស៊ើបសួរ :

ការស៊ើបសួរត្រូវតែធ្វើដោយខានមិនបានចំពោះបទឧក្រិដ្ឋ តែចំពោះ បទមជ្ឈិម ការស៊ើបសួរ អាចធ្វើក៏បាន ឬមិនធ្វើក៏បាន (មាត្រា ១២២ នៃក្រមនីតិវិធីព្រហ្មទណ្ឌ) ។

ជាបឋម ព្រះរាជអាជ្ញាត្រូវចេញ**ដីកាសន្និដ្ឋានបញ្ជូនរឿងអោយស៊ើបសួរ** ទៅអោយចៅក្រមស៊ើបសួរដើម្បីជំរាបគាត់។

ដីកាសន្និដ្ឋានបញ្ជូនរឿងអោយស៊ើបសួរ បញ្ជាក់ពីអង្គហេតុដែលចោទប្រកាន់ ពីបទល្មើសដែលកើតចេញ

ពីអង្គហេតុនោះ និងបញ្ជាក់តាមដែលអាចធ្វើទៅបាននូវ អត្តសញ្ញាណ របស់បណ្តាបុគ្គលដែលត្រូវចោទប្រកាន់។

ដូចនេះ ចៅក្រមស៊ើបសួរមានបេសកកម្មបំពេញរាល់កិច្ចចាំបាច់ដើម្បីបង្ហាញពីការពិត ( មាត្រា ១២៧ កថាខណ្ឌទី១ នៃក្រមនីតិវិធីព្រហ្មទណ្ឌ) អនុលោមទៅតាមច្បាប់។ ចៅក្រមស៊ើបសួរមានករណីយកិច្ចស៊ើបសួរដាក់បន្ទុកនិងដោះបន្ទុក ដើម្បីកំណត់កាលៈទេសៈជាក់លាក់ដែលបទល្មើសត្រូវបានប្រព្រឹត្ត និងលក្ខខណ្ឌ ដែលបណ្តាជនសង្ស័យបានចូលរួមក្នុងបទល្មើស។ គាត់ទទួលបណ្តឹងអំពីអង្គហេតុសម្រាប់តែបទល្មើស (ដែលបាន ប្រព្រឹត្តឬប៉ុនប៉ងប្រព្រឹត្ត) ដែល មានចុះក្នុងដីកាសន្និដ្ឋានបញ្ជូនរឿង អោយស៊ើបសួររបស់ព្រះរាជអាជ្ញាតែប៉ុណ្ណោះ។ ដូចនេះ បទល្មើសត្រូវបាន កំណត់រួចជាស្រេច។

## ៣.២ ដំណើរការនៃការស៊ើបសួរ

ដូចនេះ ចៅក្រមស៊ើបសួរដឹកនាំការស៊ើបអង្កេតដោយ ធ្វើការត្រួតពិនិត្យបទល្មើស ស្តាប់ចម្លើយការតទល់គ្នា ឆែកឆេរលំនៅដ្ឋាន...។ល។

ប៉ុន្តែ នៅក្នុងករណីដែលចៅក្រមស៊ើបសួរមិនអាចបំពេញកិច្ចការស៊ើបសួរ ម្នាក់ឯងបាននោះ ( ដោយសារមូលហេតុបច្ចេកទេស គតិយុត្តិ សំភារៈ...) មាត្រា ១៣១ នៃក្រមនីតិវិធីព្រហ្មទណ្ឌបានផ្តល់លទ្ធភាពអោយចៅក្រមស៊ើបសួរចេញដីកា**ចាត់អោយស៊ើបសួរជំនួស** ទៅអោយចៅក្រមម្នាក់ទៀត ឬទៅអោយមន្ត្រីនគរបាលយុត្តិធម៌មានសមត្ថកិច្ចណាម្នាក់ ដើម្បីអោយអ្នកទាំងនោះធ្វើជំនួសខ្លួន នូវកិច្ចស៊ើបអង្កេតនានាដែលខ្លួនយល់ថាចាំបាច់សម្រាប់បង្ហាញពី ការពិត។ ក្នុងករណីបន្ទាន់ ចៅក្រមអាចផ្តល់នូវការពន្លាតសមត្ថកិច្ចដល់កម្រិតជាតិជូនដល់មន្ត្រីនគរបាលយុត្តិធម៌ម្នាក់ ក្នុងអំណាចដែនដីខ្លួនដោយដីកាចាត់អោយស៊ើបសួរជំនួស ( មាត្រា ៦៨ កថា ខណ្ឌទី២នៃក្រម នីតិវិធីព្រហ្មទណ្ឌ )។

ប៉ុន្តែ កិច្ចមួយចំនួនដែលចៅក្រមស៊ើបសួរ មានករណីយកិច្ចបំពេញដោយខ្លួនឯងនោះមិនអាចធ្វើប្រតិភូកម្ម អំណាចឱ្យទៅមន្ត្រីនគរបាលយុត្តិធម៌ម្នាក់ណាបានឡើយ (ការសួរចម្លើយជនត្រូវចោទ ការស្តាប់ចម្លើយភាគីដើម បណ្តឹងរដ្ឋប្បវេណី ការឆែកឆេរក្នុងការិយាល័យមេធាវី សហគ្រាសសារពត៌មាន...)។

ដើម្បីដឹកនាំបេសកកម្មរបស់ខ្លួន ចៅក្រមស៊ើបសួរមាន**អំណាចបង្ខំ**យ៉ាងធំ :

-ចំពោះបណ្តាជនដែលត្រូវចោទ ចៅក្រមស៊ើបសួរអាចប្រើប្រាស់ដីកាបង្គាប់ឱ្យចូលខ្លួនដីកាបង្គាប់ឱ្យនាំ

**ខ្លួន**ដីកាឃាត់ខ្លួនក្រោមលក្ខខណ្ឌមួយចំនួន។

-ចំពោះសាក្សីដែលបដិសេធមិនព្រមចូលខ្លួន ចៅក្រមស៊ើបសួរអាចសុំជំនួយពីកំលាំងសាធារណៈ **ដោយ**ចេញបញ្ជាឱ្យចូលខ្លួន។

-ជាទូទៅ ចៅក្រមស៊ើបសួរមានអំណាចធំធេងបំផុត។ ដូចនេះ ចៅក្រមស៊ើបសួរអាចធ្វើ ការកោះហៅ ស្តាប់ចម្លើយ តទល់ ឆែកឆេរលំនៅដ្ឋាន និងរឹបអូស.....។ល។

**៣.៣-ការបិទការស៊ើបសួរ** :

នៅពេលបញ្ចប់ការស៊ើបសួរ ចៅក្រមស៊ើបសួរ ត្រូវបញ្ជូនសំនុំរឿងទៅអោយព្រះរាជអាជ្ញា (មាត្រា ២៤៤ នៃក្រមនីតិវិធីព្រហ្មទណ្ឌ) តាមរយៈ**ដីកាបញ្ជូនសំនុំរឿង** ។

ដូចនេះ ព្រះរាជអាជ្ញាជាអ្នកសរសេរ**ដីកាសន្និដ្ឋានស្ថាពរ** (មាត្រា ២៤៦ នៃក្រមនីតិវិធីព្រហ្មទណ្ឌ) ដែលត្រូវបញ្ជូនទៅអោយចៅក្រមស៊ើបសួរដើម្បីសម្រេចចេញ**ដីកាដំណោះស្រាយ**ដូចជា (មាត្រា ២៤៧ នៃក្រមនីតិវិធី ព្រហ្មទណ្ឌ) :

-**ដីកាដំណោះស្រាយលើកលែងការចោទប្រកាន់** (ចារីមិនត្រូវបានកំណត់អត្តសញ្ញាណ បន្ទុកមិនគ្រប់គ្រាន់... )

-**ដីកាដំណោះស្រាយបញ្ជូនសំនុំរឿង**ចំពោះមុខតុលាការ ដើម្បីធ្វើការជំនុំជំរះជនត្រូវចោទ។

**៤.ការជំនុំជំរះ**

**៤.១ : សវនាការ**

សវនាការប្រព្រឹត្តិទៅជាដំបូង នៅចំពោះមុខសាលាដំបូង ដែលមានសមត្ថកិច្ចជំនុំជំរះបទឧក្រិដ្ឋ បទមជ្ឈិម ឬបទលហុ (មាត្រា ២៨៧ នៃក្រមនីតិវិធីព្រហ្មទណ្ឌ)។

យុត្តាធិការនេះសម្រេច**ដោយពិគ្រោះគ្នាទៅវិញទៅមក** (ចៅក្រមបីរូប) ចំពោះបទឧក្រិដ្ឋ និងចៅក្រមមួយរូបចំពោះបទមជ្ឈិម ឬបទលហុ (មាត្រា ២៨៩ នៃក្រមនីតិវិធីព្រហ្មទណ្ឌ)។

ជាទូទៅ នគរបាលយុត្តិធមិអវត្តមាននៅដំណាក់នេះ ក្នុងរឿងក្តីព្រហ្មទណ្ឌ ទោះបីជា ជានិច្ចកាលគាត់ត្រូវបានសុំ អោយធ្វើជាសាក្សីអំពីនីតិវិធីដែលខ្លួនបានដឹងរឿងជាពិសេសចំពោះបទឧក្រិដ្ឋ ។

**៤.២. បណ្តឹងបើកផ្លូវតវ៉ា**

សេចក្តីសម្រេចនានារបស់ចៅក្រមព្រហ្មទណ្ឌ ក៏ដូចជាសេចក្តីសម្រេចរបស់ចៅក្រមរដ្ឋប្បវេណីអាចមាន

កំហុសអង្គហេតុ ឬអង្គច្បាប់។ ហេតុដូចនេះហើយបានជា ភាគីទាំងអស់មានសិទ្ធិសុំអោយ**ជំនុំជំរះរឿងក្តីសារជាថ្មី**។

នីតិវិធីដែលភាគីនីមួយៗប្រើប្រាស់ ដើម្បីជំទាស់នឹងសេចក្តីសម្រេចដែល ចេញដោយចៅក្រម នោះហៅថា **បណ្តឹងបើកផ្លូវតវ៉ា**។ តាមន័យនេះ បណ្តឹងនេះមានលក្ខណៈជាសណ្តាប់ សាធារណៈ ប្រសិនបើភាគីនីមួយៗមិនមាន កាតព្វកិច្ចធ្វើបណ្តឹងនេះទេហើយក៏មិនអាចលះបង់សិទ្ធិធ្វើបណ្តឹងនេះ ជាមុនដែរ។

ជាទូទៅ គេបែងចែកបណ្តឹងបើកផ្លូវតវ៉ានេះជាពីរប្រភេទ :

**-បណ្តឹងបើកផ្លូវតវ៉ាសាមញ្ញ**

បណ្តឹងបើកផ្លូវតវ៉ាសាមញ្ញ មានគោលបំណងអោយគេធ្វើការត្រួតពិនិត្យសំនុំរឿងសារជាថ្មី ហើយវាគឺជាសិទ្ធិពេញច្បាប់របស់អ្នកដែលមានផលប្រយោជន៍ក្នុងរឿងក្តី។ **បណ្តឹងបើកផ្លូវតវ៉ា**សាមញ្ញ រួមមាន :

-បណ្តឹងជំទាស់ (ក្នុងករណីសាលក្រមកំបាំងមុខ)

-បណ្តឹងឧទ្ធរណ៍

**-បណ្តឹងបើកផ្លូវតវ៉ាវិសាមញ្ញ**

បណ្តឹងបើកផ្លូវតវ៉ាវិសាមញ្ញ មានគោលបំណងអោយគេជំនុំជំរះភាពប្រក្រតីនៃសេចក្តីសម្រេច ដែលត្រូវជំទាស់ ហើយអាចធ្វើបានតែក្នុងករណីមានច្បាប់ចែងតែប៉ុណ្ណោះ។ បណ្តឹង បើកផ្លូវតវ៉ាវិសាមញ្ញ រួមមាន :

-បណ្តឹងសារទុក្ខ (ត្រូវបើកចំពោះគ្រប់ភាគីទាំងអស់ដែលមានវត្តមានក្នុងរឿងក្តី)។

-បណ្តឹងសុំសើរើរឿងក្តី(តាមការស្នើសុំរបស់ទណ្ឌិត ឬសិទ្ធិវន្ត ឬរដ្ឋមន្ត្រីក្រសួងយុត្តិធម៌)។

ក្នុងរឿងក្តីព្រហ្មទណ្ឌ ការស៊ើបអង្កេតរបស់នគរបាលយុត្តិធម៌គឺជាដំណាក់កាលដ៏សំខាន់ និងជាចំណុចចាប់ផ្តើម ។ **សំខាន់** ព្រោះការស៊ើបអង្កេតនេះមានទិសដៅជាការស្រាវជ្រាវដំបូងដែលត្រូវធ្វើឡើងភ្លាមៗបន្ទាប់ ពីរកឃើញបទល្មើស រួចឈានទៅប្រមូលភស្តុតាង ។

**ជាចំណុចចាប់ផ្តើម** ព្រោះការស្រាវជ្រាវនេះកើតឡើង មុនការធ្វើបណ្តឹងអាជ្ញា ហើយការស៊ើបអង្កេតនេះមិនប្រាដកជាត្រូវនាំទៅដល់ការធ្វើបណ្តឹងអាជ្ញានោះឡើយ ។ ទើបការស៊ើបអង្កេតនេះជា ដំណាក់កាលដែលធ្វើឡើយដោយនគរបាល នៅក្នុងរឿងក្តីព្រហ្មទណ្ឌ ។

ក្រមនីតិវិធីព្រហ្មទណ្ឌត្រង់គន្ថី ៣ ដែលមានចំណងជើងថា "ការស៊ើបអង្កេត" មានមាតិកាសំខាន់ពីរគឺ : "**ការស៊ើបអង្កេតបទល្មើសជាក់ស្តែង** ( មាត្រា ៨៥ ដល់១១០ នៃក្រមនីតិវិធីព្រហ្មទណ្ឌ) និង "**ការស៊ើបអង្កេតបឋម**" ( មាត្រា ១១១ ដល់១១៨ នៃក្រមនីតិវិធីព្រហ្មទណ្ឌ) ។

ការបែងចែកនេះមានគោលបំណងផ្តល់អំណាចអោយបានច្រើនដល់មន្ត្រីនគរបាលយុត្តិធម៌ក្នុងការស៊ើបអង្កេតករណីបទល្មើសជាក់ស្តែង ។ ព្រោះថានៅក្នុងករណីបទល្មើសជាក់ស្តែង គឺជាការសំខាន់ណាស់ដែលត្រូវធ្វើសកម្មភាពភ្លាមៗ ដើម្បីប្រមូលភស្តុតាងនៃបទល្មើសមុនពេលដែលវាបាត់បង់ ។

**ដីកាចាត់អោយស៊ើបសួរជំនួស** ដែលជាក្របខ័ណ្ឌតតិយត្តិទី៣ ត្រូវបានបញ្ជាក់ក្នុងគន្ថីទី ៤ ដែលមានចំណងជើងថា : " ការស៊ើបសួរ » ។

**<u>១.វិធានរួមសម្រាប់ក្របខ័ណ្ឌតតិយត្តិ</u>**

ការស៊ើបអង្កេតនគរបាលយុត្តិធម៌ ផ្តល់អោយអ្នកស៊ើបអង្កេតនូវអំណាចយ៉ាងធំ និងរឹតតែរឹងមាំថែមទៀតដោយសារលក្ខណៈសំងាត់ និងជាលាយលក្ស័អក្សរ ប៉ុន្តែត្រូវថយចុះវិញដោយសារការគោរពការសច្ចធារណ៍ និរទោស ។

**<u>១.១ លក្ខណៈសំងាត់ :</u>**

លក្ខណៈសំងាត់នេះមានចែងនៅមាត្រា ៨៣ នៃក្រមនីតិវិធីព្រហ្មទណ្ឌ : ជនទាំងឡាយដែលបានចូលរួមក្នុងនីតិវិធីត្រូវតែរក្សាការ**សំងាត់វិជ្ជាជីវៈ** ។ ការរក្សាសំងាត់នេះក៏កើតមានផងដែរនៅក្នុងដំណាក់កាលនៃការស៊ើបសួរ ( មាត្រា១២១ នៃក្រមនីតិវិធីព្រហ្មទណ្ឌ) និងដំណាក់កាលនៃការអនុវត្តនដីការចាត់អោយស៊ើបសួរជំនួស ។

មន្ត្រី និងភ្នាក់ងារនគរបាលយុត្តិធម៌ត្រូវតែចងចាំក្នុងចិត្តថា ក្នុងករណីរំលោភការសំងាត់វិជ្ជាជីវៈ ខ្លួនអាចនឹងទទួលទណ្ឌកម្មរដ្ឋបាល និងព្រហ្មទណ្ឌ ។

**១.២ លក្ខណៈជាលាយលក្ខណ៍អក្សរ :**

រាល់កិច្ចស៊ើបអង្កេត ដែលត្រូវបានបំពេញដោយអ្នកស៊ើបអង្កេតនៃនគរបាលយុត្តិធម៌ នាំទៅដល់ការសរសេរ**កំណត់ហេតុ ឬរបាយការណ៍ ។** តាមរយៈឯកសារទាំងនេះហើយដែលគេអាចកំនត់ថាអំពើនេះជាបទល្មើស ក្រោយពីទទួលបានចម្លើយ និងលទ្ធផលនៃប្រតិបត្តិការដែល ត្រូវកត់ត្រាក្នុងឯកសារនេះដែរ ដើម្បីគ្រប់គ្រង ភស្តុតាង ឬដើម្បីគោលបំណងណាមួយផ្សេងទៀត ( ឧទាហរណ៍ ការឃាត់ខ្លួនបុគ្គលម្នាក់) ។

កិច្ចទាំងនេះត្រូវគោរពវិធានដ៏តឹងរឹងដែលមានចែងក្នុងក្រមនីតិវិធីព្រហ្មទណ្ឌ ។ កិច្ចមួយចំនួនអាចត្រូវបានចាត់ទុកជាមោឃៈ បើសិនជាវាមិនគោរពតាមទម្រង់ដែល តម្រូវដោយច្បាប់ ( ឧទាហរណ៍ ការឆែកឆេរដោយមិនគោរពម៉ោងពេលដែលច្បាប់បានចែង) ។

**១.៣-ការគោរពសច្ចធារនិរទោស :**

ការគោរពនេះស្តែងឡើងតាមរយៈការប្រគល់**សិទ្ធ**អោយ**ជនត្រូវចោទប្រកាន់** មានដូចជា ការគោរពម៉ោងពេលចែងដោយច្បាប់ រយៈពេលកំណត់នៃការឃាត់ខ្លួន វត្តមានមេធាវី... ។

## **២.ការស៊ើបអង្កេតបទល្មើសជាក់ស្តែង**

**២.១ លក្ខណៈទូទៅ**

អំណាចដ៏ធំត្រូវបានប្រគល់ឱ្យមន្ត្រីនគរបាលយុត្តិធម៌ ក្នុងបទឧក្រិដ្ឋ ឬបទមជ្ឈិមជាក់ស្តែងដោយសំអាងលើ**ភាពបន្ទាន់នៃការធ្វើសកម្មភាព** ដើម្បីបញ្ចប់ភាពវឹកវរដល់សណ្តាប់ធ្នាប់សាធារណៈ ប្រមូលភស្តុតាងដែលបន្សល់ទុកនៅទីកន្លែងប្រព្រឹត្តបទល្មើស និងចាប់ខ្លួនចារីសន្ទត ។

ភាពបន្ទាន់នេះនៅតែមាន កាលណាបទល្មើសមួយដែលត្រូវបានប្រព្រឹត្តរួចហើយ តែបន្តស្តែងចេញតាមរយៈធាតុសំខាន់ៗ ដូចជា ការស្រែកដេញចាប់របស់សាធារណជន ការរកឃើញវត្ថុដែលត្រូវបានលួច ស្លាកស្នាម ឬតំរុយណាមួយ ។

**២.២. ករណីផ្សេងៗនៃបទល្មើសជាក់ស្តែង**

មាត្រា ៨៦ នៃក្រមនីតិវិធីព្រហ្មទណ្ឌរៀបរាប់ពី**ករណីផ្សេងៗនៃបទល្មើសជាក់ស្តែង**ដែលមន្ត្រីនគរបាល

យុត្តិធមិអាចធ្វើការស៊ើបអង្កេតបាន។

" បទឧក្រិដ្ឋ ឬបទមជ្ឈិមជាក់ស្តែងគឺ :

-បទល្មើសដែល**កំពុងប្រព្រឹត្ត**

-បទល្មើសដែល**ទើបប្រព្រឹត្ត រួចភ្លាម**

ត្រូវចាត់ទុកថា ជាបទឧក្រិដ្ឋ ឬបទមជ្ឈិមជាក់ស្តែងដែរ កាលណានៅក្រោយពេលមានបទល្មើសរួចបន្តិចមកៈ

-ជនដែលគេសង្ស័យត្រូវបាន**សាធារណៈជនស្រែកដេញប្រដាប់ចាប់ប្រកឹង**

-បុគ្គលដែលត្រូវគេរកឃើញ**មានវត្ថុ** ឬមានស្លាកស្នាម ឬតម្រុយច្បាស់លាស់ ហើយស៊ីសង្វាក់ផ្សេងទៀត ដែលនាំអោយគេសន្និដ្ឋានបានថាបុគ្គលនោះ បានប្រព្រឹត្ត ឬបានចូលរួមប្រព្រឹត្តបទល្មើស » ។

ម្យ៉ាងទៀត មាត្រា ៨៨ នៃក្រមនីតិវិធីព្រហ្មទណ្ឌ បានចែងថាៈ

"**ត្រូវបានចាត់ទុកដូចជា**បទឧក្រិដ្ឋ ឬបទមជ្ឈិមជាក់ស្តែងផងដែរ បើទោះបីជា ស្ថិតនៅក្រៅពីករណីដែលមានចែងក្នុងមាត្រា ៨៦ (និយមន័យបទឧក្រិដ្ឋ ឬបទមជ្ឈិមជាក់ស្តែង) ខាងលើនេះក៏ដោយគ្រប់បទឧក្រិដ្ឋ ឬបទមជ្ឈិមទាំងឡាយណាដែលត្រូវបានប្រព្រឹត្តនៅក្នុងទីកន្លែងដែលអ្នក កាន់កាប់នៅទីនោះសុំអោយព្រះរាជអាជ្ញា ឬមន្ត្រីនគរបាលយុត្តិធមិចូលមកពិនិត្យ ឬ ភ្នាក់ងារនគរបាល យុត្តិធមិ ក្នុងករណីដែលគ្មានមន្ត្រីនគរបាលយុត្តិធមិនៅទីកន្លែងនោះ ។ក្នុងករណីចុងក្រោយនេះ ភ្នាក់ងារនគរបាលយុត្តិធមិ ត្រូវរាយការណ៍ជាបន្ទាន់ជូនមន្ត្រី នគរបាលយុត្តិធមិ ។»

យើងនឹងវិភាគឱ្យបានកាន់តែស៊ីជម្រៅនូវករណីផ្សេងៗ នៃបទល្មើសជាក់ស្តែង :

**បទល្មើសដែលកំពុងប្រព្រឹត្តៈ** គឺប្រាកដជានៅក្នុងសម្មតិកម្មដែលបទឧក្រិដ្ឋ ឬបទមជ្ឈិមកំពុងត្រូវបានប្រព្រឹត្តិ។ ចោរីកំពុងប្រព្រឹត្តបទល្មើសសកម្ម ឬអកម្ម។ ការប្រព្រឹត្តិបទល្មើសសកម្មអាចត្រូវបានមើលឃើញដោយផ្ទាល់ ។

ឧទាហរណ៍ ចោរីត្រូវបានគេមើលឃើញកំពុងបន្លំយករបស់អ្នកដទៃ ។

ដូច្នេះ នេះវាជា**បទល្មើសជាក់ស្តែងមិនអាចប្រកែកបាន** (នគរបាលមានវត្តមានដោយផ្ទាល់នៅពេលកំពុងប្រព្រឹត្តអំពើដែលចោទប្រកាន់) ដែលអនុញ្ញាតឱ្យបើកភ្លាមនូវការស៊ើបអង្កេតបទល្មើសជាក់ស្តែងដែលជាទូទៅមានលក្ខណៈសំគាល់ត្រង់ថាចោរីត្រូវបានគេចាប់ខ្លួនបានភ្លាមៗ ។

ប៉ុន្តែ ការប្រព្រឹត្តបទល្មើសនេះក៏អាចត្រូវរកត់សម្គាល់ ដោយសារការមើលឃើញតម្រុយដែលអាចឱ្យគេជឿបាន**ថាមានបទល្មើសកើតឡើង**។ ពីព្រោះថា មានបទល្មើសជាច្រើនដែលនៅពេលកំពុង ប្រព្រឹត្តមិនអាចលេចចេញសកម្មភាពល្មើសភ្លាមៗនោះទេ (ឧទាហរណ៍ : ការកាន់កាប់អាវុធខុសច្បាប់ ការកាន់កាប់គ្រឿងញៀន...)។ ស្ថានភាពជាក់ស្តែងលេចឡើង ហើយការស៊ើបអង្កេតករណីជាក់ស្តែងអាចត្រូវបានអនុវត្តលុះត្រាតែ មានតម្រុយស៊ីសង្វាក់នឹងចរិតលក្ខណៈនៃបទមជ្ឈិម។

តម្រុយនេះអាចជាធាតុសម្ភារៈ ដែលមានដូចជាវត្តមានអាវុធដែលមើលឃើញក្នុងប្រអប់ដាក់ស្រោមដៃបែកបាក់ ក្នុងយានជំនិះមួយដែលជួបគ្រោះថ្នាក់។ ការទទួលបានតំរុយនេះត្រូវតែស្របច្បាប់។

គឺជា**បទល្មើសលាក់កំបាំង** ដូចជាបទល្មើសប្រព្រឹត្តក្នុងកន្លែងបិទជិតដែលមន្ត្រីនគរបាលយុត្តិធម៌ ឬភ្នាក់ងារនគរបាលយុត្តិធម៌មិនអាចចូលបាន ដែលធ្វើឱ្យតម្រុយសត្យានុម័តមិនអាចត្រូវបានមើលឃើញ (ឧទាហរណ៍ : មន្ទីរពិសោធន៍សម្ងួត ឬផលិតគ្រឿងញៀន)។ ជាបឋមគាត់ត្រូវធ្វើការស៊ើបអង្កេតបឋមដើម្បី ស្វែងរកតម្រុយសត្យានុម័តដែលអនុញ្ញាតឱ្យគេបើកការស៊ើបអង្កេតជាក់ស្តែង ឬបើកការស៊ើបសួរ។ ដូចនេះ ក្នុងករណីជួញដូរគ្រឿងញៀន និងក្នុងក្របខណ្ឌស៊ើបអង្កេតជាក់ស្តែង មន្ត្រីនគរបាលយុត្តិធម៌អាចធ្វើការឆែកឆេរក្នុងមន្ទីរពិសោធន៍ខុសច្បាប់ បន្ទាប់ពីប្រមូលបានតម្រុយស៊ីសង្វាក់ទៅនឹងចរិតលក្ខណៈនៃបទមជ្ឈិមក្នុងពេលតាមដាន។

ដូច្នេះ ក្នុងករណីគ្មានតម្រុយ ការសង្ស័យ ឬបណ្តឹងបរិហារអនាមិកណាមួយ ដែលខុសពី លក្ខខ័ណ្ឌដែលមានចែងនៅក្នុងមាត្រា ៨៦ នៃក្រមនីតិវិធីព្រហ្មទណ្ឌ ត្រូវចាត់ទុកថា មិនបានការ។ ផ្ទុយទៅវិញ បណ្តឹងបរិហាររបស់ជនរងគ្រោះ គឺជាតម្រុយមួយដ៏សំខាន់ និងជាក់លាក់។

**បទល្មើសដែលទើបនឹងត្រូវបានប្រព្រឹត្ត រួចភ្លាម :** ការលំបាកកើតឡើងនៅពេលដែលក្រមនេះចែងពីសញ្ញាណនៃការគិតរយៈវេលាចន្លោះពេលប្រព្រឹត្តបទល្មើស និងពេលរកឃើញបទល្មើសតែមិនបានបញ្ជាក់ថារយៈពេលនេះមានថេរវេលាប៉ុន្មាននោះឡើយ ។ ដូចនេះ អាចមានរយៈពេល ២៤ ម៉ោង តុលាការកំពូលជាអ្នកកំណត់លើចំណុចនេះ។ ពាក្យបណ្តឹង ឬការត្រួតពិនិត្យបទល្មើស មិនគួរមានគម្លាតឆ្ងាយ ពីអង្គហេតុពេកនោះទេ ដើម្បីកុំឱ្យបាត់បច្ចុប្បន្នភាពនៃរឿង ហេតុនោះ។

**ជនដែលគេសង្ស័យត្រូវបានសាធារណៈជនស្រែកដេញប្រផាប់ចាប់ប្រកឹងមួយរយៈខ្លីក្រោយការប្រព្រឹត្ត បទល្មើស ៖** ការស្រែកដេញប្រផាប់ចាប់ប្រផឹងដោយសាធារណៈជន អាចត្រូវឱ្យនិយមន័យថាជាការអំពាវនាវបន្ទាន់ ដល់អ្នកជិតខាង ដោយចង្អុលបង្ហាញជនណាម្នាក់ជាចារីដែលធ្វើអោយវឹកវរសណ្តាប់ធ្នាប់សាធារណៈ ។ ហេតុដូចនេះ ការស្រែកដេញប្រផាប់ចាប់ប្រកឹងខុសពីពាក្យចចាមអារ៉ាម និងការប្តឹងបរិហារ ។ ការនេះត្រូវស្តែងឡើងក្នុង រយៈពេលមួយជិតអំពើ ។

គេនឹងជួបប្រទះលក្ខខណ្ឌរយៈវេលាមួយដែលអ្នកគាក់តែងច្បាប់មិនទាន់បានបញ្ជាក់ ហេតុដូចនេះលក្ខខណ្ឌនេះអាស្រ័យលើឥស្សរៈចិត្តរបស់ចៅក្រម ។

**បុគ្គលដែលគេសង្ស័យត្រូវគេរកឃើញមានវត្ថុ ឬមានស្លាកស្នាម ដែលនាំអោយគេសន្និដ្ឋាន បានថាបុគ្គលនោះបានប្រព្រឹត្ត ឬបានចូលរួមប្រព្រឹត្តបទល្មើស ៖** នេះជាករណីដែលជនម្នាក់ ត្រូវបានកត់សម្គាល់ដោយនគរបាល ឬកងរាជអាវុធហត្ថថាបានប្រព្រឹត្តបទល្មើសថ្មីៗ ដោយសារតែតម្រុយ ឬវត្ថុណាមួយ តែមិនបានឃើញការប្រព្រឹត្តបទល្មើសផ្ទាល់ភ្នែកនោះទេ ។ ឧទាហរណ៍ ក្នុងករណីដែលនគរបាល កំពុងតែត្រួតពិនិត្យនៅតាមផ្លូវបានចាប់ក្លិនកញ្ឆាចេញពីយានជំនិះ ។

មាត្រា ៨៨ នៃក្រមនីតិវិធីព្រហ្មទណ្ឌបានបន្ថែមស្ថានភាពជាក់ស្តែងដែលក្នុងក្របខណ្ឌនោះការស៊ើបអង្កេតបែបនេះអាចដាក់ឱ្យដំណើរការបានទោះបីមិនស្ថិតក្នុងករណីណាមួយដែលបានរៀបរាប់ខាងលើក៏ដោយ ។

ព្រោះថា ការស៊ើបអង្កេតបទល្មើសជាក់ស្តែងអាចត្រូវបានធ្វើឡើងចំពោះ បទឧក្រិដ្ឋ ឬមជ្ឈិម កាលណាបទល្មើសនេះត្រូវបានប្រព្រឹត្តក្នុងទីកន្លែងមួយដែលអ្នកកាន់កាប់សុំឱ្យព្រះរាជអាជ្ញា ឬមន្ត្រីនគរបាលយុត្តិធម៌មកត្រួតពិនិត្យ ។ បើពុំមានមន្ត្រីនគរបាលយុត្តិធម៌ទេ ភ្នាក់ងារនគរបាលយុត្តិធម៌អាចអន្តរាគម និងត្រួតពិនិត្យបាន ។ ក្នុងករណីចុងក្រោយនេះ ភ្នាក់ងារនគរបាលយុត្តិធម៌ត្រូវជូនដំណឹងទៅមន្ត្រីនគរបាលយុត្តិធម៌ភ្លាមដើម្បីឱ្យ គាត់បំពេញបេសកកម្មរបស់ខ្លួន ។ ឧទាហរណ៍ ដូចជា**ការអំពាវនាវរបស់ម្ចាស់ផ្ទះ** ប្រាប់ទៅនគរបាល ឬកងរាជអាវុធហត្ថ ឱ្យមកពិនិត្យបទល្មើសព្រហ្មទណ្ឌមួយដែលគេមិនដឹង ថាជាបទល្មើស ជាក់ស្តែងឬទេ ។ ឧទាហរណ៍ អំពើលួចដោយគាស់ទំលុះទំលាយដែលម្ចាស់ផ្ទះ ឬអ្នកកាន់កាប់ទីកន្លែងបាន ដឹងនៅពេលត្រលប់មកផ្ទះវិញ ។ អំពើលួចត្រូវបានប្រព្រឹត្តជាច្រើនថ្ងៃ មុនការត្រួតពិនិត្យ ។ ចំពោះបទល្មើសនេះ ការស្នើសុំរបស់ម្ចាស់ផ្ទះ មានន័យថា ប្រគល់អំណាចពេញលេញអោយមន្ត្រីនគរបាលយុត្តិធម៌ដែលត្រូវប្តឹងមកដោយ

ផ្ទាល់ធ្វើការស៊ើបអង្កេត ជាក់ស្តែង។

ស្ថានភាពជាក់ស្តែងនឹងត្រូវបានសង្កេតឃើញតាមរយៈតម្រុយសត្យានុម័តខាងក្រៅមួយ ឬច្រើន ដែលនាំឱ្យអាចសន្មតអត្ថិភាពនៃស្ថានភាពជាក់ស្តែងនោះ។ មន្ត្រីនគរបាលយុត្តិធម៌ ឬភ្នាក់ងារនគរបាលយុត្តិធម៌នឹងប្រមូល តម្រុយដែលអាចបញ្ជាក់ថាតើបទឧក្រិដ្ឋ ឬបទមជ្ឈិម កំពុងប្រព្រឹត្ត ឬ ទើបនឹងប្រព្រឹត្ត។

**<u>២.៣. លក្ខណៈពិសេសនៃការស៊ើបអង្កេតបទល្មើសជាក់ស្តែង</u>**

**<u>២.៣.១. ប្រភេទនៃបទល្មើស</u>**

មាត្រា ៨៥ នៃក្រមនីតិវិធីព្រហ្មទណ្ឌបានចែងយ៉ាងច្បាស់ពីបទឧក្រិដ្ឋ និងបទមជ្ឈិម។

គេមិនអាចប្រើប្រាស់ក្របខណ្ឌនីតិយុត្តិនេះនៅក្នុងបទលហុទេ។ ដូចនេះ ចាំបាច់ត្រូវកំណត់ចរិតលក្ខណៈបទល្មើសដែលប្រព្រឹត្តជាមុនសិន មុននឹងចាប់ផ្តើមស៊ើបអង្កេត។

**<u>២.៣.២. ថិរវេលានៃការស៊ើបអង្កេតបទល្មើសជាក់ស្តែង</u>**

ថិរវេលានៃការស៊ើបអង្កេតបទល្មើសជាក់ស្តែងត្រូវបានកំណត់ដោយមាត្រា ១០៦ នៃក្រមនីតិវិធីព្រហ្មទណ្ឌ :

"ថិរវេលានៃការស៊ើបអង្កេតបទល្មើសជាក់ស្តែង មិនអាចលើសពី **៧ថ្ងៃ** (ប្រាំពីរ) គិតពីថ្ងៃប្រព្រឹត្តបទល្មើស។ កិច្ចស៊ើបអង្កេតត្រូវប្រព្រឹត្តទៅជាប់ជានិច្ចនៅ ក្នុងថិរវេលានេះ។ ប្រសិនបើ ការស៊ើបអង្កេតមិនបាន បញ្ចប់ក្នុងរយៈពេល ៧ថ្ងៃ (ប្រាំពីរ) ទេនោះ មន្ត្រីនគរបាល យុត្តិធម៌ ត្រូវស្នើសុំយោបល់ទៅព្រះរាជអាជ្ញា។»

ក្រោយពីថិរវេលានេះ ការស៊ើបអង្កេតនឹងត្រូវបានបន្តធ្វើក្នុង ក្របខ័ណ្ឌការស៊ើបអង្កេតបឋម ឬក្នុងក្របខ័ណ្ឌការស៊ើបសួរ។

**<u>២.៣.៣. កិច្ចនានានៃការស៊ើបអង្កេតករណីជាក់ស្តែង</u>**

ទោះបីជាការស៊ើបអង្កេតត្រូវបានធ្វើឡើងក្រោមរូបភាពណាក៏ដោយ បទល្មើសជាក់ស្តែង ការស៊ើបអង្កេតបឋម ឬដីកាចាត់អោយស៊ើបសួរជំនួស កិច្ចស្រាវជ្រាវនានាដែលធ្វើឡើងដោយមន្ត្រីនគរបាល យុត្តិធម៌គឺមានលក្ខណៈដូចគ្នាទាំងអស់។ ទាក់ទងទៅនឹងបទល្មើសជាក់ស្តែង កិច្ចទាំងអស់នេះមានចែងក្នុងមាត្រា ៨៥ ដល់ ១១០ នៃក្រមនីតិវិធីព្រហ្មទណ្ឌ។

ជាទូទៅ មន្ត្រីនគរបាលយុត្តិធម៌មានអំណាចមួយចំនួន ដែលហៅថា អំណាចបង្ខំ ទាក់ទង នឹង :

**ការចាប់ខ្លួន ៖** ក្នុងពេលចាប់ខ្លួនចារីសទ្ទតនៃបទល្មើសជាក់ស្តែង **មានតែកំលាំងចាំបាច់** ប៉ុណ្ណោះ ដែលអាចយកឈ្នះការតបតប្រឆាំងនឹងភ្នាក់ងារកំលាំងសាធារណៈស្របច្បាប់ ។

**ការឆែកឆេរលំនៅដ្ឋាន ៖** អាចធ្វើឡើងមិនមែនតែក្នុងលំនៅដ្ឋានជនជាប់ចោទប៉ុណ្ណោះទេ ប៉ុន្តែក៏អាចធ្វើបានចំពោះ បណ្តាជនដែលទំនងជាបានចូលរួមក្នុងបទឧក្រិដ្ឋ ឬកាន់កាប់វត្ថុតាង ឬតម្រុយទាក់ទងនឹងអំពើដែលចោទប្រកាន់ ។ ការឆែកឆេរត្រូវតែធ្វើឡើងក្នុង **ម៉ោងស្របច្បាប់** (ម៉ោង ៦ ព្រឹក ដល់ ម៉ោង ១៨ ល្ងាច) លើកលែងតែក្នុងករណីចែងក្នុងមាត្រា ៩១ នៃក្រមនីតិវិធីព្រហ្មទណ្ឌ ។ ប្រតិបត្តិការនេះអនុញ្ញាតឱ្យគេធ្វើលទ្ធកម្មភស្តុតាង តាមរយៈ**ការរឹបអូស**ក្រដាសឯកសារ ឬវត្ថុផ្សេងទៀតរបស់បណ្តាជនដែលទំនងជាបានចូលរួម ក្នុងបទឧក្រិដ្ឋ ឬបទមជ្ឈិមនោះ ឬអនុញ្ញាតឱ្យកាន់កាប់វត្ថុតាង ឬតម្រុយទាក់ទងនឹង អំពើដែលចោទប្រកាន់ និង មានប្រយោជន៍ដើម្បីបង្ហាញការពិត ។ វត្ថុទាំងនេះត្រូវចុះបញ្ជីសារពើភ័ណ្ឌភ្លាម ហើយ**បិទស្លាកបោះត្រា** ។ ទាក់ទងនឹង ការឆែកឆេររថយន្ត ការអនុវត្តតែងតែជំរុញឱ្យមន្ត្រីនគរបាលយុត្តិធម៌ សរសេរកំណត់ហេតុឆែកឆេរ យានជំនិះ ក្នុងលក្ខខណ្ឌច្បាប់ដូចគ្នាទៅនឹងការឆែកឆេរលំនៅដ្ឋានដែរ ទោះបីយានជំនិះមិនត្រូវបានចាត់ទុកជា លំនៅដ្ឋាន ក៏ដោយ ។

**ការឃាត់ខ្លួន ៖** ដោយសារភាពចាំបាច់នៃការស៊ើបអង្កេតមាត្រា ៩៦ នៃក្រមនីតិវិធីព្រហ្មទណ្ឌ អនុញ្ញាតឱ្យមន្ត្រីនគរបាលយុត្តិធម៌ធ្វើការឃាត់ខ្លួនមិនត្រឹមតែ**ជនសង្ស័យ**ប៉ុណ្ណោះទេ ថែមទាំង**ជនគ្រប់រូប**ដែលអាចផ្តល់ព័ត៌មានទាក់ទងនឹងអង្គហេតុ ឬវត្ថុដែលត្រូវបានរឹបអូស តែប្រកែក**មិនព្រមផ្តល់ព័ត៌មាន** (ក្នុងករណីនេះមន្ត្រីនគរបាលយុត្តិធម៌ត្រូវសុំការអនុញ្ញាតជាលាយលក្ខអក្សរពីព្រះរាជអាជ្ញាជាមុនសិន) ។

ការឃាត់ខ្លួន មានថិរវេលាអតិបរមា ៤៨ ម៉ោង ហើយអាចពន្យារបានម្តងទៀត ក្នុងថិរវេលាដែលមិនលើសពី ២៤ ម៉ោង ។

**ការឆែកឆេររាងកាយ ៖** មិនមែនជាប្រតិបត្តិការត្រួតពិនិត្យរដ្ឋបាលធម្មតានោះទេ ព្រោះថា ការឆែកឆេររាងកាយប្រៀបដូចជាការឆែកឆេរលំនៅដ្ឋានដូច្នោះដែរ ។ ដូចនេះ ការឆែកឆេររាងកាយ ខុសប្លែកពីការស្ទាបសុវត្ថិភាពដែលអនុវត្តដោយភ្នាក់ងារ នៅក្នុងករណីដែលមានការសង្ស័យថាមានការលាក់អាវុធ ឬវត្ថុគ្រោះថ្នាក់

ប៉ុន្តែ មិនអាចត្រូវធ្វើឡើងដើម្បីស្វែងរកបទល្មើសជាក់ស្តែងមួយដែលពុំមានលេចចេញតំរុយខាងក្រៅសោះនោះឡើយ ។ ការឆែកឆេររាងកាយត្រូវតែធ្វើឡើងដោយបុគ្គលម្នាក់ដែលមានភេទដូចគ្នា នឹងជន

សង្ស័យ។ នេះជា គោលការណ៍ដែលមិនអនុញ្ញាតឱ្យធ្វើការឆែកឆេររាងកាយស្ត្រីម្នាក់ ដោយមន្ត្រីនគរបាលយុត្តិធម៌ភេទប្រុស។ បុគ្គលត្រូវឆែកឆេរអាចត្រូវបានសំរាតខោអាវ ក្នុងទីកន្លែងបិទជិតក្នុងបំណងរក្សាកេរ្តិ៍ខ្មាសបុគ្គលនោះ និងដើម្បី ពិនិត្យសំលៀកបំពាក់ និង (ឬ) ស្វែងរកស្លាកស្នាម របួសផ្សេងៗលើរាងកាយ ឧទាហរណ៍ របួសដោយសារការប្រយុទ្ធគ្នា។ ការឆែកឆេរក្នុងទីជម្រៅ គឺជាការពិនិត្យរន្ធធម្មជាតិនៃរាងកាយដែលត្រូវ បានធ្វើឡើងជាអាទិ៍ ក្នុងករណីស្វែងរកគ្រឿងញៀន គឺជាសមត្ថកិច្ចរបស់វេជ្ជបណ្ឌិតដែលត្រូវបានអនុញ្ញាត ដោយមាត្រា ៩៥ នៃក្រមនីតិវិធីព្រហ្មទណ្ឌ។

**សេចក្តីសន្និដ្ឋានអ្នកជំនាញការ** (កុំច្រឡំជាមួយសេចក្តីសន្និដ្ឋានអ្នកជំនាញ ដែលមិនមែនជាសមត្ថកិច្ចរបស់មន្ត្រីនគរបាលយុត្តិធម៌ ប៉ុន្តែជារបស់ចៅក្រមស៊ើបសួរ) :

ក្នុងនីតិវិធី កិច្ចស៊ើបអង្កេតទាំងអស់មិនមែនតែងតែបំពេញតាមមាត្រា៨៩ និងបន្តបន្ទាប់នៃក្រមនីតិវិធីព្រហ្មទណ្ឌទាំងអស់នោះទេ : ភាពខុសគ្នាពីអង្គហេតុមួយ ទៅអង្គហេតុមួយ ធ្វើអោយការស៊ើបអង្កេតមិនអាចធ្វើទៅតាមលំដាប់លំដោយ។ ជានិច្ចកាល ការធ្វើដំណើរទៅកាន់ទីកន្លែងកើតហេតុគឺជាកិច្ចការដំបូង ប៉ុន្តែ ក្នុងករណីផ្សេងទៀតការចាប់ខ្លួនចារីសន្ទុត គឺជាកិច្ចការដំបូងនៃការស៊ើបអង្កេត។ ភាពបន្ទាន់អាចតម្រូវឱ្យគេធ្វើការឆែកឆេរ មុននឹងសរសេរកំណត់ហេតុពាក្យបណ្តឹង។

## ៣.ការស៊ើបអង្កេតបឋម

បើសិនគ្មានកិច្ចស៊ើបអង្កេតបឋមទេនោះ លទ្ធភាពនៃការស៊ើបអង្កេតទំនងជាមានកម្រិត។ ពីព្រោះថាមន្ត្រីនគរ បាលយុត្តិធម៌ដែលបានដឹងពីរឿងហេតុមួយដែលមិនមែនជាបទឧក្រិដ្ឋ ឬបទមជ្ឈិម ជាក់ស្តែងត្រូវតែជូនដំណឹង ទៅព្រះរាជអាជ្ញាភ្លាម។ ព្រះរាជអាជ្ញាទាមទារឱ្យបើកការស៊ើបសួរមួយ (ដែលនាំទៅដល់ការចេញដីកាចាត់អោយ ស៊ើបសួរជំនួស) ឬចេញដីកាដំកល់សំនុំរឿងទុកមិនចាត់ការ អាស្រ័យតាមភាពធ្ងន់ធ្ងរនៃបទល្មើស។

កើតចេញអំពីការអនុវត្តដែលទទួលស្គាល់ដោយទំលាប់ និងយុត្តិសាស្ត្រ ការស៊ើបអង្កេតបឋមមានតាំងពីច្បាប់នីតិវិធីព្រហ្មទណ្ឌឆ្នាំ ១៩៩៣ មកម្លេះ ប៉ុន្តែអត្ថបទច្បាប់នេះមិនបានកំណត់ពីនិយមន័យនៃការស៊ើបអង្កេត អំណាច និងកាតព្វកិច្ចដែលជាប់ទាក់ទងនឹងការស៊ើបអង្កេតនេះទេ។

កាលពីមុនដើម្បីជៀសវាងកុំឱ្យមន្ទីរស៊ើបសួរទទួលបន្ទុកច្រើនពេក អយ្យការយល់ឃើញថា មុននឹងជូន

ដំណឹងទៅចៅក្រមស៊ើបសួរ ខ្លួនចាំបាច់ត្រូវស៊ើបដំណឹងឱ្យបានទំលំទូលាយជាមុនសិន ហើយបញ្ជាឱ្យមន្ត្រីនគរបាល យុត្តិធម៌ដឹកនាំ**ការស៊ើបអង្កេតបឋម**។

ដូចនេះ ការស៊ើបអង្កេតដែលដឹកនាំដោយមន្ត្រីនគរបាលយុត្តិធម៌ក្រោមការផ្តួចផ្តើមផ្ទាល់ខ្លួន ឬតាមរយៈសេចក្តីណែនាំរបស់ព្រះរាជអាជ្ញានោះ ត្រូវបានប្រើប្រាស់យ៉ាងទំលំទូលាយក្រោមអំណាចច្បាប់ចុះថ្ងៃ ទី៨ ខែមីនា ឆ្នាំ ១៩៩៣។

នគរបាលដែលប្រើប្រាស់របៀបស៊ើបអង្កេតនេះមិនអាចប្រើកំលាំងបានឡើយ ប៉ុន្តែគាត់អាច :

-ធ្វើកំណត់ហេតុត្រួតពិនិត្យទីកន្លែង

-ស្តាប់ចម្លើយសាក្សី ប៉ុន្តែគ្មានសិទ្ធិឃាត់ខ្លួនសាក្សីតាមផ្លូវច្បាប់ឡើយ

ប៉ុន្តែ ការអនុវត្តនេះពុំមានមូលដ្ឋានគតិយុត្តិច្បាស់លាស់នោះទេ។ ក្រមនីតិវិធីព្រហ្មទណ្ឌថ្មីបានបំពេញនូវចន្លោះនេះដោយបានចែងអំពីការស៊ើបអង្កេតបឋមក្នុងមាតិកា ២នៃគន្ថីទី៣។

## ៣.១. និយមន័យ

នីតិនិទ្ទេស**មិនបានឱ្យនិយមន័យ**ការស៊ើបអង្កេតបឋមឡើយ។ ភាពបទបែនដ៏ខ្លាំងនៃការ ស៊ើបអង្កេតនេះធ្វើឱ្យគេអាចនិយាយបានថា ការស៊ើបអង្កេតបឋម គឺជានីតិវិធីនីតិរូម ដែលប្រើប្រាស់ដោយមន្ត្រីនគរបាលយុត្តិធម៌ នៅក្នុងករណីដែលគាត់មិនអាច ឬមិនចង់ប្រើប្រាស់នីតិវិធីស៊ើបអង្កេតករណីជាក់ស្តែង និងក្នុងករណីដែលគាត់មិន ត្រូវបានចាត់ឱ្យស៊ើបសួរជំនួស។

បទល្មើសទាំងអស់អាចជាកម្មវត្ថុនៃនីតិវិធីទាក់ទងនឹងរបៀបស៊ើបអង្កេតបឋម លើកលែងតែករណីដែលបទល្មើសទាំងនោះតម្រូវអោយមានការបើកការស៊ើបអង្កេតតុលាការ ដឹកនាំដោយចៅក្រមស៊ើបសួរ។

ការស៊ើបអង្កេតបឋម គឺជានីតិវិធីមួយដែលមានទម្រង់សមញ្ញ ប៉ុន្តែផ្តល់ឱ្យអ្នកស៊ើប អង្កេតនូវអំណាចមួយដែលមានកម្រិត។

## ៣.២. អំណាចនគរបាលយុត្តិធម៌ក្នុងការស៊ើបអង្កេតបឋម

### ៣.២.១ កម្រិតនៃគំនិតផ្តួចផ្តើមរបស់នគរបាលយុត្តិធម៌

គំនិតផ្តួចផ្តើមមានចែងជាចំបងក្នុងមាត្រា ១១១ នៃក្រមនីតិវិធីព្រហ្មទណ្ឌ :

"កាលណាបានដឹងពីអំពើដែលអាចជាបទឧក្រិដ្ឋ ឬបទមជ្ឈិម ឬបទលហុ មន្ត្រីនគរបាលយុត្តិធម៌អាច

ធ្វើការស៊ើបអង្កេតបឋមដោយឯកឯង ឬតាមការសុំរបស់ព្រះរាជអាជ្ញា» ។

គួរកត់សម្គាល់ថានគរបាលអាចសម្រេចស៊ើបអង្កេតតាមទម្រង់នៃការស៊ើបអង្កេតបឋមជានិច្ច ទោះបីជាលក្ខខណ្ឌអនុវត្តនីតិវិធីស៊ើបអង្កេតបទល្មើសជាក់ស្តែងត្រូវបានបំពេញក៏ដោយ។ ប៉ុន្តែ ការសម្រេចនេះមានឥទ្ធិពល ដកហូតពី នគរបាលនូវអំណាចដែលអនុវត្តបានក្នុងការស៊ើបអង្កេតជាក់ស្តែង (ការបង្ខំ) ។ ប្រការនេះអាចរារាំង នគរបាលមិន ឱ្យធ្វើសកម្មភាពប្រកបដោយប្រសិទ្ធិភាពអតិបរមា។ ក្នុងករណីបទល្មើសជាក់ស្តែងដែលមើល ឃើញច្បាស់ការ ជ្រើសរើសយកការស៊ើបអង្កេតបឋមធ្វើឱ្យគេមិនអាចវិលទៅរកនីតិវិធីស៊ើបអង្កេតបទល្មើស ជាក់ស្តែងវិញបានឡើយ ។

**ក្នុងករណីបទល្មើសប្រាកដ :** (ដែលភាពសត្យានុម័តរបស់បទល្មើសត្រូវបានមើលឃើញយ៉ាងច្បាស់) អ្នកស៊ើបអង្កេតអាចធ្វើការស៊ើបអង្កេតរបស់ខ្លួន :

-តាមរបៀបស៊ើបអង្កេតបទល្មើសជាក់ស្តែង (ប្រសិនបើធាតុដែលខ្លួនមានស្តែងឱ្យឃើញនូវករណីដូចមាន ចែងក្នុងមាត្រា ៨៦ និងបន្តបន្ទាប់នៃក្រមនីតិវិធីព្រហ្មទណ្ឌ)

-តាមរបៀបស៊ើបអង្កេតបឋម ប្រសិនបើរយៈពេលនៃភាពជាក់ស្តែងបានកន្លងហួស

-តាមរបៀបស៊ើបអង្កេតបឋម ប្រសិនបើអ្នកស៊ើបអង្កេតជ្រើសរើសយកការស៊ើបអង្កេតបឋមហើយមិន អាចវិលមករកការស៊ើបអង្កេតករណីជាក់ស្តែងបានឡើយ ។

**ក្នុងករណីបទល្មើសសន្មត** (ដែលភាពសត្យានុម័តរបស់បទល្មើសមិនត្រូវបានរកឃើញ) អ្នកស៊ើបអង្កេតត្រូវ :

-ធ្វើដំណើរការតាមរបៀបស៊ើបអង្កេតបឋម

-ដាយថាហេតុ ធ្វើសកម្មភាព ក្នុងក្របខ័ណ្ឌនៃបេសកកម្មនគរបាលរដ្ឋបាល របៀបជាការបង្ការ ដើម្បីប្រមូលយកធាតុសម្រាប់រកភាពសត្យានុម័តនៃបទល្មើស (ការឃ្លាំមើល ការតាមដាន ការស្វែងរកសាលាកប័ត្រ ។ល។ ប៉ុន្តែ មិនអាចធ្វើកិច្ចបង្ខំរាងកាយបានឡើយ ទោះបីជាមានការយល់ព្រមក៏ដោយ ) និង :

-បើសិនជាធាតុសត្យានុម័តនៃបទល្មើសស្តែងឡើងដោយថាហេតុ ក្នុងថិរវេលានៃភាពជាក់ស្តែងត្រូវអនុវត្តតាមរបៀបស៊ើបអង្កេតនៃមាត្រា ៨៥ និងបន្តបន្ទាប់នៃក្រមនីតិវិធីព្រហ្មទណ្ឌ។

-អនុវត្តតាមទម្រង់នៃការស៊ើបអង្កេតបឋម បើសិនជាបទល្មើសកើតឡើងមិនត្រូវបានចាត់ទុកជាករណី

បទល្មើសជាក់ស្តែង។

## ៣.២.២ អវត្តមាននៃអំណាចបង្ខិតបង្ខំ

កិច្ចទាំងអស់ត្រូវផ្អែកលើគោលការណ៍ **នៃការយល់ព្រមដោយស្ងាត់ស្ងៀម** ពីអ្នកដែលជាប់ពាក់ព័ន្ធនឹងការស៊ើបអង្កេត។ ដូចនេះ រាល់កិច្ចនានាដែលមានចរិតលក្ខណៈបង្ខិតបង្ខំក្នុងក្របខណ្ឌស៊ើបអង្កេតបទល្មើសជាក់ស្តែង ត្រូវធ្វើឡើងតែក្នុងករណីចាំបាច់បំផុត ក្នុងក្របខណ្ឌស៊ើបអង្កេតបឋម។

**ការឆែកឆេរលំនៅដ្ឋាន និងការឆែកឆេររាងកាយ**

សម្រាប់មន្ត្រីនគរបាលយុត្តិធម៌ លទ្ធភាពធ្វើការឆែកឆេរ ការទស្សនាលំនៅដ្ឋាន និងការរឹបអូសដោយមានជំនួយពីភ្នាក់នគរបាលយុត្តិធម៌ ក្នុងការស៊ើបអង្កេតបឋមមានចែងក្នុងមាត្រា ១១៣ នៃក្រមនីតិវិធីព្រហ្មទណ្ឌ។

ប៉ុន្តែ មន្ត្រីនគរបាលយុត្តិធម៌ត្រូវទទួលបាន**ការយល់ព្រមច្បាស់លាស់ និងពិតប្រាកដ**ពីអ្នកកាន់កាប់ទីកន្លែងជាមុនសិន។

ការយល់ព្រមនេះត្រូវធ្វើឡើងជាលាយលក្ខណ៍អក្សរ និងសរសេរផ្ទាល់ដៃដោយអ្នក កាន់កាប់ទីកន្លែង។ ប្រសិនបើ អ្នកកាន់កាប់ទីកន្លែងមិនចេះអក្សរនោះ ត្រូវសរសេរក្នុងកំណត់ហេតុថាអ្នកកាន់ កាប់ទីកន្លែងនោះមិនចេះអក្សរ ហើយយល់ព្រមឱ្យឆែកឆេរ »។

ក្នុងករណីណាក៏ដោយ ការឆែកឆេរត្រូវធ្វើឡើងនៅចំពោះមុខ**អ្នកកាន់កាប់ទីកន្លែង** ឬបើគ្មានអ្នកកាន់កាប់ទីកន្លែងទេ ត្រូវធ្វើនៅចំពោះមុខ**សាក្សីពីរនាក់**ដែលត្រូវចាត់តាំងដោយព្រះរាជអាជ្ញា។ សាក្សីមិនអាចជានគរបាល ឬជាកងរាជអាវុធហត្ថដែលជាកងកម្លាំងចូលរួមក្នុងប្រតិបត្តិការឆែកឆេរនោះឡើយ។ ការឆែកឆេរ មិនអាចចាប់ផ្តើមមុនម៉ោង៦ ព្រឹក និងក្រោយម៉ោង ១៨ ល្ងាចឡើយ។

ក្រៅពីនេះ វិធានផ្សេងៗដែលតម្រូវឱ្យមានក្នុងការឆែកឆេរនេះដូចគ្នានឹងវិធាននៃការឆែកឆេរក្នុងក្របខ័ណ្ឌ ស៊ើបអង្កេតបទល្មើសជាក់ស្តែង :

**ការឃាត់ខ្លួន និងការតព្វកិច្ចចូលខ្លួន**

ក្នុងលក្ខខ័ណ្ឌមួយចំនួន មន្ត្រីនគរបាលយុត្តិធម៌អាចបញ្ជាឱ្យឃាត់ខ្លួនបុគ្គលសង្ស័យជាចារីម្នាក់នៃបទឧក្រិដ្ឋ ឬបទមជ្ឈិមមួយ។ មន្ត្រីនគរបាលយុត្តិធម៌អាចបង្ខំឱ្យជនម្នាក់ចូលខ្លួនបាន លុះត្រាតែទទួលបានជាមុន

នូវបញ្ហាអោយចូលខ្លួន ពីព្រះរាជអាជ្ញា។

វិធានអនុវត្តចំពោះដំណើរការនៃការឃាត់ខ្លួន ជាពិសេសរាល់អ្វីដែលប៉ះពាល់ ដល់សិទ្ធិជនត្រូវចោទមានលក្ខណៈដូចគ្នាទៅនឹងវិធាន ដែលរៀបរាប់ក្នុងនីតិវិធីបទល្មើសជាក់ស្តែងអនុវត្ត ចំពោះមន្ត្រីនគរបាលយុត្តិធម៌ (មាត្រា ១១៦)។

## ៤.ការស៊ើបអង្កេតតាមដីកាចាត់ឱ្យស៊ើបសួរជំនួស

### ៤.១. លក្ខណៈទូទៅ

មាត្រា ៧១ នៃក្រមនីតិវិធីព្រហ្មទណ្ឌបានចែងថា : "កាលណាការស៊ើបសួរបានចាប់ផ្តើម មន្ត្រីនគរបាលយុត្តិធម៌អនុវត្តដីកាចាត់ឱ្យស៊ើបសួរជំនួសពីចៅក្រមស៊ើបសួរ"។

ដូចនេះ ចៅក្រមស៊ើបសួរទទួលបានអំណាចដឹកនាំការស៊ើបសួរជំនួសមន្ត្រីនគរបាលយុត្តិធម៌។

ផ្ទុយទៅនឹងការស៊ើបអង្កេតករណីជាក់ស្តែង ឬការស៊ើបអង្កេតបឋមដែលនគរបាលយុត្តិធម៌ប្រើប្រាស់នូវអំណាចដែលប្រគល់ឱ្យខ្លួនដោយមាត្រា ៨៥ និងមាត្រាបន្តបន្ទាប់នៃក្រមនីតិវិធីព្រហ្មទណ្ឌ ឬមាត្រា ១១១ និងមាត្រាបន្តបន្ទាប់នៃក្រមនីតិវិធីព្រហ្មទណ្ឌ ដោយគំនិតផ្តួចផ្តើមផ្ទាល់ខ្លួន ឬអនុវត្តតាមសេចក្តីណែនាំ។ ចំពោះដីកា ចាត់ឱ្យស៊ើបសួរជំនួសរបស់ចៅក្រមស៊ើបសួរ អំណាចដែលត្រូវបានផ្ទេរអោយនគរបាលយុត្តិធម៌គឺមានកម្រិត ដោយអនុវត្តតាមមាត្រា ១៧៣ និងមាត្រាបន្តបន្ទាប់នៃក្រមនីតិវិធីព្រហ្ម។

របៀបស៊ើបអង្កេតនេះមានលក្ខណៈពិសេស ដូច្នេះគេមិនអាចធ្វើការស្រាវជ្រាវ ក្នុងពេលតែមួយលើរឿងហេតុតែមួយ តាមរបៀបស៊ើបអង្កេតផ្សេងទៀតឡើយ (ការស៊ើបអង្កេតបទល្មើសជាក់ស្តែង ឬការស៊ើបអង្កេតបឋម)។

### ៤.២. និយមន័យ

ចៅក្រមស៊ើបសួរមិនអាចបំពេញតែម្នាក់ឯករហូត នូវរាល់កិច្ចចាំបាច់ ដើម្បីដឹកនាំការស៊ើបសួរឱ្យបានល្អនោះឡើយ ព្រោះជួនកាល ត្រូវជួបប្រទះនូវការលំបាកផ្នែកសំភារៈ (ត្រូវធ្វើការឆែកឆេរព្រមៗគ្នានៅកន្លែងជាច្រើន ដើម្បីឱ្យមានប្រសិទ្ធិភាព ត្រូវបំពេញកិច្ចនៅតាមសមត្ថកិច្ចដែនដីឆ្ងាយៗពីគ្នា) ម្យ៉ាងទៀតពីព្រោះថាមានការស្រាវជ្រាវជាច្រើនដែលត្រូវដឹកនាំ ហើយពុំមានពេលវេលា និងមធ្យោបាយធ្វើតែម្នាក់ឯងបានឡើយ។ ហេតុដូចនេះ ដើម្បីប្រសិទ្ធភាពការងារ ចៅក្រមស៊ើបសួរអាចធ្វើប្រតិភូកម្មមួយផ្នែកនៃអំណាចរបស់ខ្លួន។

ប្រតិភូកម្មអំណាចតាមរយៈដីកាចាត់ឱ្យស៊ើបសួរជំនួសនេះមានចែងក្នុងមាត្រា ១៣១ និង ១៧៣ និងមាត្រាបន្តបន្ទាប់នៃក្រមនីតិវិធីព្រហ្មទណ្ឌ។ ដីកាចាត់អោយស៊ើបសួរជំនួសជាដីកាមួយដែលចេញក្រោមទម្រង់ ជាប្រតិភូកម្មអាជ្ញាបញ្ជានៃអំណាចដែលជាញឹកញាប់បំផុតចៅក្រមស៊ើបសួរចេញទៅឱ្យចៅក្រម ឬទៅឱ្យមន្ត្រី នគរបាលយុត្តិធម៌ដូចមានចែងក្នុងមាត្រា ៦០ នៃក្រមនីតិវិធីព្រហ្មទណ្ឌ។ ពួកគាត់ត្រូវតែអនុវត្តការស្នើសុំ អនុលោមតាមវិធាននានាដែលច្បាប់តម្រូវ។

ជាទូទៅ ប្រតិភូ (អាណត្តិគាហក) ត្រូវបំពេញតែកិច្ចណាដែលមានចុះក្នុងដីកាចាត់ឱ្យ ស៊ើបសួរជំនួសប៉ុណ្ណោះ។ម្យ៉ាងទៀតកិច្ចមួយចំនួនមិនអាចត្រូវធ្វើប្រតិភូកម្មទៅមន្ត្រីនគរបាលយុត្តិធម៌នោះឡើយ (ការចេញដីកា ការស្តាប់ចម្លើយជនត្រូវចោទ សេចក្តីសន្និដ្ឋានរបស់អ្នកជំនាញ...)។

## ៤.៣. ទម្រង់នៃដីកាចាត់ឱ្យស៊ើបសួរជំនួស និងកិច្ចនានាដែលបញ្ញត្តិក្នុងដីកា

### ទម្រង់នៃដីកាចាត់ឱ្យស៊ើបសួរជំនួស

ប្រតិភូកម្មនេះត្រូវប្រាប់ពី : ឈ្មោះចៅក្រម ទីស្នាក់ការសាលាដំបូង និងលេខនៃការស៊ើបសួរ។

ដីកាចាត់ឱ្យស៊ើបសួរជំនួសត្រូវតែមានចុះកាលបរិច្ឆេទ ហត្ថលេខា និងប្រថាប់ត្រារបស់ចៅក្រមដែលចេញដីកានេះ។

ដីកាត្រូវបញ្ជាក់នូវប្រភេទបទល្មើស កម្មវត្ថុនៃការចោទប្រកាន់ ក៏ដូចជាអត្តសញ្ញាណរបស់ភាគីនីមួយៗ (ជនត្រូវចោទ និងភាគីដើមបណ្តឹងរដ្ឋប្បវេណីទាំងអស់)។

ព័ត៌មានទាំងនេះមានសារៈសំខាន់ណាស់ បើសិនជាភ្លេចអាចបណ្តាលឱ្យមានមោឃៈភាព។

ដីកានេះបញ្ញត្តិត្រឹមតែកិច្ចនានាដែលជាប់ពាក់ព័ន្ធផ្ទាល់នឹងបទល្មើសដែលចុះក្នុងដីកាសន្និដ្ឋាន (ដីកាសន្និដ្ឋានបញ្ជូនរឿងអោយស៊ើបសួរ ឬដីកាសន្និដ្ឋានបំពេញបន្ថែម)។

ដីកានេះត្រូវកំណត់ពីរយៈពេលអនុវត្ត។

### ទម្រង់នៃកំណត់ហេតុ

ការស៊ើបអង្កេតតាមដីកាចាត់ឱ្យស៊ើបសួរជំនួសចារឹកក្នុងក្របខ័ណ្ឌធំទូលាយជាងមុន ពោលគឺការស៊ើបសួរតុលាការ។ សេចក្តីផ្តើមកំណត់ហេតុនីមួយៗត្រូវចំលងទម្រង់ដីកាចាត់ឱ្យស៊ើបសួរជំនួសឡើងវិញដោយដាក់ឈ្មោះ ឋានៈចៅក្រមអាណត្តិទាយក កាលបរិច្ឆេទ បទល្មើសពាក់ព័ន្ធ និងអត្តសញ្ញាណភាគីបណ្តឹង។

ក្នុងកំណត់ហេតុមិន ត្រូវមានចន្លោះបន្ទាត់ឡើយ រាល់ឆ្នូតលុប និងសេចក្តីយោងត្រូវសរសេរក្នុងរឹមទំព័រ ហើយកំណត់ហេតុត្រូវមាន ហត្ថលេខា។ សាក្សីត្រូវធ្វើការស្បថស្បែ (មាត្រា ១៧៩ នៃក្រមនីតិវិធីព្រហ្មទណ្ឌ)។ លក្ខណៈសំគាល់ នៃរបៀបស៊ើបអង្កេតនេះ គឺភាពឱឡារិក និងទម្រង់ការដ៏តឹងរ៉ឹង មន្ត្រីនគរបាលយុត្តិធម៌ ដែលទទួលអំណាច តាមរយៈដីកាចាត់អោយស៊ើបសួរជំនួសត្រូវធ្វើការជំនួសចៅក្រមស៊ើបសួរ (មាត្រា ១៧៦ និង ១៧៩ នៃក្រម នីតិវិធីព្រហ្មទណ្ឌ)។

ក្នុងពេលអន្តរាគមន៍ ត្រូវបង្ហាញដីកាចាត់ឱ្យស៊ើបសួរជំនួស (និទ្ទេសន៍) និងសរសេរកំណត់ហេតុភ្លាម។

## ៤.៤. អំណាចរបស់មន្ត្រីនគរបាលយុត្តិធម៌ក្នុងពេលអនុវត្តដីកាចាត់ឱ្យស៊ើបសួរជំនួស

### ៤.៤.១. បុព្វសិទ្ធិមន្ត្រីនគរបាលយុត្តិធម៌

ក្នុងដែនកំណត់នៃដីកាចាត់ឱ្យស៊ើបសួរជំនួស មន្ត្រីនគរបាលយុត្តិធម៌ អនុវត្តនូវអំណាចមួយចំនួនរបស់ចៅក្រមស៊ើបសួរ (មាត្រា ១៧៦ នៃក្រមនីតិវិធីព្រហ្មទណ្ឌ)។ មាត្រានេះចែងថា មន្ត្រីនគរបាលយុត្តិធម៌ អាចអនុវត្តអំណាចនានាដែលមានចែងក្នុងមាត្រា ១៧៨ ដល់ ១៨៤ នៃក្រមនិតិវិធីព្រហ្មទណ្ឌ ។ ប៉ុន្តែ មន្ត្រីនគរបាលយុត្តិធម៌មិនអាចធ្វើការសួរចម្លើយតទល់នឹងជនត្រូវចោទ ហើយក៏មិនអាចស្តាប់ចម្លើយភាគីដើមបណ្តឹងរដ្ឋប្បវេណីបានដែរ (មាត្រា ១៨០ នៃក្រមនីតិវិធីព្រហ្មទណ្ឌ)។

មន្ត្រីនគរបាលយុត្តិធម៌ស្តាប់តែបញ្ជារបស់ចៅក្រមអាណត្តិទាយកប៉ុណ្ណោះ (មាត្រា១៧៦ នៃក្រមនីតិវិធីព្រហ្មទណ្ឌ) ខ្លួនត្រូវរាយការណ៍ជូនចៅក្រមអាណត្តិទាយកជាប់ជានិច្ច ហើយប្រាប់ដល់គាត់សូម្បីតែបញ្ហាបន្តិចបន្តួចក៏ដោយ។

មន្ត្រីនគរបាលយុត្តិធម៌ត្រូវតែគោរពរយៈពេលកំណត់ក្នុងការអនុវត្ត។

មន្ត្រីនគរបាលយុត្តិធម៌នឹងអាចទទួលជាយថាហេតុ នូវការពន្លាតសមត្ថកិច្ចយោងតាម មាត្រា ៦៨ នៃក្រមនីតិវិធីព្រហ្មទណ្ឌ តាមរយៈដីកាចាត់ឱ្យស៊ើបសួរជំនួសជាក់លាក់របស់ចៅក្រមស៊ើបសួរដែលមានចុះពីប្រភេទកិច្ចការទាំងឡាយដែលត្រូវបំពេញ។

### ៤.៤.២. កិច្ចអនុវត្តនានា

មន្ត្រីនគរបាលយុត្តិធម៌បំពេញត្រឹមតែកិច្ច ដែលមានចុះក្នុងដីកាចាត់ឱ្យស៊ើបសួរជំនួសដែលជាដីកាមួយពិសេស (ដែលបញ្ញត្តកិច្ចមួយ ឬច្រើន)។

ចំណែកលក្ខណៈពិសេសនៃកិច្ចការរបស់នគរបាលយុត្តិធម៌ក្នុងក្របខ័ណ្ឌនេះ មានដូចខាងក្រោម :

**ការទទួលបណ្តឹង :**

ការទទួលបណ្តឹងខុសប្លែកពីការស៊ើបអង្កេតបទល្មើសជាក់ស្តែង ឬការស៊ើបអង្កេតបឋម ។ មន្ត្រីនគរបាលយុត្តិធម៌ដែលទទួលបណ្តឹង អាចសរសេរកំណត់ហេតុទទួលដីកាចាត់ឱ្យស៊ើបសួរជំនួស ដោយចំលងទម្រង់នៃដីកានោះ និងបេសកកម្ម ។

**ការឃាត់ខ្លួន :**

ដើម្បីភាពចាំបាច់ក្នុងការអនុវត្តដីកាចាត់ឱ្យស៊ើបសួរជំនួស មន្ត្រីនគរបាលយុត្តិធម៌អាចចាត់វិធានការឃាត់ខ្លួនប្រឆាំងនឹងបុគ្គលម្នាក់ដោយសារមូលហេតុមួយ ឬច្រើន ដែលអាចឱ្យសង្ស័យថាបុគ្គលនោះបាន ប្រព្រឹត្ត ឬ ប៉ុនប៉ងប្រព្រឹត្តបទល្មើសមួយ ឬប្រឆាំងនឹងសាក្សីរឹងទទឹងណាម្នាក់ ។

ការឃាត់ខ្លួនមានរយៈពេល ៤៨ ម៉ោង ជាយថាហេតុអាចពន្យារបានក្នុងរយៈពេលថ្មីមួយដែលមិនអាចហួសពី ២៤ ម៉ោង ។

សម្រាប់លក្ខខ័ណ្ឌនៃការឃាត់ខ្លួន មាត្រា ១៨២ នៃក្រមនីតិវិធីព្រហ្មទណ្ឌ ចង្អុលបង្ហាញមាត្រា ៩៦ ដល់ ១០២ នៃក្រមនីតិវិធីព្រហ្មទណ្ឌ ( ការឃាត់ខ្លួនចំពោះបទល្មើសជាក់ស្តែង) ។ ប៉ុន្តែ អំណាច ដែលមាត្រា ទាំងនេះប្រគល់ជូនព្រះរាជអាជ្ញាជាក់ស្តែងត្រូវបានអនុវត្តដោយចៅក្រមស៊ើបសួរ ។

**ការស្តាប់ចម្លើយ :**

ក្នុងការស៊ើបសួរ គេបែងចែកបុគ្គលទាំងឡាយទៅតាមលក្ខន្តិកៈគេ ។

**សាក្សី :**

សាក្សីមានតែកាតព្វកិច្ចប៉ុណ្ណោះ ។ គាត់ត្រូវចូលខ្លួន ពុំនោះទេអាចត្រូវបានបង្ខំតាមមាត្រា ១៧៩ កថាខណ្ឌទី ៣ នៃក្រមនីតិវិធីព្រហ្មទណ្ឌ ( ការចេញបញ្ជាបង្គាប់ឱ្យចូលខ្លួនដោយចៅក្រមស៊ើបសួរ ក្រោយពីទទួលដំណឹងពីមន្ត្រីនគរបាលយុត្តិធម៌) ។

បន្ទាប់មក សាក្សីត្រូវតែស្បថស្បែទៅតាមសាសនា និងជំនឿរបស់ខ្លួនថានឹងនិយាយតែពីការពិត លើកលែងតែសាមីខ្លួនស្ថិតក្នុងចំណោមបុគ្គលនានាដែលមិនតម្រូវអោយស្បថដូចមានចែងក្នុងមាត្រា ១៥៦ នៃក្រមនីតិវិធីព្រហ្មទណ្ឌ ។

**ជនត្រូវចោទ ៖**

គឺជាបុគ្គលដែលគេបានប្រមូលតំរុយធ្ងន់ធ្ងរ និងស៊ីសង្វាក់ប្រឆាំងខ្លួន ហើយតំរុយនេះអាចបញ្ជាក់ថាខ្លួនបានចូលរួម ក្នុងអំពើដែលប្ដឹងមកចៅក្រមស៊ើបសួរនោះ។ ជនត្រូវចោទមិនអាចត្រូវបានសួរចម្លើយដោយមន្ត្រីនគរបាលយុត្តិធម៌ឡើយ។ ក្នុងករណីនេះ មន្ត្រីនគរបាលយុត្តិធម៌ត្រូវជូនដំណឹងទៅចៅក្រម។

តំរុយនេះត្រូវតែជាតំរុយ**ធ្ងន់ធ្ងរ និងស៊ីសង្វាក់**។ ដូចនេះ ទាមទារឱ្យមានពហុភាពនៃតំរុយ ភាពស៊ីសង្វាក់ និងធ្ងន់ធ្ងរ។ ការសារភាពថាខ្លួនបានប្រព្រឹត្តបទមនុស្សឃាតមួយគឺមានភាពធ្ងន់ធ្ងរហើយ ប៉ុន្តែលើសពីនេះត្រូវតែ មានធាតុផ្សេងទៀតដែលស៊ីសង្វាក់។

មាត្រា ១៧៩ កថាខណ្ឌទី ២ នៃក្រមនីតិវិធីព្រហ្មទណ្ឌ ៖ «...ដើម្បីគោរពសិទ្ធិការពារខ្លួន មន្ត្រីនគរបាលយុត្តិធម៌មិនអាចស្ដាប់ ចម្លើយក្នុងឋានៈជាសាក្សី នូវបុគ្គលណាមួយដែលមានតម្រុយនៃពិរុទ្ធភាព លើបុគ្គលនោះទេ។ កាលណាការស្ដាប់ ចម្លើយសាក្សីណាម្នាក់ បានធ្វើឱ្យលេចតំរុយនៃពិរុទ្ធភាពលើសាក្សីនោះ មន្ត្រីនគរបាលយុត្តិធម៌ត្រូវបញ្ឈប់ការ ស្ដាប់ ហើយត្រូវរាយការណ៍ជូនចៅក្រមស៊ើបសួរ...»។

**ដើមបណ្ដឹងរដ្ឋប្បវេណី និងជនត្រូវចោទ ៖**

មន្ត្រីនគរបាលយុត្តិធម៌មិនអាចស្ដាប់ចម្លើយដើមបណ្ដឹងរដ្ឋប្បវេណី និងជនត្រូវចោទបានឡើយ (មាត្រា ១៨០ នៃក្រមនីតិវិធីព្រហ្មទណ្ឌ)។

**ការឆែកឆេរ និងការរឹបអូស ៖**

មាត្រា ១៨១ នៃក្រមនីតិវិធីព្រហ្មទណ្ឌ បានចង្អុលបង្ហាញមាត្រា ៩១ និង៩២ នៃក្រមនីតិវិធីព្រហ្មទណ្ឌ (ករណីបទល្មើសជាក់ស្ដែង)។

ក្រោយពីទទួលបានការយល់ព្រមជាមុនពីចៅក្រមស៊ើបសួរនោះ ការឆែកឆេរអាចត្រូវធ្វើឡើងគ្រប់ទីកន្លែងដែលអាចឱ្យគេរកឃើញវត្ថុមានប្រយោជន៍ដល់ការបង្ហាញការពិត។ ចំពោះទីកន្លែងឆែកឆេរ មាន**ការដាក់កម្រិត** ដែលទាក់ទងជាពិសេសចំពោះសភា កន្លែងការទូតការិយាល័យមេធាវី និងសហគ្រាសសារពត៌មាន ។ល។ វត្ថុ និងឯកសារដែលមានប្រយោជន៍ត្រូវចុះបញ្ជីសារពើភណ្ឌ និងបិទស្លាកបោះត្រាភ្ជាម។

**សេចក្តីសន្និដ្ឋានស៊ើបសួរ ៖**

សេចក្តីសន្និដ្ឋានស៊ើបសួរត្រូវចុះឱ្យច្បាស់លាស់ក្នុងដីកាចាត់ឱ្យស៊ើបសួរជំនួស (សេចក្តីសន្និដ្ឋានរបស់អ្នកជំនាញ ឬសេចក្តីសន្និដ្ឋានបែប " បច្ចេកទេស") ។

**ការស្តាប់តាមទូរស័ព្ទ ៖**

គឺជាការចាប់ការឆ្លើយឆ្លងតាមមធ្យោបាយទូរគមនាគមន៍ដូចជាទូរស័ព្ទ ទូរសារ អ៊ិនធើណែត ។ល។ ការស្តាប់តាមទូរស័ព្ទ មានចែងក្នុងមាត្រា ១៧២ និង១៨៣ នៃក្រមនីតិវិធីព្រហ្មទណ្ឌ។ មន្ត្រីនគរបាលយុត្តិធម៌ពុំមានអំណាចសន្និដ្ឋានស៊ើបសួរជា "សត្យានុម័ត" ដោយហេតុថាមានតែ ចៅក្រមស៊ើបសួរប៉ុណ្ណោះដែលមានសិទ្ធិផ្តួចផ្តើមធ្វើសេចក្តីសន្និដ្ឋាន ក្រោមល័ក្ខខ័ណ្ឌចែងយ៉ាងច្បាស់លាស់ដោយ អត្ថបទច្បាប់ ។

## **១,នីតិវិធី**

នីតិធីគឺជា**តំណាងជាលាយលក្ខណ៍អក្សរ**នូវកិច្ចការនានាដែលអនុវត្តដោយមន្ត្រីនគរបាលយុត្តិធម៌ និងភ្នាក់ ងារនគរបាលយុត្តិធម៌ ក្នុងបេសកកម្មស្វែងរក និងប្រមូលភស្តុតាង ។

នីតិវិធីមានគោលបំណងបង្ហាញថា :

-ការប្រព្រឹត្តអំពើមួយចំនួនពិតជាបង្កអំពើល្មើសច្បាប់ព្រហ្មទណ្ឌ ។

-អំពើទាំងនេះអាចឱ្យគេទម្លាក់ទោសលើបុគ្គលម្នាក់ ឬច្រើននាក់ដែលត្រូវបានស្គាល់អត្តសញ្ញាណ ឬដែល ត្រូវកំណត់អត្តសញ្ញាណ ។

ផ្នែកទម្រង់ច្បាប់ នីតិវិធីត្រូវតែគោរពទម្រង់គតិយុត្តិដែលបញ្ញត្តិដោយច្បាប់ដើម្បីបំពេញកិច្ចនគរបាលយុត្តិធម៌ ឬកិច្ចស៊ើបសួរមួយចំនួន ។

ផ្នែកគតិច្បាប់ ត្រូវតែវិភាគ និងបង្ហាញអង្គហេតុក្រោមទម្រង់ជា :

ធាតុបង្កបទល្មើសដែលបានប្រព្រឹត្ត

ពិរុទ្ធភាពរបស់ចារីម្នាក់ ឬច្រើននាក់ និងអ្នកសមគំនិត ។

ដូចនេះ ការតាក់តែងនីតិវិធីទាមទារពីអ្នកតាក់តែងនូវចំណេះដឹងឥតខ្ចោះស្តីពី :

- ក្រមនីតិវិធីព្រហ្មទណ្ឌ
- នីតិព្រហ្មទណ្ឌទូទៅ
- នីតិព្រហ្មទណ្ឌពិសេស

### **១.១. ទម្រង់ច្បាប់**

នីតិវិធីជាសារវន្តរួមមានកំណត់ហេតុដែលឆ្លើយតបទៅនឹងវិធានទម្រង់ការ ។

វិធានខ្លះត្រូវតែគោរព ពុំនោះសោតនឹងត្រូវទុកជាមោឃៈ ។ យើងនឹងសិក្សាពីការសរសេរកំណត់ហេតុក្នុងជំពូកមួយ ។

ប៉ុន្តែ ក្នុងពេលស៊ើបអង្កេត កិច្ចនគរបាលយុត្តិធម៌ខ្លះអាចត្រូវធ្វើឡើងក្រោមទម្រង់ជារបាយការណ៍ដែលនឹងត្រូវបញ្ចូល ក្នុងឧបសម្ព័ន្ធនៃនីតិវិធី ។ នេះជាករណីនៃការឃ្លាំមើល ការតាមដាន ការផ្ទៀងផ្ទាត់ ស្រាវជ្រាវ ការស្វែងរក ។ កិច្ចទាំងនេះនឹងត្រូវបានសិក្សាក្នុងជំពូកពិសេសមួយ ។

ទីបញ្ចប់ មានរបាយការណ៍ពិសេសមួយសម្រាប់សង្ខេបសំនុំរឿង ដើម្បីឱ្យអ្នកទទួលខុសត្រូវការចោទប្រកាន់ងាយយល់ : **របាយការណ៍សំយោគ** ។ យើងនឹងលើកយកមកសិក្សាពី**របាយការណ៍នេះ** ក្នុងជំពូកពិសេសមួយផងដែរ ។

**១.២. គតិច្បាប់**

នីតិវិធីនីមួយៗ ត្រូវតែសរសេរដោយគោរពតាម **វិធានជំជាក់លាក់** ដែលអាចប្រែប្រួលទៅតាមក្របខណ្ឌគតិយុត្តិនៃការស៊ើបអង្កេត :

**ចំពោះបទល្មើសជាក់ស្តែង ( មាត្រា ៨៥ និងបន្តបន្ទាប់ នៃក្រមនីតិវិធីព្រហ្មទណ្ឌ ) :**

-កំណត់ហេតុដាច់ពីគ្នា

-ការសរសេរកំណត់ហេតុពិនិត្យកត់ត្រា ( មាត្រា ៩០ នៃក្រមនីតិវិធីព្រហ្មទណ្ឌ )

-ការឆែកឆេរដោយមានការយល់ព្រម ជាលាយលក្ខណ៍អក្សរ ឬផ្ទាល់មាត់ពីព្រះរាជអាជ្ញា។ ការគោរពម៉ោងស្របច្បាប់ និងទីកន្លែងការពារ ។ បញ្ជីសារពើភណ្ឌវត្ថុរឹបអូស ( មាត្រា ៩១ នៃក្រមនីតិវិធីព្រហ្មទណ្ឌ ) ។

-ការបង្ខំរាងកាយនិងការអាចប្រើប្រាស់កំលាំងចំពោះជនសង្ស័យ( មាត្រា ៩៣ នៃក្រមនីតិវិធីព្រហ្មទណ្ឌ)

-ការបង្ខំរាងកាយចំពោះសាក្សី បន្ទាប់ពីចេញបញ្ជាឱ្យចូលខ្លួនដោយព្រះរាជអាជ្ញា ( មាត្រា ៩៤ នៃក្រមនីតិវិធីព្រហ្មទណ្ឌ )

-លទ្ធភាពឃាត់ខ្លួនជនសង្ស័យដោយគំនិតផ្តួចផ្តើមផ្ទាល់ខ្លួន និងសាក្សីដោយមានការយល់ព្រមពីព្រះរាជអាជ្ញា។ ការឃាត់ខ្លួនអាចត្រូវបានពន្យាររហូតដល់រយៈពេល ២៤ ម៉ោងទៅតាមករណីជាក់ស្តែង ( មាត្រា ៩៦ នៃក្រមនីតិវិធីព្រហ្មទណ្ឌ )

-សេចក្តីសន្និដ្ឋានអ្នកជំនាញការសម្រាប់ការពិនិត្យបច្ចេកទេស និងវិទ្យាសាស្ត្រ ( មាត្រា ៩៥ នៃក្រមនីតិវិធីព្រហ្មទណ្ឌ )

-លទ្ធភាពពន្លាតសមត្ថកិច្ច ( មាត្រា ៦៨ កថាខណ្ឌទី ១ នៃក្រមនីតិវិធីព្រហ្មទណ្ឌ )

-រយៈពេលស៊ើបអង្កេតមិនអាចលើសពី៧ថ្ងៃ ( មាត្រា ១០៦ នៃក្រមនីតិវិធីព្រហ្មទណ្ឌ )

-វិធានបញ្ញត្តិត្រង់មាត្រា ៩០ ដល់ ១០០, ១០៥, ១០៦ និង ១០៨ នៃក្រមនីតិវិធីព្រហ្មទណ្ឌត្រូវអនុវត្ត ពុំនោះសោតនឹងត្រូវទុក ជាមោឃៈ ( មាត្រា ១០៩ នៃក្រមនីតិវិធីព្រហ្មទណ្ឌ )

**ចំពោះការស៊ើបអង្កេតបឋម ( មាត្រា ១១១ និងបន្តបន្ទាប់នៃក្រមនិតិវិធីព្រហ្មទណ្ឌ ):**

- ការកោះហៅជនសង្ស័យ ធ្វើឡើងដោយគ្មានការបង្ខំរាងកាយ ( លើកលែងចំពោះការឃាត់ខ្លួន)

-ឆែកឆេរផ្អែកលើការយល់ព្រមជាមុនពីសាម៉ីខ្លួន និងគោរពម៉ោងស្របច្បាប់

-កាតព្វកិច្ចដូចគ្នាក្នុងបទល្មើសជាក់ស្តែងទាក់ទងនឹងការឃាត់ខ្លួន

-គ្មានការពន្លាតសមត្ថកិច្ចណាមួយឡើយ

**ក្នុងការអនុវត្តដីកាចាត់ឱ្យស៊ើបសួរជំនួស ( មាត្រា ១៣១ និង១៧៣ ដល់១៨៤ នៃក្រមនីតិវិធីព្រហ្មទណ្ឌ) :**

-ការអនុវត្តយ៉ាងម៉ឺងម៉ាត់នូវសេចក្តីណែនាំរបស់ចៅក្រមស៊ើបសួរ ( ដីកាចាត់ឱ្យស៊ើបសួរជំនួសទូទៅត្រូវបានហាមឃាត់) រាយការណ៍ជូន ចៅក្រមស៊ើបសួរ ( មាត្រា ១៧៦ នៃក្រមនីតិវិធីព្រហ្មទណ្ឌ )

-ការបង្ខំរាយកាយដែលអាចធ្វើទៅបាន ( ចាប់ខ្លួន ឃាត់ខ្លួន ឆែកឆេរ និងរឹបអូស )

-កម្រិតលទ្ធភាពសួរចម្លើយទៅតាមលក្ខន្តិកៈសាម៉ីខ្លួន ការស្បថស្បែជាកាតព្វកិច្ច លើកលែងតែចំពោះជនណាដែលមិនតម្រូវអោយមានការស្បថស្បែ ( មាត្រា ១៥៦ នៃក្រមនីតិវិធីព្រហ្មទណ្ឌ )

-គោរពម៉ោងឆែកឆេរស្របច្បាប់

-លទ្ធភាពពន្លាតសមត្ថកិច្ច ( មាត្រា ៦៨ កថាខណ្ឌទី ២ នៃក្រមនីតិវិធីព្រហ្មទណ្ឌ )

**<u>១.៣. ការបញ្ជូននីតិវិធី</u>**

**ក្រោយពីការស៊ើបអង្កេត** មន្ត្រីនគរបាលយុត្តិធម៌ត្រូវតែបញ្ជូនទៅព្រះរាជអាជ្ញា ( ករណីជាក់ស្តែង និងការ ស៊ើបអង្កេតបឋម) ឬចៅក្រមស៊ើបសួរ ( ការស៊ើបអង្កេតតាមដីកាចាត់ឱ្យស៊ើបសួរជំនួស) នូវនីតិវិធីភ្ជាប់ជាមួយ កំណត់ហេតុ និងរបាយការណ៍។ ត្រូវបញ្ជូនទៅចៅក្រមផងដែរ នូវកិច្ច និងឯកសារទាំងឡាយដែលទាក់ទងនឹង កំណត់ហេតុទាំងនេះ ក៏ដូចជាវត្ថុតាង និងវត្ថុរឹបអូស ។

មាត្រា ១៧៤ កថាខណ្ឌទី២ នៃក្រមនីតិវិធីព្រហ្មទណ្ឌចែងថា ចៅក្រមស៊ើបសួរជាអ្នកកំណត់រយៈពេលអនុវត្តដីកាចាត់ឱ្យស៊ើបសួរជំនួស។

## ២-កំណត់ហេតុ

នគរបាលយុត្តិធម៌ដែលមានភារកិច្ច "ត្រួតពិនិត្យបទឧក្រិដ្ឋ បទមជ្ឈិម និងបទលហុ កំណត់អត្តសញ្ញាណ និងចាប់ជនល្មើស ព្រមទាំងប្រមូលភស្តុតាង" (មាត្រា ៥៦ នៃក្រមនីតិវិធីព្រហ្មទណ្ឌ) ត្រូវតែសរសេរនីតិវិធី ដើម្បីបំពេញបេសកកម្មរបស់ខ្លួនដូចដែលយើងបានសិក្សារួចមកហើយ ។

កិច្ចសំខាន់នៅក្នុងនីតិវិធីនោះហៅថា**កំណត់ហេតុ** ។

កំណត់ហេតុនគរបាលយុត្តិធម៌ជាធាតុមូលដ្ឋាននៃនីតិវិធីដែលសរសេរលាយលក្ខអក្សរណ៍ និងចុះហត្ថលេខា ដោយមន្ត្រីនគរបាលយុត្តិធម៌ម្នាក់ដែលធ្វើសកម្មភាពស្របតាមវិធានសមត្ថកិច្ចខ្លួន និងក្នុងក្របខណ្ឌបេសកកម្ម នគរបាលយុត្តិធម៌ ។ កំណត់ហេតុនេះបញ្ជាក់ នូវការពិនិត្យកត់ហេតុ និងការ ស្នើសុំរបស់មន្ត្រីនគរបាលយុត្តិធម៌ តាមលំដាប់លំដោយ (ការពិនិត្យកត់ហេតុ ការស្តាប់ចម្លើយ និងការឆែកឆេរ លំនៅដ្ឋាន ។ល។) ។

ក្នុងនិយមន័យនេះ ទិដ្ឋភាពពីរលេចឡើង : "**សមត្ថកិច្ច**" ដែលផ្តោតជាសំខាន់ទៅលើចរិកលក្ខណៈយុត្តិធម៌ និងសមត្ថកិច្ចដែនដីរបស់នគរបាលយុត្តិធម៌ដែលជាអ្នកសរសេរកំណត់ហេតុ ព្រមទាំង "ក្របខណ្ឌគតិយុត្តិ" ដែលការស៊ើបអង្កេតប្រព្រឹត្តទៅ ។

### ២.១. ប្រភេទផ្សេងៗនៃកំណត់ហេតុ

ពុំមានបញ្ជីលំអិតអំពីកំណត់ហេតុក្នុងនីតិវិធីទាំងអស់នោះទេ។ ប៉ុន្តែ កិច្ចមួយចំនួនត្រូវប្រើប្រាស់ជាញឹកញាប់ដូចរៀបរាប់ខាងក្រោម :

១-ការប្តឹង-ចុះទៅកាន់ទីកន្លែងកើតហេតុ-ពិនិត្យកត់ហេតុ

២-ពាក្យបណ្តឹង-បណ្តឹងបរិហារ

៣-សក្ខីកម្មភស្តុតាង

៤-សេចក្តីសន្និដ្ឋានស៊ើបសួរ

៥-ការស្វែងរក-ការស៊ើបអង្កេត-ការឃ្លាំមើល-ការតាមដាន-ការស៊ើបសួរពត៌មាន-ការ ស៊ើបអង្កេតទីជិតខាង-សំនុំសាលាកប័ត្រ-រដ្ឋបាល ។ល។

៦-ការចាប់ខ្លួន

៧-ការឆែកឆេររាងកាយ

៨-ការឃាត់ខ្លួន និងការពន្យាររយៈពេលឃាត់ខ្លួន

៩-កាឆែកឆេរ

១០-ការសួរចម្លើយ ឬការស្តាប់ចម្លើយជនសង្ស័យ

១១-ការសងវត្ថុរឹបអូស

១២-ការបង្ហាញជនសង្ស័យឱ្យសាក្សីចំណាំ

១៣-ការប្រទល់មុខ

១៤-ការបញ្ចប់ការឃាត់ខ្លួន

កំណត់ហេតុសំខាន់ៗ នឹងត្រូវលើកយកមកសិក្សាលំម្អិត ក្នុងមាតិកា ៣ នៃសៀវភៅនេះ ។

គួរកត់សំគាល់ថាសរាចរណ៍លេខ ០៣១/០៨ ចុះថ្ងៃទី ១ ខែកុម្ភៈ ឆ្នាំ ២០០៨ ចេញដោយ ប្រធាននាយកដ្ឋាននគរបាលយុត្តិធមិបានកំនត់បទបញ្ញត្តិស្តីពីការបង្កើតគំរូក្រដាសសម្រាប់នគរបាលយុត្តិធមិ ។

សរាចរណ៍នេះរំលឹកពីកាតព្វកិច្ចទាក់ទងនឹងការបង្កើតបញ្ជីពាក្យបណ្តឹង និងបញ្ជីឃាត់ខ្លួនក្នុងគ្រប់អង្គភាព នគរបាលយុត្តិធមិទូទាំងប្រទេស ។

ក្នុងឧបសម្ព័ន្ធសរាចរណ៍នេះក៏មានផងដែរនូវកម្រងគំរូឯកសារ និងកំណត់ហេតុផ្សេងដើម្បីសម្រួលការសរសេរកិច្ចដោយមន្ត្រីនគរបាលយុត្តិធមិ ។

-លិខិតកោះហៅ

-កំណត់ហេតុជូនដំណឹងពីការឃាត់ខ្លួន

-កំណត់ហេតុប្រកាសចម្លើយ

-កំណត់ហេតុផ្តល់ចម្លើយ

-កំណត់ហេតុស្តាប់ចម្លើយជនសង្ស័យ

-កំណត់ហេតុដាក់ពាក្យបណ្តឹង

-កំណត់ហេតុចាប់ខ្លួនតាមដីកាចាប់ខ្លួន

-កំណត់ហេតុឆែកឆេរលំនៅដ្ឋាន

ឯកសារសម្រាប់សម្រួលដល់ការងារអ្នកស៊ើបអង្កេតទាំងនេះអាចឱ្យជៀសវាងកុំឱ្យភ្លេចនីតិវិធី ចាំបាច់ បញ្ញាត្តិ ពុំនោះសោតនឹងត្រូវចាត់ទុកជាមោឃៈ។ មន្ត្រីនគរបាលយុត្តិធម៌ដែលមានបទពិសោធន៍ ត្រូវស៊ើបអង្កេត ក្នុងក្របខ័ណ្ឌស្មុគស្មាញដែលទាមទារឱ្យពិនិត្យកត់ត្រា ស្តាប់ចម្លើយនោះ និយមសរសេរកំណត់ហេតុទាំងអស់ ដើម្បី លំអិតពីប្រតិបត្តិការដែលបានបំពេញ។ ឧទាហរណ៍ ចំពោះមនុស្សឃាតកំណត់ហេតុស្តាប់ចម្លើយ ជនសង្ស័យមិន មែនគ្រាន់តែចម្លើយបួនដប់បន្ទាត់នោះឡើយ។

**២.២. តំលៃគតិយុត្តនៃកំណត់ហេតុ**

មានតែមន្ត្រីនគរបាលយុត្តិធម៌ប៉ុណ្ណោះដែលមានសិទ្ធិសរសេរកំណត់ហេតុ ទោះបីជាគាត់ត្រូវបាន ជំនួយ ដោយភ្នាក់ងារនគរបាលយុត្តិធម៌ក៏ដោយ។

ទោះបីជាកំណត់ហេតុទាំងនេះត្រូវសរសេរឡើង ក្នុងក្របខណ្ឌគតិយុត្តណាក៏ដោយ ក្រមបានបញ្ជាក់យ៉ាង ច្បាស់គ្រង់តំលៃបន្ទាល់ដែលផ្តល់ឱ្យកំណត់ហេតុ។

-**បទល្មើសជាក់ស្តែង** ( មាត្រា ១១០ នៃក្រមនីតិវិធីព្រហ្មទណ្ឌ )

"តាមគោលការណ៍ កំណត់ហេតុមានតំលៃគ្រាន់តែជាព័ត៌មានប៉ុណ្ណោះ។ ប៉ុន្តែកំណត់ហេតុរបស់ មន្ត្រីនគរបាលយុត្តិធម៌ត្រូវទុកជាបន្ទាល់ "ឯកសារដើម" មានន័យថា ត្រូវទុកជាឯកសារដែលត្រូវជឿ រហូតដល់ មានភស្តុតាងផ្ទុយ។ ភស្តុតាងផ្ទុយអាចជូនមកចៅក្រមដោយសេរី តាមគ្រប់មធ្យោបាយត្រឹមត្រូវតាមច្បាប់។

ចៅក្រមធ្វើមូលវិចារណ៍ដោយសេរី លើកំណត់ហេតុដែលធ្វើដោយមន្ត្រីនគរបាលយុត្តិធម៌ ក្នុងក្របខ័ណ្ឌ នៃការស៊ើបអង្កេតបទល្មើសជាក់ស្តែង។"

-**ក្នុងការស៊ើបអង្កេតបឋម** មាត្រា ១១៨ នៃក្រមនីតិវិធីព្រហ្មទណ្ឌ ចែងដូចគ្នានឹងមាត្រាខាងលើ។

-**ក្នុងការស៊ើបអង្កេតតាមដីកាចាត់ឱ្យស៊ើបសួរជំនួស** ក្រមនីតិវិធីព្រហ្មទណ្ឌមិនបានបញ្ជាក់ច្បាស់ពីតំលៃ តាមផ្លូវច្បាប់នៃកំណត់ហេតុសរសេរដោយមន្ត្រីនគរបាលយុត្តិធម៌ទេ។

ដូចនេះ កំណត់ហេតុមានសុពលភាពរហូតដល់មានភស្តុតាងផ្ទុយ។ ភស្តុតាងផ្ទុយអាចជូនមកចៅក្រម តាមគ្រប់មធ្យោបាយ។ ម្យ៉ាងទៀត ចៅក្រមមានសេរីភាពធ្វើមូលវិចារណ៍ពេញលេញ ( មាត្រា ១១០ កថា ខណ្ឌទី ២ និង មាត្រា ១១៨ កថាខណ្ឌទី ២ នៃក្រមនីតិវិធីព្រហ្មទណ្ឌ )។

## **២.៣.វិធានទម្រង់នៃកំណត់ហេតុ**

ក្នុងក្របខ័ណ្ឌនីតិវិធីតុលាការ កំណត់ហេតុត្រូវបានសរសេរទៅតាមទម្រង់ ខុសៗគ្នាមាន ជាអាទិ៍កំណត់ហេតុអាចត្រូវបានគេសរសេរលើ **ក្រដាសបោះពុម្ពរដ្ឋបាល** ដែលគេអោយឈ្មោះថាកំណត់ហេតុ។

តាមវិធាន ទូទៅ គឺជាក្រដាសបោះពុម្ពដែលនៅក្បាលក្រដាសមានចុះចារនិទ្ទេសនី "ព្រះរាជាណាចក្រកម្ពុជា" និង "កំណត់ហេតុ" ដើម្បីអោយមានលក្ខណៈផ្លូវការ។ កំណត់ហេតុនេះក៏មាន ផងដែរនូវនិទ្ទេសនីជាអក្សរពុម្ព (កាលបរិច្ឆេទ ម៉ោង ។ល។) នៅក្នុងសេចក្ដីផ្ដើម។

បើសិន គេគ្មានក្រដាសបោះពុម្ពទេនោះ គេនៅតែអាចប្រើប្រាស់**ក្រដាសទទេមួយសន្លឹក**ដែលនៅលើនោះ គេចុះចំណងជើងទាំងនេះជាអក្សរដៃ។

គេអាចប្រើប្រាស់គំរូកំណត់ហេតុទាំងនេះដើម្បីបញ្ជាក់ពីគ្រប់កិច្ចនៃការស៊ើបអង្កេត (ការស្ដាប់ចម្លើយ ការចាប់ខ្លួន ការសួរចម្លើយ និងការឆែកឆេរលំនៅដ្ឋាន ។ល។) ទោះបីជានៅក្នុងក្របខណ្ឌតិយុត្តណាក៏ ដោយ (ការស៊ើបអង្កេតករណីជាក់ស្ដែង ការស៊ើបអង្កេតបឋម ការស៊ើបអង្កេតតាមដីកាចាត់ឱ្យស៊ើបសួរជំនួស)។

ដើម្បីឱ្យមានប្រសិទ្ធិភាពតាមផ្លូវច្បាប់ ការសរសេរកំណត់ហេតុត្រូវតែគោរពទៅតាមគោលការណ៍ ច្បាប់។

### **២.៣.១. គោលការណ៍ទូទៅ**

ក) **ត្រូវមានភាពជិតណាលគ្នា**រវាងការសរសេរកំណត់ហេតុ និងការបំពេញការស្នើសុំដែលចុះក្នុងកំណត់ហេតុ : ហេតុ ដូចនេះហើយទើបគេត្រូវសរសេរកំណត់ហេតុក្នុងបច្ចុប្បន្នកាលជានិច្ច។

**ខ) ភាពដោយឡែកនៃកំណត់ហេតុ**

តាមគោលការណ៍ នីតិវិធីត្រូវតែមានកំណត់ហេតុមួយសម្រាប់ប្រតិបត្តិការនគរបាលយុត្តិធម៌មួយ។

**គ) អ្នកសរសេរតែម្នាក់**

នៅលើក្បាលក្រដាសនៃកំណត់ហេតុនីមួយៗ ត្រូវដាក់ឈ្មោះ និងឋានៈអ្នកសរសេរ អង្គភាពដែលខ្លួនចំណុះ និងកាលបរិច្ឆេទសរសេរ (មាត្រា ១០៨ នៃក្រមនីតិវិធីព្រហ្មទណ្ឌ)។ អ្នកសរសេរត្រូវមានតែម្នាក់ ប៉ុន្តែគាត់អាចមានជំនួយការដែលមានបញ្ជាក់ក្នុងអង្គកំណត់ហេតុ ហើយត្រូវចុះហត្ថលេខាលើកិច្ចក្រោយពីសរសេរកំណត់ហេតុរួច។

**ឃ) ច្បាប់ចំលងកំណត់ហេតុ**

ក្នុងការអនុវត្ត គេត្រូវតែធ្វើច្បាប់ចំលងកំណត់ហេតុត្រឹមត្រូវតាមច្បាប់មួយជានិច្ច។ អ្នកសរសេរជាអ្នកដែលត្រូវអះអាងពីភាពត្រឹមត្រូវតាមច្បាប់នៃកំណត់ហេតុចម្លងនេះ។ ដូចនេះ កំណត់ហេតុ ២ ច្បាប់ ត្រូវបញ្ជូនទៅព្រះរាជអាជ្ញា ឬចៅក្រមស៊ើបសួរ។

**២.៣.២. គោលការណ៍ដទៃទៀត**

ក) កំណត់ហេតុក៏អាចត្រូវ**សរសេរដោយដៃ ឬវាយអង្គុលីលេខ។**

ខ) គេអាចប្រើប្រាស់តែភាសាខ្មែរប៉ុណ្ណោះ (មាត្រា ៥ នៃរដ្ឋធម្មនុញ្ញ)។

គ) កំណត់ហេតុគ្រប់សន្លឹកត្រូវតែមានហត្ថលេខារបស់អ្នកសរសេរ (មាត្រា ១០៨ នៃក្រមនីតិវិធីព្រហ្មទណ្ឌ)។

ឃ) កំណត់ហេតុត្រូវមាននិទ្ទេសន៍មួយ ឬច្រើនដើម្បីបញ្ជាក់ឱ្យច្បាស់លាស់ថាទម្រង់ការដែលត្រូវចងភ្ជាប់ ដោយច្បាប់ទៅនឹងប្រតិបត្តិការនគរបាលយុត្តិធម៌ត្រូវបានគោរព។

ឧទាហរណ៍ : ចំពោះកំណត់ហេតុស្តាប់ចម្លើយ : និទ្ទេសន៍បញ្ជាក់ថា អ្នកប្តឹងបានអានកំណត់ហេតុដោយខ្លួនឯង ហើយប្រកាសថាមិនផ្លាស់ប្តូរចម្លើយ។

ចំពោះកំណត់ហេតុឆែកឆេរលំនៅដ្ឋាន : និទ្ទេសន៍បញ្ជាក់វត្តមានជាប្រចាំរបស់បុគ្គលដែលត្រូវបានឆែកឆេរលំនៅដ្ឋាន។

**២.៤. រចនាសម្ព័ន និងបច្ចេកទេសសរសេរ**

កំណត់ហេតុទាំងមូលមានប្រាំមួយផ្នែក : មាតិកា សេចក្តីផ្តើម (ឬផ្នែកខាងដើម) អង្គកំណត់ហេតុ សេចក្តីបញ្ចប់ រឹមទំព័រ និទ្ទេសន៍ និងឧបសម្ព័ន្ធ។

**២.៤.១. ចំណងជើង : កំណត់ហេតុ**

ចំណងជើងសរសេរខាងលើទំព័រ ដើម្បីជៀសវាងភាពស្រពិចស្រពិលចំពោះប្រភេទនៃកិច្ចដែលសរសេរ។

**២.៤.២. សេចក្តីផ្តើមនីតិវិធី ឬផ្នែកខាងដើម**

អ្នកសរសេរត្រូវសរសេរ :

- **កាលបរិច្ឆេទ**ជាអក្សរទាំងអស់

**-ម៉ោង**ជាអក្សរទាំងអស់ (ប្រការនេះមិនមានចែងក្នុងអត្ថបទណាមួយឡើយ ប៉ុន្តែបានផ្តល់អត្ថប្រយោជន៍សម្រាប់សញ្ញាណនៃម៉ោងស្របច្បាប់- ការឆែកឆេរលំនៅដ្ឋាន-អាជ្ញាយុកាល-ឬដើម្បីគោរពសិទ្ធិបុគ្គល -ការឃាត់ខ្លួន) ។

- **ឈ្មោះ ត្រកូល ឋានៈ គុណសម្បត្តិ និងលំនៅដ្ឋានរបស់អ្នកសរសេរ**សម្រាប់បញ្ជាក់សមត្ថកិច្ចតាមសាច់រឿង និង សមត្ថកិច្ចដែនដី។

- **ក្របខណ្ឌតតិយុត្ត**នៃសកម្មភាពនគរបាលយុត្តិធម៌ដែលបញ្ជាក់ក្នុងកំណត់ហេតុ តាមគោលការណ៍ត្រូវតែចុះនិទ្ទេសន៍។

- **ជូនដំណឹងទៅអាជ្ញាធរនានា** ក្នុងគ្រប់ករណីដែលត្រូវបានបញ្ញត្តិដោយអត្ថបទច្បាប់ (ការឆែកឆេរ ការពន្ធនាគារសមត្ថកិច្ចដែនដី) ។

- **ទីកន្លែងសរសេរ**កិច្ច

- **អង្គហេតុ ឬលិខិតដែលបើកនីតិវិធី** ឬដែលជាសំអាងហេតុឱ្យប្រតិបត្តិការដែលត្រូវចំលងដាក់ក្នុងកំណត់ហេតុ។

- **ចាត់តាំងបុគ្គលមានវត្តមាននានា**

ត្រូវតែចុះនិទ្ទេសន៍ជំនួយការក្នុងកំណត់ហេតុ (ឧទាហរណ៍ : អ្នកបកប្រែ ឪពុក ឬម្តាយអនីតិជនម្នាក់ "ដែលត្រូវសួរចម្លើយ" សាក្សីដែលត្រូវសុំសម្រាប់ការឆែកឆេរ សហការី និងជំនួយការ ។ល។) ។

### ២.៤.៣. អង្គកំណត់ហេតុ

អង្គកំណត់ហេតុរួមមានការពិនិត្យកត់ហេតុ ការស្តាប់ចម្លើយផ្សេងៗ សេចក្តីសន្និដ្ឋាន ការជូនដំណឹងទំនាក់ទំនងផ្ទៀងផ្ទាត់ ។ល។

សម្រាប់ការសរសេរ កាលណាអ្នកសរសេរសំដែងគំនិត ត្រូវប្រើប្រាស់បុរសទីមួយពហុវចនៈ "យើង» ។

កំណត់ហេតុគឺជាឯកសារសត្យានុម័តមួយ។ កំណត់ហេតុនេះត្រូវតែ **ជាការឆ្លុះបញ្ចាំងយ៉ាងសុក្រឹត្យ** ពីចម្លើយ រាយការណ៍ដែលបានកត់ត្រា ឬអំពើផ្សេងៗដែលបានសង្កេតឃើញ។

**សំនួរ-ចម្លើយ :**

នៅពេលចាំបាច់ ត្រូវចោទសំនួរមួយ ឬច្រើនទៅអ្នកប្តឹង (ជនរងគ្រោះ សាក្សី ចារី) អត្ថបទសំនួរជាក់លាក់ ត្រូវតែសរសេរក្នុងកំណត់ហេតុ។ ចម្លើយត្រូវកត់ត្រាភ្លាម១។

ក្នុងពេលសួរចម្លើយ សំនួរដែលសរសេរជាលាយលក្ខណ៍អក្សរអនុញ្ញាតឱ្យបង្ហាញយ៉ាងជាក់ស្តែងនូវភាពមិនស្មោះត្រង់របស់សាម៉ីខ្លួនតាមរយៈការនិយាយផ្ទុយជាបន្តបន្ទាប់ពីអ្វីដែលចុះក្នុងចម្លើយ។

របៀបមួយទៀតនោះគឺធ្វើ**ការឃាត់ខ្លួនជាបន្តបន្ទាប់។** គេប្រើប្រាស់មធ្យោបាយនេះ កាលណាគេចង់សំរួល ដល់សាក្សីម្នាក់ដែលមានការលំបាកក្នុងការរៀបចំគំនិតរបស់ខ្លួនតាមលំដាប់លំដោយ។ ដូចនេះ គេត្រូវចុះនិទ្ទេសន៍ ការឃាត់ខ្លួន មុនការផ្តល់ចម្លើយរាយការណ៍របស់សាក្សី។ ជានិច្ចកាល គេប្រើប្រាស់ដំណើរការនេះក្នុងដំណាក់កាល ទី ២ នៃការស្តាប់ចម្លើយ ដើម្បីពិនិត្យឡើងវិញនូវចំណុចនានាដែលអ្នកប្តឹងអាចភ្លេច។

ក្នុងកំណត់ហេតុមិនត្រូវមានចន្លោះបន្ទាត់ឡើយ ហើយក៏មិនត្រូវមានការលប់ ឬការសរសេរបន្ថែមនោះដែរ។ រាល់ការឆូតលប់ ឬការយោងត្រូវសរសេរក្នុងរឹមទំព័រ (មាត្រា ៧២ នៃក្រមនីតិវិធី ព្រហ្មទណ្ឌ)។ បើសរសេរសល់មាន ចន្លោះ អាចបំពេញដោយបន្ទាត់ពងត្រី នៅខាងដើម ឬចុងបន្ទាត់។

ដើម្បី**កែកំហុស** កំណត់ហេតុសរសេរដោយដៃ ឬវាយអង្គុលេខ និងដើម្បីជៀសវាងរាល់ការជំទាស់ ពេលក្រោយ ត្រូវតែបែងចែកវិធីសាស្ត្រជាច្រើនដែលអាចប្រែប្រួលទៅតាមលក្ខណៈនៃកំហុសដែលត្រូវកែតំរូវ :

**- ការលប់ធម្មតាគ្មានថែមពាក្យ**

ក្នុងករណីនេះ ត្រូវលប់ពាក្យដោយគូសបន្ទាត់ឆូត។ គេបង់លេខលើពាក្យឆូត នីមួយ១តាម លំដាប់លេខរៀង។ នៅចុងបញ្ចប់កំណត់ហេតុ មាននិទ្ទេសន៍បញ្ចប់មួយរំឭកចំនួនពាក្យឆូតដែលទុកជា មោឃៈ។

**- ការយោងធម្មតា (ដោយមានថែមពាក្យ) :**

កាលណាអ្នកសរសេរភ្លេចពាក្យមួយ ឬច្រើនក្នុងអង្គកំណត់ហេតុនោះ ត្រូវតែបន្ថែមពាក្យទាំងនោះក្នុងអង្គកំណត់ហេតុវិញ។ ដូចនេះ ត្រូវដាក់សញ្ញា * ខាងលើបន្តិច ចន្លោះពាក្យពីរត្រង់កន្លែងដែលត្រូវបញ្ចូលពាក្យ ឬពាក្យភ្លេច។ សញ្ញានេះយោងទៅរឹមទំព័រត្រង់បន្ទាត់ដែលមានការភ្លេចពាក្យ ហើយត្រូវបង់លេខលើពាក្យនីមួយ១ដែលចង់បញ្ចូលទាំងនោះ។ ការកែតម្រូវត្រូវមានហត្ថលេខារបស់អ្នកសរសេរ អ្នកប្តឹង និងនិទ្ទេសន៍បញ្ចប់ដែល រំឭក ការបន្ថែមពាក្យទាំងនេះ។

«ក្រោយពីអានដោយខ្លួនឯង អ្នកប្តឹងមិនផ្លាស់ប្តូរចម្លើយ ហើយយល់ព្រមចុះហត្ថលេខាជាមួយយើង នៅម៉ោង ១៥ ព្រមទាំងទទួលស្គាល់ថាមានបន្ថែមពាក្យពីរនៅរឹមទំព័រ » ។

**- ការលុបដោយមានថែមពាក្យនៅរឹមទំព័រ៖** ការថែមពាក្យត្រូវហាមឃាត់ ដូចនេះត្រូវថែមពាក្យដោយការលុប និងការយោង ។

គេរាប់ពាក្យលុបដែលគេបានបង់លេខ បន្ទាប់មក គេធ្វើដូចក្នុងករណីការយោងធម្មតាដែរ ។ ដូចនេះការបង់លេខពីរបៀបផ្សេងគ្នាត្រូវបានអនុវត្ត ។ និទ្ទេសន៍ចុងក្រោយរំឭកចំនួនពាក្យលុប ដែលទុកជាមោឃៈ និងពាក្យបន្ថែម ។

«ក្រោយពីអានដោយខ្លួនឯង អ្នកប្តឹងមិនផ្លាស់ប្តូរចម្លើយ ហើយចុះហត្ថលេខាជាមួយយើងនៅម៉ោង ១៥ ព្រមទាំងទទួលស្គាល់ថាមានលុបពីរពាក្យ និងបន្ថែមបីពាក្យនៅរឹមទំព័រ ។ »

**- វិធីសាស្ត្រកែសម្រួលងាយប្រើដែលអនុញ្ញាតឱ្យបញ្ចៀសការលុប និងការយោង**

ពេលអ្នកសរសេរមើលឃើញនូវកំហុស ឬការភ្លេចភ្លាម ខ្លួនអាចដោះស្រាយបញ្ហានេះបានដោយប្រើឃ្លា «ឬដើម្បីឱ្យកាន់តែច្បាស់ជាងនេះ» ។

អ្នកសរសេរមើលឃើញនូវកំហុស ឬការភ្លេចនៅខាងចុងកំណត់ហេតុ ។

ឧទាហរណ៍ ដើម្បីជៀសវាងកុំសរសេរចម្លើយឡើងវិញកាន់តែវែង គេអាចបន្ថែមនៅខាងចុងកំណត់ហេតុពីក្រោមហត្ថលេខាអ្នកប្តឹង ឬអ្នកសរសេរនូវឃ្លាណាមួយខាងក្រោម៖

«ក្រោយពីអានដោយខ្លួនឯង និងចុះហត្ថលេខារួច លោក....ចង់បង្ហាញជូនភាពពិតនិងសេចក្តីកែសម្រួលដូចតទៅ ៖ ខ្ញុំបានច្រលំនៅពេលដែលខ្ញុំអះអាងប្រាប់លោកថា...។»

**ឬ៖**

«ដូចគ្នានេះដែរ យើងស្តាប់សារជាថ្មីលោក... ដែលប្តឹងរាយការណ៍ដល់យើង....»

**- ការបង់លេខកំណត់ហេតុ**

ចំពោះកំណត់ហេតុ គេសរសេរតែលើក្រដាសម្ខាងតែប៉ុណ្ណោះ ។

កាលណាក្រដាសពុម្ពកំណត់ហេតុមិនគ្រប់គ្រាន់ដោយសារអត្ថបទវែងពេក ចាំបាច់ត្រូវសរសេរបន្តលើសន្លឹកក្រដាសធម្មតា ប៉ុន្តែត្រូវចុះនិទ្ទេសន៍នៅខាងដើម ៖

វិញ្ញកកម្មវត្ថុនៃកិច្ច ( ការស្តាប់ចម្លើយពី...ការឆែកឆេរ...)

វិញ្ញកលេខបញ្ជី និងលេខលំដាប់កំណត់ហេតុ ( កំណត់ហេតុលេខ ខខ,យយ)

សេចក្តីចង្អុលបង្ហាញលេខ នៃផ្នែកបន្ត : ផ្នែកបន្តលេខ- (ឬសន្លឹកលេខ) ។

ឧទាហរណ៍ : ផ្នែកបន្តកំណត់ហេតុលេខ ១០៤/៥ ទំព័រទី ២ ផ្នែកបន្តការស្តាប់ចម្លើយលោក.....ទំព័រទី២

**២.២.៤. កិច្ចបញ្ចប់នៃកំណត់ហេតុ ហត្ថលេខា និងអាទិសង្ខេប**

**( មាត្រា ៧២ នៃក្រមនីតិវិធីព្រហ្មទណ្ឌ)**

គ្រប់កំណត់ហេតុ**ត្រូវមានហត្ថលេខាអ្នកសរសេរ** ខាងក្រោម ខាងស្តាំសន្លឹកនីមួយៗ ក្រោមនិទ្ទេសន៍បិទ ។ **ជំនួយការ**ដែលមានចុះនិទ្ទេសន៍ក្នុងកំណត់ហេតុ ក៏ត្រូវតែចុះហត្ថលេខាផងដែរ ។

គ្រប់កំណត់ហេតុស្តាប់ចម្លើយត្រូវមានហត្ថលេខា**អ្នកប្តឹង** ខាងក្រោមសន្លឹក ពីក្រោមនិទ្ទេសន៍បិទ។ អ្នកប្តឹងត្រូវតែអានកំណត់ហេតុឡើងវិញជាមុនសិន។ បើគាត់ មិនចេះអក្សរ ត្រូវចុះថាគាត់មិនចេះអក្សរ ហើយមន្ត្រីនគរបាល យុត្តិធម៌ត្រូវអានកំណត់ហេតុដោយសំលេងខ្លាំងៗ។ អ្នកប្តឹងក៏អាចផ្តិតមេដៃខាងក្រោមកំណត់ហេតុ ( មាត្រា ៧២ នៃក្រមនីតិវិធីព្រហ្មទណ្ឌ ) ផងដែរ ។

ហត្ថលេខាបុគ្គលត្រូវចោទក៏អាចតម្រូវឱ្យមានផងដែរ ក្នុងសម្មតិកម្មណាមួយក្រៅពីការស្តាប់ចម្លើយ (ការឃាត់ខ្លួន ការឆែកឆេរ) ។

បើសិនជា ទម្រង់**បិទ**មិនមានការផ្លាស់ប្តូរនោះ និទ្ទេសន៍ម៉ោងបញ្ចប់ការសរសេរកិច្ច ប្រែប្រួលទៅតាមកំណត់ហេតុនីមួយៗ។ និទ្ទេសន៍នេះពុំមានប្រយោជន៍ឡើយសម្រាប់បណ្តឹង និងការស្តាប់ចម្លើយសាក្សី ។ ប៉ុន្តែកាន់តែ ប្រសើរ បើសិននិទ្ទេសន៍មានក្នុងគ្រប់កិច្ចដទៃទៀតដែលចោទជនសង្ស័យ ទោះបីជាសាមីខ្លួនមិនត្រូវបានឃាត់ខ្លួន ក៏ដោយ ។ ជូនកាល ទម្រង់ទាំងនេះត្រូវប្រែប្រួលទៅតាមកំណត់ហេតុដែលសរសេរ ដោយបញ្ជាក់ក្នុងកំណត់ហេតុ នូវវត្តមានអ្នកបកប្រែ សលាកប័ត្រវត្ថុបិទស្លាកបោះត្រា ការបដិសេធ ឬការមិនអាចអានបាន និង (ឬ) មិនអាច ចុះហត្ថលេខា...

**២.៤.៥. រឹមទំព័រ**

ផ្នែកសរសេរជាអក្សរពុម្ពក្នុងកំណត់ហេតុមាននិទ្ទេសន៍ក្នុងរឹមទំព័រដូចតទៅ :

**លេខនីតិវិធី និងលេខកូដកំណត់ហេតុក្នុងនីតិវិធី :**

ត្រង់ចំណងជើង "លេខ"ត្រូវបង់លេខ ដែលនៅពីក្រោមលេខនេះ នីតិវិធីដែលចាត់ជាបានការត្រូវបាន ចុះបញ្ជីនៅអង្គភាពរបស់អ្នកស៊ើបអង្កេតចំណុះ (លេខនេះផ្តល់ដោយអ្នកគ្រប់គ្រងលិខិតស្នាមតុលាការ ដែលកត់ត្រា តាមលំដាប់នូវនីតិវិធីដែលអង្គភាពសរសេរ)។ នៅក្រោយលេខនេះ មានបន្ទាត់ឆូតមួយ ត្រូវដាក់លេខ កូដកំណត់ហេតុ។ កំណត់ហេតុទី១ ដែលសរសេរក្នុងនីតិវិធីមានលេខកូដ ១ ទោះបីមានច្រើនសន្លឹក ក៏ដោយ កំណត់ហេតុទី២ មានលេខកូដ ២ ។ល។

**ចំណងជើង " សំនុំរឿង "**

និទ្ទេសន៍ដែលចុះក្រោមចំណងជើងនេះជួយសំរួលដល់ការធ្វើអត្តសញ្ញាណកម្ម អោយបានលឿន។ ក្រោមចំណងជើង " សំនុំរឿង " មានចំណងជើងរងចំនួនពីរ :

**១) ឈ្មោះមួយ ឬច្រើនរបស់ចារីម្នាក់ ឬច្រើននាក់**

-កាលណាមានពាក្យបណ្តឹងជាក់ច្បាស់ទូទៅនៃពិរុទ្ធភាពប្រឆាំងនឹងបុគ្គលម្នាក់ អ្នកស៊ើបអង្កេតសរសេរ : សំនុំករណីប្រឆាំង/...(ឈ្មោះ ត្រកូល)

-កាលណាគេមិនទាន់ស្គាល់ចារីនៃបទល្មើស ករណីត្រូវសរសេរ ប្រឆាំង/ X ។

**២) ប្រភេទនៃអង្គហេតុ ឬ " ព្រឹត្តិការណ៍ "**

ឧទាហរណ៍ :-អំពើលួចដោយគាស់ទំលុះទំលាយ

**ចំណងជើង " កម្មវត្ថុ "**

អ្នកសរសេរត្រូវរំលឹកនៅក្រោមចំណងជើងនេះ នូវប្រភេទនៃប្រតិបត្តិការនគរបាលយុត្តិធម៌ដែលចុះក្នុង កំណត់ហេតុ (បណ្តឹង ការស្តាប់ចម្លើយ ការឆែកឆេរ ។ល។) ក៏ដូចជាក្នុងអត្តសញ្ញាណសង្ខេបរបស់បុគ្គល ដែលត្រូវ គេស៊ើបអង្កេត។

**<u>២.៤.៦. និទ្ទេសន៍ និងឧបសម្ព័ន្ធនានា</u>**

និទ្ទេសន៍ និងឧបសម្ព័ន្ធសម្រាប់បង្ហាញប្រតិបត្តិការរាយរង ការស្នើសុំបន្ទាប់បន្សំដែលមានទំនាក់ទំនង ដោយផ្ទាល់ជាមួយអត្ថន័យកំណត់ហេតុមួយ ដូចជាការភ្ជាប់ឯកសារ លិខិតមួយដែលបុគ្គលត្រូវស្តាប់ចម្លើយ ប្រគល់ជូន ឬដែលគេយល់ថាមានប្រយោជន៍សម្រាប់ការស៊ើបអង្កេត។

ក្រោយពីបិទកំណត់ហេតុ អ្នកសរសេរត្រូវចុះក្នុងរឹមទំព័រ នូវចំណងរងជើងមួយ ឬច្រើនដែលមាន ដូចជា "និទ្ទេសន៍" ឬ "ឧបសម្ព័ន្ធ" ឬលិខិតភ្ជាប់...។

**ឧបសម្ព័ន្ធ :**

យើងបញ្ចូលជាឧបសម្ព័ន្ធនៃកំណត់ហេតុនេះនូវប្លង់ទិកន្លែង...

**លិខិតភ្ជាប់ :**

សុំវង់ធនាគាររបស់លោក........ដែលធនាគារប្រគល់ជូនយើង...

**សំគាល់ :** ក្រៅពីគោលការណ៍សម្រាប់អនុវត្តក្នុងកំណត់ហេតុដូចរៀបរាប់ខាងលើ កំណត់ហេតុនីតិវិធីនគរបាលយុត្តិធម៌ទាំងអស់ត្រូវបានកំណត់វិធានដោយឡែក។ ឧទាហរណ៍ មានទម្រង់កំណត់ហេតុស្តាប់ចម្លើយផ្សេងពីទម្រង់ប្រើសម្រាប់ពិនិត្យកត់ហេតុ។

**<u>២.៥. ធាតុមួយចំនួនក្នុងរបៀបសរសេរនីតិវិធី</u>**

អ្នកសរសេរកិច្ចត្រូវប្រើប្រាស់បុរសទីមួយពហុវចនៈជាដាច់ខាត (យើង) ដើម្បីចង្អុលបង្ហាញពីខ្លួនឯង។ ប្រការនេះអាចឱ្យបង្ហាញ**លក្ខណៈផ្លូវការ**នៃកំណត់ហេតុ (ដូចជាករណី សាលក្រម លិខិតធ្វើឡើងដោយសារការី ។ល។)។

គោលបំណងនៃនីតិវិធីតុលាការមួយគឺបង្ហាញបទល្មើសមួយ ឬច្រើន ហើយដាក់ការទទួលខុសត្រូវលើចារី ម្នាក់ ឬច្រើននាក់ អ្នកស៊ើបអង្កេតត្រូវតែខិតខំបង្ហាញឱ្យប្រត្យក្ស ក្នុងកំណត់ហេតុថាគេបាន **ប្រមូលធាតុបង្កបទ ល្មើស**នានា (ធាតុនីត្យានុកូល ធាតុសត្យានុម័ត ធាតុអត្តនោម័ត)។

ដើម្បីធ្វើឱ្យនីតិវិធីងាយយល់ អ្នកសរសេរត្រូវតែមានចំណេះដឹងគ្រប់គ្រាន់ខាងភាសាខ្មែរ វាក្យស័ព្ទ វាក្យសម្ព័ន្ធ អក្ខរាវិរុទ្ធ និងការដាក់សញ្ញា។ អ្នកសរសេរត្រូវស្វែងរក**របៀបសរសេរមួយ ដែលសមស្រប** ។

អត្ថបទដែលអ្នកសរសេរនីតិវិធីស្នើឱ្យបុគ្គលនានាអាន (ជនដែលផ្តល់ចម្លើយ ចៅក្រម ។ល។) ត្រូវតែជាអត្ថបទសង្ខេបច្បាស់លាស់ និងលម្អិតដែលក្នុងនោះមានវេយ្យាករណ៍ និងវាក្យស័ព្ទសាមញ្ញងាយយល់។ អ្នកអាន អាចយល់បានភ្លាមនូវអ្វីដែលអត្ថបទចង់និយាយ។

ប្រយោគត្រូវមាន**ន័យសង្ខេប**រាល់អ្វីដែលចាំបាច់ដើម្បីយល់បានដោយមិនភ្លេច។

បើសិនជា ការស្តាប់ចម្លើយ ឬការត្រួតពិនិត្យបទល្មើស អ្នកសរសេរត្រូវសម្តែង**ភាពស្ងប់ស្ងាត់**

ហើយមិនត្រូវសម្តែងចេញនូវភាពរន្ធត់ មនោសញ្ចេតនាផ្ទាល់ខ្លួន ឬ ការរំជួលចិត្តនោះឡើយ។ អ្នកស៊ើបអង្កេតមិនត្រូវជឿតាមគេឡើយ ផ្ទុយទៅវិញ ខ្លួនត្រូវបង្ហាញ នូវ**ភាពអព្យាក្រឹត**។

ការប្រើប្រាស់ភាសាត្រូវតែសុក្រឹត ត្រូវតែប្រើប្រាស់ឱ្យប្រយ័ត្នប្រយែង នូវវាក្យស័ព្ទហួសប្រមាណ (ពាក្យ ឈ្លើយ ពាក្យតាមតំបន់ ឬអាសគ្រាម សំនួនពាក្យស្និទ្ធស្នាល ពាក្យដែលមិនមែនជាពាក្យខ្មែរ។ល។) ឬសំនួន ពាក្យមិនត្រឹមត្រូវ ឬមិនច្បាស់លាស់។

ក្នុងការស្តាប់ចម្លើយ នគរបាលត្រូវតែប្រើប្រាស់នូវភាសាដែលបុគ្គលត្រូវផ្តល់ចម្លើយអាចយល់បាន។ បេសកកម្មរបស់នគរបាលគឺចំលងសំដីដែលបាននិយាយចំពោះមុខខ្លួន។ អ្នកមិនចេះអក្សរម្នាក់ និងសាស្ត្រាចារ្យសាកលវិទ្យាល័យម្នាក់មិនផ្តល់ចម្លើយដោយៈប្រើពាក្យពេជដូចគ្នានោះទេ។

គេក៏និយមសរសេរ**កថាខ័ណ្ឌខ្លីៗ**ដើម្បីប្រមូលរាល់ប្រភេទទិន្នន័យដូចគ្នា ហើយរៀបយ៉ាងសមស្របក្នុងកំណត់ហេតុ។

ពេលជួបនឹងអក្សរកាត់មួយជាលើកទីមួយ អ្នកសរសេរត្រូវអានពាក្យពេញនៃអក្សរនោះ និងអត្ថន័យឱ្យច្បាស់ដើម្បីស្រួលយល់ខ្លួនឯង។ លើកក្រោយ ទើបខ្លួនអាចប្រើត្រឹមអក្សរកាត់បាន។

ចំពោះកំណត់ហេតុពិនិត្យកត់ហេតុ របៀបសរសេរត្រូវតែព្រិតព្រៀង និងមានលក្ខណៈបច្ចេកទេសដែលស្តែងតាមរយៈ ការពិពណ៌នាមួយសង្ខេប ងាយយល់ ជាក់លាក់ សត្យានុម័ត សមហេតុផល និងមានសណ្តាប់ធ្នាប់អំពីអ្វី ដែលអ្នកសរសេរបានសង្កេតឃើញ។

ទីបញ្ចប់កំណត់ហេតុដែលជា**ឯកសារគតិយុត្តិមួយ** ដូចនេះត្រូវប្រើបច្ចេកស័ព្ទត្រឹមត្រូវតាមក្រមនីតិវិធីព្រហ្មទណ្ឌ។

**<u>៣.របាយការណ៍</u>**

របាយការណ៍អាចត្រូវសរសេរដោយមន្ត្រីនគរបាលយុត្តិធម៌ (ជាអាទិ៍របាយការណ៍សំយោគ) ប៉ុន្តែ របាយការណ៍ទាំងនេះគឺជា**មធ្យោបាយសំដែងគំនិតរបស់ភ្នាក់ងារនគរបាលយុត្តិធម៌** និងភ្នាក់ងារដោយឡែកជាលាយលក្ខណ៍អក្សរ។

-មាត្រា ៧៨ នៃក្រមនីតិវិធីព្រហ្មទណ្ឌចែងថារបាយការណ៍សរសេរដោយភ្នាក់ងារនគរបាលយុត្តិធម៌មានតំលៃត្រឹមពតិមានធម្មតាប៉ុណ្ណោះ (ទោះបីជាក្នុងក្របខ័ណ្ឌគតិយុត្តិណាក៏ដោយ)។

-មាត្រា ៨២ នៃក្រមនីតិវិធីព្រហ្មទណ្ឌចែងថារបាយការណ៍របស់មន្ត្រី និងភ្នាក់ងារសាធារណៈផ្សេងទៀត ដែលច្បាប់ដោយឡែកបានប្រគល់អំណាចឱ្យត្រួតពិនិត្យបទល្មើសមួយចំនួន ក៏មានតំលៃជាពតិមានធម្មតាផងដែរ ។

**៣.១.របាយការណ៍សំយោគ**

របាយការណ៍ដោយឡែកប្រភេទនេះត្រូវធ្វើឡើងក្រោយពីបញ្ចប់ការស៊ើបអង្កេត ហើយត្រូវដាក់ពីមុខ កំណត់ហេតុផ្សេងទៀតនៃនីតិវិធី ។ នៅពេលបញ្ចប់នីតិវិធី លក្ខណៈពណ៌នាសុចសាទរបស់កំណត់ហេតុ និងការ រៀបតាមលំដាប់កាលតម្រូវអោយអ្នកស៊ើបអង្កេតធ្វើរបាយការណ៍មួយ សម្រាប់សំយោគសំនុំរឿង ។ នៅពេល បញ្ជូនទៅចៅក្រមមានសមត្ថកិច្ច របាយការណ៍អាចរំឭក ឡើងវិញនូវសំនុំរឿង បុគ្គលិកលក្ខណៈរបស់ជនត្រូវ ចោទ និងបង្ហាញឱ្យឃើញជាក់ស្តែងនូវ ការស្រាវជ្រាវដែលមិនត្រូវបានធ្វើ ឬធ្វើ មិនទាន់ចប់ ។

ការសំយោគការស៊ើបអង្កេត ធ្វើឱ្យលេចចេញនូវដំណើរប្រព្រឹត្តទៅនៃរឿងហេតុ និងការគិតរបស់អ្នក ស៊ើបអង្កេត ព្រមទាំងបង្កើតឡើងវិញនូវបរិយាកាសរឿងក្តី ទាំងនេះគឺជាគោល បំណងនៃរបាយការណ៍ សំយោគ ។

ពុំមានរបាយការណ៍គំរូនោះទេ ពីព្រោះថាសំនុំរឿងសុទ្ធតែខុសគ្នាទាំងអស់ ។

ប៉ុន្តែ គេទទួលស្គាល់ថាជាទូទៅរបាយការណ៍សំយោគមាន៥ផ្នែក : ផ្នែកខាងដើម អង្គហេតុ ការស៊ើប អង្កេត ការសន្និដ្ឋាន និទ្ទេសនី និងឧបសម្ព័ន្ធ ។

**៣.១.១. ផ្នែកខាងដើម**

របាយការណ៍សំយោគត្រូវសរសេរលើក្រដាសមួយដែល ផ្នែកឆ្វេងខាងលើមានអត្តសញ្ញាណអង្គភាព ។

របាយការណ៍ត្រូវចុះកាលបរិច្ឆេទសរសេរ តែមិនមែនជាកាលបរិច្ឆេទនៃរឿងហេតុនោះទេ ។

អ្នកសរសេររៀបរាប់ឋានៈ ឈ្មោះ និងត្រួកូលរបស់ខ្លួន ។

របាយការណ៍ត្រូវផ្ញើទៅចៅក្រម (ជូនកាលប្រធានអង្គភាព) ក្រោយពីបានជម្រាបឋានានុក្រមខ្លួនរួច ។

ផ្នែកខាងដើមរបាយការណ៍សំយោគមានចំណងជើងចំនួន ៤ ។

**-១-" កម្មវត្ថុ "**

ក្នុងចំណងជើងនេះ ត្រូវបានចុះនិទ្ទេសនី : ការកំណត់ចរិតលក្ខណៈព្រហ្មទណ្ឌនៃ អង្គហេតុ កាលបរិច្ឆេទ មួយ (ឬច្រើន ) នៃអង្គហេតុ កន្លែងមួយ (ឬច្រើន ) ដែលបទល្មើសមួយ (ឬច្រើន ) ត្រូវបានប្រព្រឹត្ត

និងអត្តសញ្ញាណមួយ (ឬច្រើន) របស់ជនរងគ្រោះ។

**-២-" សំនុំរឿង "**

ត្រូវចុះករណីប្រឆាំងបុគ្គល X... (អញ្ញាតជន) បើសិនជា ចារីម្នាក់ (ឬច្រើននាក់) មិនត្រូវបាន ស្គាល់អត្តសញ្ញាណ ឬផ្ទុយទៅវិញ បើចារីត្រូវបានគេស្គាល់អត្តសញ្ញាណ ត្រូវចុះករណី ប្រឆាំងបុគ្គលម្នាក់ (ឬច្រើននាក់) ឈ្មោះ។

**-៣- " យោង "**

បើសិនជា អង្គភាពនគរបាលផ្តួចផ្តើមគំនិតទទួលសំនុំរឿង ត្រូវចុះក្នុងចំណងជើងនេះនូវនិទ្ទេសន៍ "គំនិតផ្តួចផ្តើម ផ្ទាល់ខ្លួន " និងតាមសេចក្តីណែនាំរបស់អយ្យការ។

បើសិនជា ការស៊ើបអង្កេតត្រូវបានធ្វើឡើងតាមសេចក្តីណែនាំរបស់អាជ្ញាធរតុលាការ ត្រូវចុះ :

"សេចក្តីសន្និដ្ឋានស៊ើបសួរលេខ...ចុះថ្ងៃទី...របស់លោកព្រះរាជអាជ្ញាអមសាលាដំបូង..." ឬ

"សេចក្តីសន្និដ្ឋានស៊ើបសួរតាមទូរស័ព្ទចុះថ្ងៃទី...របស់លោកព្រះរាជអាជ្ញាអមសាលាដំបូង... " ឬ

"ដីកាចាត់ឱ្យស៊ើបសួរជំនួសលេខ...ចុះថ្ងៃទី...របស់លោក (ឈ្មោះ ត្រកូល) ចៅក្រមស៊ើបសួរនៅសាលាដំបូង... "

**-៤-" លិខិតភ្ជាប់ "**

នៅក្នុងលិខិតភ្ជាប់នេះមានរាយឈ្មោះឯកសារដែលភ្ជាប់ទៅនឹងរបាយការណ៍ (លិខិតដែល បញ្ជូនដោយ ចៅក្រមដែលសុំឱ្យស៊ើបអង្កេត សុំដំណើរការនីតិវិធី និងឧបសម្ព័ន្ធ...) និងអត្តសញ្ញាណវត្ថុបិទស្លាក បោះត្រាដែលរក្សាទុកនៅការិយាល័យក្រឡាបញ្ជីសាលាដំបូង។

ឧទាហរណ៍ : សេចក្តីសន្និដ្ឋានស៊ើបសួររបស់លោក (ឬដីកាចាត់ឱ្យស៊ើបសួរជំនួសរបស់លោក) និងសំនុំរឿងដែលបញ្ជូនទៅត្រូវបានបញ្ជូនត្រលប់មកវិញ។

. នីតិវិធីមួយរួមមាន ឃ ...កំណត់ហេតុមានលេខរៀងពី /១/ ដល់ .លេខ និងច្បាប់ចំលងត្រឹមត្រូវ។

. សៀវភៅរូបថត និងប្លង់ទីកន្លែង។

. X ....វត្ថុបិទស្លាកបោះត្រារក្សានៅសាលាដំបូង....

នៅពីក្រោមបន្ទិច អ្នកសរសេរត្រូវសរសេរសេចក្តីផ្តើមដែលបង្ហាញពីការស៊ើបអង្កេត និងអ្នកសហការ

ជាមួយខ្លួនដោយសង្ខេប។ ជាទូទៅ សេចក្តីផ្តើមនេះផ្តើមឡើងដោយឃ្លាបែបនេះ....: ខ្ញុំបាទមានកិត្តិយសសូម ជម្រាបជូនលោកពីលទ្ធផលនៃការស៊ើបអង្កេតដែលប្រព្រឹត្តិទៅក្នុង...( ក្របខ័ណ្ឌស៊ើបអង្កេត) ជមន្ទួយដោយ ព្រិន្ទបាល X និង Y ដើម្បីអនុវត្តសេចក្តីណែនាំក្នុង...ចែងដោយយោង ឬទៅ "តាមសេចក្តីណែនាំផ្ទាល់មាត់ របស់លោកចុះថ្ងៃ....។ "

### ៣.១.២. អង្គហេតុ

គឺជាផ្នែកដំបូងនៃរបាយការណ៍។ ផ្នែកនេះខ្លី ហើយបង្ហាញជាសង្ខេបនូវអំពើដែលបណ្តាលឱ្យមានការប្តឹង មកអង្គភាព ព្រមទាំងចោទបញ្ហាដែលត្រូវដោះស្រាយផង។

### ៣.១.៣. ការស៊ើបអង្កេត

ផ្នែកនេះមិនមែនជាផ្នែកសំខាន់ឡើយ ហើយជាការសំយោគប្រតិបត្តិការនានាដែលបានធ្វើឡើង។

ផ្នែកនេះចែកចេញជាអនុផ្នែកចំនួនពីរគឺ :

**ការប្រមូលទិន្នន័យ និងការសរសេរសម្មតិកម្ម**

ក្នុងអនុផ្នែកទីមួយនេះ កថាខ័ណ្ឌទីមួយស្តីពីការពិនិត្យកត់ហេតុ និងការពិភាក្សាលើការពិនិត្យកត់ហេតុ នោះ។

កថាខ័ណ្ឌទីពីរសម្រាប់ពិនិត្យការស្រាវជ្រាវដំបូង១ ( ការស្តាប់ចម្លើយជនរងគ្រោះ ការសង្ស័យជនរង គ្រោះ ការស៊ើបអង្កេតទីជិតខាង ការរកឃើញ និងការស្តាប់ចម្លើយសាក្សីពាក់ព័ន្ធ ចម្លើយប្រកាសដែល មានប្រយោជន៍ធ្វើឡើងដោយអ្នកស្និទ្ធស្នាល មិត្តភក្តិ ឬអ្នកមានទំនាក់ទំនងនឹង ជនរងគ្រោះ ...)។

កថាខ័ណ្ឌទី ៣ សម្រាប់ :

-សិក្សា និងវិភាគទិន្នន័យដែលប្រមូលបានតាមរយៈការពិនិត្យកត់ហេតុ និងការស្រាវជ្រាវដំបូង១។

-សរសេរសម្មតិកម្មការងារមួយ ឬច្រើន។

**.ការស្រាវជ្រាវដែលមានគោលដៅច្បាស់លាស់ និងការគ្រប់គ្រងភស្តុតាង**

តាមរយៈសម្មតិកម្មនានា តម្រុយមួយ ឬច្រើនត្រូវបានរកឃើញ។ ជាក់ស្តែង កាលណាតម្រុយមួយ ដែលបាននាំទៅដល់លទ្ធផលវិជ្ជមានត្រូវបានបក្លីនោះ គេនិយាយពីតំរុយផ្សេងទៀតគ្រាន់តែដើម្បី រំឭក ប៉ុណ្ណោះ។

ក្នុងការសិក្សាតំរុយចំបង ឬតំរុយតែមួយ ត្រូវពិនិត្យ :

-ការស្រាវជ្រាវបណ្ណាសារ (ចេញពីភិនភាគ ឈ្មោះ យានជំនិះមួយគ្រឿង ។ល។) និងការស្តាប់ចម្លើយសាក្សី ឬអ្នកប្តឹងបរិហារដែលអាចឱ្យគេធ្វើអត្តសញ្ញាណកម្មជនសង្ស័យម្នាក់ ឬច្រើននាក់ ។

-ការឃ្លាំមើល និងការតាមដានជាយថាហេតុលើបុគ្គលម្នាក់ ឬច្រើននាក់ដែលស្គាល់អត្តសញ្ញាណ ការចាប់ខ្លួន និងការឆែកឆេរដែលធ្វើឡើង វត្ថុតាងដែលរកឃើញ ។ល ។

-ការសួរចម្លើយ (ការសារភាព : ការចូលរួមពីបុគ្គលផ្សេងៗ តួនាទីជាក់លាក់ និងការទទួលខុសត្រូវរបស់ពួកគេ ។ល ។) និងការផ្ទៀងផ្ទាត់ដែលបុគ្គលទាំងនេះផ្តល់ឱ្យ ។

**ជាយថាហេតុ ក្នុងអនុផ្នែកទី ៣ អ្នកសរសេរអាចយកជាការនូវ :**

-ការពិចារណាយ៉ាងសត្យានុម័តលើបុគ្គលិកលក្ខណៈរបស់បុគ្គលសង្ស័យនានា តួនាទីរៀងៗខ្លួន ការទទួលខុសត្រូវរបស់បុគ្គលទាំងនេះ និងជនរងគ្រោះ ។

-ការលំបាកដែលជួបប្រទះក្នុងពេលស៊ើបអង្កេត ។

-គ្រោះថ្នាក់ដែលបានកើតឡើង ។ល ។

### ៣.១.៤. ការសន្និដ្ឋាន

ផ្នែកនេះអនុញ្ញាតឱ្យប្រមូលធាតុដាក់បន្ទុក និងដោះបន្ទុក ។

អ្នកសរសេរគូសបន្ទាត់ពីក្រោមធាតុបង្កបទល្មើសនានាដែលពិនិត្យឃើញ និងស្ថានទម្ងន់ទោសជាយថាហេតុ ។

សេចក្តីសន្និដ្ឋានចង្អុលបង្ហាញទីកន្លែងបុគ្គលសង្ស័យនានាដែលត្រូវបានស្គាល់អត្តសញ្ញាណ ចាប់ខ្លួន រត់គេច ខ្លួន ជាប់ឃុំ (នឹងត្រូវបង្ហាញខ្លួននៅ... ។ល ។) ។

ទីបញ្ចប់ គាត់ចុះនិទ្ទេសន៍ បើសិនជានៅមានការស្រាវជ្រាវ ឬការស៊ើបអង្កេតផ្សេងមិនទាន់បានធ្វើ ។

### ៣.១.៥. និទ្ទេសន៍ឧបសម្ព័ន្ធ

មានតែអ្នកសរសេរម្នាក់ប៉ុណ្ណោះដែលមានសិទ្ធិចុះហត្ថលេខាលើរបាយការណ៍ ។

ហត្ថលេខានេះត្រូវចុះពីលើចំណងជើងចុងក្រោយស្តីអំពី :

-អត្រានុកូលដ្ឋានរបស់បុគ្គលសង្ស័យនានា និងទីកន្លែងបុគ្គលទាំងនេះ( មានសេរីភាព ជាប់ឃុំ រត់គេចខ្លួន)

-អត្រានុកូលដ្ឋានរបស់ជនរងគ្រោះម្នាក់ ឬច្រើននាក់

ក្នុងរបាយការណ៍ ត្រូវប្រើរបៀបសរសេរងាយយល់ ខ្លី និងទូទៅ កាលដែលប្រើប្រាស់ញឹកញាប់បំផុត គឺអតីតកាល។

**៣.២. របាយការណ៍អន្តរាគមន៍ ឬស៊ើបសួរ**

**៣.១.២. : របាយការណ៍អន្តរាគមន៍**

របាយការណ៍អន្តរាគមន៍ជាមធ្យោបាយសំដែងចេញជាលាយលក្ខអក្សរណ៍ ប្រើក្នុងផ្នែកនគរបាលយុត្តិធម៌តែមួយគត់ ដែលច្បាប់មិនបានប្រគល់សមត្ថកិច្ចគតិយុត្តិឱ្យសរសេរកំណត់ហេតុ។ គេប្រើរបាយការណ៍នេះជាកិច្ចសម្រាប់ការស៊ើបអង្កេត ជាពិសេស កាលណារបាយការណ៍ត្រូវធ្វើឡើង**នៅពេលចាប់ផ្តើមនីតិវិធីមួយ** ដូចជាក្នុងករណីធ្វើប្រតិបត្តិការមួយ ដើម្បីចាប់ខ្លួនចារីសម្ចត ហើយយកមកប្រគល់ជូនដល់មន្ត្រីនគរបាលយុត្តិធម៌។

**៣.២.២. របាយការណ៍ពត៌មាន**

**៣.២.២.១. កម្មវត្ថុ**

កិច្ចមួយចំនួនមិនគោរពវិធាននីតិវិធី និងទម្រង់ការសម្រាប់កំណត់ហេតុឡើយ ជាអាទិ៍កាលណាគេត្រូវរាយការណ៍ពីប្រតិបត្តិការនានាដែលបានប្រព្រឹត្តទៅ ក្នុងរយៈពេលឃ្លាតពីគ្នាខ្លាំង ដែលធ្វើឱ្យពិបាកគោរពគោលការណ៍ នៃភាពដំណាលគ្នានៃការបំពេញកិច្ច និងការសរសេរកិច្ចនោះ។

គេអាចរាប់បានដូចតទៅ :

-របាយការណ៍ឃ្លាំមើល និងតាមដាន

-របាយការណ៍ក្រោយការស៊ើបអង្កេតទីជិតខាង

-របាយការណ៍ព័ត៌មាន

របាយការណ៍ទាំងនេះត្រូវបានបញ្ជូនតាមរយៈឋានានុក្រម ទៅអោយមន្ត្រីនគរបាលយុត្តិធម៌ដែលទទួលបន្ទុកការស៊ើបអង្កេត។ មន្ត្រីនគរបាលយុត្តិធម៌ជាអ្នកបញ្ចូលរបាយការណ៍ទៅក្នុងនីតិវិធី ជាទូទៅក្រោមទម្រង់ជា ឧបសម្ព័ន្ធភ្ជាប់ទៅនឹងកំណត់ហេតុទទួល។

**៣.២.២.២. តំលៃបន្ទាល់**

ដូចគ្នានឹងកំណត់ហេតុយ៉ាងដូចច្នោះដែរ របាយការណ៍នេះមានត្រឹមតំលៃពតិមានសាមញ្ញប៉ុណ្ណោះ ចំពោះបទល្មើសឧក្រិដ្ឋ មជ្ឈិម ឬលហុ។

**៣.២.២.៣. ទម្រង់ការ**

របាយការណ៍នេះគោរពតាមវិធានទម្រង់ការស្ដីពីការសរសេររបាយការណ៍ផ្សេងទៀត ជាពិសេសទាក់ទងទៅនឹងផ្នែកខាងដើមរបាយការណ៍ និងរបៀបសរសេរ។

**កំណត់ហេតុបូកសរុប : ភាពខុសគ្នារវាង របាយការណ៍ និងកំណត់ហេតុ**

| របាយការណ៍ | កំណត់ហេតុ |
|---|---|
| - របាយការណ៍ជម្រាបអង្គហេតុមួយដល់អាជ្ញាធរមួយ (ឋានានុក្រមថ្នាក់លើ មន្ត្រីនគរបាលយុត្តិធម៌ ឬចៅក្រម) | - កំណត់ហេតុជាការរៀបរាប់កិច្ចមួយ ឬច្រើនក្នុងក្របខ័ណ្ឌបេសកកម្មនគរបាលយុត្តិធម៌។ កំណត់ហេតុមិនមែនសម្រាប់ប្រកាស ឬពន្យល់ទេ តែសម្រាប់ពិពណ៌នា។ |
| - របាយការណ៍ត្រូវបានសរសេរក្នុងអតីតកាល<br>- របាយការណ៍មានចុះកាលបរិច្ឆេទ និងហត្ថលេខា | - កំណត់ត្រូវបានសរសេរក្នុងបច្ចុប្បន្នកាល ចុះកាលបរិច្ឆេទ ហត្ថលេខា និងម៉ោងជាក់លាក់នៃ ការចាប់ផ្តើមសរសេរ និងបញ្ចប់ទៅតាមករណី (ការឡូទាត់ រយៈពេលឃាត់ខ្លួន)។ |
| - នៅខាងដើមរបាយការណ៍អាចមានឈ្មោះបុគ្គលជាច្រើន ។ បុគ្គលទាំងនេះត្រូវតែចុះហត្ថលេខា។ | - គឺជាកិច្ចដែលសរសេរបានតែជនម្នាក់ ដែលមានចុះឋានៈនៅខាងដើម។ ក្នុងកំណត់ហេតុ មានរាយនាម និងហត្ថលេខាជំនួយការ។ |
| - របាយការណ៍អាចត្រូវប្រើប្រាស់ដោយអ្នកមានឋានន្តរស័ក្តិ និងសមត្ថកិច្ចណាក៏បាន។ | - អ្នកសរសេរត្រូវតែជាអ្នកមានសមត្ថកិច្ច (ចៅក្រម មន្ត្រី នគរបាលយុត្តិធម៌)។ |
| - របាយការណ៍ត្រូវមានជានិច្ចនូវការរឮករឿងហេតុ និងការសន្និដ្ឋានដែលអាចជាសម្មតិកម្ម។ | - កំណត់ហេតុត្រូវតែសត្យានុម័ត និងគ្មានភាពមន្ទិល (វិធានដោយឡែកក្នុងករណីមានកំហុសពេលសរសេរ) កំណត់ហេតុត្រូវតែពិពណ៌នាដោយគ្មានការបកស្រាយ។ |
| - ទោះជាត្រូវសរសេរក្នុងក្របខ័ណ្ឌស៊ើបអង្កេតយុត្តិធម៌ ក៏របាយកាណ៍មិនស្ថិតក្រោមទម្រង់ការតឹងរ៉ឹងដូច កំណត់ហេតុឡើយ។ | - កំណត់ហេតុត្រូវរឭកក្របខ័ណ្ឌគតិយុត្តិនៃការស៊ើបអង្កេត ដែលកំណត់ហេតុត្រូវប្រើប្រាស់ និងស្ថិតក្រោមទម្រង់ការ ដ៏តឹងរ៉ឹងរបស់វា។ |
| - ក្នុងក្របខ័ណ្ឌស៊ើបអង្កេតយុត្តិធម៌ របាយការណ៍ត្រូវប្រើប្រាស់ ដើម្បីរៀបរាប់ពីប្រតិបត្តិការជារួម (ការស៊ើបអង្កេតទីជិតខាង ការស្រាវជ្រាវផ្សេងៗ ការឃ្លាំមើល និងតាម ដាន...)។ | - កំណត់ហេតុត្រូវមានខានមិនបានដើម្បីរៀបរាប់ពីប្រតិបត្តិការស៊ើបអង្កេតមួយចំនួន (ការពិនិត្យកត់ហេតុ ការស្តាប់ចម្លើយ ការប្រទល់មុខ ការឆែកឆេរ ការរឹបអូសការ ជូនដំណឹងនៃការឃាត់ខ្លួន។ល។)។ |
| - ក្នុងករណីនេះ របាយការណ៍នឹងត្រូវភ្ជាប់ទៅនឹងនីតិវិធីដោយមានចុះនិទេស្ស័លើកំណត់ហេតុ។ | - គេអាចភ្ជាប់របាយការណ៍មួយឬច្រើនទាក់ទងនឹងការស៊ើបអង្កេតក្នុងឧបសម្ព័ន្ធ។ |

**១,ការទទួលបណ្តឹង**

**១,១, និយមន័យ - ការបើកការស៊ើបអង្កេតនគរបាលយុត្តិធម៌**

ការទទួលបណ្តឹង គឺជា**ដំណាក់កាលដំបូង**នៃសកម្មភាពនគរបាល ដែលកំណត់លក្ខខណ្ឌការស៊ើប អង្កេត ការទទួលបណ្តឹងធ្វើឡើងក្រោយពីអំពើសន្ទុត បរិហារ ឬប្រាកដមួយត្រូវបានដឹងដល់អ្នកស៊ើបអង្កេត ឬក្រោយពីអត្ថិភាពនៃវត្ថុតាងមួយដែលជាសំអាងហេតុសម្រាប់អន្តរាគមន៍។ ដូចនេះ ការទទួលបណ្តឹងអាចធ្វើឡើងដោយ :

**-គំនិតផ្តួចផ្តើមផ្ទាល់ខ្លួន**

**-ឬតាមការស្នើសុំរបស់អាជ្ញាធរតុលាការណាមួយ។**

ការទទួលបណ្តឹងនេះស្ថិតក្រោមល័ក្ខខ័ណ្ឌ : គតិច្បាប់ ក៏ដូចជាទម្រង់ច្បាប់ : មួយផ្នែកស្ថិតក្រោមល័ក្ខខ័ណ្ឌអត្ថិភាពនៃបទល្មើស ហើយមួយផ្នែកទៀតក្រោមល័ក្ខខ័ណ្ឌសមត្ថកិច្ចអន្តរាគមន៍ ដែលកំណត់អំណាចនគរបាល (បទឧក្រិដ្ឋ បទមជ្ឈិម ឬបទលហុ នីតិវិធីបទល្មើសជាក់ស្តែង ឬការស៊ើបអង្កេតបឋម)។

**១.២. ការដឹងបទល្មើស**

បទល្មើសអាចដឹងដល់នគរបាលក្រោម**ទម្រង់ខុសៗគ្នា** ជូនកាលដោយការផ្តួចផ្តើមផ្ទាល់របស់នគរបាល និងជាញឹកញាប់បំផុត ដោយការបរិហារពីជនរងគ្រោះខ្លួនឯង ហើយយ៉ាងកម្រដោយតតិយជនម្នាក់ដែលមិនពាក់ព័ន្ធ និងទីបញ្ចប់តាមរយៈសេចក្តីសន្និដ្ឋានស៊ើបសួររបស់តុលាការ។

**១.២.១. ការផ្តួចផ្តើមរបស់នគរបាល**

ក្នុងពេលដែលបំពេញបេសកកម្មជានគរបាលរដ្ឋបាល បុគ្គលិកនគរបាលទទួលភារៈកិច្ចជា ពិសេស បង្ការ និងការពារ ។ ប៉ុន្តែ នគរបាលអាចឈានដល់ចាប់ខ្លួនបណ្តាជនសង្ស័យ ចាប់ខ្លួនចារីកំពុងប្រព្រឹត្ត បទល្មើស (ចោរលួកហោប៉ៅ ចោរលួចក្នុងរថយន្ត អ្នកឈ្លានពាន...) ឬត្រួតពិនិត្យអត្តសញ្ញាណដែលជាយថាហេតុអាចនាំទៅដល់ការកំណត់អត្ថិភាពនៃបទល្មើស។

ដូចគ្នាផងដែរ ក្នុងពេលបំពេញបេសកកម្មរបស់នគរបាលយុត្តិធម៌ អង្គភាពជំនាញមួយចំនួនក៏មានតួនាទីផ្តល់ដំណឹងដល់នគរបាលយុត្តិធម៌ឱ្យដឹងបទល្មើសផងដែរ។ អង្គភាពទាំងនេះ ប្រើប្រាស់បច្ចេកទេសតាមជំនាញរបស់ខ្លួន ស៊ើបអង្កេតបទល្មើស ដែលមានដូចជា "ការឃ្លាំ មើល និងតាមដាន" ដើម្បីចាប់ខ្លួនជនទុច្ចរិតអាជីព ឬចារី ដែលប្រព្រឹត្តបទល្មើសដដែលៗមួយចំនួន។

ប្រព័ន្ធប្រកាសអាសន្នគួរតែដាក់អោយដំណើរការនៅចំនុច ដែលហៅថា ចំនុច " រស៊ើប " ដូចជា ធនាគារ ឬការហៅទូរស័ព្ទ (មកនគរបាល) ដោយក្រុមហ៊ុនសន្តិសុខនាំឱ្យមានអន្តរាគមន៍ ពីអង្គភាពនគរបាលតាមរបៀបដូចគ្នា ។

គេមិនចាំបាច់រៀបរាប់ឱ្យអស់សេចក្តីអំពីរឿងនេះទេ ប៉ុន្តែគេគ្រាន់តែអាចកត់សម្គាល់ថាអន្តរាគមន៍នគរបាលបានឆ្លើយតបទៅនឹងរាល់ភាពរីករវដល់សណ្តាប់សាធារណៈ ក៏ដូចជាបទល្មើស និងការទទួលបណ្តឹង ។

**១.២.២. ការផ្តួចផ្តើមរបស់ជនរងគ្រោះ**

កាលណាបុគ្គលម្នាក់រងគ្រោះដោយបទល្មើសមួយ ប្រតិកម្មយ៉ាងរហ័សរបស់ជនរងគ្រោះ គឺជូនដំណឹងទៅអង្គភាពនគរបាល ជាទូទៅក្រោមទម្រង់ជាសេចក្តីប្រកាស ។ សាមីខ្លួនជូនដំណឹងនគរបាល ហើយដាក់ពាក្យបណ្តឹង ប្រឆាំងចារីម្នាក់ ឬច្រើននាក់នៃបទល្មើស ។ **បណ្តឹងរបស់ជនរងគ្រោះគឺជារបៀបទទួលបណ្តឹងដែលគេជួបប្រទះញឹកញាប់បំផុតក្នុងអង្គភាពនគរបាល ។**

កាលណាការជូនដំណឹងនេះធ្វើឡើងតាមរបៀបជាសេចក្តីសន្និដ្ឋានស៊ើបសួរតាមទូរស័ព្ទ ការជូនដំណឹងនេះបង្កើតអានុភាពដូចគ្នា ។

**១.២.៣. ការផ្តួចផ្តើមតតិយជន**

**១.២.៣.១. បណ្តឹងបរិហារ**

បុគ្គលម្នាក់ដែលមិនបានរងគ្រោះដោយផ្ទាល់ដោយសារបទល្មើស ជូនដំណឹងទៅអង្គភាពនគរបាលពីព្រឹត្តិកាណ៍មួយ (បទល្មើស) ដែលខ្លួនបានឃើញ ស្តាប់ឮ ឬដឹងដោយខ្លួនឯង ។

បើសិនជា អ្នកបរិហារទទួលខុសត្រូវលើបណ្តឹងបរិហាររបស់ខ្លួន ត្រូវធ្វើឱ្យការទទួលខុសត្រូវនោះមានលក្ខណៈផ្លូវការតាមរយៈកំណត់ហេតុ ។

បើសិនជា ខ្លួនមិនចង់បញ្ចេញឈ្មោះ ការបរិហារត្រូវធ្វើដោយផ្ទាល់មាត់ ។ កំណត់ហេតុនៃបណ្តឹងបរិហារត្រូវសរសេរដោយចុះនិទ្ទេសន៍ : "ទទួលដំណឹងពីបុគ្គលម្នាក់ដែលសុំមិនបញ្ចេញឈ្មោះ..." (ប៉ុន្តែ គួរតែប្រើប្រាស់វិធីនេះប្រកបដោយការប្រុងប្រយ័ត្នខ្ពស់ និងផ្តោតជាសំខាន់ទៅលើធាតុសត្យានុម័ត នានាដែលនាំឱ្យគេសន្មតពីអត្ថិភាពជាមុននៃបទល្មើស) ។ ជានិច្ចកាល ក្នុងករណីនេះ គេនិយមសរសេររបាយការណ៍មួយ និងធ្វើការផ្ទៀងផ្ទាត់ ដើម្បីអោយប្រាកដថាមានបទល្មើសកើតឡើងមុននឹងបើកនីតិវិធី ។

ក៏មានផងដែរនូវការបរិហារអនាមិកដែលធ្វើឡើងតាមរយៈសារតាមទូរស័ព្ទ ឬជាលោយលក្ខណ៍អក្សរ ។

គួរអោយកត់សំគាល់ផងដែរថាបុគ្គលមួយចំនួនត្រូវតែបរិហាររឿងហេតុដែលខ្លួន បានដឹង។ ដូចគ្នាដែរ អាជ្ញាធរសារណៈ និងមន្ត្រីរាជការដែលបានដឹងពីបទឧក្រិដ្ឋ ឬបទមជ្ឈិមមួយត្រូវតែជូន ដំណឹងទៅមន្ត្រីនគរបាលយុត្តិធម៌ ។ នេះគឺជាបណ្តឹងបរិហារតាមអត្ថន័យនៃមាត្រា ៤២ នៃក្រមនីតិវិធីព្រហ្មទណ្ឌ ។

**១.២.៣.២. ពាក្យចចាមអារ៉ាម**

ការបើកការស៊ើបអង្កេតមួយកអាចមានប្រភពមកពីពាក្យចចាមអារ៉ាមមិនដាច់ (រឿងក្តីបំពុល ស្មន់មុខទាស់ ការធ្វើទុក្ខទោស ឬការធ្វើបាបអនីតិជន...) ។

**១.២.៤. នគរបាលដែលត្រូវសុំជំនួយដោយអាជ្ញាធរយុត្តាធិការ**

**១.២.៤.១. តាមរយៈសេចក្តីសន្និដ្ឋានស៊ើបសួររបស់អយ្យការ**

ព្រះរាជអាជ្ញាទទួលដំណឹងដោយផ្ទាល់ពីអត្ថិភាពនៃបទល្មើសពិតប្រាកដ ឬសន្មត អាចប្រគល់ភារៈកិច្ចឱ្យអង្គភាពនគរបាលធ្វើការស៊ើបអង្កេត**តាមរយៈសេចក្តីសន្និដ្ឋានអោយស៊ើបសួរ** ។

**១.២.៤.២. តាមរយៈដីកាចាត់ឱ្យស៊ើបសួរជំនួស**

ចៅក្រមស៊ើបសួរ ដែលត្រូវបានចាត់តាំង ដើម្បីស៊ើបសួរសំនុំរឿងមួយ អាចប្រគល់ភារៈកិច្ចឱ្យអង្គភាពនគរបាល ឬនគរបាលយុត្តិធម៌ម្នាក់ **តាមរយៈដីកាចាត់ឱ្យស៊ើបសួរជំនួស** ឱ្យធ្វើការស្រាវជ្រាវមួយចំនួនជំនួសខ្លួន ។

**១.៣. ប្រតិកម្មនគរបាលយុត្តិធម៌ចងភ្ជាប់ទៅនឹងក្របខ័ណ្ឌតតិយុត្តិ**

កាលណាមន្ត្រីនគរបាលយុត្តិធម៌ដឹងពីអំពើដែលអាចជាបទល្មើសមួយ ខ្លួនត្រូវបញ្ចេញ សកម្មភាពភ្លាម ប៉ុន្តែក្នុងក្របខ័ណ្ឌមួយជាក់លាក់ដែលកំណត់ដោយវិធានច្បាប់។

ទម្រង់នៃប្រតិកម្មនេះបណ្តាលមកពីបទល្មើសខ្លួនឯង អាស្រ័យតាមកាលៈទេសៈនៃការប្រព្រឹត្តបទល្មើស ។

**១.៣.១. ប្រតិកម្មនគរបាលយុត្តិធម៌ក្នុងករណីជាក់ស្តែង**

**មាត្រា ៨៩** នៃក្រមនីតិវិធីព្រហ្មទណ្ឌរៀបរាប់ពីវិធានដំបូងដែលមន្ត្រីនគរបាលយុត្តិធម៌ត្រូវអនុវត្ត កាលណាខ្លួនប្រឈមនឹងស្ថានភាពជាក់ស្តែងមួយ :

"ក្នុងករណីបទឧក្រិដ្ឋ ឬបទមជ្ឈិមជាក់ស្តែង មន្ត្រីនគរបាលយុត្តិធម៌ត្រូវរាយការណ៍ភ្លាមជូន ព្រះរាជអាជ្ញា។ មន្ត្រីនគរបាលយុត្តិធម៌ចុះទៅកាន់ទីកន្លែងកើតហេតុ ដើម្បីធ្វើការពិនិត្យបទល្មើស ។"

**១.៣.២. ប្រតិកម្មក្នុងការស៊ើបអង្កេតបទល្មើសបឋម**

**មាត្រា ១១១** នៃក្រមនីតិវិធីព្រហ្មទណ្ឌ ចែងថា:

"កាលណាបានដឹងពីអំពើដែលអាចជាបទឧក្រិដ្ឋ ឬបទមជ្ឈិម ឬបទលហុ មន្ត្រីនគរបាលយុត្តិធម៌អាចធ្វើការស៊ើបអង្កេតបឋម**ដោយឯកឯង** ឬ**តាមការស្នើសុំរបស់ព្រះរាជអាជ្ញា** ។"

ដូចដែលមាត្រានេះបានបញ្ជាក់ ចាប់តាំងពីខ្លួនបានដឹងពីអត្ថិភាពបទល្មើសមួយ មន្ត្រីនគរបាលយុត្តិធម៌អាចបើកការស៊ើបអង្កេតតាមរបៀបការស៊ើបអង្កេតបឋម ។ មន្ត្រីនគរបាលយុត្តិធម៌ក៏អាចធ្វើការស៊ើបអង្កេតតាមសេចក្តីណែនាំរបស់ព្រះរាជអាជ្ញាផងដែរ ។

**១.៣.៣. ប្រតិកម្មតាមបញ្ញត្តិរបស់ដីកាចាត់ឱ្យស៊ើបសួរជំនួស**

កាលណាដីកាចាត់ឱ្យស៊ើបសួរជំនួសត្រូវបានប្រគល់ឱ្យអង្គភាពនគរបាលមួយអនុវត្ត យោងតាមមាត្រា **១៧៣** និងបន្តបន្ទាប់នៃក្រមនីតិវិធីព្រហ្មទណ្ឌ ដីកានេះត្រូវកំណត់នូវកិច្ចនានា ដែលចៅក្រមស៊ើបសួរ បានចេញដីកាឱ្យអនុវត្ត ។ តាមវិធីណាក៏ដោយ នគរបាលមិនអាចធ្វើហួសពីសេចក្តីបង្គាប់ ដែលខ្លួនបានទទួលឡើយ ។

**១.៣.៤. ករណីរកឃើញសាកសព**

ក្នុងករណីរកឃើញសាកសពមួយដែលស្លាប់ដោយសារអំពើហិង្សា ប៉ុន្តែមិនដឹងមូលហេតុច្បាស់លាស់ ឬគ្រាន់តែមានការសង្ស័យមន្ត្រីនគរបាលយុត្តិធម៌ដែលបានដឹងពីការស្លាប់នេះត្រូវរាយការណ៍ភ្លាមទៅព្រះរាជអាជ្ញា ហើយធ្វើដំណើរ ទៅកាន់ទីកន្លែងកើតហេតុជាបន្ទាន់ដើម្បីធ្វើការត្រួតពិនិត្យដំបូង។ មន្ត្រីនគរបាលយុត្តិធម៌អាច ធ្វើសកម្មភាព ក្នុងក្របខ័ណ្ឌស៊ើបអង្កេតបឋម បើសិនជាមិនអាចធ្វើការស៊ើបអង្កេត ក្នុងករណីជាក់ស្តែងបាន ។

ក្នុងករណីនេះ នគរបាលមិនត្រូវមានប្រតិកម្មបន្ទាប់ពីបទល្មើសត្រូវបានបង្ហាញទេ ប៉ុន្តែបន្ទាប់ពីស្ថានភាពរឿងហេតុបង្កើតជាចង្ងល់ ដែលទាមទារឱ្យស្រាវជ្រាវតិចតួចប៉ុណ្ណោះ ដើម្បីស្វែងរកចម្លើយដោយមិនចាំបាច់អនុវត្តនីតិវិធីធ្ងន់ធ្ងរនោះឡើយ ។

**១.៣.៥. ការទទួលបណ្តឹងដោយផ្ទាល់មាត់**

បណ្តឹងនេះកើតឡើង ក្នុងករណីដែលមន្ត្រីនគរបាលយុត្តិធម៌រកឃើញអត្ថិភាព**បទល្មើស មួយផ្សេង**ពីបទល្មើសដែលខ្លួនត្រូវបើកការស៊ើបអង្កេត (ស្ថានភាពនេះកើតឡើងញឹកញាប់បំផុតក្នុងពេលប្រតិបត្តិ ការឆែកឆេរលំនៅដ្ឋាន ឬការស្តាប់ចម្លើយ)។

បីករណីអាចលេចឡើង :

-មន្ត្រីនគរបាលយុត្តិធម៌ស្ថិត**ក្នុងអំណាចនៃសមត្ថកិច្ចដែនដីធម្មតា**របស់ខ្លួន : ខ្លួននឹងអាចមានសិទ្ធិទទួលពាក្យបណ្តឹង ហើយបើកការស៊ើបអង្កេតចៃដន្យដោយខ្លួនឯង។

-មន្ត្រីនគរបាលយុត្តិធម៌ស្ថិតក្នុងដែនសមត្ថកិច្ចខ្លួន តែ**ជំនួយដោយមន្ត្រីនគរបាលយុត្តិធម៌ម្នាក់**ដែលអនុវត្តតាមសេចក្តីបង្គាប់របស់ដីកាចាត់ឱ្យសួរជំនួស សេចក្តីសន្និដ្ឋានស៊ើបសួររបស់ព្រះរាជអាជ្ញា ឬស្ថិតនៅក្នុងការពន្លាតសមត្ថកិច្ចនោះ......: គឺមន្ត្រីនគរបាលយុត្តិធម៌ដែលមានសមត្ថកិច្ចដែនដីជាអ្នកបើកការស៊ើបអង្កេតដោយចៃដន្យ។

-មន្ត្រីនគរបាលយុត្តិធម៌ដែលស្ថិតក្រៅដែនសមត្ថកិច្ចធម្មតារបស់ខ្លួន និងជំនួយដោយមន្ត្រីនគរបាលយុត្តិធម៌ ម្នាក់ដែលមានសមត្ថកិច្ចដែនដី : គឺមន្ត្រីនគរបាលយុត្តិធម៌ដែលមានសមត្ថកិច្ចដែនដីជាអ្នកបើកការស៊ើបអង្កេត និងទទួលបណ្តឹងដោយចៃដន្យ ។

## ១.៤. ទម្រង់នៃកិច្ចទទួលបណ្តឹង

ក្រមនីតិវិធីព្រហ្មទណ្ឌបានប្រគល់ជូនមន្ត្រីនគរបាលយុត្តិធម៌នូវសមត្ថភាពគតិយុត្តិមួយ ដែលអនុញ្ញាតឱ្យខ្លួនធ្វើសកម្មភាព និងទទួលបណ្តឹងផ្នែកគុណសម្បត្តិ (**យោងមាត្រា ៨៩ និង ១១១** នៃក្រមនីតិវិធីព្រហ្មទណ្ឌ)។ ខ្លួនអាចឱ្យ គេជួយបាន ប៉ុន្តែការទទួលបណ្តឹងស្ថិតក្រោមការទទួលខុសត្រូវរបស់ខ្លួនតែម្នាក់ប៉ុណ្ណោះ។

មធ្យោបាយសំដែងចេញដែលខ្លួនមានគឺ**កំណត់ហេតុ**។ តាមរបៀបនេះ ខ្លួនផ្តល់ទម្រង់ការ ដល់ប្រតិកម្មរបស់ខ្លួនចំពោះព្រឹត្តិការណ៍។

គ្រប់ករណីទាំងអស់ មន្ត្រីនគរបាលយុត្តិធម៌យកចិត្តទុកដាក់បញ្ជាក់ឱ្យច្បាស់លាស់ពី**មូលហេតុ**ធ្វើយុត្តិកម្មអន្តរាគមន៍របស់ខ្លួន :

-ដូចជាគុណសម្បត្តិជាមន្ត្រីនគរបាលយុត្តិធម៌របស់ខ្លួន (ដែលខ្លួនត្រូវចុះនៅខាងដើមនៃពាក្យបណ្តឹង)

-សមត្ថកិច្ចដែនដីរបស់ខ្លួន (ដែលខ្លួនបង្ហាញឱ្យឃើញជាក់ស្តែងដោយយកជាបានការនូវទីកន្លែងដែលខ្លួន

នៅ និងអង្គភាពតែងតាំង)

-កាលបរិច្ឆេទ និងម៉ោង (សំខាន់ណាស់ចំពោះការស៊ើបអង្កេតបទល្មើសជាក់ស្តែង និង (ឬ) ការស៊ើបអង្កេតបឋម)

-ការរាយការណ៍ជូនព្រះរាជអាជ្ញា (ដែលដឹកនាំការស៊ើបអង្កេត )

-ក្របខ័ណ្ឌស៊ើបអង្កេត (ដូចជាករណីជាក់ស្តែង ឬការស៊ើបអង្កេតបឋម តាមដីកាចាត់ឱ្យស៊ើបសួរជំនួស) ដែលចុះយ៉ាងច្បាស់ក្នុងអង្គកំណត់ហេតុទទួលបណ្តឹង នឹងអនុញ្ញាតឱ្យមន្ត្រីនគរបាលយុត្តិធម៌កំណត់អំណាចនគរបាល ដែលប្រគល់ឱ្យខ្លួនក្នុងបរិបទដែលខ្លួនបំពេញកិច្ច ហើយប្រាកដណាស់ឱ្យអាជ្ញាធរតុលាការដឹកនាំការត្រួតពិនិត្យ និងឃ្លាំមើលសកម្មភាពអ្នកស៊ើបអង្កេត។

ទោះបីជា មន្ត្រីនគរបាលយុត្តិធម៌ជាផ្នែកចំបងនៃបញ្ញាតិនេះក៏ដោយ ក៏កិច្ចដំបូងនៃនីតិវិធីអាចមិនមែនមន្ត្រីនគរបាលយុត្តិធម៌ជាអ្នកធ្វើឡើយ។

ព្រោះថា ភ្នាក់ងារនគរបាលយុត្តិធម៌ ដែលធ្វើសកម្មភាពតាមសេចក្តី ណែនាំរបស់មន្ត្រីនគរបាលយុត្តិធម៌ អាចពិនិត្យកត់ត្រាបទល្មើសមួយដោយខ្លួនឯង។ ក្នុងករណីនេះ មន្ត្រី នគរបាលយុត្តិធម៌ អាចបញ្ជាឱ្យភ្នាក់ងារនគរបាលយុត្តិធម៌សរសេររបាយការណ៍អន្តរាគមន៍ ហើយភ្ជាប់ជា ឧបសម្ព័ន្ធក្នុងកំណត់ ហេតុបណ្តឹង។

## <u>១.៥. កាតព្វកិច្ចទាក់ទងនឹងកិច្ចទទួលបណ្តឹង</u>

-ទទួលពាក្យបណ្តឹង

-ជូនដំណឹងទៅព្រះរាជអាជ្ញា

-ប្រសិនបើចាំបាច់ ធ្វើដំណើរទៅកន្លែងកើតហេតុ ដើម្បីពិនិត្យកត់ត្រា

សំគាល់ : ការទទួលបណ្តឹងគឺជាកិច្ចដំបូងនៃនីតិវិធីជានិច្ច ហើយច្រើនតែត្រូវសរសេរក្រោមទម្រង់ជានិទ្ទេសន៍នៅផ្នែកខាងដើមនៃកំណត់ហេតុទីមួយ។

យោងតាមក្របខ័ណ្ឌគតិយុត្តិការស៊ើបអង្កេត ផ្តើមឡើងដោយរបៀបទទួលពាក្យបណ្តឹងខុសៗគ្នា :

**បទល្មើសជាក់ស្តែង** : បណ្តឹង បណ្តឹងបរិហារ ការផ្តួចផ្តើមផ្ទាល់ខ្លួន សេចក្តីណែនាំផ្ទាល់មាត់ ចេញពីឋានានុក្រម ឬអយ្យការ។

**ការស៊ើបអង្កេតបឋម :** បណ្តឹង បណ្តឹងបរិហារ ការផ្តួចផ្តើមផ្ទាល់ខ្លួន សេចក្តីណែនាំដែលច្រើនតែផ្ទាល់មាត់

ឬពេលខ្លះជាលាយលក្ខណ៍អក្សរ (កំណត់សំគាល់របស់អយ្យការ) ហើយច្រើនតែជាសេចក្ដីណែនាំផ្ទាល់មាត់ បើចេញពីឋានានុក្រម ឬអយ្យការ ។

**ដីកាចាត់ឱ្យស៊ើបសួរជំនួស :** ត្រូវតែជាសេចក្ដីណែនាំជាលាយលក្ខណ៍អក្សរ (ដីកាចាត់ឱ្យស៊ើបសួរជំនួសពិសេស) ។

ដូចនេះ ត្រូវតែកត់សំគាល់ថាលើកលែងដីកាចាត់ឱ្យស៊ើបសួរជំនួស របៀបទទួលបណ្ដឹងមិនមានឥទ្ធិពលលើក្របខ័ណ្ឌតិយុត្តិដែលអ្នកស៊ើបអង្កេតកំណត់នោះទេ ។ តែចរិតជាក់ស្ដែងនៃបទល្មើសទៅវិញទេដែលដាក់ឱ្យដំណើរការនូវនីតិវិធីករណីជាក់ស្ដែង មិនមែនជាការដាក់បណ្ដឹង ឬសេចក្ដីណែនាំរបស់អយ្យការទេ ។

ប៉ុន្ដែ ក្នុងករណីណាក៏ដោយ ប្រភេទនៃពាក្យបណ្ដឹង និងក្របខ័ណ្ឌតិយុត្តិដែល សម្រេចយកមកអនុវត្តត្រូវចុះយ៉ាងច្បាស់ក្នុងកំណត់ហេតុដែលបើកនីតិវិធីនេះ ។

## ២.ការធ្វើដំណើរទៅកាន់ទីកន្លែងកើតហេតុ:

ការធ្វើដំណើរទៅកាន់ទីកន្លែងកើតហេតុ មិនមែនធ្វើដោយឥតគ្រោងទុកឡើយ គឺត្រូវរៀបចំយ៉ាងម៉ត់ចត់ និងអនុវត្តតាមគោលការណ៍មួយចំនួន :

### ២.១. : ការធ្វើដំណើរទៅកាន់ទីកន្លែងកើតហេតុ

កាលណាមន្ត្រីនគរបាលយុត្តិធមិបានដឹងពីបទល្មើស ជាបឋមខ្លួនត្រូវតែពិនិត្យនូវភាពគួរឱ្យជឿជាក់បាននៃដំណឹងដែលទទួលបាន ហើយចាត់គ្រប់វិធានការ : វិធានការថែរក្សាស្លាកស្នាម និងតម្រុយ វិធានការសង្គ្រោះបុគ្គល និងវិធានការសន្តិសុខចាំបាច់នានា ។

ដើម្បីបំពេញប្រតិបត្តិការនេះ មន្ត្រីនគរបាលយុត្តិធមិមានកាតព្វកិច្ចធ្វើដំណើរទៅកាន់ទីកន្លែងកើតហេតុ (យោងតាម**មាត្រា ៨៩** នៃក្រមនីតិវិធីព្រហ្មទណ្ឌចំពោះបទឧក្រិដ្ឋ និងបទមជ្ឈិមជាក់ស្ដែង) ក្នុងលក្ខខ័ណ្ឌដែលបទល្មើសនោះ "អាចត្រូវបានពិនិត្យឃើញជាក់ស្ដែង" ។ ភាពជាក់ស្ដែងនេះ កើតឡើងស្ទើរតែគ្រប់ករណីនៃបទឧក្រិដ្ឋ។ ចំពោះបទមជ្ឈិម ត្រូវតែគិតជាសំខាន់លើបទល្មើសប្រព្រឹត្ត ។ ការត្រួតពិនិត្យកត់ត្រាត្រូវតែធ្វើបើសិនជាការនេះអាច ជំរុញឱ្យឃើញជាក់ស្ដែងនូវរឿងហេតុ តម្រុយ ឬស្លាកស្នាមដែលបន្សល់ទុកដោយចារី ។

នៅពេលឃើញសេចក្ដីរបស់ដីកាចាត់ឱ្យស៊ើបសួរជំនួស មន្ត្រីនគរបាលយុត្តិធមិមាន កាតព្វកិច្ចធ្វើដំណើរទៅកាន់ទីកន្លែង ដើម្បីពិនិត្យកត់ត្រា បើសិនជាបេសកកម្មនេះ មានចុះក្នុងដីកា ។

ក្នុងការស៊ើបអង្កេតបឋម ការធ្វើដំណើរទៅកាន់ទីកន្លែងមិនមានចែងក្នុងអត្ថបទជាក់លាក់មួយនោះទេ ប៉ុន្តែជាការសមហេតុផលដែលចាំបាច់ត្រូវធ្វើដំណើរទៅកាន់ទីកន្លែង គ្រប់ករណីដែលបទល្មើសត្រូវស៊ើបអង្កេត នោះអាចឱ្យគេកត់ត្រាជាក់ស្តែងបាន។ ក្រោយពីបានពិនិត្យភាពគួរជឿជាក់បាននៃរឿងហេតុ និងការធ្វើដំណើរទៅកាន់ទីកន្លែង ឬក្នុងពេលជាមួយគ្នាត្រូវ :

**រាយការជូន :**

-នាយអង្គភាព

-ព្រះរាជអាជ្ញា (ជាយថាហេតុក្រោយពីការធ្វើដំណើរ)

-អាជ្ញាធររដ្ឋបាលមួយចំនួន (អភិបាល...) ចំពោះសំនុំរឿងដែលមានផលវិបាកលើជីវិតជីវភាពសាធារណៈ គឺជាការទទួលខុសត្រូវរបស់នាយអង្គភាព។

**សុំ ឬ**បញ្ជាឱ្យសុំជំនួយទៅតាមប្រភេទនៃសំនុំរឿង :

-ពីអ្នកបច្ចេកទេសអត្តសញ្ញាណតុលាការ

-អង្គភាពសង្គ្រោះ (គ្រូពេទ្យ អ្នកពន្លត់អគ្គីភ័យ...)

-អង្គភាពសន្តិសុខ (សារព័ន្ធផ្លូវ អគ្គីសនី យោធិននៃកងវិស្វកម្ម....)

**បង្កើត**ក្រុមការងារអន្តរាគមន៍មួយ

មន្ត្រីនគរបាលដែលបានទទួលបណ្តឹងមុនគេ ឬត្រូវចាត់តាំង ត្រូវតែបង្កើតក្រុមការងារអន្តរាគមន៍មួយដែលមានសមាសភាពជាមន្ត្រីរាជការម្នាក់ ឬច្រើននាក់ដើម្បីជំនួយ និងជួយខ្លួនក្នុងការស្នើសុំរបស់ខ្លួន (បរិវេណសុវត្ថិភាព។ល។)។

## **២.២. : វិធានការសណ្តាប់ធ្នាប់សាធារណៈ**

### **២.២.១. : វិធានការបង្ការការពារ**

ត្រូវតែផ្តល់អទិភាពដល់វិធានការការពារ (ការបិទកុងទ័រភ្លើង...ការផ្តល់ការសង្គ្រោះដល់ជនរងគ្រោះ)

បើសិនជនរងគ្រោះនៅមានជីវិត ករណីយកិច្ចជួយមនុស្សមានសារសំខាន់ជាងការស៊ើបអង្កេត។ ត្រូវបញ្ជូនជនរងគ្រោះ ទៅគ្រឹះស្ថានព្យាបាលណាមួយជាបន្ទាន់។

ប៉ុន្តែ បើសិនជាការស៊ើបអង្កេតនេះមិនរារាំង ឬពន្យាពេលដល់ការព្យាបាលជនរងគ្រោះទេនោះ .

អ្នកស៊ើបអង្កេតត្រូវកត់ត្រានូវទីតាំង និង ឥរិយាបទជនរងគ្រោះព្រមទាំង អត្តសញ្ញាណ ត្រូវឱ្យមន្ត្រីរាជការម្នាក់ ឬពីរ នាក់ដើម្បីធ្វើជាជំនួយការដែលត្រូវ : កត់ត្រាហេតុដែលមានប្រយោជន៍ ចម្លើយជនរងគ្រោះ និងជាយថាហេតុ រឹបអូសសំលៀកបំពាក់ ដែលផ្តល់ អត្ថប្រយោជន៍ដល់ការស៊ើបអង្កេត។

**២.២.២. : អន្តរាគមន៍នៅទីកន្លែងកើតហេតុ**

**២.២.២.១. : ការឡោមព័ទ្ធទីកន្លែង**

ត្រូវតែឡោមព័ទ្ធទីកន្លែង និងបិទច្រកចេញ ដើម្បីការពារ និងថែរក្សាស្លាកស្នាម និងតម្រុយបន្សល់ទុក : រារាំងបុគ្គលគ្រប់រូបមិនឱ្យគេចខ្លួន (ជនសង្ស័យ ឬសាក្សីមានប្រយោជន៍) :

មន្ត្រីនគរបាលយុត្តិធម៌ អាចរារាំងបុគ្គលគ្រប់រូបមិនឱ្យទៅឆ្ងាយពីកន្លែងប្រព្រឹត្តបទល្មើស រហូតដល់បិទប្រតិបត្តិការរបស់ខ្លួនត្រូវបានបញ្ចប់ (មាត្រា ៨៩ កថាខណ្ឌទី២ នៃក្រមនីតិវិធីព្រហ្មទណ្ឌ)។

ក្នុងពេលឡោមព័ទ្ធទីកន្លែងចាំបាច់ត្រូវ :

-រាប់ចំនួនអ្នកមានវត្តមាន

-ធ្វើអត្តសញ្ញាណកម្មអ្នកទាំងនោះ

-កត់ត្រាមូលហេតុ ឬអង្គហេតុនៃវត្តមានអ្នកទាំងនោះ

-ប្រមូលពួកគេដាក់ក្នុងកន្លែងមួយ (ទីធ្លា ថ្នាក់ជណ្តើរ បន្ទប់...) ដែលមិនទាក់ទងនឹងទីកន្លែងដែលត្រូវពិនិត្យ។

-ដាក់ពួកគេក្រោមការឃ្លាំមើល

-ហាមពួកគេមិនឱ្យទំនាក់ទំនងគ្នា

បុគ្គលសង្ស័យគ្រប់រូបនឹងត្រូវបានធ្វើអចលនកម្ម និងឆែកឆេររាងកាយយ៉ាងម៉ត់ចត់។ **ត្រូវហាមមិនឱ្យចូលក្នុងទីកន្លែង (អ្នកចង់ដឹងចង់ឮ អ្នកកាសែត នគរបាលដែលមិនចូលរួមក្នុងការស៊ើបអង្កេត...)។**

**២.២.២.២. : អធិការកិច្ចទីកន្លែង**

ព្រមជាមួយនឹងដំណើរឆ្ពោះទៅរកទីប្រជុំការចំណាប់អារម្មណ៍ (ឬកន្លែងប្រព្រឹត្តបទល្មើស) ត្រូវ :

-កត់ត្រាផ្លូវចូល សកម្មភាព និងភ្លើងបំភ្លឺលើផ្លូវចូលទាំងនោះផង...

-ពិនិត្យគ្រប់ច្រកចេញ (តើច្រកទាំងនោះបើក ឬបិទ? ទីតាំងរបស់ប្រព័ន្ធសោរ...)

-ចង្អុលប្រាប់នូវវត្ថុមានសត្វឆ្កែ ថាតើទីកន្លែងត្រូវបានយាមកាមដោយក្រុមហ៊ុនសន្តិសុខមួយ ឬអត់... កត់ត្រានូវលក្ខណៈក្លិនដែលភាយចេញ

-ជាយថាហេតុប្រមូលក្រដាស ឬឯកសារដែលកំពុងឆេះ

-ធ្វើ ឬបញ្ជាឱ្យគេធ្វើទស្សនកិច្ចទីកន្លែងយ៉ាងរហ័ស (ចោរីម្នាក់ ឬច្រើននាក់អាចស្ថិតនៅទីនោះនៅឡើយ ហើយស្លាកស្នាម ឬតម្រុយអាចត្រូវរកឃើញទីនោះ)

-ប្រុងប្រយ័ត្នកុំធ្វើឱ្យខូចខាតដល់ស្លាកស្នាម ឬតម្រុយដែលបន្សល់ទុក ហើយមិនត្រូវបង្កើតស្លាកស្នាម ឬតម្រុយផ្សេងទៀតនោះឡើយ (កុំជក់បារី ត្រូវពាក់ស្រោមដៃ...) ។

ការពារស្លាកស្នាម ឬតំរុយដែលរកឃើញ (ដាក់កេសដើម្បីការពារគ្រប់ស្នាមជើងជាដើម) ។

**៧.ការពិនិត្យកត់ត្រា:**

ដំណើរការដែលធ្វើឡើងក្រោយពេលទទួលបណ្តឹងនេះច្រើនតែ **កំណត់**ទិសដៅនៃការស៊ើបអង្កេតរបស់នគរបាលយុត្តិធម៌ ។

ការពិនិត្យកត់ត្រាក្នុងពេលប្រព្រឹត្តបទឧក្រិដ្ឋ ឬបទមជ្ឈិមមួយបង្កើតជា**ប្រតិបត្តិការមូលដ្ឋាន**ដែលអាចឱ្យគេបង្កើតភាពសត្យានុម័តនៃបទល្មើស រក្សាសភាពដើមទីកន្លែង ប្រមូលជាអតិបរមានូវតម្រុយ និងធាតុចាំបាច់សម្រាប់បង្ហាញការពិត ។

ដោយហេតុថាការពិនិត្យកត់ត្រាជាមូលដ្ឋានពិតប្រាកដនៃការស៊ើបអង្កេត ប្រតិបត្តិការនេះផ្តល់នូវសារសំខាន់ជាចំបង ។ ម្យ៉ាងទៀត ការពិនិត្យកត់ត្រាមានចែងយ៉ាងច្បាស់ក្នុងមាត្រា ៥៦ នៃក្រមនីតិវិធីព្រហ្មទណ្ឌដែលរៀបរាប់ពីបេសកកម្មរបស់នគរបាលយុត្តិធម៌ ។

ការពិនិត្យកត់ត្រាត្រូវអនុវត្តដោយមន្ត្រីនគរបាលយុត្តិធម៌ ។

ការពិនិត្យកត់ត្រាជា :

**-ការងារពិនិត្យកត់ត្រាជាក់ស្តែង**ដែលទាមទារនូវវិធីសាស្ត្រ ភាពអំណត់ ភាពម៉ត់ចត់ និងសត្យានុម័តភាព

**-ការងារវិភាគដោយប្រាជ្ញា** និងសំយោគដើម្បីបកស្រាយរឿងហេតុ

ការពិនិត្យកត់ត្រាមានគោលបំណងពីរ :

**-ស្វែងរកស្លាកស្នាម** តម្រុយ និងវត្ថុតាងដើម្បីរឹបអូស

**-ពិតគ្រោងសម្មតិកម្ម**

ការពិនិត្យកត់ត្រាត្រូវតែអនុញ្ញាតឱ្យ :

-បង្កើតអត្ថិភាពជាក់ស្តែងនៃបទល្មើស កំណត់កាលបរិច្ឆេទ ម៉ោង និងលក្ខខណ្ឌប្រព្រឹត្ត

-រក្សាសភាពដើមទីកន្លែង

-ប្រមូលធាតុឱ្យបានជាអតិបរមា

ធ្វើការពិនិត្យកត់ត្រាគឺ :

-ចាត់វិធានការមួយចំនួន

-ពិនិត្យយ៉ាងលម្អិតលើកន្លែងប្រព្រឹត្តបទល្មើស ទីកន្លែងជុំវិញដើម្បីស្រាវជ្រាវស្វែងរក

-ចាប់យក និងថែរក្សា : ស្លាកស្នាម តម្រុយ និងវត្ថុតាង

-កំណត់យ៉ាងសត្យានុម័តជាលាយលក្ខណ៍អក្សរ នូវអត្ថិភាពជាក់ស្តែងនៃបទល្មើស

-ពិពណ៌នាអ្វីដែលខ្លួនសង្កេតឃើញ ។

តាមលំដាប់កាល ប្រតិបត្តិការពិនិត្យកត់ត្រាទាំងនេះមានតែនៅលំដាប់ទីពាប៉ុណ្ណោះ ក្នុងដំណាក់កាលនីតិវិធី បន្ទាប់ពីការទទួលបណ្តឹង និងការធ្វើដំណើរទៅកាន់ទីកន្លែង ហើយជាញឹកញាប់បំផុត ត្រូវការជំនួយពីអ្នកជំនាញអត្តសញ្ញាណតុលាការ ( នគរបាលបច្ចេកទេសវិទ្យាសាស្ត្រ) ។

## ៣.១. : ការពិនិត្យកន្លែងប្រព្រឹត្តបទល្មើស និងទីកន្លែងជុំវិញ

### ៣.១.១. : ប្រតិបត្តិការពិនិត្យកត់ហេតុ

តាមលក្ខណៈទូទៅ អ្នកបច្ចេកទេសអត្តសញ្ញាណតុលាការជាអ្នកអន្តរាគមដំបូងបង្អស់ក្នុងគ្រប់សំនុំរឿងសំខាន់ៗ ។

ពីព្រោះ មុននឹងបង្ហាញភស្តុតាងផ្សេងទៀត ចាំបាច់ត្រូវ :

- រក្សាសភាពដើមទីកន្លែងដោយ**ការថតរូប**

- ស្រាវជ្រាវរក**ស្លាកស្នាម និងតម្រុយ**ដែលបន្សល់ទុក

ការពិនិត្យកត់ត្រានាពេលក្រោយនឹងអាចឱ្យពិនិត្យកត់ត្រា និងពិពណ៌នាគ្រប់ជ្រុងជ្រោយ (ដោយគ្មានចន្លោះ) ។ ការពិនិត្យតាមវិធីសាស្ត្រដ៏ម៉ត់ចត់ដែលទាមទារនូវភាពអំណត់នេះត្រូវផ្តោតទៅលើ :

**កន្លែងប្រព្រឹត្តបទល្មើស (ឬទីប្រជុំការចាប់អារម្មណ៍)**

កន្លែងប្រព្រឹត្តបទល្មើស ប្រែប្រួលទៅតាមបទល្មើសដែលត្រូវត្រួតពិនិត្យ (សាកសពក្នុង អំពើមនុស្សឃាដមួយ ច្រកចេញ សង្ហារិមបាក់បែកនៅក្នុងអំពើលួចមួយ ដើមភ្លើងក្នុងអគ្គីភ័យមួយ...) ។ តាម វិធានទូទៅ កន្លែងប្រព្រឹត្តបទល្មើស អាចឱ្យរកឃើញស្លាកស្នាមមួយចំនួន និងតម្រុយជា ច្រើនដែលអាចពន្យល់ព្រឹត្តិការណ៍បាន ។

**ទីកន្លែងជិត កន្លែងប្រព្រឹត្តបទល្មើស បំផុត**

នៅក្នុងចំណែកដី ឬក្តារក្បែរ កន្លែងប្រព្រឹត្តបទល្មើស គេរកឃើញជាញឹកញាប់ នូវវត្ថុវាយការណ៍ (អាវុធ សំបកកាទូស ក្បាលគ្រាប់ ឧបករណ៍ ឬវត្ថុដែលបម្រើឱ្យប្រព្រឹត្តិបទល្មើស) និងស្លាក ស្នាម ស្នាមប្រឡាក់...។

**ទីកន្លែង ឬកន្លែងធ្វើអ្វីមួយ (បន្ទប់ដេក បន្ទប់) ដែលបទល្មើសត្រូវបានប្រព្រឹត្តិ**

ទិដ្ឋភាពទូទៅ (សណ្តាប់ធ្នាប់ ភាពឥតសណ្តាប់ធ្នាប់ ស្លាកស្នាមគាស់ទំលុះទំលាយ) និងទីតាំងចលនវត្ថុ (កៅអី និងតុ ដូល...) ជានិច្ចកាលអាចឱ្យគេបង្កើតឡើងវិញនូវកាលៈទេសៈនៃរឿងក្តី ។

**ទីកន្លែងជុំវិញជិតបំផុត ឬទីកន្លែងជិតខាង**

ទាក់ទងទៅនឹងបន្ទប់ដេកដទៃទៀត ឬផ្ទះ និងជាពិសេសបន្ទប់ដែលទំនងជាមានតួនាទីសំខាន់ មុនពេល ក្នុងពេល ឬក្រោយពេលរឿងហេតុកើតឡើង ក៏ត្រូវពិពណ៌នាឱ្យបានលម្អិតផងដែរ ។

**តំបន់ជុំវិញ**

ការស្រាវជ្រាវនឹងត្រូវពន្លាតដល់តំបន់ជុំវិញ (សំណង់ ទីធ្លា ក្បាលដី ផ្លូវជិតខាង...) ។

សម្រាប់វត្ថុ ធាតុ និងឯកសារនីមួយៗដែលរកឃើញក៏ដូចជាស្លាកស្នាម ស្នាមប្រឡាក់ ឬតម្រុយដែលស្រង់បានត្រូវតែ : ធ្វើឱ្យឃើញជាក់ស្តែងនូវទីតាំងរបស់វត្ថុទាំងអស់នោះ ពិពណ៌នាយ៉ាងម៉ត់ចត់ (សម្រាប់ស្នាមប្រឡាក់ ស្លាកស្នាម បញ្ជាក់ពីធម្មជាតិខាងក្រៅ ទម្រង់ វិមាត្រ និងទិសដៅដែលស្លាកស្នាមទាំងអស់នោះបែរទៅរក) កត់ត្រាទីតាំង ហើយកំណត់ដោយអាប់ស៊ីស និងអរដោនេ (បន្ទាត់ ២កាត់កែងគ្នាគូសចេញពីវត្ថុ ឬស្លាកស្នាមមួយ...ទៅកាន់ចំនុចគោលនឹងថ្កល់២ នៅក្បែរនោះ : ជញ្ជាំង ឬជញ្ជាំងខាងក្នុងបន្ទប់មួយ ឬបង្គោលគីឡូម៉ែត្រ បង្គោលភ្លើង ដើមឈើ ផ្លូវប្រសព្វ...ដែលនៅខាងក្រៅបន្ទប់) ។

### ៣.១.២. : ការស្នើសុំជំណាលគ្នានឹងការពិនិត្យកត់ត្រា

**ការរឹបអូស**

ដោយចាត់វិធានការបង្ការចាំបាច់ ត្រូវតែរឹបអូសភ្លាម១នូវឯកសារ វត្ថុដែលរកឃើញ ស្នាមក្រយៅដៃ ដែលផ្តិតរួច ពុម្ពស្នាមដានជើង ស្នាមសង្កត់ ឬស្នាមគាស់ទំលុះទំលាយដែលផ្តិតយកបាន ក្នុងពេលពិនិត្យកត់ត្រា ។

មុននឹងរឹបអូសតម្រុយមួយ ត្រូវបញ្ជាក់ទីតាំង ពិពណ៌នាអំពីតម្រុយនោះ ចាប់ខ្លួនបុគ្គលពាក់ព័ន្ធដោយយោងលើដើមកំណើត ប្រភព និងប្រភេទនៃតម្រុយនោះ ហើយទីបញ្ចប់ត្រូវរឹបអូស និងបិទស្លាក បោះត្រាលើតម្រុយនោះ ។

**សេចក្តីសន្និដ្ឋានស៊ើបសួររបស់អ្នកជំនាញ**

មាត្រា ៩៥ នៃក្រមនីតិវិធីព្រហ្មទណ្ឌបានអនុញ្ញាតឱ្យមន្ត្រីនគរបាលយុត្តិធម៌សុំជំនួយពីអ្នកជំនាញគ្រប់រូប បើសិនជាត្រូវធ្វើការពិនិត្យកត់ត្រា ឬការពិនិត្យបច្ចេកទេស ឬវិទ្យាសាស្ត្រ ។

មាត្រា ១១២ នៃក្រមនីតិវិធីព្រហ្មទណ្ឌបានផ្តល់លទ្ធភាពដូចគ្នានេះដែរជូនមន្ត្រីនគរបាលយុត្តិធម៌ ប៉ុន្តែក្នុងក្របខ័ណ្ឌស៊ើបអង្កេតបឋម ។

**ប្រតិបត្តិការផ្សេងទៀតជំណាលគ្នានឹងការពិនិត្យកត់ត្រា**

ក្នុងពេលពិនិត្យកត់ត្រា អ្នកស៊ើបអង្កេតអាចបញ្ជាឱ្យគេធ្វើនូវកិច្ចមួយចំនួនដូចជា : ការស៊ើប អង្កេតទីជិតខាង ការប្រកាសស្វែងរកតាមវិទ្យុ ការដាក់របាំងផ្លូវ ការកំណត់អត្តសញ្ញាណបុគ្គលម្នាក់ ឬ យានជំនិះមួយ ។ល។

### ៣.២. ឯកសារដែលរៀបរាប់ពីការពិនិត្យកត់ត្រា

#### ៣.២.១. : ឯកសារ

ការពិនិត្យកត់ត្រាត្រូវបានចុះនិទ្ទេសន៍ក្នុងកំណត់ហេតុការពិនិត្យកត់ត្រា ។ កំណត់ហេតុនេះត្រូវតែខ្លីជាក់លាក់សត្យានុម័ត និងគ្មានការឱ្យយោបល់ ឬសម្មតិកម្ម ។ នឹងត្រូវភ្ជាប់ជាឧបសម្ព័ន្ធនៃកំណត់ហេតុនេះនូវ :

-សៀវភៅរូបថត

-ប្លង់ទីកន្លែង

-របាយការណ៍គ្រូពេទ្យដែលធ្វើការពិនិត្យសាកសព

-ច្បាប់ចំលងផ្សេងៗនៃសេចក្តីសន្និដ្ឋានស៊ើបសួរដែលធ្វើឡើងក្នុងពេលពិនិត្យកត់ហេតុ (អង្គភាពបញ្ចុះសព បន្ទប់ដិកល់សព ជំនាញការ គ្រូពេទ្យ...) ។

**៣.២.២ : ការប្រើប្រាស់ឯកសារទាំងនោះ**

ការសិក្សា ការវិភាគ និងសំយោគការពិនិត្យកត់ហេតុ ការពិភាក្សាពីឯកសារទាំងនោះ និងប្រៀបធៀបជាមួយសំនុំរឿងដូចគ្នាអាចឱ្យគេទាញបានសម្មតិកម្មការងារមួយ ឬច្រើនដែលបង្កើតជាតួរ៉ុយដែលត្រូវតាមដានការបង្ហាញសំភារៈ អាវុធ ឯកសាររកឃើញនៅទីកន្លែងដល់សាក្សីមួយចំនួន និងការពិនិត្យ និង ប្រៀបធៀបស្លាកស្នាម ឬតម្រុយលេចឡើង អាចឱ្យគេដឹកនាំការស្រាវជ្រាវ ឬ អាចធ្វើ អត្តសញ្ញាណកម្ម ចារីម្នាក់ ឬច្រើន ។

កំណត់ហេតុពិនិត្យកត់ហេតុ គឺជា**ឯកសារយោង**សម្រាប់ឱ្យអ្នកស៊ើបអង្កេតយោង នៅរាល់ករណីចាំបាច់នៃការស៊ើបអង្កេត (ឧទាហរណ៍ ក្នុងពេលដែលចម្លើយសារភាពត្រូវពិនិត្យ ឬអាចត្រូវពិនិត្យ ខ្លួនអាចត្រួតពិនិត្យថាតើចម្លើយសារភាពនោះមានភាពស្មោះត្រង់ ឬទេ អាស្រ័យថាតើចម្លើយនោះស្របទៅនឹងការត្រួតពិនិត្យបទល្មើសដែរ ឬទេ) ។

**៣.២.៣ : ទីកន្លែងដែលត្រូវបានការពារ**

បើសិនជាវិធានឆែកឆេរ គឺជាកម្មវត្ថុនៃសាលាកប័ត្រពិសេសមួយ យើងមានការលំបាកក្នុងការ បដិសេធនូវភាពស្របគ្នា រវាងវិធានឆែកឆេរនេះ និងការពិនិត្យកត់ត្រា ពីព្រោះថា ទីកន្លែងមួយចំនួន ដែលត្រូវបានការពារជាពិសេសឆ្លើយតបតាមការទាមទាររបស់អ្នកតាក់តែងច្បាប់ ។ ដូចនេះ ការចូលក្នុងទីកន្លែងមួយចំនួនដោយអង្គភាពនគរបាល ត្រូវស្ថិតក្រោមវិធានដ៏តឹងរ៉ឹង និងមិនអាចជៀសផុត (សូមមើលសាលាកប័ត្រឆែកឆេរ) ។

**៣.៣. ការសិក្សាលម្អិតពីអត្ថន័យកំណត់ហេតុពិនិត្យកត់ត្រា**

**៣.៣.១ : សេចក្តីផ្តើម**

ទីកន្លែងទទួលបណ្តឹងឧទ្ធរណ៍

និទ្ទេសសង្ខេបរបៀបទទួលបណ្តឹង និងកម្មវត្ថុនៃបណ្តឹង

ការរាយការណ៍ជូនអយ្យការ

ក្របខ័ណ្ឌគតិយុត្តិ

យោងមាត្រានៃក្រមនីតិវិធីព្រហ្មទណ្ឌ ឬក្រមព្រហ្មទណ្ឌ

ការជួយ និងជំនួយដែលសុំ (រាប់ទាំងសេចក្ដីសន្និដ្ឋានស៊ើបសួរ)

ការធ្វើដំណើរទៅកាន់ទីន្លែង (ម៉ោងមកដល់ទីកន្លែង)

ការទាក់ទងជាមួយដើមបណ្ដឹងដើម្បីបញ្ជាក់

**៣.៣.២. : ការពិនិត្យកត់ហេតុ**

ការពិនិត្យកត់ហេតុត្រូវធ្វើចេញពីភាពទូទៅទៅភាពដោយឡែក ។

**បុព្វកថា** : វត្តមានបុគ្គលនានាដែលជំនួយដល់កិច្ច ។

**ស្ថានភាពទីកន្លែង :** សង្កាត់ ផ្លូវ ផ្លូវទាល់ អាគារ ផ្ទះ ផ្ទះល្វែង ជាន់ ។ល។

**ទីកន្លែងជាក់លាក់ដែលបទល្មើសត្រូវបានប្រព្រឹត្ត** : ការធ្វើដំណើរ ការគាស់ទំលុះទំលាយ ស្នាម ស្លាក ស្នាម ។

**កន្លែងប្រព្រឹត្តបទល្មើស :** ទូរដែក សង្ហារិម សាកសព ។ល។

**ទីជុំវិញដែលជិតកន្លែងប្រព្រឹត្តបទល្មើស** : ស្លាកស្នាម ស្នាម វត្ថុ ។ល។

**ទីកន្លែងជិតខាង :** បន្ទប់ដទៃទៀត ផ្លូវចូល ។ល។

**តំបន់ជុំវិញ :** ចំណតរថយន្ត សួនច្បារ ទីធ្លា ។ល។

**៣.៣.៣ : ការកែប្រែ ការបន្ថែមវត្ថុ និងការលប់បំបាត់**

អ្នកស៊ើបអង្កេតត្រូវប្រុងប្រយ័ត្នចំពោះរាល់ការកែប្រែ ឬការលប់បំបាត់នៅទីកន្លែង ក៏ដូចជាការបន្ថែមវត្ថុផ្សេងៗជាយថាហេតុ ។

**ការកែប្រែ :** មានន័យថាអ្វីដែលត្រូវបានបំលាស់ទី ផ្លាស់ប្តូរទីតាំង ឬធ្វើឱ្យខូចខាត (វត្ថុ ទ្វាររបើក ការគាស់ទំលុះទំលាយ...)

**ការបន្ថែមវត្ថុ :** មានន័យថាអ្វីដែលស្ថិតនៅទីកន្លែងកើតហេតុមុនពេលបទល្មើសត្រូវប្រព្រឹត្ត (ស្លាកស្នាម ស្នាម វត្ថុបោះបង់ចោល ឬភ្លេច...) ។

**ការលប់បំបាត់ :** មានន័យថាអ្វីដែលបានបាត់អាចត្រូវសង្កេតឃើញជាយថាហេតុតាមរយៈស្លាកស្នាម (ទីតាំងវត្ថុមួយដែលគ្មានធូលលើសង្ហារិម ឬផ្ទាំងគំនូរលើជញ្ជាំង ។ល។) ។

**៣.៣.៤. : ការរើបអូស និងការបិទស្លាកបោះត្រា**

អ្នកស៊ើបអង្កេតអនុវត្តបច្ចេកទេស**ស្ថានភាព-ពិពណ៌នា-ចាប់ខ្លួន-រើបអូស-បិទស្លាកបោះត្រា** នៅគ្រប់

ពេលចាំបាច់។

ដំណាក់កាលស្ថានភាពពិពណ៌នា-ចាប់ខ្លួន អាចត្រូវអនុវត្តនៅគ្រប់ពេលសង្កេតឃើញមានការកែប្រែ ការបន្ថែមវត្ថុ ឬការលប់បំបាត់។

ដំណាក់កាលរឹបអូស និងបិទស្លាកបោះត្រាអាចធ្វើឡើងជាសំខាន់សម្រាប់បង្ហាញអ្វីដែលមានប្រយោជន៍ដល់ការស៊ើបអង្កេត។

**៣.៣.៥. : វិធានការរក្សាទុកជាយថាហេតុ**

ដាក់ឱ្យមានការយាមកាមទីកន្លែងទម្រាំដល់ម្ចាស់ផ្ទះត្រលប់មកវិញ។ ប្រសិនជាចាំបាច់ ធ្វើការកោះហៅជនរងគ្រោះដើម្បីស្តាប់ចម្លើយ។

**៣.៣.៦. : កិច្ចបញ្ចប់**

កុំភ្លេចចុះហត្ថលេខាលើសាលាកប័ត្របិទស្លាកបោះត្រា។

**៣.៣.៧. :និទ្ទេស និងឧបសម្ព័ន្ធ**

សៀវភៅរូបថតស្ថានភាពទីកន្លែង វិញ្ញាបនប័ត្រសុខភាព ច្បាប់ចំលងសេចក្តីសន្និដ្ឋានស៊ើបសួរជាយថាហេតុ។

**៤.ការស៊ើបអង្កេតទីជិតខាង**

ទោះបីជាមិនស្ថិតនៅក្នុងដំណាក់កាលពិនិត្យកត់ត្រាទាំងស្រុងក៏ដោយ ក៏ការស៊ើបអង្កេតទីជិតខាងមាន **ទំនាក់ទំនងយ៉ាងជិតស្និទ្ធ**ទៅនឹងការពិនិត្យកត់ត្រា រហូតដល់ចាំបាច់ត្រូវរៀបចំសលាកប័ត្រមួយដោយឡែកសម្រាប់ការស៊ើបអង្កេតនេះ។ ដូចគ្នានឹងការពិនិត្យកត់ត្រាផងដែរ ការស៊ើបអង្កេតនេះអាចជា**ការបង្ហាញភស្តុតាងផ្លូវការ** សម្រាប់បំភ្លឺការស៊ើបអង្កេត និងជាពិសេសមិនអាចត្រូវពន្យារពេលឡើយ ពុំនោះនឹងធ្វើឱ្យបាត់បង់ធ្ងន់ធ្ងរ ជាយថាហេតុនូវធាតុផ្សំអត្តសញ្ញាណកម្មនោះ។

ការស៊ើបអង្កេតទីជិតខាងដែលជាកិច្ចយ៉ាងសំខាន់ ក្នុងដំណើរប្រព្រិត្តទៅនៃនីតិវិធី ចាំបាច់ក្នុងការស្វែងរក តម្រុយ ធាតុ ឬព័ត៌មានក្នុងបរិវេណជិត ឬឆ្ងាយពីទីកន្លែងប្រព្រឹត្តបទល្មើសព្រហ្មទណ្ឌ។

ពុំមានអត្ថបទណាមួយចែងថាដំណាក់កាលស៊ើបអង្កេតនគរបាលយុត្តិធម៌នេះ**ត្រូវធ្វើឡើងព្រមគ្នា ឬក្រោយការពិនិត្យកត់ត្រាភ្លាមនោះទេ**។

ប៉ុន្តែ ដំណាក់កាលនេះអាចដូចទៅនឹងការពិនិត្យកត់ហេតុ ឬការស្វែង រកព័ត៌មាន ឬចម្លើយបំភ្លឺ។ ទោះបីជា ក្នុងក្របខ័ណ្ឌគតិយុត្តិអ្វីក៏ដោយ ឬមន្ត្រីរាជការដែលធ្វើប្រតិបត្តិការ មាន គុណសម្បត្តិអ្វីក៏ដោយ (មន្ត្រីនគរបាលយុត្តិធម៌ ឬភ្នាក់ងារនគរបាលយុត្តិធម៌) ការស៊ើបអង្កេតនេះអាចត្រូវ បានអនុវត្តនៅគ្រប់ដំណាក់កាលនៃការស៊ើបអង្កេតដែលមន្ត្រីនគរបាលយុត្តិធម៌យល់ថាចាំបាច់។ ប៉ុន្តែ កាលណា ខណៈ**នេះកាន់តែជិតខណៈ**នៃព្រឹត្តិការណ៍ដែលចោទប្រកាន់ គេកាន់តែមានភាពងាយស្រួលក្នុងការ រកឃើញ ស្លាកស្នាម និងតម្រុយ។

ការស៊ើបអង្កេតទីជិតខាងជាច្រើនអាចត្រូវធ្វើឡើងក្នុងសំនុំរឿងតែមួយ បើសិនគេយល់ថាចាំបាច់។

វិធានទម្រង់ការនីតិវិធីត្រូវធ្វើឡើងស្របតាមសុភវិនិច្ឆ័យ និងគោរពការហាមឃាត់ដោយច្បាប់ដែលមាន ចែងក្នុងបទបញ្ជា ដែលធានាសេរីភាពបុគ្គល និងសមូហភាព។

### **៤.១. ការអនុវត្ត :**

ត្រូវតែ :

-សួរចម្លើយបុគ្គលទាំងឡាយដែលស្នាក់នៅ ឬធ្វើការក្បែរកន្លែងប្រព្រឹត្តបទល្មើស។

-សួរចម្លើយបុគ្គលទាំងឡាយដែលជួបក្បែរទីកន្លែងប្រព្រឹត្តបទល្មើស។

-អញ្ជើញសាក្សី ដែលអាចផ្តល់ព័ត៌មានមានប្រយោជន៍ឱ្យមកបង្ហាញខ្លួននៅទីស្នាក់ការអង្គភាពដើម្បីផ្តល់ចម្លើយបំភ្លឺតាមរយៈកំណត់ហេតុ (ប៉ុន្តែ តាមការអនុវត្តជាក់ស្តែង គ្មានអ្វីរារាំងមិនឱ្យគេកត់ត្រាការស្តាប់ចម្លើយ នៅនឹងកន្លែងនោះទេ)។

### **៤.២. ការសរសេរ :**

ការសរសេរនឹងត្រូវធ្វើឡើង :

លើ**កំណត់ហេតុ ឬរបាយការណ៍** ទៅតាមកាលៈទេសៈ និងចំនួនបុគ្គលទាក់ទង។

បើសិនជារបាយការណ៍ គេត្រូវបញ្ជូនរបាយការណ៍នេះទៅអ្នកដឹកនាំការស៊ើបអង្កេត ដែលនឹងវិភាគកាលានុវត្តភាព ដើម្បីស្តាប់ចម្លើយបុគ្គលម្នាក់ ឬច្រើននាក់ដែលពាក់ព័ន្ធតាមរយៈកំណត់ហេតុ។

### **៤.៣. ទម្រង់ការ :**

ត្រូវកត់ត្រានូវ :

-ទីកន្លែងសរសេរ

-យោងសេចក្ដីណែនាំដែលភ្ជាក់ងារនគរបាលយុត្តិធមិបានទទួល

-ក្របខ័ណ្ឌគតិយុត្តិ

-ជំនួយការ (ជាយថាហេតុ)

-ការរព្ចកពីទីកន្លែងដែលការស៊ើបអង្កេតត្រូវធ្វើឡើងដោយបញ្ជាក់ជាយថាហេតុការធ្វើដំណើរ

-ការស៊ើបអង្កេតវិជ្ជមាន : បញ្ជាក់បុគ្គលទាក់ទងនានា (ឈ្មោះ ត្រកូល អាយុ មុខរបរ អាស័យដ្ឋាន និងទូរស័ព្ទ) ដោយបញ្ជាក់ពីបុគ្គលម្នាក់ៗនូវអ្វីដែលការផ្ដល់ចម្លើយនោះបានបង្ហាញដល់ស៊ើបអង្កេតដែលប្រព្រឹត្តទៅ ។

-ការស៊ើបអង្កេតអវិជ្ជមាន : បញ្ជាក់ថាការស្រាវជ្រាវមិនបានបង្ហាញអ្វីបន្តិចសោះ ។

# ផ្នែកទី ២

# ការស្តាប់ចម្លើយ : ពាក្យបណ្តឹង ការផ្តល់ចម្លើយ ការសួរចម្លើយ និងការតទល់

ទំនាក់ទំនងរវាង នគរបាល ជនរងគ្រោះ សាក្សី ចារី ការស្តាប់ចម្លើយ និងការស៊ើបអង្កេត កើតឡើងនៅក្នុងដំណាក់កាលខុសៗគ្នានៃនីតិវិធី ដែលអាចជា ដំណាក់កាលដាក់ពាក្យបណ្តឹង (ការប្តឹង) ពេលផ្តល់ចម្លើយ ពេល សួរចម្លើយ ឬពេលតទល់ ។

មានដំណាក់កាលសំខាន់ៗជាច្រើន ដែលនគរបាលដើរតួនាទីដ៏សំខាន់ ហើយទទួលខុសត្រូវចំពោះការងារទាំងស្រុង។

## ១.ការស្តាប់ចម្លើយ : ភាពទូទៅ

### ១.១.វិធានទម្រង់ច្បាប់ :

គ្រប់ការស្តាប់ចម្លើយត្រូវធ្វើឡើងជាទម្រង់កំណត់ហេតុ និងមានលក្ខណៈចាំបាច់ ដោយហេតុថាទម្រង់ការដែលការស្តាប់ចម្លើយបាន ផ្តល់ឱ្យវាក្យសព្ទច្បាប់នោះបង្កើតបានជា " ច្រកឆ្លងកាត់ " មិនអាចជៀសផុត។ ទម្រង់ការនេះមានដូចតទៅ :

**កាលបរិច្ឆេទ**

**ម៉ោង**

**អ្នកសរសេរកំណត់ហេតុ :**

-ឈ្មោះ និងត្រកូលរបស់ខ្លួន

-ឋានះរបស់ខ្លួន

-អង្គភាពដើមរបស់ខ្លួន

-គុណសម្បត្តិរបស់ខ្លួន ( មន្ត្រីនគរបាលយុត្តិធម៌ )

-ទីតាំងរដ្ឋបាល ( ទីស្នាក់ការអង្គភាពរបស់ខ្លួន ) ។

**សេចក្តីផ្តើម :**

- ទីកន្លែងសរសេរកំណត់ហេតុ
- ក្របខ័ណ្ឌគតិយុត្តិ
- យោងមាត្រាខ្លះនៃក្រមនីតិវិធីព្រហ្មទណ្ឌដែលទាក់ទងនឹងក្របខ័ណ្ឌគតិយុត្តិ

**អង្គកំណត់ហេតុ :**

- អត្តសញ្ញាណបុគ្គលដែលត្រូវសួរចម្លើយ :

→ អត្តសញ្ញាណខ្លះៗសម្រាប់ជនរងគ្រោះ និងសាក្សី

→ អត្តសញ្ញាណលម្អិតសម្រាប់ជនសង្ស័យ (មើលប្លង់កំណត់ហេតុបណ្ដឹង និងសួរ ចម្លើយបំភ្លឺ)

- អង្គហេតុ : " អំពីរឿងហេតុ "

**កិច្ចបញ្ចប់ :**

"អានដោយខ្លួនឯង........."

**ហត្ថលេខា :**

អ្នកចូលរួមក្នុងកំណត់ហេតុត្រូវចុះហត្ថលេខាលើកំណត់ហេតុ។

**វិមទំព័រ :**

ត្រូវចុះនិទ្ទេស " ករណី កម្មវត្ថុ " (មើលទម្រង់ការកំណត់ហេតុ)

**១.២.វិធានគតិច្បាប់ :**

គ្រប់កំណត់ហេតុស្ដាប់ចម្លើយបំភ្លឺទាំងអស់ត្រូវមានគំនូសបំព្រួញដឹកនាំសរុបក្នុងចំណងជើង "អំពីរឿងហេតុ" :

-អ្វីដែលបានកើតឡើងមុនរឿងហេតុ

-រឿងហេតុ (របៀបប្រតិបត្តិការ....)

-អ្វីដែលត្រូវបានធ្វើឡើងក្រោយរឿងហេតុ។

ចំនុចទាំងបីនេះត្រូវធ្វើឡើងបន្តបន្ទាប់គ្នាតាមរយៈសំនួរដូចតទៅ :

**នរណា**

**នៅទីណា**

**នៅពេលណា**

**អ្វី**

**យ៉ាងដូចម្ដេច**

**ហេតុអ្វី**

**ជាមួយនរណា**

**ដោយអ្វី**

**២.អត្តានុកូលដ្ឋាន**

**២.១.ភាពទូទៅ**

អត្តសញ្ញាណគឺជាសំនុំទិន្នន័យដែលអនុញ្ញាតឱ្យ :

-ចង្អុលបង្ហាញ

-ចំណាំបុគ្គលម្នាក់ដោយគ្មានកំហុសឆ្គង ឬការភាន់ច្រឡំ

-រកឃើញបុគ្គលនោះ

នគរបាលត្រូវពន្យល់គ្រប់គ្រោះថ្នាក់ ព្រឹត្តិការណ៍ដែលជាសំអាងហេតុនៃអន្តរាគមន៍របស់ខ្លួន ការធ្វើរបៀបនេះតម្រូវឱ្យគាត់បង្ហាញនូវគ្រប់អត្តសញ្ញាណបុគ្គលសង្ស័យទាំងឡាយ (ដើមចោទ សាក្សី ជនរងគ្រោះ អ្នកទាមទារ ចារីបទល្មើស) ។

**២.២.អត្តសញ្ញាណបុគ្គលដែលត្រូវស្តាប់ចម្លើយ**

ចំពោះរឿងនេះ យើងត្រូវបែងចែកជា :

-អត្តសញ្ញាណសង្ខេប

-អត្តសញ្ញាណខ្លះៗ

-អត្តសញ្ញាណលម្អិត

**២.២.១.អត្តសញ្ញាណសង្ខេប**

អត្តសញ្ញាណសង្ខេបត្រូវបានប្រើប្រាស់ :

ដើម្បីចង្អុលបង្ហាញបុគ្គលគ្រប់រូបដែលចូលរួមក្នុងនីតិវិធី តែមិនត្រូវបានស្តាប់ចម្លើយទេ (ឧទាហរណ៍ : អត្តសញ្ញាណសាក្សីពីរនាក់ ដែលត្រូវបានទាមទារអោយចូលរួមក្នុងការឆែកឆេរ ក្នុង ករណីខ្លះ) ។

គេត្រូវចុះនិទ្ទេសក្នុងវិមទំព័រកំណត់ហេតុនូវអត្តសញ្ញាណ ដែលមានដូចជា : ឈ្មោះ ត្រកូល ប្រើសព្វថ្ងៃ អាយុ មុខរបរ និងលំនៅដ្ឋាន ។

**២.២.២.អត្តសញ្ញាណត្រួសៗ**

អត្តសញ្ញាណត្រួសៗត្រូវបានស្រង់កាលណា បុគ្គលត្រូវស្តាប់ចម្លើយ ឬចាប់ខ្លួនទំនងគ្រាន់តែជា**សាក្សីសាមញ្ញម្នាក់ ដែលមិនត្រូវបានសង្ស័យថាជាពិរុទ្ធជន**។

អត្តសញ្ញាណនេះរួមមាន :

-ឈ្មោះ

-ត្រកូល

-កាលបរិច្ឆេទ និងទីកន្លែងកំណើត

-សញ្ជាតិ (បើសិនជាបទល្មើសលួច ត្រូវមានឯកសារបញ្ជាក់អត្តសញ្ញាណ ឬសញ្ជាតិបរទេស)

-មុខរបរ

-ទីលំនៅ

-ទូរស័ព្ទ

**២.២.៣.អត្តសញ្ញាណលម្អិត**

អត្តសញ្ញាណលម្អិតត្រូវបានស្រង់ កាលណាមន្ត្រីនគរបាលយុត្តិធម៌ជួបប្រទះនូវ**ចារី**បទឧក្រិដ្ឋ ឬបទមជ្ឈិមមួយ (និងត្រូវបានស្រង់កាន់តែលម្អិតចំពោះបុគ្គលគ្រប់រូបដែលត្រូវបានឃាត់ខ្លួន)។ អត្តសញ្ញាណលម្អិតនេះមាននិទ្ទេសតាមលំដាប់ដូចតទៅ :

-ត្រកូល

-ឈ្មោះត្រូវសរសេរជាអក្សរដៃ តាមលំដាប់ អត្រានុកូលដ្ឋាន និងត្រូវគូសបន្ទាត់ពីក្រោមឈ្មោះដែលប្រើសព្វថ្ងៃ។

-ឈ្មោះហៅក្រៅ បើមាន

-កាលបរិច្ឆេទ និងទីកន្លែងកំណើត : ខេត្ត ស្រុក ឃុំ ភូមិ

-ខ្សែលោហិត : ឈ្មោះ និងត្រកូលឪពុក (ដោយថាហេតុ ត្រូវចុះពីក្រោយ ឪ ស្លាប់ ឪ) ឈ្មោះ និងត្រកូលម្តាយ

-ស្ថានភាពគ្រួសារ : នៅលីវ មេម៉ាយ ឬពោះម៉ាយ ឬរៀបការ នៅថ្ងៃទី (កាលបរិច្ឆេទរៀបការ) នៅ (ទីកន្លែងរៀបការ) ជាមួយ (ឈ្មោះ និងត្រកូលសហព័ទ្ធ) ការបញ្ជាក់ទាក់ទង នឹងកូន : ចំនួន និង អាយុ។

-សញ្ជាតិ : ចំពោះជនបរទេស ត្រូវបញ្ជាក់ពីលក្ខណៈ និងឯកសារយោងនៃប័ណ្ណស្នាក់នៅ ឬទិដ្ឋាការ ។

-មុខរបរ ឬមុខងារ : ត្រូវបញ្ជាក់និយោជក ឬនិយោជកចុងក្រោយ ឈ្មោះ ឬនាមករណ៍ អាស័យដ្ឋាន លេខទូរស័ព្ទ និងទំហំនៃធនធាន

-ទីលំនៅ : ត្រូវបញ្ជាក់ ឃុំ សង្កាត់ និងក្រុមចំពោះទីក្រុងសំខាន់ៗ ។

-កម្រិតវប្បធម៌ : សញ្ញាប័ត្រ ឬកម្រិតវប្បធម៌

-ប្រវត្តិសកម្មភាព : ត្រូវប្រយ័ត្នប្រយែងកុំរំលឹកពីទោសដែលត្រូវបានលើកលែងជាទូទៅរួចហើយ ។ ប៉ុន្តែគេអាចប្រើប្រាស់នូវទម្រង់ថា "ខ្ញុំត្រូវនគរបាលស្គាល់តាមរយៈរឿងហេតុ.....» ។

-លេខទូរស័ព្ទ ( នៃលំនៅដ្ឋាន និងរបស់និយោជក បើមាន) លេខទូរស័ព្ទដៃ

ក្រោយពីស្រង់អត្តសញ្ញាណរួច ( ក្រោយពីបានអានលិខិតស្នាមរដ្ឋបាល) នគរបាលត្រូវតែ ធានាអោយបានថាខ្លួនកាន់កាប់គ្រប់ទិន្នន័យស្តីពីអត្តសញ្ញាណចាំបាច់សម្រាប់ការស៊ើបសួរ ហើយគេអាចប្រើប្រាស់ នូវអត្តសញ្ញាណនោះបាន ។

## ៣.ពាក្យបណ្តឹង

### ៣.១.បុព្វកថា

ពាក្យបណ្តឹងគឺជា**ប្រភពចំបងដែលអាចឱ្យដឹងពីបទល្មើស**ច្បាប់ព្រហ្មទណ្ឌ ។ ព្រះរាជអាជ្ញាទទួល បណ្តឹងដោយផ្ទាល់ ឬតាមរយៈមន្ត្រីនគរបាលយុត្តិធម៌ ហើយពិចារណាតើត្រូវចាត់ការបណ្តឹងនោះដូចម្តេច ( មាត្រា ៤០៤ នៃក្រម នីតិវិធីព្រហ្មទណ្ឌ) ។

គ្រប់បណ្តឹងទាំងអស់ ទាមទារឱ្យមានការពិនិត្យ**ភាពសព្វគ្រប់នៃអំពើ**ដែលត្រូវចោទប្រកាន់ និងការស្វែងចារីម្នាក់ ឬច្រើននាក់នៃបទល្មើស ។ ក្រោយពីធ្វើការស្រាវជ្រាវដោយគំនិតផ្តួចផ្តើមផ្ទាល់ខ្លួន ឬតាមរយៈដីកាសេចក្តីសន្និដ្ឋានអោយស៊ើបសួររបស់អយ្យការ នីតិវិធីត្រូវបានបង្កើតឡើងដើម្បីជាជំនួយដល់ការអនុវត្ត បណ្តឹងអាជ្ញា ។

គ្រប់ការទទួលពាក្យបណ្តឹងគឺនាំទៅដល់ការបង្កើតនីតិវិធី ( មាត្រា ៧២ និង៧៤ នៃក្រមនីតិវិធីព្រហ្មទណ្ឌ) ហើយគ្រប់នីតិវិធីដែលសរសេររួចត្រូវតែ**បញ្ជូនទៅអយ្យការ** ( ទោះបីជាការស៊ើបអង្កេតមិនទាន់ចប់ក៏ដោយ មាត្រា ៧៥ នៃក្រមនីតិវិធីព្រហ្មទណ្ឌ) ។

**៣.២. ការទទួលពាក្យបណ្តឹង :**

មន្ត្រីនគរបាលយុត្តិធម៌ជាអ្នកទទួលពាក្យបណ្តឹង និងកត់ត្រាក្នុងកំណត់ហេតុមុននឹងបញ្ជូនទៅព្រះរាជអាជ្ញា ( មាត្រា ៧១ នៃក្រមនីតិវិធីព្រហ្មទណ្ឌ) ។

ទាក់ទងទៅនឹងការជូនដំណឹងទៅអយ្យការ ការជូនដំណឹងត្រូវធ្វើឡើងភ្លាម ចំពោះបទឧក្រិដ្ឋ ឬបទមជ្ឈិម កម្រិតធ្ងន់ ឬដែលអាចបង្កភាពរីករាលធ្ងន់ធ្ងរដល់សណ្តាប់ធ្នាប់សាធារណៈ ឬសំនុំរឿងមួយដែលចោទប្រកាន់ បុគ្គលសំខាន់ណាម្នាក់ ឬចំពោះសំនុំរឿងមួយដែលបង្កើតអោយមានការសង្ស័យ លើសមត្ថកិច្ចអង្គភាពដែលត្រូវបន្តការស៊ើបអង្កេត ។

**៣.៣.ប្រភេទផ្សេងៗនៃពាក្យបណ្តឹង :**

**៣.៣.១.ពាក្យបណ្តឹងសាមញ្ញ**

គឺជាការ**ប្រកាស**សាមញ្ញពីបទល្មើស។

គ្រប់អង្គភាពនគរបាល ដែលទទួលភារៈកិច្ចជានគរបាលយុត្តិធម៌ត្រូវទទួលបណ្តឹងនេះ ដោយផ្ទាល់។ បណ្តឹងនេះជាការប្រកាសធ្វើឡើង ចំពោះមុខមន្ត្រីនគរបាលយុត្តិធម៌ ដោយរូបវន្តបុគ្គល ឬនីតិបុគ្គលណាមួយដែលរាយការណ៍ជូនអង្គភាព ពីអត្ថិភាពបទល្មើសមួយដែលខ្លួនបានទទួលរង។

ពុំមានទម្រង់ផ្លូវច្បាប់ជាពិសេសនោះទេ គ្រាន់តែតម្រូវឱ្យការប្រកាសនោះធ្វើឱ្យលេចឡើង នូវអត្ថិភាពបទល្មើសមួយដែលមានចែងក្នុងក្រមព្រហ្មទណ្ឌ ឬច្បាប់ពិសេសមួយប៉ុណ្ណោះ។

**៣.៣.២.ពាក្យបណ្តឹងដោយមានការតាំងខ្លួនជាដើមបណ្តឹងរដ្ឋប្បវេណី**

យោងតាមមាត្រា ១៣ នៃក្រមនិតិវិធីព្រហ្មទណ្ឌ «បណ្តឹងរដ្ឋប្បវេណីត្រូវអនុវត្តដោយជនរងគ្រោះនៃបទល្មើស» ។

ប៉ុន្តែ បណ្តឹងរដ្ឋប្បវេណីក៏អាចធ្វើឡើងដោយ :

-តំណាងស្របច្បាប់របស់ជនរងគ្រោះ ( មាត្រា ១៥ នៃក្រមនីតិវិធីព្រហ្មទណ្ឌ)

-ទាយាទ ( មាត្រា ១៦ នៃក្រមនីតិវិធីព្រហ្មទណ្ឌ)

-សមាគមមួយចំនួន ( មាត្រា ១៧ ដល់ ១៩នៃក្រមនីតិវិធីព្រហ្មទណ្ឌ) ។

បណ្តឹងរដ្ឋប្បវេណីអាចត្រូវបានធ្វើឡើងចំពោះមុខយុត្តាធិការព្រហ្មទណ្ឌ ឬយុត្តាធិការរដ្ឋប្បវេណី

( មាត្រា ២២ នៃក្រមនីតិវិធីព្រហ្មទណ្ឌ) ។

## ៣.៤. ប្រភេទអ្នកប្ដឹង

តាមគោលការណ៍ បណ្ដឹងផ្ដើមចេញពីបុគ្គលដែល**រងគ្រោះផ្ទាល់ដោយ**បទល្មើស ប៉ុន្តែក៏អាចមានអ្នក**តំណាង**ជនរងគ្រោះផងដែរ ។

*អនីតិជន*

កាលណា អនីតិជនពាក់ព័ន្ធ ក្នុងនាមជាជនរងគ្រោះ ឪពុកម្ដាយអន្តរាគមក្នុងឋានៈជាអ្នកទទួលខុសត្រូវដើមបណ្ដឹងរដ្ឋប្បវេណី និង/ឬ អ្នកគ្រប់គ្រងស្របច្បាប់នៃទ្រព្យសម្បត្តិរបស់កូនខ្លួន។ ក្នុងករណី អនីតិជនគ្មានឪពុកម្ដាយ ការគ្រប់គ្រងស្របច្បាប់នៃទ្រព្យសម្បត្តិត្រូវប្រគល់ទៅឱ្យអាណាព្យាបាល ( មាត្រា ១៥ នៃក្រមនីតិវិធីព្រហ្មទណ្ឌ) ។

*នីតិបុគ្គល*

ជាសារវន្ត គឺជាសមាគមនានាដូចរៀបរាប់ក្នុងកថាខ័ណ្ឌ ២ ខាងលើ ។

## ៣.៥. លក្ខខ័ណ្ឌទម្រង់ច្បាប់

ការផ្ដល់ចម្លើយត្រូវសរសេរជា**លាយលក្ខណ៍អក្សរ** ។ ដូចនេះ មន្ត្រីនគរបាលយុត្តិធម៌ត្រូវសរសេរកំណត់ហេតុទទួលពាក្យបណ្ដឹងភ្លាម ។ ប្រតិបត្តិការនេះអាចត្រូវពន្យារពេលដោយមានការសុំឱ្យជនរងគ្រោះទៅសរសេរ ពាក្យបណ្ដឹងដោយខ្លួនឯង ។

### ៣.៥.១. ប្រភេទផ្សេងៗនៃកំណត់ហេតុ

ទោះជាកំណត់ហេតុប្រភេទណាក៏ដោយ ក្រដាសកំណត់ហេតុអាច មានគំរូស្រាប់ ឬជាក្រដាសធម្មតាដែលនគរបាលចុះនិទ្ទេសចាំបាច់ផ្សេងៗ ។

ពាក្យបណ្ដឹងអាចត្រូវសរសេរជាអក្សរដៃ ឬវាយអង្គុលីលេខ ។

### ៣.៥.២. អត្ថន័យនៃកំណត់ហេតុពាក្យបណ្ដឹង

**អត្តសញ្ញាណកម្មជនរងគ្រោះ**

កំណត់ហេតុត្រូវមានឈ្មោះ ត្រកូល កាលបរិច្ឆេទ និងទីកន្លែងកំណើត មុខរបរ និងអាស័យដ្ឋាន ។ ត្រូវភ្ជាប់ទៅនឹងអត្តសញ្ញាណស្ដង់ដារនេះនូវទិន្នន័យ ដែលជាយថាហេតុអាចឱ្យគេទាក់ទងសាម៉ីខ្លួន បានលឿនបំផុត ( ទូរ

ស័ព្ទប្រចាំលំនៅដ្ឋាន ឬកន្លែងធ្វើការ) ។

**ធាតុនៃបទល្មើស**

កំណត់ហេតុត្រូវផ្តោតទៅលើ**ទីកន្លែង**នៃបទល្មើស (សមត្ថកិច្ចដែនដីដែលអាចធ្វើការស៊ើបអង្កេត) **ពេលវេលា**នៃការប្រព្រឹត្តបទល្មើស ឬពេលរកឃើញបទល្មើស (ចាំបាច់ សម្រាប់កំណត់ក្របខ័ណ្ឌគតិយុត្តិនៃការស៊ើបអង្កេត) **របៀបប្រតិបត្តិការ** (ធាតុដែលអ្នកប្តឹងបានដឹង) **ការពិពណ៌នាពីវត្ថុ** ដែលត្រូវបានលួច គែបន្លំ ឬ ប្រើប្រាស់ ដើម្បីប្រព្រឹត្តបទល្មើស **អិនភាគ**របស់ចារីម្នាក់ ឬច្រើននាក់ និងការសង្ស័យអ្វីមួយ ។

នៅក្នុងពាក្យបណ្តឹងប្រឆាំងនឹងបុគ្គលដែលត្រូវស្គាល់អត្តសញ្ញាណ គេត្រូវតែលើកឡើងពី ធាតុនៃពិរុទ្ធភាព។ បើចាំបាច់ គេត្រូវសួរព័ត៌មានបន្ថែម។

ចំពោះការលួចបណ្តាលអោយបាត់បង់សំភារៈ គេត្រូវសួរទៅកាន់អ្នកប្តឹងបរិហារនូវ ព័ត៌មានទាក់ទងនឹងក្រុមហ៊ុនធានារ៉ាប់រង រូបថត និងឯកសារមួយចំនួន (សម្រាប់វាយតំលៃព្យសនកម្ម) ។

ក្នុងករណីដែលមានព្យសនកម្មលើរាងកាយ គេត្រូវសុំពីជនរងគ្រោះនូវ វិញ្ញាប័ណ្ណប័ត្រពិនិត្យសុខភាព ដែលអាចតម្រូវអោយ ផ្អាកការងារជាបណ្តោះអាសន្ន ដើម្បីភ្ជាប់ជាឧបសម្ព័ន្ធ (ចាំបាច់សម្រាប់ធ្វើចំណាត់ថ្នាក់បទល្មើសព្រហ្មទណ្ឌ) ។

នៅខាងចុងកំណត់ហេតុ មានចុះនិទ្ទេសអំពី**ការសម្រេចដាក់ពាក្យបណ្តឹង** ឬមិនដាក់ពាក្យបណ្តឹងដោយជនរងគ្រោះ (ក្នុងករណីដែលជនរងគ្រោះសម្រេចមិនដាក់ពាក្យបណ្តឹង យើងលែងហៅថាបណ្តឹងទៀត ហើយប៉ុន្តែហៅថាជាការបរិហារទៅវិញ) ។

ទីបញ្ចប់ ជនរងគ្រោះត្រូវអះអាងពីបណ្តឹងរបស់ខ្លួនដោយ**ចុះហត្ថលេខា ឬផ្តិតមេដៃ** ក្រោមកំណត់ហេតុ ក្រោយពីបានអានកំណត់ហេតុនោះរួច។

**៩.ការផ្តល់ចម្លើយ**

ក្នុងសំនុំរឿងព្រហ្មទណ្ឌ ប្រភេទភស្តុតាងដែលចេញពីមនុស្សអាចជា ចម្លើយ សារភាព និងការផ្តល់ចម្លើយ។ បន្ថែមទៅលើស្លាកស្នាម និងតម្រុយ (ប្រភេទភស្តុតាងបានពី វត្ថុ) ការផ្តល់ចម្លើយគឺ**ជាកត្តាមួយសំខាន់ដែលជំរុញឱ្យការស៊ើបអង្កេតរីកចម្រើនទៅមុខ**។ ការផ្តល់ចម្លើយនឹង អនុញ្ញាតឱ្យនគរបាលកំណត់នូវកាលៈទេសៈនៃអង្គហេតុ តម្រង់ទិសដៅការស្រាវជ្រាវ ហើយជូនកាលធ្វើ អត្តសញ្ញាណកម្មចារីម្នាក់ ឬច្រើននាក់។

ទោះបីជាការផ្តល់ចម្លើយមានលក្ខណៈចាំបាច់យ៉ាងណាក៏ដោយ ក៏វានៅតែជាប្រភេទភស្តុតាងមួយមិនប្រាកដប្រជាដដែល ។ តំលៃរបស់វាមិនត្រឹមតែអាស្រ័យទៅនឹងរបៀបទទួលចម្លើយប៉ុណ្ណោះទេ ថែមទាំងអាស្រ័យទៅនឹងការត្រួតពិនិត្យ ដែលគេអាចធ្វើ ឬមានលទ្ធភាពនឹងធ្វើផងដែរ ។

សាក្សីគឺជាអ្នកដែលបានឃើញ បានឮ បានដឹងនូវការប្រព្រឹត្តបទល្មើសណាមួយ ប៉ុន្តែមិនទាក់ទងនឹងបទល្មើសដោយផ្ទាល់នោះទេ ( ផ្ទុយទៅវិញ គឺទាក់ទងនឹងជនរងគ្រោះ ឬជនត្រូវចោទ.....) ។

## ៤.១. ទម្រង់នៃការផ្តល់ចម្លើយ

### ៤.១.១. ការស្វែងរកសាក្សី

សាក្សីកម្រនឹងបង្ហាញខ្លួនដោយឯកឯងនៅអង្គភាពនរគបាលណាស់ ។ អ្នកស៊ើបអង្កេតត្រូវស្វែងរកពួកគេ ។ ការស្វែងរកនេះត្រូវចាប់ផ្តើមឡើង ចាប់ពីពេលរកឃើញបទល្មើសតាមរយៈ :

**ដោយធ្វើអត្តសញ្ញាណកម្មបុគ្គលនានាដែលមានវត្តមាន និងជាយថាហេតុដាក់ជនទាំងនោះឱ្យនៅជាចំរែងឯងៈ**

ដោយសួរទៅកាន់សាក្សីទាំងនេះអំពីអត្តសញ្ញាណ ឬភិនភាគបុគ្គលមួយចំនួនដែលនៅក្បែរខ្លួនគេ ឬក្បែរកន្លែងប្រព្រឹត្តបទល្មើសនៅពេលដែលកំពុងកើតហេតុ (អ្នកខ្លះអាចចាកចេញពីទីកន្លែងកើតហេតុនៅចន្លោះពេលដែលអង្គភាពនរគបាលបានទទួលដំណឹង និងពេល ដែលអង្គភាពនោះបានមកដល់កន្លែងកើតហេតុ) ។

**តាមរយៈការស៊ើបអង្កេតអ្នកជិតខាង**

**ដោយត្រលប់មកកាន់កន្លែងកើតហេតុវិញ** នៅមួយថ្ងៃក្រោយរឿងហេតុ នៅម៉ោងតែមួយ ឬសប្តាហ៍បន្ទាប់ នៅថ្ងៃ និងម៉ោងតែមួយដែលរឿងហេតុបានកើតឡើង ដើម្បីរកបុគ្គលទាំងឡាយ ដែលបាននៅកន្លែងកើតហេតុ នៅខណៈបទល្មើសកើតឡើង ។

**ដោយការស្តាប់ចម្លើយសាច់ញាតិ អ្នកបំរើក្នុងផ្ទះ អ្នកមានទំនាក់ទំនងការងារជាមួយជនរង គ្រោះ ។**

**ដោយការអំពាវនាវតាមរយៈសារពត៌មាន ។**

### ៤.១.២. : ការទទួលបានការផ្តល់ចម្លើយ

**ពេលវេលា :**

ត្រូវធ្វើឱ្យលឿនបំផុតតាមដែលអាចធ្វើទៅបាន ដើម្បីជៀសវាងកុំឱ្យមានការចងចាំស្រពិចស្រពិល ផ្លាស់ប្តូរ ឬរលុបបាត់ ។

**ទីកន្លែង :**

សាក្សីម្នាក់គឺជាករណីមួយដោយឡែក ។ ចំពោះសាក្សីមួយចំនួន ការសួរ ចម្លើយនៅនឹងទីកន្លែងកើតហេតុ មានសារៈប្រយោជន៍ខ្លាំងណាស់ ។ ចំពោះសាក្សីផ្សេងទៀត ការស្តាប់ចម្លើយនៅផ្ទះរបស់គេ ឬនៅអង្គភាព មានលក្ខណៈប្រសើរជាង ។

**ការស្តាប់ចម្លើយសាក្សីនៅកន្លែងកើតហេតុផ្តល់នូវគុណប្រយោជន៍មួយចំនួនមានដូចជា :**

-សាក្សីនឹងកាន់តែមានភាពងាយស្រួល ដើម្បីបង្ហើបប្រាប់ដំណើរនៃសកម្មភាពឧក្រិដ្ឋនៅនឹងកន្លែងកើតហេតុ

-អ្នកស៊ើបអង្កេតកាន់តែមានលទ្ធភាពអាចរកឃើញនូវលក្ខណៈកុហក ឬភាពក្លែងក្លាយនៃចម្លើយ ដែលខ្លួនទទួលបាន ។

**ការស្តាប់ចម្លើយក្នុងបន្ទប់នគរបាល**

គឺជាការស្តាប់ចម្លើយដែលត្រូវបានធ្វើឡើងញឹកញាប់បំផុត ។

-អ្នកស៊ើបអង្កេតទទួលបានផាសុខភាពផ្នែកសំភារៈ ។ អំណាចអ្នកស៊ើបអង្កេតកាន់តែធំឡើង ។ អ្នកស៊ើបអង្កេតមានភាពងាយស្រួល ពីព្រោះថាខ្លួនស្ថិតក្នុងមជ្ឈដ្ឋានមួយដែលខ្លួនស្គាល់ច្បាស់ ។

-សាក្សីនៅដាច់តែឯង និង ផ្តាច់ចេញពីមជ្ឈដ្ឋានដែលខ្លួនបាន ស្គាល់ ។

**ការស្តាប់ចម្លើយនៅលំនៅដ្ឋានសាក្សី**

- ការស្តាប់ចម្លើយនៅលំនៅដ្ឋានសាក្សី មានលក្ខណៈចាំបាច់នៅ ក្នុងករណីដែល ស្ថានភាពសុខភាពសាក្សីមិនអំណោយផល ឬសាក្សីជាមនុស្សដែលមានឋានៈក្នុងសង្គម ។

-ការស្តាប់ចម្លើយបែបនេះអនុញ្ញាតឱ្យអ្នកស៊ើបអង្កេតបានស្គាល់បុគ្គលិកលក្ខណៈ មជ្ឈដ្ឋានសង្គម និងរបៀបរស់នៅរបស់សាក្សីបានច្បាស់ ។

-សាក្សីកាន់តែមានភាពងាយស្រួល និងស្ងប់ស្ងាត់ ដូច្នេះគាត់អាចមានសេរីភាព ដើម្បីនិយាយ និងបង្ហើបប្រាប់ពីការសម្ងាត់មួយចំនួន ។

-ផ្ទុយទៅវិញ អំណាចនគរបាលទៅលើសាក្សីអាចនឹងថមថយ ជាពិសេសក្នុងករណី ដែលសាក្សីមិនស្មោះត្រង់ ។

**ការស្តាប់ចម្លើយសាក្សីនៅមន្ទីរពេទ្យ ឬមជ្ឈមណ្ឌលព្យាបាលឯកជន (គ្លីនិក)**

-ការស្តាប់ចម្លើយសាក្សីនៅមន្ទីរពេទ្យ ឬគ្លីនិកអាចឱ្យគេចំណេញពេលវេលាយ៉ាងច្រើន ប៉ុន្តែផ្តល់គុណវិបត្តិមួយចំនួន ។

-យោងទៅលើស្ថានភាពសុខភាពសាមីខ្លួនដែលកំពុងស្ថិតក្នុងមន្ទីរពេទ្យ អ្នកស៊ើបអង្កេត ត្រូវទទួលការយល់ព្រមជាមុនពីអាជ្ញាធរសុខាភិបាលជាដាច់ខាត ។

គួរបញ្ជាក់ថាក្នុងករណីនេះ អ្នកស៊ើបអង្កេតនឹងជួបប្រទះល័ក្ខខ័ណ្ឌការងារលំបាក (គ្មានភាពដាច់តែឯងការសន្ទនាខ្សី និងស្ទើរតែមិនអាចប្រើម៉ាស៊ីនសរសេរបានទាល់តែសោះ....) ។

**ការស្តាប់ចម្លើយសាក្សីនៅកន្លែងធ្វើការ**

-ការស្តាប់ចម្លើយសាក្សីនៅកន្លែងធ្វើការមិនត្រូវបានប្រាប់ឱ្យធ្វើឡើយ និងត្រូវធ្វើឡើង លុះត្រាតែចាំបាច់ដាច់ខាតប៉ុណ្ណោះ ។

-ការស្តាប់ចម្លើយបែបនេះអាចរំខាន និងជួនកាលធ្វើឱ្យអាម៉ាស់ដល់សាក្សីដែលត្រូវស្តាប់ចម្លើយ ដូចនេះសាមីខ្លួនមិនសូវមានទំនោរទៅបង្ហើបការសម្ងាត់ដែលតាមធម្មតាខ្លួនអាចប្រាប់បាន បើសិនជាខ្លួនត្រូវបានស្តាប់ចម្លើយនៅអង្គភាព ឬលំនៅដ្ឋានខ្លួននោះ ។

**<u>៤.១.៣. បច្ចេកទេសស្តាប់ចម្លើយ</u>**

**<u>៤.១.៣.១. ការប្រុងប្រយ័ត្នដែលត្រូវធ្វើ</u>**

**ការរៀបចំការស្តាប់ចម្លើយ**

ក្នុងសំនុំរឿងសំខាន់មួយ ការស្តាប់ចម្លើយសាក្សីច្រើនតែត្រូវបាន**រៀបចំទុកជាមុន** ។ អ្នកស៊ើបអង្កេតមិនមែនគ្រាន់តែស្គាល់សំនុំរឿង និងការវិវត្តន៍ចុងក្រោយរបស់សំនុំរឿងច្បាស់ប៉ុណ្ណោះទេ តែក៏ត្រូវស្គាល់ជនដែលត្រូវស្តាប់ចម្លើយផងដែរ ទើបគាត់អាចកំណត់ជាមុននូវសំនួរដែលត្រូវចោទ ហើយជាពិសេសសំនួរដែលត្រូវជៀសវាង ។

**ភាពស្ងប់ស្ងាត់ក្នុងពេលស្តាប់ចម្លើយ**

កាលណាការស្តាប់ចម្លើយកាន់តែសំខាន់ អ្នកស៊ើបអង្កេតកាន់តែត្រូវ**ប្រុងប្រយ័ត្ន**ដើម្បីជៀសវាងកុំឱ្យគេរំខាន (ប្រើប្រាស់ការិយាល័យស្ងប់ស្ងាត់មួយ ហាមមិនឱ្យសហការីផ្សេងទៀតដើរទៅមក-បិទទូរស័ព្ទ បិទសញ្ញា

## ៤.១.៤. ការត្រួតពិនិត្យការផ្តល់ចម្លើយ

### ៤.១.៤.១. ការត្រួតពិនិត្យសាក្សី

ការផ្តល់ចម្លើយមានច្រើនស្មើនឹងចំនួនមនុស្សដែរ ។ ការផ្តល់ចម្លើយនីមួយៗមានភាពខុសគ្នា ហើយភាគច្រើនជាកត្តា ( មជ្ឈដ្ឋានសង្គម អាយុ ភេទ កំរិតវប្បធម៌ វិជ្ជាជីវៈ ជាតិសាសន៍ សញ្ជាតិ...) ដែល ជះឥទ្ធិពលលើបុគ្គលិកលក្ខណៈ និងអត្តចរិតរបស់សាក្សីម្នាក់ ។

និយាយឱ្យចំទៅ **សាក្សីកុហក**ដែលគេតែងជួបប្រទះមានបួនប្រភេទ ។

**សាក្សីកុហកដោយអចេតនា**

ការផ្តល់ចម្លើយធ្វើឡើងដោយឆ្លងកាត់ជាបន្តបន្ទាប់នូវ ដំណាក់កាលដឹងឮ កំណត់រឿងហេតុ និង បង្កើតឡើងវិញតាមរយៈដំណាក់កាលសម្តែងចេញ និងរៀបរាប់រឿងហេតុ ។ ការផ្តល់ចម្លើយអាចត្រូវបានកែប្រែបន្តិចម្តងៗ ចាប់តាំងពីពេលផ្តល់ចម្លើយ ហើយកាន់តែកែប្រែទៅនៅដំណាក់កាលក្រោយៗមក និងនៅពេលសម្តែងចេញផងដែរ ។ ក្រៅពីនេះ ការដឹងឮរឿងហេតុមួយ ប្រែប្រួលទៅតាមចំណាប់អារម្មណ៍សាក្សីចំពោះរឿងហេតុនោះ និង សភាពនៃការទទួលអារម្មណ៍របស់សាក្សីនោះ ។

ទីបញ្ចប់ សាក្សីពុំមែនរកនឹករឿងហេតុដោយពឹងតែទៅលើអ្វីដែលខ្លួនបានមើលឃើញប៉ុណ្ណោះ ប៉ុន្តែច្រើនតែពឹងទៅលើការប៉ាន់ស្មានផងដែរ ។

**សាក្សីកុហកដោយចេតនា**

ការនិយាយមិនពិតដោយមានចេតនាកើតឡើងដោយសារមូលហេតុខុសៗគ្នា : ការខ្លាច ការខ្វះសីលធម៌ ការទទួលបានផលប្រយោជន៍គ្រប់រូបភាព សាមគ្គីភាព ភាពស្អប់ ការសងសឹក ភាពអំនួត ឬការធ្វេសប្រហែស... ។

**សាក្សីដែលត្រូវប្រុងប្រយ័ត្នជាពិសេស**

**កុមារ :** ងាយនឹងទទួលរងឥទ្ធិពលអ្នកដទៃ កុមារមានការរវើរវាយខ្លាំងពិបាកគ្រប់គ្រង ។

**ជនចាស់ជរា :** ជាញឹកញាប់ ជនចាស់ជរាអាចមានសមត្ថភាពដឹងឮរឿងហេតុ ឬអាចមានការចងចាំខ្សោយ ។ គាត់អាចទទួលរងនូវឥទ្ធិពលរបស់អ្នកដទៃយ៉ាងងាយ ។

**សាក្សីអាក្រក់ដែលមានជំងឺ**

អ្នកជំងឺផ្លូវចិត្តមានជីវិតស្រមើស្រមៃខ្លាំងរហូតដល់លែងអាចបែងចែកបានរវាង ការស្រមើស្រមៃ និងការពិត ហើយការផ្តល់ចម្លើយរបស់ជននេះក្លាយជាការច្របល់ចូលគ្នារវាងការស្រមើស្រមៃ និងការពិត។

**៤.១.៤.២. ការត្រួតពិនិត្យទៅលើឥរិយាបថរបស់អ្នកសួរចម្លើយ**

អ្នកស៊ើបអង្កេតត្រូវតែ :

-សម្របឥរិយាបថខ្លួនទៅតាមសាក្សី

-ធ្វើយ៉ាងណាឱ្យសាក្សីមានអារម្មណ៍ទុកចិត្ត

-ជៀសវាងក្នុងការយកអ្វីដែលសាក្សីបាននិយាយធ្វើការវាយប្រហារទៅលើសាក្សីវិញ ហើយរំខានដល់ការទំនាក់ទំនង

-មានសមត្ថភាពសម្របសម្រួល បកស្រាយ និងកត់ត្រាការប្រកាស

-គ្រប់គ្រងស្ថានភាព : មានតែការស្តាប់ចម្លើយ និងជោគជ័យនៃការស្តាប់ចម្លើយប៉ុណ្ណោះដែលសំខាន់ មិនមែនការបំពេញចិត្តខ្លួនឯង ភាពអំនួត ផលប្រយោជន៍ និងមនោសញ្ចេតនាអ្វីទាំងអស់

-ចេះស្តាប់ សង្កេត ឃ្លាំមើលប្រតិកម្មរបស់សាក្សី

-ជៀសវាងនូវសំនួរដែលធ្វើឱ្យកើតសម្មតិកម្ម ឬដែលដាក់សំពាធទៅលើការចងចាំ

-កុំជះឥទ្ធិពលលើសាក្សីដោយការសន្យា ការគំរាម...

ក្នុងករណីណាក៏ដោយ ត្រូវគោរពសេចក្តីថ្លៃថ្នូររបស់សាក្សី។

ប៉ុន្តែ សំខាន់បំផុតនោះគឺ**សត្យានុម័តភាព និងអព្យាក្រឹត្យភាព**។

កង្វះសត្យានុម័តភាព និងអព្យាក្រឹត្យភាពចំពោះសាក្សីបង្កជាឧបសគ្គដែលរារាំងដល់ការទទួលបានចម្លើយ។ ត្រូវតែចេះទទួលយកចម្លើយមួយដែលមិនស្របនឹងអ្វីដែលខ្លួនគិត ឬអ្វីដែលខ្លួនយល់ឃើញ។

ជាសង្ខេប គេអាចនិយាយបានថា "ការផ្តល់ចម្លើយធ្វើបានល្អ" គឺអាស្រ័យនឹង :

-ភាពងាយស្រួល ភាពលម្អិត ភាពច្បាស់លាស់ និងការចាប់អារម្មណ៍ក្នុងពេលផ្តល់ចម្លើយនោះ

-ការយកចិត្តទុកដាក់ដែលធ្វើមិនឱ្យបែកអារម្មណ៍

-ការសួរភ្លាមៗក្រោយពីហេតុការណ៍កើតឡើង នឹងធ្វើអោយមិនសូវមានការភ្លេចភ្លាំង

**ទាក់ទងទៅនឹងចិត្តសាស្ត្រសាក្សី :**

-សមត្ថភាពក្នុងការបែងចែកការខុសត្រូវ ជម្រុះចោលនូវភាពមិនតក់ស្លុត ដែលបណ្តាល អោយមានការរំជួលចិត្ត ពីអ្នកជំងឺផ្លូវចិត្ត និងកុមារ ។

-ភាពអព្យាក្រិត្យ ជម្រុះចោលភាពងប់ងល់

-ភាពស្មោះត្រង់ដែលជម្រុះចោលនូវការចំណាយប្រាក់ ។

**ទាក់ទងទៅនឹងអ្នកសួរចម្លើយ :**

អត្តចរិតអ្នកស៊ើបអង្កេតចំពោះសាក្សី និងសមត្ថភាព ក្នុងការវិនិច្ឆ័យរបស់ខ្លួន ។

**៤.២ មូលដ្ឋានគ្រឹះគតិយុត្តិ :**

សញ្ញាណមូលដ្ឋានមានក្នុងអត្ថបទដែលកំណត់ពីវិធាននៃការស៊ើបអង្កេតបទល្មើសជាក់ស្តែង ការស៊ើបអង្កេតបឋម និងអត្ថបទស្តីពីការអនុវត្តដីកាចាត់ឱ្យស៊ើបសួរជំនួស ។

**របៀបកោះហៅ :**

ច្បាប់ផ្តល់ជូនមន្ត្រីនគរបាលយុត្តិធម៌នូវអំណាចកោះហៅ និងធ្វើការស្តាប់ចម្លើយសាក្សី ។

**កាតព្វកិច្ចចូលខ្លួន :**

**- ករណីបទល្មើសជាក់ស្តែង** ( មាត្រា ៩៤ នៃក្រមនីតិវិធីព្រហ្មទណ្ឌ ក្នុងករណីដែលពុំមានការបញ្ជាអោយចូលខ្លួនពីព្រះរាជអាជ្ញា និងក្នុងករណីដែលត្រូវប្រើកម្លាំងបង្ខំ) ។

**- ករណីស៊ើបអង្កេតបឋម :** អំណាចដូចគ្នានឹងបទល្មើសជាក់ស្តែង (មាត្រា ១៤៤ នៃក្រមនីតិវិធីព្រហ្មទណ្ឌ) ។

**- ដោយអនុវត្តតាមដីកាចាត់ឱ្យស៊ើបសួរជំនួស** ( មាត្រា ១៧៩ នៃក្រមនីតិវិធីព្រហ្មទណ្ឌ) សាក្សីត្រូវតែចូលខ្លួនធ្វើសម្បថ ហើយផ្តល់ចម្លើយដូចទៅចំពោះមុខយុត្តាធិការជំនុំជម្រះដែរ ។ បើពុំដូច្នោះទេ គេត្រូវរាយការណ៍ ទៅចៅក្រមស៊ើបសួរដើម្បីចេញបញ្ជាឱ្យចូលខ្លួន ។

**អនីតិជន :**

អនិតិជនម្នាក់អាចត្រូវស្តាប់ចម្លើយតាមរបៀបដូចសាក្សី ទោះបីជាស្ថិតក្នុងក្របខ័ណ្ឌស៊ើបអង្កេតណាក៏ដោយ ។ ពុំមានកតព្វកិច្ចណាមួយដែលតម្រូវឱ្យស្តាប់ចម្លើយអនីតិជននៅចំពោះមុខតំណាងស្របច្បាប់របស់គេ

នោះឡើយ ផ្ទុយទៅវិញតំណាងស្របច្បាប់នោះ ត្រូវដឹងពីសេចក្តីប្រកាសរបស់អនីតិជន (លើកលែងតែក្នុងករណីដែលតំណាងស្របច្បាប់ជាចារីបទល្មើស ហើយអនីតិជនជាជនរងគ្រោះ) និងត្រូវស្តាប់ចម្លើយ ក្នុងឋានៈជាអ្នកទទួលខុសត្រូវខាងរដ្ឋប្បវេណី ។

**អ្នកបកប្រែ :**

ជាយថាហេតុ ចម្លើយអាចត្រូវកត់ត្រាដោយអ្នកបកប្រែ ទោះបីក្នុងក្របខ័ណ្ឌស៊ើបអង្កេតណា ក៏ដោយ ។

## ៤.៣. ភិនភាគក្នុងពេលផ្តល់ចម្លើយ

ក្នុងពេលស្តាប់ចម្លើយ អ្នកសរសេរត្រូវយកចិត្តទុកដាក់ជាសំខាន់ នូវ**ភិនភាគ**ផ្តល់ដោយសាក្សី ។ ព័ត៌មានទាំងអស់នេះមិនលេចឡើង ក្នុងគ្រប់ដំណាក់កាលនៃការស្តាប់ចម្លើយទេ ពីព្រោះថាបុគ្គលម្នាក់ៗមិនអាចកត់ចំណាំព័ត៌មានលំអិតដូចគ្នានោះទេ ប៉ុន្តែ គេអាចធ្វើការប៉ាន់ស្មានថាព័ត៌មានមួយចំនួនដូចរៀបរាប់ខាងក្រោម អាចត្រូវបានចាត់ទុកជាមូលដ្ឋានគ្រឹះក្នុងកំណត់ហេតុនៃការផ្តល់ចម្លើយ ។

ការពិពណ៌នាដែលត្រូវធ្វើឡើង គឺចេញ**ពីភាពទូទៅករណីពិសេស** និង **ពីលើចុះ ក្រោម** ។

**ទិដ្ឋភាពទូទៅ**

- ភេទ : ឬ លក្ខណៈខាងក្រៅ (បញ្ហាចោទឡើងចំពោះពួកប្រុសខ្ទើយ)
- អាយុប្រហាក់ប្រហែល
- កំពស់
- ប្រភេទមនុស្ស
- មាឌ
- សំលៀកបំពាក់ របៀបស្លៀកពាក់
- ទ្រង់ទ្រាយ : សង្ហារ រឃើករឃាក
- ប្រភេទ : សំលៀកបំពាក់សមរម្យ ឬបែបកីឡា....

**លក្ខណៈពិសេស**

- សំលេង (បើសិនបុគ្គលនោះបាននិយាយ សំលេងដោយឡែក របៀបនិយាយ សំនៀង ភាសា....)
- ការពិពណ៌នាពីមុខមាត់

- ថ្ពាស : ទ្រង់ទ្រាយ ភាពដោយឡែក
- ភ្នែក : ពណ៌
- ច្រមុះ : ទំរង់
- ត្រចៀក
- មាត់
- ចង្ការ
- មុខមាត់
- ធ្មេញ
- ពុកចង្ការ ពុកមាត់
- ចញ្ចើម
- សក់ ( ពណ៌ ភាពលាំគ្នា ត្រង់ រួញ ក្រញាញ់..... )

ចំនុចខុសគ្នាទាំងនេះមិនត្រូវលើកយកមកនិយាយទាំងអស់ទេក្នុងពេលស្តាប់ចម្លើយ ដូច្នេះវាពុំមានលំដាប់ ដែលត្រូវតែគោរពដាច់ខាតនោះទេ។ អ្នកសរសេរត្រូវយកចិត្តទុកដាក់លើធាតុមួយ ឬច្រើន ដែលផ្តល់ដោយសាក្សី ទៅតាមករណី នីមួយៗ។

## ៥.ការសួរចម្លើយជនសង្ស័យ

ទទួលបានចម្លើយសារភាព គឺជាគោលបំណងដែលចង់បាន ក្នុងគ្រប់ការសួរចម្លើយ។ ប៉ុន្តែ អ្នកស៊ើបអង្កេតមិនត្រូវទទួលយកចម្លើយសារភាពផ្តេសផ្តាសនោះទេ។ ចម្លើយសារភាពត្រូវតែលម្អិត គ្មានការផ្លាស់ប្តូរ ហើយស៊ីសង្វាក់ព្រមទាំងបំពេញបន្ថែមលើភស្តុតាង និងសច្ចាធារណ៍ដែលប្រមូលបានជាមុននៅ ពេលស៊ើបអង្កេត។

ការដឹកនាំការសួរចម្លើយទាមទារឱ្យគោរពនូវវិធានមួយចំនួន មិនមែនត្រឹមតែក្នុងពេលប្រតិបត្តិការប៉ុណ្ណោះទេ ថែមទាំងមុនពេលប្រតិបត្តិការផងដែរ។

### ៥.១. មុនការសួរចម្លើយ

#### ៥.១.១. ការរៀបចំការសួរចម្លើយ

ការសួរចម្លើយត្រូវតែរៀបចំជាមុន។ ជាបឋម ជាការកម្រណាស់ដែលការស៊ើបអង្កេតមួយ ចាប់ផ្តើម

ដោយការសួរចម្លើយ។ ជាទូទៅ ការសួរចម្លើយ ត្រូវបានធ្វើ ឡើងបន្ទាប់ពីការស៊ើបអង្កេត (ការត្រួត ពិនិត្យពាក្យបណ្តឹង ការពិនិត្យតម្រុយ សាក្សី ការឃ្លាំមើល ការចាប់ខ្លួន ការឆែកឆេរ ។ល។) ដែលអនុញ្ញាតឱ្យអ្នកស៊ើបអង្កេតប្រមូលបានភស្តុតាង និងការសន្និដ្ឋានដែលបានគ្រប់គ្រាន់ដើម្បី គាំទ្រការសង្ស័យ របស់ខ្លួន។

បន្ទាប់មក អ្នកសួរចម្លើយត្រូវតែដឹងឱ្យបានច្បាស់លាស់ពីសំនុំរឿង ប្រការនេះមិនត្រឹមតែទាមទារឱ្យមាន ការចូលរួមយ៉ាងសកម្មក្នុងការស៊ើបអង្កេតប៉ុណ្ណោះទេ ប៉ុន្តែក៏ទាមទារផងដែរនូវការអានដោយប្រុងប្រយ័ត្នជាមុន នូវលិខិតស្នាមនៃនីតិវិធីផងដែរ។ ការពិនិត្យសំនុំរឿងយ៉ាងម៉ត់ចត់ដែលអនុញ្ញាតឱ្យរៀបចំដោយប្រិតប្រៀងនូវ សំនួរ ដែលត្រូវចោទសួរ និងកំណត់សំនួរ ដែលត្រូវជៀសវាង។

ទីបញ្ចប់ អ្នកស៊ើបអង្កេតត្រូវប្រមូលច្រើនបំផុតជាមុនសិន នូវព័ត៌មានអំពីបុគ្គលិកលក្ខណៈជនសង្ស័យអោយបានច្រើន (ទីលំនៅ ស្ថានភាពសង្គម ការសិក្សា ចំណង់ចំណូលចិត្ត អ្នកមានទំនាក់ទំនងនឹងសាមីខ្លួន និងព្រឹត្តិកម្មរបស់ខ្លួន ជាយថាហេតុ...)។

ការស្គាល់គូបដិបក្ខរបស់ខ្លួន គឺជាវិធានមួយខ្ជាប់ខ្ជួនក្នុងកិច្ចស៊ើបអង្កេតទាំងអស់ និងជាកិច្ចចាំបាច់ក្នុងការសួរចម្លើយ។ នៅពេលស្គាល់ជនសង្ស័យកាន់តែច្បាស់ អ្នកស៊ើបអង្កេតកាន់តែអាចសម្របអត្តចរិតរបស់ខ្លួន និងជ្រើសរើសវិធីសាស្ត្រសួរចម្លើយដែលសមស្របបំផុត។

និយាយមួយបែបទៀត អ្នកស៊ើបអង្កេតល្អម្នាក់មិនមែនចង់ស្គាល់ជនសង្ស័យច្បាស់នោះទេ ជានិច្ចជាកាល់អ្នកស៊ើបអង្កេតល្អម្នាក់ គឺជាអ្នកដែល :

- ដឹងយ៉ាងពិតប្រាកដនូវពិរុទ្ធភាពរបស់បុគ្គលដែលត្រូវសួរចម្លើយ តាមរយៈការស៊ើបអង្កេតដែលខ្លួនដឹកនាំ ។ ខ្លួនត្រូវចេះតំឡើងសំលេង បើសិនចាំបាច់ ដើម្បីជំរុញសាមីខ្លួនឱ្យសារភាព។

- ស្គាល់សំនុំរឿងច្បាស់ជាងគេបំផុត និងចេះត្រៀមសំនួររបស់ខ្លួន។

### ៥.១.២. ទីកន្លែងសួរចម្លើយ និងចំនួនអ្នកសួរចម្លើយ

#### ទីកន្លែងសួរចម្លើយ

លើកលែងតែករណីកម្រមួយចំនួន គេមិនសួរចម្លើយបុគ្គលសង្ស័យម្នាក់នៅក្នុងទីលំនៅរបស់បុគ្គលនោះឡើយ។ តាមវិធានទូទៅ ទីកន្លែងដែលពេញនិយមដើម្បីធ្វើការសួរចម្លើយនោះ គឺការិយាល័យអ្នកស៊ើបអង្កេតដែលធ្វើប្រតិបត្តិការនេះ។ អ្នកស៊ើបអង្កេតសួរចម្លើយក្នុងទីកន្លែងរបស់ខ្លួន និងក្នុងបន្ទប់មួយដែលខ្លួនមានភាព

ងាយស្រួលតាមទំលាប់របស់ខ្លួន ។

**ចំនួនអ្នកសួរចម្លើយ**

តាមទ្រឹស្តី ការសួរចម្លើយត្រូវបានដឹកនាំដោយអ្នកស៊ើបអង្កេតម្នាក់ប៉ុណ្ណោះ : គេអាចងាយនឹងសារភាពនៅចំពោះមុខបុគ្គលតែម្នាក់ ជាជាងនៅចំពោះមុខបុគ្គលច្រើននាក់ ។

ក្នុងការអនុវត្ត អ្នកសួរចម្លើយមិនមែនមានតែម្នាក់នោះទេ ប៉ុន្តែ គេនិយមមិនឱ្យអ្នកសួរចម្លើយមានជំនួយការលើសពីម្នាក់ឡើយ ។ បុគ្គលនេះអាចអន្តរាគមបាន តែក្នុងករណីមានការអនុញ្ញាតប៉ុណ្ណោះ ។ បើសិនជំនួយការ យល់ថាត្រូវចោទសួរសំនួរមួយនោះ ឬចង់ធ្វើការជំទាស់ ខ្លួនត្រូវតែជៀសវាងកុំសួរសំនួរនោះដោយប្រើសម្លេងលាយឡំនឹងអារម្មណ៍ខ្លួនផ្ទាល់ ដើម្បីជៀសវាងមិនឱ្យមានការប៉ះពាល់ដល់លទ្ធផលនៃការសួរចម្លើយ ។ ជំនួយ ការគ្រាន់តែសរសេរសំនួរនោះលើក្រដាសមួយសន្លឹក រួចប្រគល់ឱ្យអ្នកសួរចម្លើយ ។

អត្ថប្រយោជន៍នៃការសួរចម្លើយពីរនាក់គឺ :

- សុវត្ថិភាព
- ជៀសវាងរាល់ការសង្ស័យ
- បើសិនជា អ្នកស៊ើបអង្កេត ដែលដឹកនាំការសួរចម្លើយមិនអាចិទាក់ទងិជាមួយជនសង្ស័យនោះខ្លួនអាចឱ្យគេជំនួស ហើយទុកឱ្យជំនួយការខ្លួនធ្វើការសួរចម្លើយជំនួសខ្លួន ដើម្បីកុំឱ្យខាតពេល ។

**វិធានការបង្ការដែលត្រូវធ្វើ**

- ជៀសវាងកុំឱ្យជនសង្ស័យដឹងពីសំនុំរឿង ។
- វត្ថុណាមួយ (ក្រញូមបារី ប្រដាប់សង្កត់សៀវភៅ កាំបិទកាត់ក្រដាស កែវ...) ដែលអាចយកមកប្រើជាអាវុធមិនត្រូវទុកក្បែរបុគ្គលត្រូវសួរចម្លើយឡើយ ។ អាវុធប្រើប្រាស់ត្រូវតែទុកកុំឱ្យជនសង្ស័យ ឃើញហើយត្រូវជៀសវាងកុំដើរក្នុងបន្ទប់ដោយមិនពាក់អាវធំដែលនាំឱ្យលេចចេញអាវុធច្បាស់ ។
- បុគ្គលគ្រោះថ្នាក់គ្រប់រូបត្រូវតែធ្វើអចលនាកម្មដោយដាក់ខ្នោះដៃ ឬឱ្យមន្ត្រីរាជការម្នាក់ នៅឈរពីខាងក្រោយ ឃ្លាំមើល ត្រៀមអន្តរាគមក្នុងករណីចាំបាច់ ។
- ត្រូវមានការិយាល័យមួយស្ងប់ស្ងាត់ ។ ការសួរចម្លើយតម្រូវឱ្យធ្វើឡើងក្នុងកន្លែងដាច់តែឯងមួយ ។ គេត្រូវបិទទ្វារបន្ទប់ ដើម្បីជៀសវាងកុំឱ្យសហជីវិនដើរទៅមក ។

- រាល់អ្វីដែលអាចបង្វែរចំណាប់អារម្មណ៍អ្នកសួរចម្លើយ និងបុគ្គលត្រូវសួរចម្លើយត្រូវហាមឃាត់។

### ៥.២. ក្នុងពេលសួរចម្លើយ

អ្នកស៊ើបអង្កេតត្រូវធ្វើយ៉ាងណាបង្កើតបរិយាកាសអំណោយផលមួយ រវាងខ្លួន និងបុគ្គលត្រូវសួរចម្លើយ និង ធ្វើយ៉ាងណារក្សាបរិយាកាសបែបនេះក្នុងពេលសួរចម្លើយ។

#### ៥.២.១. ការទាក់ទង និងការធ្វើឱ្យបុគ្គលត្រូវសួរចម្លើយទុកចិត្ត

##### ៥.២.១.១. ការធ្វើទំនាក់ទំនង

ជាញឹកញាប់បំផុត ការធ្វើទំនាក់ទំនងត្រូវធ្វើឡើងក្នុងពេលចាប់ខ្លួនបុគ្គលសង្ស័យ ហើយជួនកាលនៅខណៈ ដែលសាមីខ្លួនចូលខ្លួនមកអង្គភាពតាមរយៈការកោះហៅមួយ។

បរិយាកាសនៃការសួរចម្លើយត្រូវអាស្រ័យមួយផ្នែកធំទៅនឹងរបៀបទាក់ទងបុគ្គលត្រូវសួរចម្លើយ។

ក្នុងករណីណាក៏ដោយ បរិយាកាសត្រូវតែស្ងប់ស្ងាត់។នគរបាលត្រូវ ធ្វើសកម្មភាពប្រកបដោយភាព ម៉ឺងម៉ាត់ ប្រសិទ្ធិភាព ការគួរសម និងភាពថ្លៃថ្នូរ។ ផ្ទុយទៅវិញរាល់ ឥរិយាបទ ផ្សេងទៀត (ដូចជា ប្រព្រឹត្តអំពើព្រៃផ្សៃ ប្រើសំដីប្រមាថ បង្ហាញពីភាពប្រហើន ឬការឈ្លានពាន...) នឹងអាចបង្ខំ ជនសង្ស័យ ឱ្យធ្វើការតទល់ដែលបង្កើតជាឧបសគ្គដល់ការធ្វើទំនាក់ទំនងក្នុងពេលសួរចម្លើយ ។

##### ៥.២.១.២. ការធ្វើឱ្យបុគ្គលត្រូវសួរចម្លើយទុកចិត្ត

ជោគជ័យក្នុងការធ្វើទំនាក់ទំនង អនុញ្ញាតឱ្យអ្នកស៊ើបអង្កេតចាប់ផ្តើមសួរចម្លើយក្នុងល័ក្ខខ័ណ្ឌ ប្រសើរបំផុត។ ប៉ុន្តែ ខ្លួនត្រូវតែបន្តការប្រឹងប្រែង ដើម្បីរក្សាបរិយាកាសអំណោយផលនេះឱ្យបានដល់ទីបញ្ចប់ ។ ខ្លួនត្រូវធ្វើយ៉ាងណាដើម្បី ឱ្យបុគ្គលត្រូវសួរចម្លើយទុកចិត្ត។

អ្នកស៊ើបអង្កេតអាចប្រើប្រាស់មធ្យោបាយប្រសើរដែលខ្លួនមាន ដើម្បីឈានទៅធ្វើទៅឱ្យសាមីខ្លួនទុកចិត្ត : គឺការសួរចម្លើយអំពីអត្តសញ្ញាណ និងធនធានរបស់ជនសង្ស័យ។

#### ៥.២.២. ការសួរចម្លើយអំពីរឿងហេតុ

បន្ទាប់ពីមានបរិយាកាសទុកចិត្ត និងបានស្គាល់សាមីខ្លួនហើយនោះ អ្នកស៊ើបអង្កេតត្រូវជ្រើសរើសវិធីសាស្ត្រសួរចម្លើយ ដែលស័ក្តិសមបំផុតសម្រាប់បុគ្គលដែលនៅចំពោះមុខខ្លួន។ ហើយពេញមួយរយៈពេលនៃការសួរចម្លើយអ្នកស៊ើបអង្កេត ត្រូវតែចេះទាញយកប្រយោជន៍ពីមនោសញ្ចេតនារបស់ជនសង្ស័យ បង្ហាញគុណ

សម្បត្តិ មួយចំនួន និងគោរពវិធានខ្លះ ដើម្បីរក្សាឱ្យបាននូវបរិយាកាសអំណោយផលមួយ ។

## ៥.២.២.១. ទម្រង់ផ្សេងៗនៃការសួរចម្លើយ

ពុំមានការសួរចម្លើយគំរូនោះឡើយ ។ការសួរចម្លើយត្រូវបានធ្វើឡើងក្រោមរូបភាពផ្សេងៗពីគ្នាជានិច្ច ហើយ អ្នកស៊ើបអង្កេតតែងតែប្រឈមមុខ ទៅនឹងស្ថានភាពខុសៗគ្នាជានិច្ច ។

ប៉ុន្តែ គេបែងចែក រវាងការសួរចម្លើយសារភាព និងការសួរចម្លើយ" ដេញជើង " ។

**ការសួរចម្លើយសារភាព**

អ្នកស៊ើបអង្កេតជំរុញបុគ្គលដែលត្រូវសួរ ឱ្យសារភាពដោយបង្ហាញនូវបន្ទុកដែលប្រមូលបានជាបន្តបន្ទាប់ និង ចាប់ផ្តើមពីបន្ទុកមិនសូវសំខាន់ ។

អ្នកស៊ើបអង្កេតត្រូវតែក្លែងធ្វើជាមានជំនឿចិត្តទាំងស្រុង ដើម្បីកុំអោយជនសង្ស័យដឹងខ្លួន ត្រូវសួរសំនួរជននោះគ្មានឈប់ឈរ ដោយបញ្ចុះបញ្ចូលសាមីខ្លួនថា ខ្លួនមានភស្តុតាង ផ្សេងទៀត ដើម្បីធ្វើឱ្យសាមីខ្លួនទាល់តំរិះ ។

បុគ្គលត្រូវសួរចម្លើយពិតជាទទួលអារម្មណ៍ថា ត្រូវបានគេប្រមូលបានភស្តុតាងប្រឆាំងខ្លួនហើយ នោះគួរតែសារភាពប្រសើរជាងបដិសេធ ។ ប៉ុន្តែ អ្នកស៊ើបអង្កេតមិនត្រូវបង្ហើបប្រាប់សាមីខ្លួននូវភស្តុតាងទាំងអស់ដែលខ្លួនមាននោះទេ ។ គួរគប្បីបង្ហាញតិចតួច តែកុំច្រើនជ្រុលពេក ។ ខ្លួនត្រូវតែរក្សាធាតុមួយចំនួនបម្រុងទុក ដើម្បី អាចផ្លាស់ប្តូរវិធីសាស្ត្រសួរចម្លើយ បើសិនជាខ្លួនស្ថិតនៅចំពោះមុខបុគ្គលម្នាក់ ដែលបន្តបដិសេធ ទោះបីជាគេបានលើក ឡើង នូវអំណះអំណាងហើយក៏ដោយ ។

**ការសួរចម្លើយ" ដេញជើង "**

ការសួរចម្លើយប្រភេទនេះត្រូវបានអនុវត្តញឹកញាប់បំផុត ។

តាមធម្មតា ការសួរចម្លើយប្រភេទនេះតែងត្រូវបានប្រើប្រាស់ប្រឆាំងនឹងជនទុច្ចរិត ហើយជួនកាលជនល្មើសដែលមានការសិក្សាទាប និងមានឥរិយាបទបដិសេធដាច់អហង្ការ ។ ការសួរចម្លើយដេញជើង គឺរឹតជនសង្ស័យ នៅក្នុងសំណាញ់ដែលខ្លួនមិនអាចចេញបាន ។

ការសួរចម្លើយប្រភេទនេះមាន ២ ដំណាក់កាល :

**ក្នុងដំណាក់កាលទី ១** អ្នកសួរចម្លើយត្រូវតែជៀសវាងកុំបង្ហើបប្រាប់នូវធាតុផ្សេងៗដែលខ្លួនមាន (ដូចជា

តម្រុយដែលមាន ភស្តុតាងប្រមូលបាន សាក្សីដែលមាន...) ឱ្យជនសង្ស័យ ។ អ្នកសួរចម្លើយ ត្រូវសួរ ជនសង្ស័យ តែអំពីធាតុណាដែលសាមីខ្លួនបានដឹងប៉ុណ្ណោះ ដោយយកលេសថាប្រមូលព័ត៌មាន។ អ្នក សួរចម្លើយត្រូវទុក ឱ្យសាមីខ្លួននិយាយ និងកុហក។ ខ្លួនត្រូវជៀសវាងកុំបញ្ឈប់ ឬកាត់សំដីសាមីខ្លួន។ ម្តងម្កាល ខ្លួនគ្រាន់តែ សួរបន្ថែមអំពីអ្វី ដែលសាមុីខ្លួនបានពន្យល់ប៉ុណ្ណោះ : ចម្លើយនឹងធ្វើឱ្យការនិយាយ ផ្ទុយកាន់ តែលេចច្បាស់ឡើង។

កាលណាជនសង្ស័យកាន់តែនិយាយកុហក ជននោះនឹងប្រឌិតរឿងក្លែងក្លាយមួយដែលមិនដូចជាការ ពិត។

អ្នកសួរចម្លើយកត់ត្រាចម្លើយប្រកាសទាំងនេះដោយពុំធ្វើអត្ថាធិប្បាយ។ នៅពេលធ្វើកំណត់ហេតុរួច ត្រូវ តែឱ្យជនសង្ស័យចុះហត្ថលេខាភ្លាម។

**ក្នុងដំណាក់កាលទី ២** អ្នកសួរចម្លើយត្រូវតបតវិញ។ ដោយទទួលយកជាបានការនូវធាតុដាក់បន្ទុកក្នុង សំនុំ រឿងនិងចម្លើយដែលកុហក អ្នកសួរចម្លើយត្រូវសរសេរបញ្ជីមួយដែលមានរាយគ្រប់សំនួរក្នុងកំណត់ ហេតុ។ អ្នកសួរចម្លើយ ត្រូវតែចោទសំនួរតាមលំដាប់សារៈសំខាន់របស់វា : គេចាប់ផ្តើមពីធាតុមិនសំខាន់ ហើយ បញ្ចប់ដោយធាតុសំខាន់។

នៅគ្រប់ពេលចោទសំនួរ អ្នកសួរចម្លើយត្រូវគូសបញ្ជាក់សំដីផ្ទុយដែលលើកឡើង ធ្វើឱ្យលេចចេញនូវ ភាពមិនស្មោះត្រង់របស់ជនសង្ស័យ និងបង្ហាញពីពិរុទ្ធភាពរបស់ជនសង្ស័យដោយភាពធ្ងន់ធ្ងរនៃការកុហក។

ការសួរចម្លើយកាន់តែទៅមុខ ជនសង្ស័យកាន់តែប្រឈមមុខនឹងធាតុដាក់បន្ទុកកាន់តែធ្ងន់ធ្ងរ ហើយជា ទូទៅ ជនសង្ស័យឈានទៅរកការសារភាព ហើយករណីបែបនេះតែងកើតមានជាញឹកញាប់ នៅមុនពេល សំនួរទាំងអស់ត្រូវបានចោទសួរ។

### ៥.២.២.២. ឥរិយាបថអំណោយផលដល់ការសារភាព

ទោះជាជ្រើសរើសយកវិធីសាស្ត្រណាក៏ដោយ អ្នកសួរចម្លើយត្រូវតែ :

-មានឥរិយាបថអំណោយផលដល់ការសារភាព ពេញមួយរយៈពេលនៃការសួរចម្លើយ

-បង្ហាញថាខ្លួនចេះយោគយល់ ប្រយ័ត្នប្រយែង និងមានសប្បុរសធម៌

-បង្ហាញនូវភាពអព្យាក្រិត្យឥតខ្ចោះ

-មិនត្រូវប្រើការគំរាមគំហែង និង មិនត្រូវប្រើអំពើហិង្សា ទោះជាក្នុងករណីណាក៏ដោយ

-ជ្រើសរើសរវាងនូវសំនួររំឭករឿងអ្វីមួយ

ត្រូវតែដឹងថាជនសង្ស័យមួយចំនួន សារភាពតាំងពីពេលធ្វើការទំនាក់ទំនងដំបូងម្ល៉េះ ជនសង្ស័យផ្សេងទៀតមាន វិប្បដិសារី ឬត្រូវការដោះសារ ជនសង្ស័យខ្លះទៀតមិនប្រឆាំងនឹងហេតុផល ឬមិនចេះនិយាយកុហក។ គេក៏អាច ស្ថិតនៅចំពោះមុខបុគ្គលអំនួត និងក្រអឺតក្រទមផងដែរ។ អ្នកសួរចម្លើយគ្រាន់តែក្លែងធ្វើជាមិនជឿ ដើម្បីមើលជននេះនិយាយច្រំដែលៗ ក្នុងបំណងសំដែងភាពភាពក្លាហានរបស់ខ្លួន។

មានមនុស្សដែលចងភ្ជាប់ទៅនឹងតម្លៃមួយចំនួន (គ្រួសារ មិត្តភាព សាសនា មាតុភូមិ...)។ ដូចនេះអ្នកសួរចម្លើយសង្កត់ធ្ងន់លើអំណះអំណាងរបស់ខ្លួន ដោយប្រើប្រាស់នូវមនោសញ្ចេតនា ដែលបុគ្គលត្រូវសួរចម្លើយមាន។ល។

កាលណាអ្នកសួរចម្លើយទទួលអារម្មណ៍ថា លេចចេញនូវការសារភាពហើយនោះ ខ្លួនត្រូវតែជួយសាមីខ្លួនឱ្យឆ្លើយដោយពាក្យសមរម្យ ឬដោយអំណះអំណាងពិតប្រាកដ។

ចាប់ពីពេលដែលជនត្រូវសួរចម្លើយចាប់ផ្តើមសារភាពហើយនោះ អ្នកសួរចម្លើយត្រូវទុកឱ្យជននេះនិយាយ កុំបញ្ឈប់គេអោយសោះ។ ចាប់ពីពេលនេះទៅ អ្នកសួរចម្លើយធ្វើសកម្មភាព ដូចជាខ្លួនស្ថិតនៅក្នុងពេល ស្តាប់ចម្លើយសាក្សី យ៉ាងអញ្ចឹង (ការរៀបរាប់ឯកឯង ការស្នើសុំភាពលម្អិត ការផ្តល់ទម្រង់ការដល់ការស្តាប់ ចម្លើយ)។

## ៥.៣. អត្ថន័យនៃកំណត់ហេតុសួរចម្លើយ

កំណត់ហេតុនេះត្រូវតែបង្ហាញនូវ :

-**ធាតុសម្ភារៈ** ដែលស៊ីគ្នាទៅនឹងធាតុផ្សំបទល្មើស និងកាលៈទេសៈដែលធ្វើឱ្យបទល្មើសកាន់តែមានលក្ខណៈធ្ងន់ធ្ងរ

-**ចេតនា**របស់ជនសង្ស័យ

-មូលហេតុ

-កាលៈទេសៈដែលអនុញ្ញាតជនសង្ស័យ អាចលើកឡើងនូវការសោក ស្តាយ សុំទោស ឬហេតុយុត្តិការ។

-តួនាទីរបស់បុគ្គលត្រូវសួរចម្លើយ ប៉ុន្តែតួនាទីរបស់សហចារី និងអ្នកសមគំនិតផងដែរ បើសិនជាមានជនសង្ស័យច្រើននាក់ត្រូវចោទ

-ក្នុងករណីជាក់ស្តែង ត្រូវស្នើសុំការបិទស្លាកបោះត្រាទាំងអស់ និងការយល់ព្រមសងវត្ថុរឹបអូស ។

ចម្លើយប្រកាសដែលបានកត់ត្រាត្រូវតែបញ្ជាក់យ៉ាងច្បាស់ អំពីសេចក្តីលម្អិតខ្លះៗ ដែលអាច ត្រួតពិនិត្យ និងដែលមិនអាចប្រឌិតបាន ទាក់ទងនឹង បុគ្គល ពេលវេលា ទីកន្លែង វត្ថុផ្សេងៗ និងមូលហេតុ។ បើសិនជាមានចារីច្រើននាក់ ចារីម្នាក់ៗត្រូវពិពណ៌នាយ៉ាងលម្អិតនូវតួនាទីខ្លួន និងតួនាទីចារីផ្សេងៗទៀត នរណាជាមេក្លោង នរណាជាអ្នកផ្តើមគំនិត តើពួកគេជួបគ្នាតាមវិធីណា... ហើយរៀបរាប់ឱ្យបានច្បាស់ ការជជែកគ្នារវាងជនទាំងនេះ នៅក្នុងខណៈពេលធ្វើសកម្មភាព ។ បើសិនជនទាំងនេះបានប្រើប្រាស់ រថយន្តដើម្បីធ្វើដំណើរទៅកាន់ទីកន្លែង ម្នាក់ៗត្រូវចង្អុលបង្ហាញកន្លែង អង្គុយខ្លួន និងកន្លែងអង្គុយរបស់អ្នក ផ្សេងទៀតនៅក្នុងរថយន្ត ។ល។

ទីបញ្ចប់ ត្រូវតែធ្វើការ**ត្រួតពិនិត្យ** ឬ**ស្តាប់ចម្លើយ** ដែលអនុញ្ញាតឱ្យផ្ទៀងផ្ទាត់ឡើងវិញ នូវចម្លើយសារភាព។ ចំពោះបញ្ហានេះ ការផ្ទៀងផ្ទាត់ដែលធ្វើឡើងដោយផ្ទាល់នៅក្នុង កន្លែងប្រព្រឹត្តបទឧក្រិដ្ឋ ឬបទមជ្ឈិម គឺជាមធ្យោបាយដ៏ល្អប្រសើរមួយ ។

## ៦.ការតទល់

ការតទល់ មានន័យថាការដាក់ប្រទល់មុខបុគ្គលនានា ដើម្បីប្រៀបធៀប ឬផ្ទៀងផ្ទាត់ចម្លើយប្រកាសរបស់ពួកគេ ។ប្រតិបត្តិការនេះទំនងជាចាំបាច់ក្នុងពេលការស៊ើបអង្កេតរបស់នគរបាល ដើម្បីបញ្ជាក់តួនាទីរបស់តួអង្គនីមួយៗ ឬធ្វើឱ្យលេចឡើងនូវភាពមិនស្មោះត្រង់របស់ជនជាប់ចោទម្នាក់ ឬច្រើននាក់ ។

ការអនុវត្តប្រតិបត្តិការនេះត្រូវបានកំណត់នៅក្នុងក្របខ័ណ្ឌស៊ើបអង្កេត។ ដោយហេតុថា ក្នុងការស៊ើបអង្កេតបទល្មើសជាក់ស្តែង ឬ ការស៊ើបអង្កេតបឋម មិនមានអត្ថបទច្បាប់ណាមួយ កម្រិតព្រំដែនចំពោះការធ្វើប្រតិបត្តិការនេះទេ ប៉ុន្តែក្នុងដីកាចាត់តាំងឱ្យស៊ើបសួរ ការតទល់ត្រូវបានកម្រិតព្រំដែន ព្រោះមន្ត្រីនគរបាលយុត្តិធម៌ មិនអាចសួរចម្លើយ ឬប្រទល់មុខភាគី ដើមបណ្តឹងរដ្ឋប្បវេណី និងជនត្រូវចោទនោះទេ។

### ៦.១. ការដាក់ឱ្យតទល់គ្នារវាងបុគ្គលនានាដែលបានប្រកាសចំលើយខុសប្លែកពីគ្នា

ក្នុងដំណើរការស៊ើបអង្កេតមួយ មន្ត្រីនគរបាលយុត្តិធម៌អាចកត់ត្រានូវចម្លើយខុសប្លែកពីគ្នាសម្រាប់ព្រឹត្តិការណ៍តែមួយ (សាក្សីដែលធ្វើចម្លើយរាយការណ៍ខុសៗគ្នាអំពីព្រឹត្តិការណ៍តែមួយ ចម្លើយរបស់សាក្សីម្នាក់ ឬច្រើននាក់ ផ្ទុយទៅនឹងចម្លើយរបស់ជនសង្ស័យម្នាក់ ឬច្រើន ភាពខុសគ្នារវាងលទ្ធផលនៃការស្តាប់ចម្លើយជនសង្ស័យម្នាក់ ឬច្រើនដែលពាក់ព័ន្ធក្នុងសំនុំរឿង) ។

ទោះបីជាតាមទ្រឹស្តី ការតទល់ត្រូវបានឱ្យនិយមន័យថា ជាមធ្យោបាយទាញយកការពិតពីជនទុច្ចរិត ប៉ុន្តែក្នុងការអនុវតជាក់ស្តែង ការប្រទល់មុខមិនបានបង្ហាញធាតុណាមួយបន្ថែមលើការស៊ើបអង្កេត នោះទេ ប៉ុន្តែបានត្រឹមបំភ្លឺព័តិមាន ប៉ុណ្ណោះ ។

ម្យ៉ាងទៀត ជាញឹកញាប់ ប្រតិបត្តិការនេះអនុញ្ញាតឱ្យជនសង្ស័យបានដឹងយ៉ាងច្បាស់នូវភស្តុតាង ចេញពីការផ្តល់ចម្លើយប្រឆាំងនឹងខ្លួន ។

ហេតុដូចនេះ គេត្រូវធ្វើការតទល់គ្នា ព្រោះ ចម្លើយមានភាពខុសគ្នាត្រង់ចំនុចសំខាន់ៗ ។

## **៦.២. ការអនុវត្តការតទល់**

ការតទល់ត្រូវបានធ្វើឡើយដោយអ្នកទទួលខុសត្រូវការស៊ើបអង្កេតដោយមានជំនួយពីដោយ មន្ត្រីរាជការ ដែលបានចូលរួមក្នុងការស្រាវជ្រាវ ។

បើសិនអ្នកចូលរួមមានចំនួនច្រើន ឬអ្នកចូលរួមជាបុគ្គលគ្រោះថ្នាក់ អ្នកទទួលខុសត្រូវអាចសុំជំនួយពីក្រុម នគរបាលដើម្បីបំពេញបេសកកម្មបង្ការរាល់ហេតុការចៃដន្យណាមួយ (បញ្ចៀសមិនឱ្យជនសង្ស័យម្នាក់ ឬច្រើន នាក់ រត់គេច....បញ្ឈប់ការវាយតប់គ្នាជាយថាហេតុរវាងអ្នកចូលរួមនានា...) ។

ប្រតិបត្តិការប្រព្រឹត្តទៅក្នុងការិយាល័យអង្គភាព ។ បន្ទប់នេះត្រូវតែមានទំហំធំគួរសមដើម្បីអោយ អ្នកចូលរួមតទល់អាចអង្គុយបានទាំងអស់ ។ នៅពេលចាប់ផ្តើមការតទល់អ្នក ទទួលខុសត្រូវប្រកាសពីវិធាន ដែលអ្នកចូលរួមត្រូវគោរពនៅក្នុងកំឡុងពេលនៃ ការតទល់ :

-អ្នកចូលរួមគ្រប់រូបត្រូវរក្សាការស្ងៀមស្ងាត់

-ហាមមិនឱ្យអ្នកចូលរួមនិយាយបើមិនត្រូវបានស្នើសុំ

-ហាមមិនឱ្យកាត់សំដីអ្នកនិយាយផ្ទុយនឹងខ្លួនពេលកំពុងផ្តល់ចម្លើយ

ការអានវិធានទាំងនេះអាចឱ្យគេទទួលបានចម្លើយប្រកាសផ្ទុយ ។

គេត្រូវនិយាយឡើងវិញនូវចំនុចខុសគ្នាម្តងមួយចំនុចៗ បុគ្គលម្នាក់ៗនឹងត្រូវបានហៅ ដើម្បីសួរថា តើពួក គេម្នាក់ៗរក្សាចម្លើយប្រកាសពីមុនទុកដដែលឬទេ?តាមវិធីនេះ គេអាចទទួលបានចម្លើយប្រកាសផ្ទុយ ហើយគួស បន្ទាត់ ពីក្រោម ។

កំណត់ហេតុដែលត្រូវសរសេរនោះ ត្រូវឆ្លុះបញ្ចាំងយ៉ាងសុក្រិត្យពីដំណើរប្រព្រឹត្តទៅនៃការតទល់ និងមានហត្ថលេខារបស់ភាគីទាំងអស់ដែលបានចូលរួមក្នុងកិច្ចតទល់នេះ រួមទាំងជំនួយការផងដែរ ។

**សំគាល់ :**

កាលណាអត្តចរិតរបស់ភាគីណាមួយការបង្កការរារាំងមិនឱ្យការតទល់ ដំណើរការបានល្អ អ្នកស៊ើបអង្កេតអាចបញ្ចប់កិច្ចនេះ ហើយត្រូវចុះនិទ្ទេសក្នុងកំណត់ហេតុ។

ដូចគ្នាផងដែរ នៅក្នុងករណីដែលមានវិវាទកើតឡើងនៅក្នុងកំឡុងពេលនៃការតទល់គ្នា ហើយឈានទៅដល់"ការវាយតប់គ្នា"នោះ ឬនៅក្នុងករណីផ្សេងទៀតដែលយល់ថាជាការចាំបាច់នោះ នគរបាលត្រូវចាតវិធាន ការបង្ការ ដោយឱ្យភាគីនីមួយៗសំរាកក្នុងទីកន្លែងដាច់គ្នា ក្នុងរយៈពេលមួយខ្លី។

**១.ការចាប់ខ្លួន**

ការចាប់ខ្លួនគឺជាប្រតិបត្តិការនគរបាលមួយដ៏ស្មុគស្មាញ និងប្រកបដោយគ្រោះថ្នាក់។ ប្រតិបត្តិការនេះត្រូវតែប្រព្រឹត្តិទៅក្នុងលក្ខខ័ណ្ឌសុវត្ថិភាពប្រសើរបំផុត និងទាមទារតាមលទ្ធភាពដែលអាចធ្វើទៅបាននូវការត្រៀម លក្ខណៈជាមុន (ទីកន្លែង និងពេលវេលាស័ក្តសមបំផុត ការបែងចែកតួនាទី និងការការពារ)។

ដោយសារភាពគ្រោះថ្នាក់នៃជនសង្ស័យ ការចាប់ខ្លួនអាចនឹងត្រូវធ្វើឡើងដោយប្រើកំលាំងជាចាំបាច់ និងតម្រូវឱ្យមានសំអាងហេតុ។ ទៅគ្រប់កាលៈទេសៈ ការចាប់ខ្លួនត្រូវបានធ្វើឡើង តាមរយៈការសរសេរកិច្ចមួយដែលប្រែប្រួលទៅតាមគុណសម្បត្តិនៃអ្នកអន្តរាគមន៍ : របាយការណ៍ត្រូវធ្វើដោយភ្នាក់ងារនគរបាលយុត្តិធម៌ ចំណែកកំណត់ហេតុត្រូវធ្វើដោយមន្ត្រីនគរបាលយុត្តិធម៌។

កំណត់ហេតុប្រភេទនេះអាចត្រូវបានសរសេរក្នុងក្របខ័ណ្ឌបទល្មើសជាក់ស្តែង ឬក្នុងករណីអនុវត្តដីកាចាត់ឱ្យស៊ើបសួរជំនួស។

ការស៊ើបអង្កេតបឋម មិនផ្តល់លទ្ធភាពឱ្យមន្ត្រីនគរបាលយុត្តិធម៌ ចាប់ខ្លួនបុគ្គលសង្ស័យដោយបង្ខិតបង្ខំឡើយ។ យ៉ាងច្រើនគាត់អាយឱ្យជនម្នាក់នាំបុគ្គលសង្ស័យមកអង្គភាព ដើម្បីសួរចម្លើយ ក្នុងករណីបដិសេធត្រូវសុំបញ្ជាឱ្យចូលខ្លួនពីព្រះរាជអាជ្ញា។

កំណត់ហេតុត្រូវតែគោរពទម្រង់ជាក់លាក់ទាក់ទងនឹងក្របខ័ណ្ឌតតិយុត្តិ និងកាលៈទេសៈនៃការធ្វើប្រតិបត្តិការ បើសិនជាត្រូវប្រើកំលាំង។ ដោយឡែកកំណត់ហេតុត្រូវចុះនិទ្ទេសន៍ម៉ោងចាប់ខ្លួន ដើម្បីគិតពីរយៈពេលឃាត់ខ្លួន។

គួររំលឹកផងដែរថាបទល្មើសជាក់ស្តែងមាត្រា ៨៧ នៃក្រមនីតិវិធីព្រហ្មទណ្ឌ បើកសិទ្ធិពលរដ្ឋគ្រប់រូបធ្វើការចាប់ខ្លួន និងប្រើកំលាំង (សាក្សីដែលបានឃើញអំពើលួចមួយជាដើម)។

**២.ការឃាត់ខ្លួន**

**២.១. ការឃាត់ខ្លួនជាអំណាចបង្ខំរាងកាយ**

ការឃាត់ខ្លួន អនុញ្ញាតអោយមន្ត្រីនគរបាលយុត្តិធម៌រក្សាជាបណ្តោះអាសន្នក្រោមការចាត់ចែងរបស់ ខ្លួនដើម្បីភាពចាំបាច់នៃការស៊ើបអង្កេត នូវជនម្នាក់ដែលមានមូលហេតុមួយ ឬច្រើនដែលអាចអោយសង្ស័យ

បានថា បានប្រព្រឹត្ត ឬប៉ុនប៉ងប្រព្រឹត្តបទល្មើស ។ វិធានការនេះអនុញ្ញាត អោយមន្ត្រីនគរបាលយុត្តធម៌ទទួលបាន ពត៌មានមាន ប្រយោជន៍ សំរាប់ការស៊ើបអង្កេតពីជននោះ និងអាចធានាបាននូវការការពារ សាម៉ីជន និងវត្ថុតាង ដែលចាំបាច់សម្រាប់ស្វែងរក និងភ្ជាប់នីតិវិធី ។

ម្យ៉ាងទៀត មន្ត្រីនគរបាលយុត្តិធម៌អាចឃាត់ខ្លួនជនគ្រប់រូប ដែលអាចផ្តល់ព័ត៌មានអំពីរឿងហេតុ ប្រសិន បើលក្ខខ័ណ្ឌត្រូវបានបំពេញ ១មាត្រា ៩៦ នៃក្រមនីតិវិធីព្រហ្មទណ្ឌ :

-ជនទាំងឡាយដែលអាចផ្តល់ពត៌មានបានតែមិនព្រមផ្តល់

-ព្រះរាជអាជ្ញាផ្តល់ការអនុញ្ញាតជាលាយលក្ខណ៍អក្សរជាមុន

តាមពិត វិធានការនេះ គឺជាការបះពាល់ដល់សេរីភាពបុគ្គលយ៉ាងធ្ងន់ធ្ងរ ដូច្នេះហើយទើបត្រូវមានការ សរសេរកិច្ចឆ្លើយតបទៅនឹងលក្ខខ័ណ្ឌដ៏តឹងរ៉ឹងដែលកំណត់ដោយក្រមនីតិវិធីព្រហ្មទណ្ឌ ពុំនោះសោតនឹងត្រូវ ចាត់ទុកជាមោឃៈ ។

គេសរសេរកំណត់ហេតុផ្សេងៗគ្នា ដើម្បីកត់ត្រាការឃាត់ខ្លួន ការពន្យាពេលឃាត់ខ្លួនជាយថាហេតុ និង ការបញ្ចប់ការឃាត់ខ្លួននេះ ។

ការឃាត់ខ្លួនមានចែងក្នុងក្របខ័ណ្ឌស៊ើបអង្កេតទាំង ៣ របស់នគរបាលយុត្តិធម៌ ។

**២.១.១. និយមន័យ**

ការឃាត់ខ្លួន គឺជាវិធានការដកហូតសេរីភាពមួយដែលសម្រេចដោយមន្ត្រីនគរបាលយុត្តិធម៌ ដែលធ្វើ ប្រតិបត្តិការក្នុងក្របខ័ណ្ឌបេសកកម្មនគរបាលយុត្តិធម៌ ។

វិធានការនេះត្រូវបានអនុវត្តក្រោមការត្រួតពិនិត្យរបស់អាជ្ញាធរយុត្តាធិការ និងទៅតាមទម្រង់ការដ៏តឹង រ៉ឹងមួយដើម្បីគោរពសេរីភាពបុគ្គល ។

**២.១.២. ក្របខ័ណ្ឌគតិយុត្តិ**

ចំពោះក្របខ័ណ្ឌស៊ើបអង្កេតបទល្មើសជាក់ស្តែង ការឃាត់ខ្លួនមានចែងក្នុងមាត្រា ៩៦ ដល់ ១០២ នៃក្រម នីតិវិធីព្រហ្មទណ្ឌ ចំពោះការស៊ើបអង្កេតបឋមមានចែងក្នុងមាត្រា ១១៦ និងការអនុវត្តដីកាចាត់ អោយស៊ើបសួរ ជំនួសមានចែងក្នុងមាត្រា ១៨២ នៃក្រមដដែល ។

**២.១.៣. បទល្មើសពាក់ព័ន្ធ**

គឺជាបទឧក្រិដ្ឋ និងបទមជ្ឈិម។ គេមិនអាចចាត់វិធានការឃាត់ខ្លួនចំពោះជនម្នាក់ដែលបានប្រព្រឹត្តបទល្មើសលហុឡើយ ។

**២.១.៤. កន្លែងអនុវត្តវិធានការ**

ការឃាត់ខ្លួន គឺជាវិធានការមួយពាក់ព័ន្ធនឹងសាម៉ីជន។ ជាទូទៅ ការឃាត់ខ្លួនធ្វើឡើងក្នុងកន្លែងពិសេសមួយរបស់នគរបាល ប៉ុន្តែក៏អាចធ្វើឡើងនៅទីកន្លែងណាមួយដែលជនឃាត់ខ្លួនស្ថិតនៅ (ឧទាហរណ៍ : មន្ទីរពេទ្យ លំនៅដ្ឋាន និងទីកន្លែងផែកឆេរ ។ល។)

**២.២. ដំណើរការនៃការឃាត់ខ្លួន**

**២.២.១. ភាពបន្ទាន់ដែលត្រូវធ្វើពេលចាប់ផ្តើមវិធានការ**

**២.២.១.១. ការកត់ត្រាអំពីការឃាត់ខ្លួន**

ការឃាត់ខ្លួននាំទៅដល់ការសរសេរកំណត់ហេតុជាពិសេសមួយ :

មាត្រា ៩៧ នៃក្រមនីតិវិធីព្រហ្មទណ្ឌ :

" មន្ត្រីនគរបាលយុត្តិធម៌ធ្វើកំណត់ហេតុស្តីពីការឃាត់ ខ្លួនជាបន្ទាន់ដោយមានចុះសេចក្តីដូចតទៅ :

-ឈ្មោះ និងឋានៈរបស់មន្ត្រីនគរបាលយុត្តិធម៌ដែលបានបង្គាប់ឱ្យឃាត់ខ្លួន

-អត្តសញ្ញាណនៃបុគ្គលដែលត្រូវឃាត់ខ្លួន

-មូលហេតុនៃការឃាត់ខ្លួន

-ថ្ងៃ ខែ ឆ្នាំ និងម៉ោងដែលផ្តើមឃាត់ខ្លួន

-ការឱ្យដំណឹងអំពីសិទ្ធិដែលបានបញ្ញត្តនៃមាត្រា ៩៨ (ជំនួយរបស់មេធាវីនៅក្នុងពេលឃាត់ខ្លួន) នៃក្រម នេះ

-ជាយថាហេតុ ឈ្មោះអ្នកបកប្រែ ។

កំណត់ហេតុនេះត្រូវមានចុះហត្ថលេខា ឬផ្តិតម្រាមដៃរបស់ជនឃាត់ខ្លួន ក្រោយពីបានអានកំណត់ហេតុរួច ឬបើសាមីខ្លួនមិនចេះអក្សរ មន្ត្រីនគរបាលយុត្តិធម៌ត្រូវអានកំណត់ហេតុឱ្យស្តាប់ ។

ប្រសិនបើជននេះប្រកែកមិនព្រមចុះហត្ថលេខា ឬផ្តិតម្រាមដៃទេ មន្ត្រីនគរបាលយុត្តិធម៌ត្រូវចុះនិទ្ទេស ។

កំណត់ហេតុត្រូវភ្ជាប់ជាមួយសំណុំរឿង។ ˝

**ការជូនដំណឹងពីការឃាត់ខ្លួន និងការផ្ដល់ព័ត៌មានដល់ជនដែលត្រូវបានឃាត់ខ្លួន**

មាត្រា ៩៧ នៃក្រមនីតិវិធីព្រហ្មទណ្ឌ :

˝ កាលណាមានការឃាត់ខ្លួនបុគ្គលណាមួយ មន្ត្រីនគរបាលយុត្តិធម៌ត្រូវឱ្យដំណឹងជាបន្ទាន់អំពីសេចក្ដីសម្រេចរបស់ខ្លួនដល់បុគ្គលនោះ ដោយប្រាប់ឱ្យបានដឹងអំពីមូលហេតុនៃសេចក្ដីសម្រេចឃាត់ខ្លួននេះ។ មន្ត្រីនគរ បាលយុត្តិធម៌ប្រាប់ដល់សាមីខ្លួនឱ្យបានដឹងផងដែរ អំពីសិទ្ធិដែលបានចែងនៅមាត្រា ៩៨ (ជំនួយរបស់មេធាវីនៅ ក្នុងពេលឃាត់ខ្លួន) នៃក្រមនេះ ។ ក្នុងករណីចាំបាច់ មន្ត្រីនគរបាលយុត្តិធម៌អាចហៅរកអ្នកបកប្រែ ។ ˝

**មូលហេតុនៃការឃាត់ខ្លួន**

មូលហេតុនៃការឃាត់ខ្លួនគួរតែត្រូវបានចុះនៅពេលសរសេរកំណត់ហេតុ។ ក្នុងការស៊ើបអង្កេតបទល្មើសជាក់ស្ដែង ឬការស៊ើបអង្កេតបឋម ជនសង្ស័យនឹងត្រូវឃាត់ខ្លួន « ដើម្បីភាពចាំបាច់នៃការស៊ើបអង្កេត ˝ ទម្រង់នេះមានចែងយ៉ាងច្បាស់ក្នុងមាត្រា ៩៦ នៃក្រមនិតិវិធីព្រហ្មទណ្ឌ។ ផ្ទុយទៅវិញ ទាក់ទងទៅនឹងដីកាចាត់អោយស៊ើបសួរជំនួស គេប្រើទម្រង់ថា « ដើម្បីភាពចាំបាច់នៃការអនុវត្តដីកាចាត់អោយស៊ើបសួរជំនួស ˝ ដែលនឹងត្រូវបានប្រើប្រាស់ទៅតាមនីតិវិធី។

**២.២.១.២. ការជូនដំណឹងដល់អាជ្ញាធរតុលាការ : ព្រះរាជអាជ្ញា ឬចៅក្រមស៊ើបសួរ**

**ការជូនដំណឹងនេះមិនអាចខាន**បានឡើយ (មាត្រា ៩៦នៃក្រមនិតិវិធីព្រហ្មទណ្ឌ)។ ទោះបីជាមន្ត្រីនគរបាលយុត្តធម៌មានសេរីភាពអនុវត្តវិធានការក៏ដោយ ក៏ព្រះរាជអាជ្ញាមានអំណាចជាអ្នកគ្រប់គ្រងនគរបាលយុត្តិធម៌ដែរ (មាត្រា ៣៧នៃក្រមនីតិវិធីព្រហ្មទណ្ឌ) ហើយក្នុងឋានៈនេះ ព្រះរាជអាជ្ញាអាចសម្រេចបញ្ចប់វិធានឃាត់ខ្លួនដែលធ្វើឡើងដោយមន្ត្រីនគរបាលយុត្តិធម៌បានគ្រប់ពេលវេលា។ ដូចនេះ ព្រះរាជអាជ្ញាត្រូវតែដឹងខានមិនបាន។

ច្បាប់មិនបានបញ្ជាក់លំអិតថាអ្នកស៊ើបអង្កេតត្រូវជូនដំណឹងពីអំពីការឃាត់ខ្លួនដល់ព្រះរាជអាជ្ញា ឬចៅក្រម បានតាមរបៀបណានោះទេ។ ដូច្នេះ ការជូនដំណឹងទៅចៅក្រមមានសមត្ថកិច្ច អាចធ្វើឡើងទៅតាមរបៀប ធម្មតាដូចជា : ទូរស័ព្ទ ទូរសារ...។

ក្នុងការអនុវត្តជាក់ស្តែង អ្នកស៊ើបអង្កេតត្រូវចុះនិទ្ទេសក្នុងកំណត់ហេតុរបស់ខ្លួនថា ចៅក្រមបានទទួលដំណឹងពីការឃាត់ខ្លួនរួចហើយ ដោយបញ្ជាក់ម៉ោង ក៏ដូចជាអត្តសញ្ញាណចៅក្រមអយ្យការដែលទទួលដំណឹងផង ។

ម្យ៉ាងទៀត ព្រះរាជអាជ្ញានឹងអាច**ទស្សនាកន្លែងឃាត់ខ្លួន**គ្រប់ពេលដែលខ្លួនយល់ថាចាំបាច់ អង្គភាពនគរបាលនានាត្រូវតែបង្ហាញ**បញ្ជីនៃការឃាត់ខ្លួន**ដល់ព្រះរាជអាជ្ញា ។

**២.២.១.៣. បញ្ជីនៃការឃាត់ខ្លួន**

ឯកសារនេះសម្រាប់ត្រួតពិនិត្យថា តើដំណើរការនៃវិធានការទាំងឡាយដែលធ្វើឡើងដោយមន្ត្រីនគរបាលយុត្តធមិប្រព្រឹត្តទៅបានល្អឬទេ ហើយអនុញ្ញាតឱ្យឋានានុក្រម និងអាជ្ញាធរតុលាការប្រាកដថាសិទ្ធិរបស់ អ្នកត្រូវចោទប្រកាន់ពិតជាត្រូវបានគោរព ។

មាត្រា ១០១ នៃក្រមនីតិវិធីព្រហ្មទណ្ឌ :

" នៅក្នុងកន្លែងនីមួយៗ របស់នគរបាល ឬកងរាជអាវុធហត្ថ ដែលសម្រាប់ទទួលជនដែលត្រូវឃាត់ខ្លួន ត្រូវមានបញ្ជីស្តីពីការឃាត់ខ្លួនមួយ ។

គ្រប់ការឃាត់ខ្លួនត្រូវមានចុះនៅក្នុងបញ្ជីដោយមានសេចក្តីដូចតទៅនេះ :

-ឈ្មោះ និងឋានៈមន្ត្រីនគរបាលយុត្តិធមិដែលបានបង្គាប់ឱ្យធ្វើការឃាត់ខ្លួន

-អត្តសញ្ញាណរបស់បុគ្គលដែលឃាត់ខ្លួន

-ថ្ងៃ ខែ ឆ្នាំ និងម៉ោងដែលចាប់ផ្តើមឃាត់ខ្លួន និងបញ្ចប់ការឃាត់ខ្លួន

-ឈ្មោះ និងឋានៈរបស់ចៅក្រមដែលបានអនុញ្ញាតឱ្យបន្តការឃាត់ខ្លួន ជាយថាហេតុ

-ឈ្មោះ របស់គ្រូពេទ្យដែលបានពិនិត្យបុគ្គលឃាត់ខ្លួន ជាយថាហេតុ

-ប្រភេទនៃសេចក្តីសម្រេចរបស់អាជ្ញាធរតុលាការនៅពេលផុតកំណត់ការឃាត់ខ្លួន ។

បញ្ជីនេះត្រូវកាន់កាប់ជាប្រចាំសម្រាប់ជូនអាជ្ញាធរតុលាការតាមត្រូវការ ។ "

**សូមប្រយ័ត្ន :** ក្រមនីតិវិធីព្រហ្មទណ្ឌមិនតម្រូវឱ្យចុះម៉ោងស្តាប់ចម្លើយ និងមេ៉ាងតទល់ ក៏ដូចជាការជួបសនទនា ជាមួយមេធាវី ឬជាមួយជនណាម្នាក់ដែលខ្លួនជ្រើសរើស តែនិទ្ទេសនេះក៏មានភាពចាំបាច់ផងដែរ ដោយសារតែ បញ្ជីគឺជាការសង្ខេបការប្រព្រឹតទៅការឃាត់ខ្លួន ។

អាចត្រូវចុះផងដែរនូវចំនួនអាហារដែលជនត្រូវឃាត់ខ្លួនពិសា ម៉ោងចាប់ខ្លួន ព្រមទាំងគ្រោះថ្នាក់ដែលកើតមានក្នុងពេលឃាត់ខ្លួន.....។

**២.២.១.៤.អនីតិជនដែលត្រូវបានឃាត់ខ្លួន**

-មាត្រា ១០០ នៃក្រមនិតិវិធីព្រហ្មទណ្ឌ :

- " កាលណាបុគ្គលដែលត្រូវបានឃាត់ខ្លួនជាអនីតិជន មន្ត្រីនគរបាលយុត្តិធម៌ត្រូវជូនព័ត៌មានតាមគ្រប់មធ្យោបាយដល់ឪពុក ម្តាយ ដល់អ្នកតំណាងស្របច្បាប់ ឬដល់អ្នកទទួលភារកិច្ចលើអនីតិជននេះ ។ "

**២.២.២. ចំនុចចាប់ផ្តើមនៃការឃាត់ខ្លួន**

**២.២.២.១. ក្នុងការស៊ើបអង្កេតបទល្មើសជាក់ស្តែង :**

មាត្រា ៩៦ នៃក្រមនីតិវិធីព្រហ្មទណ្ឌចែងថា "ម៉ោងដែលសាម៉ីខ្លួនមកដល់អង្គភាពនគរបាល ឬកងរាជអាវុធហត្ថ» ។ ប៉ុន្តែជាទូទៅ អាចជាម៉ោងចាប់ខ្លួន ម៉ោងមកដល់កន្លែងកើតហេតុរបស់មន្ត្រីនគរបាលយុត្តធម៌ (មាត្រា ៩០ នៃក្រមនិតិវិធីព្រហ្មទណ្ឌ) ឬម៉ោងបុគ្គលម្នាក់ត្រូវបានយកមកប្រគល់ឱ្យមន្ត្រីនគរបាលយុត្តធម៌ក្នុងករណីដែល សាម៉ីខ្លួនត្រូវចាប់ខ្លួនបានដោយ "ជនណាម្នាក់ " តាមមាត្រា ៨៧ នៃក្រមនិតិវិធីព្រហ្មទណ្ឌ។

**២.២.២.២. ក្នុងការស៊ើបអង្កេតបឋម :**

អាចជាម៉ោងចាប់ផ្តើមសួរចម្លើយ ឬម៉ោងមកដល់អង្គភាព បើសិនជាសាមីខ្លួនមិនត្រូវបានសួរចម្លើយភ្លាមៗទេនោះ ឬម៉ោងចាប់ផ្តើមការឆែកឆេរលំនៅដ្ឋាន។

**២.២.២.៣. អនុវត្តតាមដីកាចាត់ឱ្យស៊ើសួរជំនួស :**

អាចជាម៉ោងចោទប្រកាន់សាម៉ីខ្លួន ម៉ោងដែលសាម៉ីខ្លួនមកដល់អង្គភាព ម៉ោងចាប់ខ្លួន និងម៉ោងចាប់ផ្តើមសួរចម្លើយ....

**២.២.៣. រយៈពេលនៃវិធានការឃាត់ខ្លួន**

**២.២.៣.១. រយៈពេលដំបូងនៃការឃាត់ខ្លួន**

មាត្រា ៩៦ នៃក្រមនិតិវិធីព្រហ្មទណ្ឌ : "ការឃាត់ខ្លួនមានថិរវេលា ៤៨ (សែសិបប្រាំបី) ម៉ោង" ។

ប៉ុន្តែ អ្វីដែលសំខាន់នោះគឺការបញ្ជាក់ដោយលម្អិតនូវរបបពិសេសមួយសម្រាប់ អនិតិជនដែលអាចអនុវត្តក្នុងក្របខ័ណ្ឌគតិយុត្តទាំងអស់បាន : មាត្រា ៩៦ :

"**ចំពោះបទឧក្រិដ្ឋដែលមានអាយុពី១៤ឆ្នាំ** ដល់ក្រោម **១៦ឆ្នាំ**មិនអាចត្រូវគេឃាត់ខ្លួនហួសរយៈ ពេល ៣៦ម៉ោងឡើយ។

ចំពោះបទមជ្ឈិម អនីតិជនដែលមានអាយុពី ១៤ ឆ្នាំ ដល់ ក្រោម ១៦ ឆ្នាំ មិនអាចត្រូវគេឃាត់ខ្លួនហួស រយៈពេល ២៤ ម៉ោងឡើយ ។

-**ចំពោះបទឧក្រិដ្ឋ** អនីតិជនដែលមានអាយុពី **១៦** ឆ្នាំ ដល់ក្រោម **១៨** ឆ្នាំ មិនអាចត្រូវគេឃាត់ខ្លួនហួស រយៈពេល ៤៨ ម៉ោងឡើយ ។

ចំពោះបទមជ្ឈិម អនីតិជនដែលមានអាយុពី ១៦ ឆ្នាំ ដល់ក្រោម ១៨ ឆ្នាំ មិនអាចត្រូវគេឃាត់ខ្លួនហួស រយៈពេល ៣៦ ម៉ោងឡើយ ។

អនីតិជនដែលមានអាយុក្រោម ១៤ ឆ្នាំ ពុំអាចត្រូវគេឃាត់ខ្លួនបានឡើយ។»

### ២.២.៣.២. ការពន្យាររយៈពេលឃាត់ខ្លួន

ការពន្យាររយៈពេលឃាត់ខ្លួនអាចធ្វើបាន ចំពោះតែបទឧក្រិដ្ឋប៉ុណ្ណោះ :

មាត្រា ៩៦ នៃក្រមនិតិវិធីព្រហ្មទណ្ឌ : "ចំពោះបទឧក្រិដ្ឋ កាលណាមានតម្រុយដែលបង្ហាញឱ្យឃើញថា មានពិរុទ្ធភាពលើបុគ្គលដែលឃាត់ខ្លួន មន្ត្រីនគរបាលយុត្តិធម៌អាចពន្យារពេលឃាត់ខ្លួនបាន ប្រសិនបើវិធានការ នេះជាការចាំបាច់ ដើម្បីឱ្យការស៊ើបអង្កេតប្រព្រឹត្តទៅបានល្អ ។ ការពន្យារពេលនេះត្រូវសុំទៅព្រះរាជអាជ្ញា ដែល ត្រូវផ្ទៀងផ្ទាត់មើលមូលកភាព ។ ការអនុញ្ញាតឱ្យពន្យារពេលឃាត់ខ្លួន ដែលធ្វើជាលាយលក្ខណ៍អក្សរ និងមាន សំអាងហេតុ ត្រូវដាក់បញ្ចូលទៅក្នុងសំណុំរឿង។ ការពន្យារគឺជាវិធានការពិសេស។ ការពន្យារនេះមិន អាចឱ្យលើសពី ២៤ (ម្ភៃបួន) ម៉ោង ឡើយ ដោយមិនគិតពីថិរវេលាចាំបាច់ក្នុងការដឹកជញ្ជូន ។

ការពន្យារមិនអាចត្រូវយល់ព្រមបានទេ ប្រសិនបើបុគ្គលដែលឃាត់ខ្លួននោះ ជាអនីតិជន។ "

វិធានដែលទាក់ទងទៅនឹងក្របខ័ណ្ឌគតិយុត្តនៃបទល្មើសជាក់ស្ដែងទាំងនេះ ក៏អាចយកមកអនុវត្តផង ដែរ ចំពោះការស៊ើបអង្កេតបឋម (មាត្រា ១១៦ នៃក្រមនីតិវិធីព្រហ្មទណ្ឌ) និងសម្រាប់អនុវត្តដីកាចាត់ឱ្យ ស៊ើបសួរជំនួស (មាត្រា ១៨២ នៃក្រមនីតិវិធីព្រហ្មទណ្ឌ) ។

### ២.២.៣.៣. ការបែងចែករយៈពេលឃាត់ខ្លួនជាភាគ ក្នុងក្របខ័ណ្ឌរឿងក្ដីតែមួយ :

ទោះបីនៅក្នុងក្របខ័ណ្ឌណាក៏ដោយ ហើយទោះបីក្នុងករណីមានការផ្លាស់ប្តូរក្របខ័ណ្ឌស៊ើបអង្កេតក៏ដោយរយៈពេលសរុបនៃការឃាត់ខ្លួនមិនអាចលើសពី ៤៨ ម៉ោងបានទេគិតទាំងការពន្យារពេលឃាត់ខ្លួនក្នុងករណីពិសេស ២៤ ម៉ោង ឬសរុបទាំងអស់ត្រឹម ៧២ ម៉ោង ទោះបីជាសាមីខ្លួនត្រូវបានដោះលែង នៅចន្លោះរយៈពេលនៃវិធានការឃាត់ខ្លួនផ្សេងៗគ្នាក៏ដោយ ។

**ក្នុងក្របខ័ណ្ឌរឿងក្តីផ្សេងគ្នា :**

ការបន្ថែមរយៈពេលឃាត់ខ្លួនជាបន្តបន្ទាប់ក្នុងក្របខ័ណ្ឌរឿងក្តីផ្សេងៗ មិនអាចមានរយៈពេលលើសពី ៤៨ ម៉ោង ឬ ៧២ ម៉ោង បើសិនមានការពន្យាររយៈពេលឃាត់ខ្លួន ។

ឧទាហរណ៍ៈមន្ត្រីនគរបាលយុត្តធម៌នៅអង្គភាពនគរបាលយុត្តិធម៌ ទីក្រុងភ្នំពេញឈ្មោះ **លោក**... បានឃាត់ ខ្លួនលោក ឃ ក្នុងក្របខ័ណ្ឌរឿងក្តីលួចមួយដែលត្រូវបានស៊ើបអង្កេតតាមរបៀបបទល្មើសជាក់ស្តែង ។ ក្នុងពេល អនុវត្តវិធានការនេះ មន្ត្រីនគរបាលយុត្តធម៌បានដឹងថាលោក X មានកិនភាគដូចអ្នករំលោភម្នាក់ដែលគេតាមរក។ ការស៊ើបអង្កេតលើបទលួចបានបញ្ចប់ដោយការលែងលោក X បន្ទាប់ពីត្រូវបានឃាត់ខ្លួនអស់រយៈពេល ២៤ ម៉ោង រួចមក។ ដូចនេះ មន្ត្រីនគរបាលយុត្តធម៌ត្រូវទទួលភារកិច្ចអនុវត្តដីកាចាត់ឱ្យស៊ើបសួរជំនួសលើបទរំលោភនេះបាន ឃាត់ខ្លួនលោក X តាមដីកានេះ ។ វិធានការឃាត់ខ្លួនថ្មីនេះមិនអាចមានរយៈពេលលើសពី២៤ម៉ោង ឬ៤៨ម៉ោង ក្នុង ករណីមានការពន្យាររយៈពេលឃាត់ខ្លួន ។

### ២.២.៤. សិទ្ធិរបស់ជនត្រូវឃាត់ខ្លួន

#### ២.២.២.១. ជំនួយរបស់មេធាវីក្នុងពេលឃាត់ខ្លួន

មាត្រា ៩៨ នៃក្រមនីតិវិធីព្រហ្មទណ្ឌ : "ក្នុងរយៈពេល ២៤ ម៉ោងបានកន្លងផុតទៅ តាំងពីពេលផ្តើមនៃការឃាត់ខ្លួន មកនោះ បុគ្គលដែលឃាត់ខ្លួនអាចសុំសន្ទនាជាមួយមេធាវី ឬជាមួយជនណាម្នាក់ដែលខ្លួនជ្រើសរើសកុំឱ្យតែ ជននេះមានការទាក់ទិននៅក្នុងរឿងជាមួយ ។ ជននេះត្រូវបានទទួលដំណឹងពីការស្នើសុំជ្រើសរើសនេះ តាមគ្រប់មធ្យោបាយ និងជាបន្ទាន់ ។ ជននេះអាចចូលទៅកាន់កន្លែងឃាត់ខ្លួន និងទាក់ទងជាមួយបុគ្គលសាមីខ្លួនបាន ៣០ (សាមសិប)នាទី ក្នុងលក្ខខណ្ឌធានាការសម្ងាត់នៃការសន្ទនានេះ ។

ក្រោយការសន្ទនាជននេះអាចធ្វើកំណត់សម្គាល់ជាលាយលក្ខណ៍អក្សរដែលត្រូវភ្ជាប់ជាមួយសំណុំរឿង ។"

#### ២.២.៤.២. ជំនួយរបស់គ្រូពេទ្យក្នុងពេលឃាត់ខ្លួន

ទោះបីនៅក្នុងក្របខ័ណ្ឌណាក៏ដោយ ហើយទោះបីក្នុងករណីមានការផ្លាស់ប្តូរក្របខ័ណ្ឌស៊ើបអង្កេតក៏ដោយរយៈពេលសរុបនៃការឃាត់ខ្លួនមិនអាចលើសពី ៤៨ ម៉ោងបានទេគិតទាំងការពន្យារពេលឃាត់ខ្លួនក្នុងករណីពិសេស ២៤ ម៉ោង ឬសរុបទាំងអស់ត្រឹម ៧២ ម៉ោង ទោះបីជាសាមីខ្លួនត្រូវបានដោះលែង នៅចន្លោះរយៈពេលនៃវិធានការឃាត់ខ្លួនផ្សេងៗគ្នាក៏ដោយ ។

**ក្នុងក្របខ័ណ្ឌរឿងក្តីផ្សេងគ្នា :**

ការបន្ថែមរយៈពេលឃាត់ខ្លួនជាបន្តបន្ទាប់ក្នុងក្របខ័ណ្ឌរឿងក្តីផ្សេងៗ មិនអាចមានរយៈពេលលើសពី ៤៨ ម៉ោង ឬ ៧២ ម៉ោង បើសិនមានការពន្យាររយៈពេលឃាត់ខ្លួន ។

ឧទាហរណ៍ៈមន្ត្រីនគរបាលយុត្តធមិនៅអង្គភាពនគរបាលយុត្តិធមិ ទីក្រុងភ្នំពេញឈ្មោះ **លោក**... បានឃាត់ ខ្លួនលោក ឃ ក្នុងក្របខ័ណ្ឌរឿងក្តីលួចមួយដែលត្រូវបានស៊ើបអង្កេតតាមរបៀបបទល្មើសជាក់ស្តែង ។ ក្នុងពេល អនុវត្តវិធានការនេះ មន្ត្រីនគរបាលយុត្តធមិបានដឹងថាលោក X មានកិនភាគដូចអ្នករំលោភម្នាក់ដែលគេតាមរក។ ការស៊ើបអង្កេតលើបទលួចបានបញ្ចប់ដោយការលែងលោក X បន្ទាប់ពីត្រូវបានឃាត់ខ្លួនអស់រយៈពេល ២៤ ម៉ោង រួចមក។ ដូចនេះ មន្ត្រីនគរបាលយុត្តធមិត្រូវទទួលភារកិច្ចអនុវត្តដីកាចាត់ឱ្យស៊ើបសួរជំនួសលើបទរំលោភនេះបាន ឃាត់ខ្លួនលោក X តាមដីកានេះ ។ វិធានការឃាត់ខ្លួនថ្មីនេះមិនអាចមានរយៈពេលលើសពី២៤ម៉ោង ឬ៤៨ម៉ោង ក្នុង ករណីមានការពន្យាររយៈពេលឃាត់ខ្លួន ។

**២.២.៤. សិទ្ធិរបស់ជនត្រូវឃាត់ខ្លួន**

**២.២.២.១. ជំនួយរបស់មេធាវីក្នុងពេលឃាត់ខ្លួន**

មាត្រា ៩៨ នៃក្រមនិតិវិធីព្រហ្មទណ្ឌ : "ក្នុងរយៈពេល ២៤ ម៉ោងបានកន្លងផុតទៅ តាំងពីពេលផ្តើមនៃការឃាត់ខ្លួន មកនោះ បុគ្គលដែលឃាត់ខ្លួនអាចសុំសន្ទនាជាមួយមេធាវី ឬជាមួយជនណាម្នាក់ដែលខ្លួនជ្រើសរើសកុំឱ្យតែ ជននេះមានការទាក់ទិននៅក្នុងរឿងជាមួយ ។ ជននេះត្រូវបានទទួលដំណឹងពីការស្នើសុំជ្រើសរើសនេះ តាមគ្រប់មធ្យោបាយ និងជាបន្ទាន់ ។ ជននេះអាចចូលទៅកាន់កន្លែងឃាត់ខ្លួន និងទាក់ទងជាមួយបុគ្គលសាមីខ្លួនបាន ៣០ (សាមសិប)នាទី ក្នុងលក្ខខណ្ឌធានាការសម្ងាត់នៃការសន្ទនានេះ ។

ក្រោយការសន្ទនាជននេះអាចធ្វើកំណត់សម្គាល់ជាលាយលក្ខណ៍អក្សរដែលត្រូវភ្ជាប់ជាមួយសំណុំរឿង ។"

**២.២.៤.២. ជំនួយរបស់គ្រូពេទ្យក្នុងពេលឃាត់ខ្លួន**

មាត្រា ៩៩ នៃក្រមនិតិវិធីព្រហ្មទណ្ឌ : "ព្រះរាជអាជ្ញា ឬមន្ត្រីនគរបាលយុត្តធមិ អាចសុំឱ្យគ្រូពេទ្យមកពិនិត្យបុគ្គលដែលឃាត់ខ្លួនបានគ្រប់ពេលវេលា។ គ្រូពេទ្យផ្ទៀងផ្ទាត់មើលថា តើស្ថានភាពសុខភាពរបស់បុគ្គលដែលឃាត់ខ្លួននេះ សមស្របនឹងការឃាត់ខ្លួនដែរឬទេ"។

មន្ត្រីនគរបាលយុត្តធមិជាអ្នកទទួលខុសត្រូវទាំងស្រុងលើរាងកាយ និងស្ថានភាពសុខភាពជនត្រូវឃាត់ខ្លួន ការស្លាប់បុគ្គលត្រូវឃាត់ខ្លួនដែលត្រូវការការព្យាបាល តែគេមិនឱ្យព្យាបាលនោះ នឹងនាំឱ្យមានការចោទប្រកាន់ លើការទទួលខុសត្រូវខាងវិន័យ និងព្រហ្មទណ្ឌរបស់មន្ត្រីនគរបាលយុត្តធមិនោះ។

**សូមប្រយ័ត្ន** : ក្នុងពេលឃាត់ខ្លួន ត្រូវតែជម្រាបចៅក្រមប្រគល់ភារៈកិច្ចឃាត់ខ្លួន ហើយប្រាប់ភ្លាមពីគ្រោះថ្នាក់ ឬបញ្ហាជាយថាហេតុ។

## ២.២.៥. ការបន្ទាន់ផ្សេងៗដែលត្រូវបំពេញនៅក្រោយរយៈពេលឃាត់ខ្លួន ៤៨ ដំបូង

ដំណោះស្រាយពីរត្រូវបានអនុវត្ត :

-ត្រូវបញ្ចប់វិធានការឃាត់ខ្លួន

-ការឃាត់ខ្លួនត្រូវបានពន្យារពេល

### ២.២.៥.១. ការបញ្ចប់ការឃាត់ខ្លួន

វិធានការឃាត់ខ្លួនត្រូវបញ្ចប់**តាមសេចក្តីសម្រេចរបស់ចៅក្រម** (មាត្រា ១០៣ នៃក្រមនីតិវិធីព្រហ្មទណ្ឌ) ។ សេចក្តីសម្រេចនេះត្រូវបានជម្រាបទៅសាមីខ្លួន ក្រោមទម្រង់ជាកំណត់ហេតុមួយដែលមានចុះកាលបរិច្ឆេទ និងម៉ោងចាប់ផ្តើមវិធានការ ម៉ោងចាប់ផ្តើម និងបញ្ចប់ការសួរចម្លើយ កាលបរិច្ឆេទ និងម៉ោងបញ្ចប់ការឃាត់ខ្លួន ក៏ដូចជាលទ្ធផល :

-ដោះលែង

-បង្ហាញបុគ្គលត្រូវឃាត់ខ្លួនចំពោះមុខចៅក្រម

គេត្រូវកត់ត្រាម៉ោងចាប់ផ្តើម និង បញ្ចប់ការសួរចម្លើយក្នុងបញ្ជីនៃការឃាត់ខ្លួនដែលនឹងត្រូវចុះហត្ថលេខា ដោយសាមីខ្លួន និងមន្ត្រីនគរបាលយុត្តិធមិ។

### ២.២.៥.២. ការពន្យាររយៈពេលឃាត់ខ្លួន

ចំពោះបទល្មើសជាក់ស្តែង ការស៊ើបអង្កេតបឋម និងបទឧក្រិដ្ឋ ការពន្យាររយៈពេលឃាត់ខ្លួន ត្រូវមាន

សំអាងហេតុដោយ "តម្រុយដែលបង្ហាញឱ្យឃើញថាមានពិរុទ្ធភាព" តាមមាត្រា ៩៦ នៃក្រមនីតិវិធីព្រហ្មទណ្ឌ (បើមានត្រឹមតែសាក្សីសាមញ្ញម្នាក់មិនអាចធ្វើការពន្យាររយៈពេលឃាត់ខ្លួនបានឡើយ) ដើម្បីឱ្យអ្នកស៊ើបអង្កេតបំពេញនូវកិច្ចបន្ថែមផ្សេងៗ។ ចំពោះដីកាចាត់ឱ្យស៊ើបសួរជំនួស មូលហេតុគឺ " ភាពចាំបាច់នៃការអនុវត្តដីកា ចាត់ឱ្យស៊ើបសួរជំនួស »។

វិធាននេះត្រូវបានពន្យារក្នុងរយៈពេលមួយ ដែលកំណត់ដោយចៅក្រម តែមិនអាចហួសពីរយៈពេល ២៤ ម៉ោងទេ។

**លក្ខខណ្ឌមុនពេលពន្យាររយៈពេលឃាត់ខ្លួន**

មន្ត្រីនគរបាលយុត្តិធម៌ត្រូវតែសុំការពន្យាររយៈពេលឃាត់ខ្លួនជាលាយលក្ខអក្សរ មុនពេលបញ្ចប់រយៈពេលឃាត់ខ្លួន ៤៨ម៉ោង ហើយត្រូវទទួលបានការអនុញ្ញាតជាលាយលក្ខអក្សរពីចៅក្រម ( តាមការជាក់ស្តែង ការ អនុញ្ញាតនេះធ្វើឡើងដោយផ្ទាល់មាត់ និងត្រូវចុះក្នុងកំណត់ហេតុ )។

ចៅក្រមអាចផ្តល់ការអនុញ្ញាតនេះ បន្ទាប់ពីការបង្ហាញបុគ្គលត្រូវឃាត់ខ្លួនជាមុនសិន។

**សំគាល់ :** ដូចនេះ កំណត់ហេតុពន្យាររយៈពេលឃាត់ខ្លួនត្រូវបានសរសេរនៅមុនពេលបញ្ចប់ការឃាត់ខ្លួនរយៈពេល ៤៨ ម៉ោង។

**២.២.៦. ការបន្ទាន់ផ្សេងៗដែលត្រូវបំពេញបន្ទាប់ពីរយៈពេលឃាត់ខ្លួន ៧២ ម៉ោង**

វិធានការដែលធ្វើឡើងនេះ ត្រូវបញ្ចប់តាមសេចក្តីណែនាំរបស់ចៅក្រម។ សេចក្តីសម្រេចនេះត្រូវជម្រាប ជូនសាមីខ្លួនដូចតាមរបៀបមុនៗដែរ។

ត្រូវចុះនិទ្ទេសកាលបរិច្ឆេទ និងម៉ោងចាប់ផ្តើមពន្យារពេលឃាត់ខ្លួនដែលអនុញ្ញាតដោយចៅក្រម ។ កំណត់ហេតុត្រូវបានសរសេរចប់សព្វគ្រប់ (កំណត់ហេតុសរុប មាត្រា ១០២ នៃក្រមនីតិវិធីព្រហ្មទណ្ឌ) ហើយបញ្ជីនៃការឃាត់ខ្លួនត្រូវបានបំពេញ និងចុះហត្ថលេខា។

សាមីខ្លួនត្រូវបញ្ជូនទៅចំពោះមុខចៅក្រម (ព្រះរាជអាជ្ញា ឬចៅក្រមស៊ើបសួរអាស្រ័យទៅតាមករណី) រយៈពេលបន្ថែមអាចត្រូវបានផ្តល់ឱ្យ (មាត្រា ១០៤ នៃក្រមនីតិវិធីព្រហ្មទណ្ឌ) ដោយយោងទៅលើទីកន្លែងនៅឆ្ងាយ ឬការលំបាកក្នុងការដឹកជញ្ជូន។ ត្រូវបន្ថែមរយៈពេលសមរម្យ ប៉ុន្តែត្រូវតែបង្ហាញខ្លួនសាមីខ្លួន ក្នុងថេរវេលាខ្លីបំផុត។

## ២.៣. ការកម្រិតលទ្ធភាពឃាត់ខ្លួន

### ២.៣.១. ការកម្រិតលទ្ធភាពឃាត់ខ្លួនចំពោះតែជនសង្ស័យប៉ុណ្ណោះ

តាមន័យនៃមាត្រា ៩៦ នៃក្រមនីតិវិធីព្រហ្មទណ្ឌ មន្ត្រីនគរបាលយុត្តិធម៌អាចឃាត់ខ្លួនបុគ្គលដែលសង្ស័យថាបានចូលរួមក្នុងបទល្មើស។ ពោលគឺជនដែលសង្ស័យថាបានប្រព្រឹត្តបទល្មើស ឬប៉ុនប៉ងប្រព្រឹត្តបទល្មើស ។ តាមធម្មតា មិនមែនជាសាក្សីធម្មតាដែលមិនមានមូលហេតុ សង្ស័យថាបានប្រព្រឹត្តបទល្មើស។

ក្រមនីតិវិធីព្រហ្មទណ្ឌមិនតម្រូវឱ្យឃាត់ខ្លួនជនដែលគួរឱ្យសង្ស័យខាំងនោះទេ ប៉ុន្តែ ការឃាត់ខ្លួនអាចធ្វើបាន ទោះបីជាមានការសង្ស័យតិច បច្រើនកដោយ គឺអាស្រ័យលើភាពចាំបាច់នៃការស៊ើបអង្កេត ឬការស៊ើបសួរ។

ដោយហេតុថាមិនមានអត្ថបទច្បាប់ចែងផ្សេងពីនេះ គេអាចគិតថាជាការសង្ស័យផ្នែកសំភារៈ ឬសង្ស័យលើតតិយជន (ជនរងគ្រោះ បសាក្សី) ចម្លើយសាមីខ្លួនដែលផ្ទុយទៅនឹងការពិនិត្យកត់ត្រារបស់អ្នកស៊ើបអង្កេត ឬអាចជាវត្ថុមានរបស់ជនដែលនៅកន្លែងកើតហេតុ។

### ២.៣.២. លទ្ធភាពឃាត់សាក្សី

មាត្រា ៩៦ នៃក្រមនីតិវិធីព្រហ្មទណ្ឌអនុញ្ញាតឱ្យ មន្ត្រីនគរបាលយុត្តិធម៌ឃាត់ខ្លួនបុគ្គលដែលអាចផ្តល់ព័ត៌មានស្តីអំពីរឿងហេតុបាន។ តែឃាត់ខ្លួននេះត្រូវគោរពតាមលក្ខខណ្ឌ ២ ដែលមានចែងក្នុង ~~មាត្រា ៩៦~~ ពុំនោះសោតនឹងនាំឱ្យមានមោឃៈភាព :

-បុគ្គលដែលគេគិតថាអាចផ្តល់ព័ត៌មានអំពីរឿងហេតុប្រកែកមិនព្រមផ្តល់ព័ត៌មាន

-មានការយល់ព្រមជាលាយលក្ខណ៍អក្សរឱ្យធ្វើការឃាត់ខ្លួនពីព្រះរាជអាជ្ញា។

ការឃាត់ខ្លួនមានថិរវេលាអតិបរមា ៤៨ (សែសិបប្រាំបី) ម៉ោង ហើយអាចពន្យារបាន។ ថិរវេលាត្រូវចាប់គិតពីម៉ោងដែលសាមីខ្លួនមក ដល់អង្គភាពនគរបាល។

កាលណាមានមូលហេតុដែលបង្ហាញថា

បុគ្គលដែលឃាត់ខ្លួនបានចូលរួមប្រព្រឹត្តបទល្មើស។មន្ត្រីនគរបាល យុត្តិធម៌អាចពន្យារពេលឃាត់ខ្លួនបាន ២៤ (ម្ភៃបួន) ម៉ោង។

**២.៣.៣. ភាពមិនអាចធ្វើទៅបានជាប់ពាក់ព័ន្ធនឹងឋានៈរបស់សាមីខ្លួន**

**២.៣.៣.១. សមាជិកសភា**

សមាជិកសភាត្រូវបានការពារដោយអភ័យឯកសិទ្ធិចែងក្នុងមាត្រា ៨០ នៃរដ្ឋធម្មនុញ្ញ និងមាត្រា ១០៤ ថ្មីនៃក្រមចុះថ្ងៃ ៨ មីនា ១៩៩៩ (មាត្រា ៦១១ នៃក្រមនីតិវិធីព្រហ្មទណ្ឌមិនបានលុបចោលក្រមនេះទេ)។ ក៏ប៉ុន្តែក្នុងករណីបទឧក្រិដ្ឋ ឬបទមជ្ឈិមជាក់ស្តែង គេត្រូវអនុវត្តនីតិវិធីពិសេសដែលកំណត់ដោយអត្ថបទច្បាប់ទាំងនេះ។ កាលណាជនម្នាក់មានឋានៈជាសមាជិកសភា មន្ត្រីនគរបាលយុត្តិធម៌ត្រូវតែជូនដំណឹងឋានានុក្រម និងព្រះរាជអាជ្ញាជាបន្ទាន់ ហើយធ្វើតាមការណែនាំរបស់ពួកគាត់។

**២.៣.៣.២. អ្នកការទូតបរទេស**

ការហាមឃាត់ ការឃាត់ខ្លួនលាតសន្ធឹងដល់បុគ្គលិកនានាដែលអនុវត្តបេសកកម្មការទូត និងគ្រួសាររបស់ពួកគេ លុះត្រាតែជាអ្នកការទូតដែលត្រូវបានទទួលស្គាល់ដោយព្រះរាជាណាចក្រកម្ពុជា។ មន្ត្រីនគរបាលយុត្តិធម៌ ត្រូវតែជូនដំណឹងដល់ឋានានុក្រមខ្លួន និងព្រះរាជអាជ្ញាជាបន្ទាន់។

**៣. ការឆែកឆេររាងកាយ**

**៣.១. និយមន័យ**

ឆែកឆេរគឺស្វែងរក រុករក ពិនិត្យយ៉ាងម៉ត់ចត់ ដើម្បីរកឃើញនូវអ្វីមួយដែលគេលាក់។

**៣.២. ការឆែកឆេររាងកាយបុគ្គល**

**៣.២.១. តាមផ្លូវតុលាការ : ការឆែកឆេររាងកាយ**

ការឆែកឆេរគឺជាកិច្ចមួយរបស់នគរបាលយុត្តិធម៌ដែលមានចរិតបង្ខិតបង្ខំ ហើយអាចសំអាងហេតុបានលុះត្រាតែមានក្របខ័ណ្ឌស៊ើបអង្កេតជាមុនសិន។ គោលដៅនៃការឆែកឆេររាងកាយគឺដូចគ្នាទៅនឹងការឆែកឆេរ លំនៅដ្ឋានដែរ ដូចជាស្វែង រកតម្រុយវត្ថុ ឬឯកសារផ្សេងៗដែលអនុញ្ញាតឱ្យបង្កើតអត្ថិភាពបទល្មើសមួយ។ ការឆែកឆេររាងកាយអាចត្រូវធ្វើឡើងលើបុគ្គលគ្រប់រូបដែលទំនងជាបានចូលរួមក្នុងបទឧក្រិដ្ឋ ឬមជ្ឈិម ឬកាន់កាប់នូវលិខិតស្នាមទាក់ទងនឹងអំពើត្រូវចោទប្រកាន់ (ក្នុងករណីនេះ សញ្ញាណតែមួយនៃការឆែកឆេររាងកាយត្រលប់ទៅរកនិយមន័យនៃការឆែកឆេរលំនៅដ្ឋានក្នុងមាត្រា ៩១ នៃក្រមនីតិវិធីព្រហ្មទណ្ឌ និងស្ថិតនៅក្នុងការពិនិត្យកត់ត្រាដូចមានចែង ក្នុងមាត្រា ៧១ នៃក្រមនិតិវិធីព្រហ្មទណ្ឌ)។

**បុគ្គល ៖**

តើអ្នកណាខ្លះដែលអាចត្រូវបានឆែកឆេររាងកាយ?

បើសិន គេវិភាគគោលបំណងនៃប្រតិបត្តិការ បុគ្គលគ្រប់រូបអាចនឹងត្រូវបានឆែកឆេរ ។

ជាការសមហេតុផលដែលអាចមានករណីដោយឡែក ឧទាហរណ៍ ការឆែកឆេររាងកាយបុគ្គលម្នាក់ដែលមានភេទផ្ទុយគ្នា អនីតិជន ឬបុគ្គលម្នាក់ក្នុងស្ថានភាពស្រវឹង ។ល។

**ទីកន្លែង ៖**

ការឆែកឆេររាងកាយមានគោលបំណងដៅស្វែងរកតម្រុយ វត្ថុដែលមានទំនាក់ទំនងតិច ឬច្រើនទៅនឹងកន្លែងកើតហេតុក្នុងក្របខ័ណ្ឌស៊ើបអង្កេតណាមួយ ។ ជាការសមហេតុផលដែលគេអាចរកឃើញធាតុផ្សំប្រភេទនេះលុះត្រា តែធ្វើការស្រាវជ្រាវយ៉ាងម៉ត់ចត់ ។ ដើម្បីធ្វើកិច្ចនេះ បុគ្គលដែលត្រូវឆែកឆេររាងកាយត្រូវបានសម្រាតសំលៀក បំពាក់ បើសិនចាំបាច់ ដើម្បីធ្វើការពិនិត្យស៊ីជំរៅលើសំលៀកបំពាក់ និងរាងកាយ (ឧទាហរណ៍ ការស្វែង រកស្នាមចាក់ម្ជុលលើអ្នកប្រើប្រាស់គ្រឿងញៀនម្នាក់សំដៅបង្ហាញថាជននេះបានប្រើប្រាស់គ្រឿងញៀន ឬស្នាម ប្រយុទ្ធដែលអាចឱ្យគេកំណត់ថាសាមីខ្លួនបានចូលរួមក្នុងការវាយតប់មួយ...) ។

ការសន្និដ្ឋានដែលគេត្រូវទាញចេញអំពីធាតុទាំងនេះ គឺថាការឆែកឆេររាងកាយត្រូវធ្វើឡើងក្នុងទីកន្លែងមួយបិទជិត ។ ទោះជាកន្លែងដែលត្រូវធ្វើការឆែកឆេរនោះជាលំនៅដ្ឋាន ឬជាទីស្នាក់ការនគរបាលក៏ដោយ (គួរអោយកត់សំគាល់ផងដែរថា ការចូលទៅកាន់កន្លែងឆែកឆេរត្រូវធ្វើឡើងនៅក្នុងម៉ោងស្របច្បាប់) ។ ការឆែក ឆេររាងកាយដែលធ្វើឡើងក្នុងកន្លែងសាធារណៈ ឬក្នុងកន្លែងមួយដែលដោយគ្មានចាត់វិធានការណ៍បង្ការការពារ ភាពអាម៉ាស់របស់បុគ្គល និងការសំងាត់នៃការស៊ើបអង្កេត សមត្ថកិច្ចដែលធ្វើការឆែកឆេរនោះនឹងត្រូវទទួល ខុសត្រូវដោយផ្ទាល់ ។

**អត្ថបទច្បាប់ ៖**

ការឆែកឆេររាងកាយតាមផ្លូវតុលាការ មិនត្រូវបានចែងក្នុងអត្ថបទច្បាប់នៃក្រមនីតិវិធីព្រហ្មទណ្ឌឡើយ ប៉ុន្តែដោយសារតែ ការឆែកឆេរនេះដូចទៅនឹងការឆែកឆេរលំនៅដ្ឋាននោះ (ខាងលើ) ដូច្នេះយើងអាចអនុវត្តបទបញ្ជានៃមាត្រាដែលកំណត់វិធានការចំពោះក្របខ័ណ្ឌស៊ើបអង្កេតខុសៗគ្នា ដើម្បីសំអាងហេតុដល់ស៊ើបអង្កេតប្រភេទនេះ ។ គួរអោយធ្វើការកត់សំគាល់ផងដែរថា គោលការណ៍នៃមាត្រា ៩១ នៃក្រមនីតិវិធីព្រហ្មទណ្ឌ

(ការគោរពម៉ោងស្របច្បាប់) ត្រូវអនុវត្តចំពោះការចូលក្នុងទីកន្លែងមួយ មិនមែនចំពោះការឆែកឆេររាងកាយនោះទេ។

បទល្មើសជាក់ស្តែង : មាត្រា ៩២ នៃក្រមនិតិវិធីព្រហ្មទណ្ឌ :

"មន្ត្រីនគរបាលយុត្តិធម៌អាចរឹបអូសវត្ថុតាងបាន» ។

ចំពោះការស៊ើបអង្កេតបឋម និងការអនុវត្តដីកាចាត់ឱ្យស៊ើបសួរជំនួស ក្រមនីតិវិធីព្រហ្មទណ្ឌយោងទៅមាត្រានានានៃបទល្មើសជាក់ស្តែង។ ទោះបីជាការឆែកឆេររាងកាយដូចទៅនឹងការឆែកឆេរលំនៅដ្ឋានក៏ដោយក៏គេត្រូវទទួលបានការយល់ព្រមជាមុនពីសាមីខ្លួនដែរ។

- បុគ្គលដែលមានគុណសម្បត្តិ :

យោងលើក្របខ័ណ្ឌស៊ើបអង្កេត បុគ្គលដែលអាចធ្វើការឆែកឆេរលំនៅដ្ឋាន ក៏មានសិទ្ធិធ្វើការឆែកឆេររាងកាយបានដែរ។ ក្នុងក្របខ័ណ្ឌគតិយុត្តិណាក៏ដោយ បុគ្គលនោះគឺជាមន្ត្រីនគរបាលយុត្តិធម៌។

ករណីពិសេសនៃការឆែកឆេររាងកាយ :

ការឆែកឆេររាងកាយត្រូវតែអនុវត្តដោយបុគ្គលម្នាក់ដែលមានភេទដូចគ្នានឹងជនសង្ស័យ។

- អនីតិជន :

គ្មានអ្វីរារាំងមិនអោយមានការឆែកឆេររាងកាយលើអនីតិជននោះទេ។ ប៉ុន្តែ គេត្រូវតែជូនដំណឹងទៅតំណាងស្របច្បាប់របស់អនីតិជន អំពីលទ្ធផលនៃការឆែកឆេរ ជាពិសេសក្នុងករណីដែលលទ្ធផលនោះមានលក្ខណៈវិជ្ជមាន។

-ការឆែកឆេរលំនៅដ្ឋានដែលប្រព្រឹត្តទៅក្នុងការិយាល័យមេធាវី និងសហគ្រាសសារព័ត៌មានត្រូវស្ថិតនៅក្រោមបទបញ្ជាដោយឡែក (មាត្រា ៩១ នៃក្រមនីតិវិធីព្រហ្មទណ្ឌ)។

ច្បាប់បានការពារទីកន្លែងមួយចំនួន និងពន្លាតការការពារនោះរហូតដល់បុគ្គលដែលស្ថិតទីនោះផងក្នុងករណីនេះ ការឆែកឆេរត្រូវធ្វើឡើង ដោយចៅក្រមម្នាក់ ចំពោះមុខតំណាងមេធាវី ឬអង្គការវិជ្ជាជីវៈ។

ក្រៅពីករណីទាំងអស់នេះ បើសិនជាការស៊ើបអង្កេតនាំឱ្យឆែកឆេររាងកាយ បុគ្គលណាម្នាក់ ឧទាហរណ៍នៅពេលជូនដំណឹងពីការឃាត់ខ្លួន ការឆែកឆេរនោះត្រូវគោរពទៅតាមបទប្បញ្ញត្តិនៃនីតិរូបនៃក្រមនីតិវិធីព្រហ្មទណ្ឌ។

## ៣.២.២. ការឆែកឆេររដ្ឋបាល

### ៣.២.២.១.ការឆែកឆេរសុវត្ថិភាព

ការឆែកឆេរសុវត្ថិភាព គឺជាប្រតិបត្តិការមួយដែលមានលក្ខណៈរដ្ឋបាលនិងមានគោលដៅខុសប្លែកពីការឆែកឆេររាងកាយទាំងស្រុង ឧទាហរណ៍មានដូចជា : ការស្វែងរក និងដកហូតយកនូវវត្ថុដែលអាចធ្វើអោយមានគ្រោះថ្នាក់ដល់សាមីជន និងអ្នកដទៃ។ ការឆែកឆេរនេះ ក៏ជាប្រតិបត្តិការមួយដែលនាយប៉ុស្តិ៍ធានាថាសាមីជនអាចឱ្យគេឃុំខ្លួន នៅក្នុងកន្លែងធម្មតា (បុគ្គលម្នាក់ក្នុងស្ថានភាពស្រវឹងខ្លាំង នៅទីសាធារណៈ ការឃុំខ្លួននៅក្នុងពន្ធនាគារ ការឃុំខ្លួនមុនបញ្ជូនទៅចំពោះមុខចៅក្រម)។ ការឆែកឆេរនេះអាចត្រូវបានធ្វើឡើង ដោយមន្ត្រីនគរបាលយុត្តិធម៌ ឬភ្នាក់ងារនគរបាលយុត្តិធម៌។

ក្នុងករណីរកឃើញវត្ថុគ្រោះថ្នាក់ ឬអាចបង្កអោយមានគ្រោះថ្នាក់ផ្សេងៗ វត្ថុទាំងនោះនឹងត្រូវរឹបអូសទុកដោយឡែកទៅតាមច្បាប់។

ក្នុងករណីរកឃើញតម្រុយដែលអាចទាក់ទងនឹងការស៊ើបអង្កេត វត្ថុទាំងនោះនឹងត្រូវរឹបអូសដោយមន្ត្រីនគរបាលយុត្តិធម៌ ក្នុងក្របខ័ណ្ឌស្រាវជ្រាវទាំងនេះ។

ទីកន្លែង : គ្រប់ទីកន្លែង។

### ៣.២.២.២. ការស្ទាបសុវត្ថិភាព

ការស្ទាបសុវត្ថិភាព គឺជាវិធានការណ៍នគរបាលមួយ ដែលអាចអនុវត្តដោយមន្ត្រីនគរបាលយុត្តិធម៌ ឬភ្នាក់ ងារនគរបាលយុត្តិធម៌ ឬដោយពលរដ្ឋសាមញ្ញណាម្នាក់ដែលបានចាប់ខ្លួនចារីសទ្ធត់ម្នាក់នៃបទល្មើសជាក់ស្តែង។ តាមរយៈប្រតិបត្តិការនេះ អាវុធ ឧបករណ៍សម្រាប់ទំលុះទំលាយ ។ល។ ដែលត្រូវបានរកឃើញនឹងត្រូវទុកមួយឡែក សម្រាប់ប្រគល់ជូនមន្ត្រីនគរបាលយុត្តិធម៌ដើម្បីធ្វើការរឹបអូសតាមផ្លូវតុលាការអោយបានត្រឹមត្រូវតាម ទម្រង់ច្បាប់។

## ៣.៣. ការឆែកឆេរយានជំនិះ

រំលឹក : យានជំនិះមិនមែនជាលំនៅដ្ឋាន ហើយក៏មិនមែនជាផ្នែកមួយនៃលំនៅដ្ឋានដែរ ដូចនេះការឆែកឆេរយានជំនិះមិនអាចដូចគ្នាទៅនឹងការឆែកឆេរលំនៅដ្ឋាន ពីព្រោះថាមិនស្ថិតក្រោមកំហិតនៃមាត្រា ៩១ និងបន្តបន្ទាប់នៃក្រមនីតិវិធីព្រហ្មទណ្ឌ។

ករណី២អាចកើតឡើង :

១) យានជំនិះស្ថិតក្នុងបរិវេណលំនៅដ្ឋានមួយ (យានដ្ឋាន ជីមានរបង ។ល។) ធាតុសំខាន់ក្នុងសម្ពតិកម្មនោះ គឺត្រូវចូលក្នុងទីកន្លែងក្នុងម៉ោងស្របច្បាប់ ពុំនោះសោតនឹងត្រូវទុកជាមោឃៈ លើកលែងតែមានវិធានដោយឡែក (ឧទាហរណ៍ ក្នុងក្របខ័ណ្ឌបទល្មើសជាក់ស្ដែង ឬការជួញដូរគ្រឿងញៀន)។ យានជំនិះនឹងត្រូវចាត់ទុកជារាប់បញ្ចូលជាផ្នែកមួយនៃលំនៅដ្ឋាន ដូច្នេះវាត្រូវធ្វើជាកម្មវត្ថុនៃការឆែកឆេរដូចផ្នែកផ្សេងៗនៃទីកន្លែងដែរ។

២) យានជំនិះនៅលើផ្លូវសាធារណៈ : ក្នុងករណីជាក់លាក់នេះ ការស៊ើបអង្កេតរបស់តុលាការទោះបីតាមរបៀបស៊ើបអង្កេតណាក៏ដោយ ត្រូវធ្វើឡើងក្រោមទម្រង់នៃការឆែកឆេរមួយដែលមិនគោរពម៉ោងស្របច្បាប់។

- វត្តមានបុគ្គលនានា

អវត្តមានជនសង្ស័យនឹងមិនបង្កនូវមោឃៈភាពនៃកិច្ចនេះឡើយ ដោយហេតុថាមាត្រានៃក្រមនិតិវិធីព្រហ្មទណ្ឌបានចែងវិធានចំពោះការឆែកឆេរលំនៅដ្ឋាន តែមិនមែនចំពោះការឆែកឆេរយានជំនិះទេ។

អត្ថបទច្បាប់មិនបានតំរូវឱ្យមន្ត្រីនគរបាលយុត្តិធម៌ធ្វើប្រតិបត្តិការចំពោះមុខសាម៉ីខ្លួនទេទាល់តែសោះ ប៉ុន្តែគេនិយមធ្វើបែបនេះ។

ក្នុងករណីមានមន្ទិល ឬករណីពិសេស មន្ត្រីនគរបាលយុត្តិធម៌អាចជម្រាបជូនដំណឹងទៅចៅក្រមមានសមត្ថកិច្ច ហើយអនុវត្តតាមសេចក្ដីបង្គាប់បញ្ជារបស់គាត់។

ទីបញ្ចប់ ត្រូវបញ្ជាក់ថាក្នុងករណីលទ្ធផលឆែកឆេរវិជ្ជមាន វត្តមានជនសង្ស័យគឺពិតជាមានប្រយោជន៍ ដោយហេតុថាគេអាចចំណាំវត្ថុដែលត្រូវរឹបអូសបានស្រួល ហើយគេក៏មិនសង្ស័យថាមន្ត្រីនគរបាលមិនស្មោះត្រង់ឡើយ។

ការពិនិត្យយាន្តជំនិះ គឺជាការពិនិត្យ និងកត់ហេតុខាងក្នុងរថយន្ត។ ប្រតិបត្តិការនេះមិនមែនជាការស្រាវជ្រាវម៉ត់ចត់ និងស៊ីជម្រៅដែលធ្វើឡើងដោយអ្នកបច្ចេកទេសគ្រឿងយន្តដែលទទួលបានអំណាចពីមន្ត្រីនគរបាលយុត្តិធម៌នោះទេ។

**១.ការឆែកឆេរ**

ការឆែកឆេរមានគោលបំណងស្វែងរក និងរឹបអូសធាតុសត្យានុកូលនៃភស្តុតាង ឬធាតុសត្យានុកូលប្រៀបធៀប។

ការឆែកឆេរនេះផ្តោតជាពិសេសលើការ**ស្វែងរក** :

-អាវុធ ឧបករណ៍ សម្ភារៈ ឬវត្ថុផ្សេងៗដែលបានបម្រើឱ្យការប្រព្រឹត្តបទល្មើស

-ផលនៃបទល្មើស (ផលចោរកម្ម គ្រឿងញៀន...)

-ភស្តុតាងជាលាយលក្ខណ៍អក្សរ (សំបុត្រ ឯកសារ ប្លង់ កូនសៀវភៅ នាមប័ណ្ណ និទានុលេខ...) ដែលអាចផ្តល់នូវការចង្អុលបង្ហាញដ៏មានតម្លៃដើម្បីបន្តការស្រាវជ្រាវ

-ធាតុប្រៀបធៀប (ស្បែកជើង ស្រោមដៃ ឧបករណ៍...)

-តម្រុយផ្សេងៗ (ស្នាម ស្លាកស្នាម...)

ការឆែកឆេរ គឺជាប្រតិបត្តិការមួយដែលស្របតាមវិធានច្បាប់ និងវិធានបច្ចេកទេសផ្សេងៗ។

**១.១.វិធានច្បាប់**

វិធាននៃការឆែកឆេរត្រូវបានកំណត់ :

-ចំពោះ**បទឧក្រិដ្ឋ ឬមជ្ឈិមជាក់ស្តែង** ដោយមាត្រា ៩១ នៃក្រមនីតិវិធីព្រហ្មទណ្ឌ

-ចំពោះ**ការស៊ើបអង្កេតបឋម** ដោយមាត្រា ១១៣ នៃក្រមនីតិវិធីព្រហ្មទណ្ឌ

-ចំពោះការអនុវត្ត**ដីកាចាត់ឱ្យស៊ើបសួរជំនួស** ដោយមាត្រា ១៨១ នៃក្រមនីតិវិធីព្រហ្មទណ្ឌដែលយោងទៅមាត្រា ៩១ ទាក់ទងបទល្មើសជាក់ស្តែង។

វិធានទាំងនេះ ចង្អុលបង្ហាញពីបុគ្គលទាំងឡាយដែលមានសម្បទាធ្វើការឆែកឆេរ ប្រាប់ពីបុគ្គលដែលត្រូវចូលរួមក្នុងការឆែកឆេរ បញ្ជាក់ពីការយល់ព្រមចាំបាច់ជាមុន ក៏ដូចជាកាលៈទេសៈ និងទីកន្លែង ព្រមទាំងពេលវេលាប្រព្រឹត្តទៅនៃការឆែកឆេរនេះ។

**១.១.១. អ្នកចូលរួម**

**១.១.១.១. តើអ្នកណាអាចធ្វើការឆែកឆេរបាន ?**

ទោះបីជានៅក្នុងក្របខ័ណ្ឌគតិយុត្តណាក៏ដោយ មានតែមន្ត្រីដែលមានគុណសម្បត្តិជាមន្ត្រីនគរបាល

យុត្តិធម៌ទេ ដែលមានសិទ្ធិធ្វើដំណើរការឆែកឆេរបាន ។

ចំពោះការស៊ើបអង្កេតបឋម ក្នុងករណីអ្នកកាន់កាប់ទីកន្លែងបដិសេធ មានតែព្រះរាជអាជ្ញាប៉ុណ្ណោះដែលអាចធ្វើការឆែកឆេរបាន ដោយសុំការអនុញ្ញាតជាមុនពីប្រធានសាលាដំបូង ។

តាមភាពជាក់ស្តែង ការឆែកឆេរត្រូវធ្វើឡើងដោយអ្នកស៊ើបអង្កេតមួយក្រុមដែលមានភ្នាក់ងារនគរបាល យុត្តិធម៌ចូលរួមផងដែរ ប៉ុន្តែប្រតិបត្តិការនេះនៅតែស្ថិតក្រោមការទទួលខុសត្រូវរបស់មន្ត្រីនគរបាលយុត្តិធម៌ដែល ដឹកនាំការស៊ើបអង្កេតផងដែល ហើយកំណត់ហេតុត្រូវចុះឈ្មោះជននេះ ។

### ១.១.១.២. អ្នកត្រូវមានវត្តមានពេលឆែកឆេរ

តាមគោលការណ៍ ការឆែកឆេរត្រូវតែធ្វើឡើងនៅចំពោះមុខ **ជនដែលកាន់កាប់កន្លែងដែលត្រូវឆែកឆេរ** ។

ចំពោះបទល្មើសជាក់ស្តែង នៅពេលដែលសាមីជនអវត្តមាន ការឆែកឆេរអាចត្រូវបានធ្វើឡើងចំពោះមុខ **សាក្សីពីរនាក់**ទាមទារដោយមន្ត្រីនគរបាលយុត្តិធម៌ ហើយមិនស្ថិតក្រោមឱវាទអាជ្ញាធររដ្ឋបាលរបស់មន្ត្រីនគរបាល យុត្តិធម៌ឡើយ ( មាត្រា ៩១ កថាខណ្ឌទី២ នៃក្រមនីតិវិធីព្រហ្មទណ្ឌ ។

ចំពោះការស៊ើបសួរបឋម ក្នុងករណីដែលអ្នកកាន់កាប់ទីកន្លែងបដិសេធ ការឆែកឆេរត្រូវធ្វើឡើងដោយព្រះរាជអាជ្ញា នៅចំពោះអ្នកកាន់កាប់ទីកន្លែង និងសាក្សី ២ នាក់ជ្រើសរើសដោយព្រះរាជអាជ្ញា។ សាក្សីមិន អាចជានគរបាល ឬជាកងរាជអាវុធហត្ថ ដែលចូលរួមក្នុងប្រតិបត្តិការឆែកឆេរនោះឡើយ ។

ចំពោះការអនុវត្តដីកាចាត់ឱ្យស៊ើបសួរជំនួស ត្រូវអនុវត្តវិធានដូចករណីបទល្មើសជាក់ស្តែងដែរ គឺត្រូវមានការយល់ព្រមជាមុនពីចៅក្រមស៊ើបសួរ ។

ការឆែកឆេរក្នុងការិយាល័យមេធាវីត្រូវស្ថិតក្រោមវិធានដោយឡែក : ( ការឆែកឆេរត្រូវធ្វើឡើងដោយចៅក្រមម្នាក់ ចំពោះមុខមេធាវី ឬប្រធានគណៈមេធាវី ឬតំណាងប្រធានគណៈមេធាវី) ។

បន្ទប់សារព័ត៌មានត្រូវបានឆែកឆេរដោយចៅក្រម ( មាត្រា ៩១ កថាខណ្ឌចុងក្រោយនៃក្រមនីតិវិធីព្រហ្មទណ្ឌ) ។

### ១.១.១.៣. ការយល់ព្រមជាមុនដែលមានលក្ខណៈចាំបាច់

គេត្រូវបែងចែកការយល់ព្រមនេះទៅតាមក្របខណ្ឌគតិយុត្តិដែលប្រតិបត្តិការធ្វើឡើង :

**ចំពោះបទល្មើសជាក់ស្តែង :**

មន្ត្រីនគរបាលយុត្តិធមិត្រូវទទួលបានការយល់ព្រមជាមុនពីព្រះរាជអាជ្ញានៅពេលចាប់ផ្តើមការឆែកឆេរ ។

មាត្រា ៩១ កថាខណ្ឌទី ១ នៃក្រមនីតិវិធីព្រហ្មទណ្ឌ " មន្ត្រីនគរបាលយុត្តិធមិអាចធ្វើការឆែកឆេរបាន ។ ក្នុងករណីនេះ មន្ត្រីនគរបាលយុត្តិធមិត្រូវទទួលជាបឋមនូវការអនុញ្ញាតពីព្រះរាជអាជ្ញា ទោះបីជាការអនុញ្ញាតដោយផ្ទាល់មាត់ក៏ដោយ ។ "

**ចំពោះការស៊ើបអង្កេតបឋម :**

មន្ត្រីនគរបាលយុត្តិធមិត្រូវទទួលបានការយល់ព្រមជាមុនពីអ្នកកាន់កាប់ទីកន្លែង នៅពេលចាប់ផ្តើមការឆែកឆេរ ។ នីតិវិធីពិសេសត្រូវបានចែង ក្នុងករណីដែលអ្នកកាន់កាប់ទីកន្លែងបដិសេធ ឬអវត្តមាន :

មាត្រា ១១៣ កថាខ័ណ្ឌទី ១ និងមាត្រាបន្ទាប់នៃក្រមនីតិវិធីព្រហ្មទណ្ឌ : " កាលណាការស៊ើបអង្កេតជាបឋម នោះទាក់ទងនឹងបទឧក្រិដ្ឋ ឬបទមជ្ឈិម មន្ត្រីនគរបាលយុត្តិធមិអាចធ្វើការឆែកឆេរ និងចាប់យកវត្ថុតាង ។ មន្ត្រី នគរបាលយុត្តិធមិ ជាបឋមត្រូវទទួលការយល់ព្រមច្បាស់លាស់ និងពិតប្រាកដ ពីអ្នកកាន់កាប់ទីកន្លែង ។ ការយល់ ព្រមនេះត្រូវធ្វើឡើងជាលាយលក្ខណ៍អក្សរ សរសេរដោយផ្ទាល់ដៃរបស់អ្នកកាន់កាប់ទីកន្លែង ។ ប្រសិនបើអ្នកកាន់ កាប់ទីកន្លែងមិនចេះអក្សរ នោះត្រូវសរសេរឱ្យបានច្បាស់លាស់ក្នុងកំណត់ហេតុថា អ្នកកាន់កាប់ទីកន្លែងនោះមិន ចេះអក្សរ ហើយយល់ព្រមឱ្យឆែកឆេរ ។ "

ហើយកថាខ័ណ្ឌទី ៤ បន្តទៀតថា :

" ក្នុងករណីដែលអ្នកកាន់កាប់ទីកន្លែងអវត្តមាន ឬបដិសេធការឆែកឆេរ ប្រធានសាលាដំបូងដែលមានសមត្ថកិច្ចដែនដី អាចចេញដីកាអនុញ្ញាតឱ្យឆែកឆេរ តាមការសុំរបស់ព្រះរាជអាជ្ញា ។ ព្រះរាជអាជ្ញាត្រូវដឹកនាំដោយផ្ទាល់នូវការឆែកឆេរនេះ ។ ការឆែកឆេរ ត្រូវធ្វើនៅចំពោះមុខអ្នកកាន់កាប់ទីកន្លែង ឬបើគ្មានអ្នកកាន់កាប់ទេ ត្រូវធ្វើនៅចំពោះមុខសាក្សីពីរនាក់ ។ សាក្សីត្រូវចាត់តាំងដោយព្រះរាជអាជ្ញា ។ សាក្សីមិនអាចជានគរបាល ឬជាកងរាជអាវុធហត្ថដែលជាកងកម្លាំងរួមប្រតិបត្តិការក្នុងការឆែកឆេរ នោះឡើយ ។ ....»

គ) ចំពោះការអនុវត្តដីការចាត់តាំងឱ្យស៊ើបសួរ :

មន្ត្រីនគរបាលយុត្តិធមត្រូវទទួលបានការយល់ព្រមជាមុនពីចៅក្រមស៊ើបសួរ នៅពេលចាប់ផ្តើមការឆែកឆេរ ។

មាត្រា ១៨១ នៃក្រមនិតិវិធីព្រហ្ម : " មន្ត្រីនគរបាលយុត្តិធមិអាចធ្វើការឆែកឆេរ និងចាប់យកវត្ថុ

តាង នៅក្នុងលក្ខខណ្ឌដែលចែងនៅក្នុងមាត្រា ៩១ (ការឆែកឆេរ) និងមាត្រា ៩២ (ការបិទស្លាកបោះត្រាលើវត្ថុតាង) នៃក្រមនេះ ។ ប៉ុន្តែ ការអនុញ្ញាតដែលមានចែងនៅក្នុងវាក្យខណ្ឌទី ២ កថាខណ្ឌទី ១ មាត្រា ៩១ (ការឆែកឆេរ)

នៃក្រមនេះ ត្រូវតែផ្តល់ឱ្យដោយចៅក្រមស៊ើបសួរ ។"

សម្គាល់ : ដីកាចាត់តាំងឱ្យស៊ើបសួរត្រូវតែជាដីកាពិសេស និងមិនមែនជាដីកាទូទៅ ចៅក្រមស៊ើបសួរមាន ករណីយកិច្ចបញ្ជាក់ជាមុនពីការឆែកឆេរដែលចង់ធ្វើដើម្បីបន្តការស៊ើបសួរ ។

### ១.១.២. កាលៈទេសៈទីកន្លែង និងពេលវេលា

### ១.១.២.១. កតព្វកិច្ចទាក់ទងនឹងទីកន្លែង

ការឆែកឆេរមិនមែនអាចធ្វើបានតែនៅក្នុងលំនៅដ្ឋានរបស់បុគ្គលគ្រប់រូបដែលត្រូវសង្ស័យថាបានចូលរួមក្នុងការប្រព្រឹត្តបទឧក្រិដ្ឋ ឬមជ្ឈិមប៉ុណ្ណោះទេ ប៉ុន្តែក៏អាចនៅក្នុងលំនៅដ្ឋានរបស់បុគ្គលគ្រប់រូបដែលត្រូវសង្ស័យថា កាន់កាប់លិខិត វត្ថុ ឬឯកសារផ្សេងៗដែលទាក់ទងនឹងរឿងហេតុដែលចោទប្រកាន់ ។

គួរកត់សម្គាល់ថាមន្ត្រីនគរបាលយុត្តិធម៌មិនអាចចូលទៅក្នុងកន្លែងមួយចំនួនបានឡើយ លើកលែងតែមាន កាលៈទេសៈ និងទម្រង់ការដ៏ច្បាស់លាស់ **ពាក្យច្បាប់នេះទាក់ទងនឹងជាពិសេសទៅនឹង :**

**១) ស្ថានទូត និងកន្លែងការទូត**

តាមមាត្រា ២២ និង៣០ នៃអនុសញ្ញាក្រុងវីយែន (Vienne) ចុះថ្ងៃទី ១៨ មេសា ១៩៦១ កន្លែងស្ថានទូត និងលំនៅដ្ឋានឯកជនរបស់ភ្នាក់ងារការទូតគឺមិនអាចរំលោភបានឡើយ នគរបាលអាចចូលទៅកាន់ទីកន្លែងទាំងនោះបាន លុះត្រាតែ**មានសេចក្តីសន្និដ្ឋានស៊ើបសួរជាលាយលក្ខណ៍អក្សរពីប្រធានបេសកកម្ម** ។

តាមច្បាប់អន្តរជាតិ ស្ថានទូតមួយត្រូវបានចាត់ទុកជាដែនដីបរទេស ។

ជាទូទៅនៅក្នុងស្ថានទូតមួយ មានភ្នាក់ងារការទូតជាច្រើន ។ ដើម្បីទទួលបានភាពមិនអាចរំលោភបាន ពួកគេត្រូវមានលិខិតឆ្លងដែនការទូតមួយច្បាប់ចេញដោយប្រទេសរបស់ខ្លួន អត្តសញ្ញាណប័ណ្ណការទូតមួយច្បាប់ចេញដោយក្រសួងការបរទេសកម្ពុជា ។ អត្តសញ្ញាណប័ណ្ណនេះបញ្ជាក់ ក្រសួងការបរទេសកម្ពុជាបានយល់ព្រមផ្តល់ភាពមិនអាចរំលោភបានដល់ភ្នាក់ងារការទូត ដើម្បីបំពេញបេសកកម្មរបស់ខ្លួននៅប្រទេសកម្ពុជា ។

**២) រដ្ឋសភា**

វិធានពិសេសផ្សេងៗមួយផ្នែកត្រូវបានចែងដោយរដ្ឋធម្មនុញ្ញ ( មាត្រា ៨០ ស្ដីអំពីតំណាងរាស្ត្រ) និងមួយផ្នែកទៀតដោយក្រមចុះថ្ងៃទី ៨ មីនា ឆ្នាំ ១៩៩៩ ( មាត្រា ១០៤ ថ្មីស្ដីអំពីសមាជិកព្រឹទ្ធសភា) ។

**៣) បន្ទប់សាកលវិទ្យាល័យ**

ក្រៅពីករណីបទល្មើសជាក់ស្ដែង អគ្គីភ័យ គ្រោះទឹកជំនន់ ភាពចាំបាច់ត្រូវផ្ដល់ការជួយសង្គ្រោះ ឬករណីមានការស្រែកសុំឱ្យជួយពីក្នុងទីកន្លែង មន្ត្រីនគរបាលយុត្តិធម៌ត្រូវតែសុំសេចក្ដីណែនាំពិសេសពីឋានានុក្រមរបស់មុននឹងធ្វើអន្តរាគមន៍។

**៤) កន្លែងដែលទទួលបានការការពារជាពិសេស ( មាត្រា ៩១ នៃក្រមនីតិវិធីព្រហ្មទណ្ឌ)**

កន្លែងទាំងនោះគឺ :

-ការិយាល័យមេធាវី

-សហគ្រាសសារព័ត៌មាន និងសហគ្រាសទំនាក់ទំនងសោត-ទូរទស្សន៍

**សំគាល់ : គ្រឹះស្ថានយោធា** : មន្ត្រីនគរបាលយុត្តិធម៌ត្រូវតែសុំអាជ្ញាធរ**យោធា**ជាមុនដើម្បីទទួលការអនុញ្ញាតចូលតាមគោលការណ៍ ប្រតិបត្តិការទាំងនេះត្រូវធ្វើឡើងដោយកងរាជអាវុធហត្ថដែលមានសមត្ថកិច្ចដោយឡែកសម្រាប់បទល្មើសយោធា ( មាត្រា ៨១ នៃក្រមនីតិវិធីព្រហ្មទណ្ឌ) ។

**១.១.២.២. កតព្វកិច្ចទាក់ទងនឹងពេលវេលា**

មាត្រា ៩១ កថាខណ្ឌទី ៣នៃក្រមនិតិវិធីព្រហ្មទណ្ឌចែងថាការឆែកឆេរមិនអាចផ្ដើម**មុនម៉ោង៦ ( ប្រាំមួយ) ព្រឹក និងបញ្ចប់ក្រោយម៉ោង ១៨ (ដប់ប្រាំបី) ល្ងាចបានឡើយ** ។ ប៉ុន្តែ ការឆែកឆេរមួយដែលធ្វើឡើងក្នុងរយៈពេលស្របច្បាប់អាចបន្តនៅក្រោយម៉ោង ១៨ និងបន្តរហូតដល់ចប់ប្រតិបត្តិការ ។

ភាពមិនអាចរំលោភបាននៃលំនៅដ្ឋានពលរដ្ឋនៅពេលយប់គឺជាគោលការណ៍ដាច់ខាតដែលមាន ករណីលើកលែងតិចតួចចែង ក្នុងមាត្រា ៩១ : "មន្ត្រីនគរបាលយុត្តិធម៌ មិនអាចផ្ដើមធ្វើការឆែកឆេរមុនម៉ោង ៦ ( ប្រាំមួយ) ព្រឹក និងក្រោយម៉ោង ១៨ (ដប់ប្រាំបី) បានឡើយ លើកលែងតែ :

-ក្នុងករណីដែលមានចែងដោយមាត្រា ៨៦ (និយមន័យបទឧក្រិដ្ឋ ឬបទមជ្ឈិមជាក់ស្ដែង) នៃក្រមនេះ

-ក្នុងករណីដែលចែងដោយមាត្រា ៨៨ ( ការចាត់ទុកដូចជាបទឧក្រិដ្ឋ ឬបទមជ្ឈិមជាក់ស្ដែង) នៃក្រមនេះ

-ក្នុងករណីមានសំរែកស្រែកឱ្យគេជួយពីក្នុងទីកន្លែង

-ក្នុងករណីឆែកឆេរនៅទីកន្លែងក្នុងពេលម៉ោងដែលបើកចំហដល់សាធារណជន

-ក្នុងករណីឆែកឆេរនៅគ្រប់ទីកន្លែងដែលផលិត រក្សាទុក ជួញដូរ ចែកចាយ ប្រើប្រាស់គ្រឿងញៀន ។"

**១.២. វិធានបច្ចេកទេស**

**១.២.១. ដំណាក់កាលបឋម្មង**

ក្នុងការស៊ើបអង្កេតមួយ ការឆែកឆេរមានភាពចាំបាច់ និងខានមិនបានឡើយ កាលណាការឆែកឆេរនេះត្រូវបានសម្រេច គេត្រូវតែធ្វើឱ្យបានលឿនបំផុតតាមដែលអាចធ្វើទៅបាន ។ គេត្រូវតែអនុវត្តវិធាននេះយ៉ាងតឹងរ៉ឹង កាលណាគេត្រូវធ្វើការឆែកឆេរក្នុងលំនៅដ្ឋានសាមីខ្លួន បន្ទាប់ពីបានចាប់ខ្លួនបុគ្គលនេះនៅតាមផ្លូវសាធារណៈ ឬ សួរចម្លើយជននេះនៅអង្គភាពរួចមក ។ ត្រូវចៀសវៀងកុំឱ្យអ្នកសមគំនិត ឬអ្នកស្និទ្ធនឹងរបស់ជននោះធ្វើឱ្យបាត់តំរុយ ។

ផ្ទុយទៅវិញ កាលណាបុគ្គលនោះនៅមានសេរីភា និងអាចធ្វើដំណើរបានដោយសេរីនោះ គេគួរតែចាត់នូវវិធានការបង្ការមួយចំនួនមុននឹងចូលធ្វើសកម្មភាព :

-ត្រូវរក្សាការសម្ងាត់ឱ្យបានល្អ ។ មិនមែនរក្សាត្រឹមតែការសម្ងាត់ទីកន្លែងដែលត្រូវឆែកឆេរប៉ុណ្ណោះទេ តែក៏ត្រូវរក្សាការសម្ងាត់ពេលវេលាឆែកឆេរផងដែរ

-ត្រូវស្គាល់ទីកន្លែង បរិវេណជុំវិញ និងច្រកចូលឱ្យបានច្បាស់លាស់ជាមុនសិន ដើម្បីសម្រួលដល់ការបែងចែកភារៈកិច្ច និងជៀសវាងការខាតបង់ពេលវេលា និងការភាន់ច្រឡំ

-ត្រូវប្រាកដថាអាចរកឃើញបុគ្គលពាក់ព័ន្ធនៅក្នុងលំនៅដ្ឋានខ្លួន ជាពិសេសបើសិនជាសាមីខ្លួនជាជនសង្ស័យដែលត្រូវចាប់ខ្លួន ឬការឆែកឆេរស្ថិតក្នុងក្របខ័ណ្ឌនៃការស៊ើបអង្កេតបឋម ។

ម៉ោងដែលអំណោយផលបំផុតសម្រាប់ការឆែកឆេរនោះគឺម៉ោងដែលថ្ងៃរះ ។ ពន្លឺថ្ងៃនឹងសម្រួលដល់ការស្វែងរក ហើយម្យ៉ាងគេនឹងមានសំណាងកាន់តែច្រើនដើម្បីរកឃើញសាមីខ្លួននៅផ្ទះខ្លួន ។

ក្រុមការងារឆែកឆេរនឹងត្រូវបង្កើតឡើង ។ ចំនួននគរបាលមិនមែនត្រូវបានកំណត់ទៅតាមចំនួនវត្ថុ និងឯក សារដែលត្រូវស្វែងរកប៉ុណ្ណោះទេ ក៏ទៅតាមបុគ្គលិកលក្ខណៈរបស់បុគ្គលដែលគេត្រូវឆែកឆេរលំនៅដ្ឋានផងដែរ ។

### ១.២.២. វិធានការជំបូង

ត្រូវតែមកដល់ទីកន្លែងយ៉ាងសម្ងាត់បំផុត។ ត្រូវតែបិទ និងយាមច្រកចេញ (ទ្វារ បង្អួច) ដើម្បីជៀសវាង កុំឱ្យនរណាម្នាក់ត្រូវរត់គេចខ្លួន ឬជំលៀសវត្ថុ ឬទំនិញផ្សេងៗចេញ។

នៅពេលដាក់មន្ត្រីនគរបាលឱ្យយាមកាមរួច ប្រធានក្រុម ជាមួយសមាជិកដទៃទៀតនៃក្រុមការងារត្រូវ ចូលទៅកាន់លំនៅដ្ឋានដែលត្រូវឆែកឆេរ។

ពេលបើកទ្វារភ្លាម អមដោយសហការីរបស់ខ្លួនម្នាក់ ឬពីរនាក់ប្រធានក្រុមចូលទៅខាងក្នុងដោយ អំណាច (បទល្មើសជាក់ស្តែង ដីកាចាត់ឱ្យស៊ើបសួរជំនួស)។ សកម្មភាពត្រូវតែច្បាស់លាស់ម៉ឺងម៉ាត់ប្រកប ដោយការគួរ សម។

ត្រូវប្រកាសឋានៈរបស់ខ្លួន បង្ហាញអត្តសញ្ញាណប័ណ្ណវិជ្ជាជីវៈ និងបញ្ជាក់កម្មវត្ថុនៃបេសកកម្មរបស់ខ្លួន។

ត្រូវស្គាល់ច្បាស់ពីអត្តសញ្ញាណរបស់បុគ្គលដែលបានបើកឱ្យខ្លួន ហើយធ្វើ ឬបញ្ជាឱ្យគេធ្វើការស្ទាបសុវត្ថិ ភាព។ បើសិនជាត្រូវចាប់ខ្លួនជននេះ (បទល្មើសជាក់ស្តែង ដីកាចាត់ឱ្យស៊ើបសួរជំនួស) ត្រូវបង្ខាំងរាងកាយជន នោះភ្លាម ហើយប្រគល់ឱ្យមន្ត្រីនគរបាលម្នាក់ ឬពីរនាក់យាម។ ដូចនេះ ការឆែករាយកាយត្រូវបានធ្វើលើជន នេះ។

ប្រសិនបើធ្វើការស្រែកហៅហើយ មិនមានការឆ្លើយតបនោះត្រូវ :

ទម្លាយទ្វារ (បទល្មើសជាក់ស្តែង ដីកា ចាត់ឱ្យស៊ើបសួរជំនួស) បើសិនជា មន្ត្រីនគរបាលយុត្តិធម៌ប្រាកដថា មាននរណាម្នាក់នៅខាងក្នុង ហើយជននេះ អាចធ្វើឱ្យបាត់នូវវត្ថុ ឬឯកសារនានាពាក់ព័ន្ធនឹងការស៊ើបអង្កេត ដែល កំពុងប្រព្រឹត្តទៅ (សំលេងចេញពីអ្នកខាងក្នុង ដោយការដើរទៅមក ក្លិនផ្សេង...)។

ឬប្រសិនបើខ្លួនយល់ថាគ្មាននរណាម្នាក់នៅខាងក្នុងទេនោះ មន្ត្រីនគរបាលយុត្តិធម៌ត្រូវហៅជាងសោរ ម្នាក់ដើម្បីបើកទ្វារ និងសាក្សីពីរនាក់ដើម្បីជួយខ្លួននៅក្នុងប្រតិបត្តិការនេះ (បទល្មើសជាក់ស្តែង ដីកាចាត់ឱ្យ ស៊ើបសួរ ជំនួស)។

ក្រោយពីចូលដល់ខាងក្នុងទីកន្លែង និងដាក់សាម៉ីខ្លួនក្រោមការឃ្លាំមើលហើយ ត្រូវធ្វើអធិការកិច្ចយ៉ាង លឿនក្នុងគ្រប់បន្ទប់ និងសំណង់ចំណុះលំនៅដ្ឋាននេះ។ អធិការកិច្ចនេះមិនគ្រាន់តែមានគោលបំណងដឹង ច្បាស់ពីភូមិ សាស្ត្រទីកន្លែងប៉ុណ្ណោះទេ ប៉ុន្តែកដើម្បីស្គាល់ច្បាស់ពីបុគ្គលនានាដែលមានវត្តមានដែលគេនឹង

ប្រមូលអត្តសញ្ញាណ ផងដែរ (បន្ទាប់ពីបានធ្វើការស្ទាបសុវត្ថិភាពរួច)។ បន្ទាប់មកត្រូវប្រមូលជនទាំងនេះក្នុងបន្ទប់មួយដើម្បីឃ្លាំមើល។ គ្មាននរណាម្នាក់អាចចេញពីទីកន្លែង មុនពេលបញ្ចប់ប្រតិបត្តិការឡើយ។

### ១.២.៣. ការស្វែងរក

ក្រោយពីជ្រើសរើសបុគ្គលនានាដែលមានវត្តមាន និងត្រួតពិនិត្យទីកន្លែងយ៉ាងលឿនរួច ត្រូវធ្វើដំណើរការ ស្វែងរកពិតប្រាកដភ្លាម។

ការឆែកឆេរមិនមែនជាការដើរកំសាន្តក្នុងលំនៅដ្ឋាន ក៏មិនមែនជាការផ្លាស់ប្តូរទីតាំងវត្ថុផ្សេងៗ ឬចូលីដោយអាសារឥតការ ហើយក៏មិនមែនជាការរុះរើលំនៅដ្ឋានដែរ តែទាមទារនូវការយកចិត្តទុកដាក់ វិធីសាស្រ្តការចេះម្រាណ និងភាពអត់ធ្មត់។

ត្រូវពិនិត្យម្តងមួយបន្ទប់ៗ : ត្រូវធ្វើការស្វែងរករបស់ជាច្រើនក្នុងបន្ទប់មួយព្រមៗគ្នា មិនមែនក្នុងបន្ទប់ទាំងអស់ព្រមៗគ្នាដោយគ្មានសណ្តាប់ធ្នាប់ឡើយ។ បុគ្គលដែលធ្វើការឆែកឆេរជាមួយមន្រ្តីនគរបាល ត្រូវតែតាមមើលដោយផ្ទាល់ និងជាប់ជានិច្ចនូវគ្រប់ប្រតិបត្តការទាំងអស់។ គ្មានមន្រ្តីនគរបាលណាម្នាក់មានសិទ្ធិនៅក្នុងបន្ទប់មួយតែម្នាក់ឯងនោះទេ ដើម្បីជៀសវៀងកុំឱ្យមានការសង្ស័យពីការលួច ឬនាំយកមកនូវវត្ថុ ឬឯកសារផ្សេងៗ។

អ្នកទទួលខុសត្រូវប្រតិបត្តិការគួរតែកុំចូលរួមក្នុងការស្វែងរក។ ដូចនេះខ្លួននឹងអាចដឹកនាំការស្វែងរកបានកាន់តែប្រសើរ ហើយប្រើពេលវេលាសង្កេតមើលអត្តចរិតរបស់ "អ្នកត្រូវឆែកឆេរវិញ" : រាល់ភាពចលាចល និងការសម្តែងចេញនូវភាពធូរស្រាលរបស់ជននេះអាចនាំមកនូវការចង្អុលបង្ហាញមានប្រយោជន៍ផ្សេងៗសម្រាប់ការស្វែងរក។ មន្រ្តីដទៃទៀត " និងអ្នកស៊ើបអង្កេត " ឆែកឆេរសង្ហារិមម្តងមួយៗ ផ្លាស់ប្តូរទីតាំងពីព្រោះថាសង្ហារិម ទាំងនោះអាចបិទបាំងទីលាក់បំពួនផ្សេងៗ។ ការឆែកឆេរមិនត្រូវធ្វើដោយគ្មានសណ្តាប់ឥតប្រយោជន៍ឡើយ : ក្រណាត់សំពត់ វត្ថុ ឯកសារផ្សេងៗ...ដែលត្រូវបានស្ទាប ឬផ្លាស់ទីតាំងរួចត្រូវតែដាក់តាមកន្លែងដើមវិញ ជាបណ្តើរ ៗ។ ប៉ុន្តែ អ្វីៗទាំងអស់ត្រូវតែត្រូវពិនិត្យ និងឆែកឆេរយ៉ាងម៉ត់ចត់។ មិនត្រូវឱ្យអ្វីមួយគេចផុតពីភ្នែកអ្នកស៊ើប អង្កេតឡើយ។

បន្ទាប់ពីឆែកឆេរបន្ទប់មួយយ៉ាងម៉ត់ចត់ គេត្រូវបន្តឆែកឆេរបន្ទប់មួយទៀត។ ក្រោយពីពិនិត្យជាន់ផ្ទាល់ដី រួចគេពិនិត្យជាន់ខាងលើ រួចសំណង់ចំណុះលំនៅដ្ឋាននេះ និងសួនច្បារ។

ទីលាក់បំពួនមានចំនួនច្រើនរាប់មិនអស់ ។ គេអាចនិយាយបានថាមានចំនួនច្រើនដូចចំនួនមនុស្ស ។ នគរបាលយាមកាមត្រូវតែស្មានពីចំនួនរបស់វាឱ្យបាន ។ គឺជាការសំខាន់ណាស់ដែលត្រូវសង្កេតមុខរបស់ "អ្នកត្រូវឆែកឆេរ" ឱ្យបានច្បាស់ : ទឹកមុខ ភាពចលាចល ឬភាពធូរស្រាលខាងក្រៅរបស់ជននេះ គឺជាតំរុយចង្អុលបង្ហាញគ្រប់គ្រាន់ ។ បន្ទាប់មក នគរបាលត្រូវចោទសួរខ្លួនឯងថាតើជននេះទំនងជាបានលាក់ទុកវត្ថុ ឬឯកសារដែលស្វែងរកនៅទីណាដោយអាស្រ័យលើលទ្ធភាពទីកន្លែង និងបុគ្គលិកលក្ខណៈរបស់ជននោះ ។

## ២.វត្ថុបិទស្លាកបោះត្រា

ក្នុងការស៊ើបអង្កេតតុលាការ គេត្រូវធ្វើការរឹបអូសវត្ថុ ឯកសារ ឬវត្ថុមានតំលៃចាំបាច់សម្រាប់បង្ហាញពីការពិត ដោយជៀសវាងការរឹបអូសដែលគ្មានប្រយោជន៍ទាល់តែសោះ ហើយបានត្រឹមតែបណ្តាលឱ្យចង្អៀតអង្គភាពទទួលបន្ទុករក្សាវត្ថុរឹបអូសនោះ (លេខាធិការដ្ឋាន ការិយាល័យក្រឡាបញ្ជីសាលាដំបូង) ។

ការបិទស្លាកបោះត្រាលើវត្ថុមួយ ក្នុងក្របខ័ណ្ឌនីតិវិធីតុលាការមានគោលបំណងជាចំបង រក្សាវត្ថុនោះក្រោមការចាត់ចែងរបស់តុលាការដោយជៀវាំងកុំឱ្យវត្ថុនោះខូច ផ្លាស់ប្តូរ ឬត្រូវបានដូរ និងធានាថាហេតុរក្សាលទ្ធ ភាពតំណាងវត្ថុយ៉ាងងាយស្រួល ។ នេះគឺជាការធានាភាពត្រឹមត្រូវតាមច្បាប់នៃមធ្យោបាយបង្ហាញភស្តុតាងមួយ ។

### ២.១. វិធានរួម

#### ២.១.១. ការបិទស្លាកបោះត្រា

ការបិទស្លាកបោះត្រាមិនអាចរំលោភបានឡើយ ។ ស្លាកអាចម៍ត្រាចាំបាច់ត្រូវរក្សាឱ្យនៅក្នុងសភាពដូចពេលដែលគេរកឃើញរហូតដល់ពេលសវនាការ (លើកលែងតែចំពោះវត្ថុបិទស្លាកបោះត្រាដែលត្រូវធ្វើកោសល្យវិច្ឆ័យបែបវិទ្យាសាស្ត្រ) ។ ហេតុដូចនេះហើយទើប ខ្សែ និងត្រាក្រមួនត្រូវរៀបចំយ៉ាងណាកុំឱ្យគេអាចផ្លាស់ប្តូរ ឬកែប្រែវត្ថុដោយពុំកាត់ផ្តាច់ខ្សែ ហើយបំបាក់ត្រាក្រមួន ។

មិនមានវិធានដោយឡែកដើម្បីរៀបចំខ្សែ និងត្រានោះទេ គឺលក្ខណៈ និងទម្រង់វត្ថុទេវិញទេដែលកំណត់នូវការរៀបចំ ។ សំខាន់បំផុតគឺកុំឱ្យគេអាចរំកិលខ្សែ ដើម្បីបើកអាចម៍ស្លាកត្រា ។ ហេតុដូចនេះជាការខានមិនបាន ដែលត្រូវបោះត្រាក្រមួយត្រង់កន្លែងណាដែលគេអាចរំកិលខ្សែបាន ។

គ្រប់ពេលវេលា ការចងត្រូវប្រើខ្សែតែមួយកំណាត់ប៉ុណ្ណោះ ត្រាក្រមួនត្រូវបង្គួរពីចុងម្ខាងទៅចុងម្ខាង

ទៀតនៃខ្សែ ។

ត្រូវតែបោះត្រារបស់អង្គភាពជាដាច់ខាតលើត្រាក្រមួននីមួយៗ ។

**២.១.២. ការធ្វើអត្តសញ្ញាណកម្មស្លាកអាចម៍ក្រា**

អត្តសញ្ញាណកម្មត្រូវបានធានាដោយ :

ក-សេចក្តីពិពណ៌នាក្នុងកំណត់ហេតុពិនិត្យកត់ត្រា និងកំណត់ហេតុបញ្ជីរឹបអូស កាលណាមានវត្ថុបិទស្លាកបោះត្រាច្រើន ( អាចហៅកំណត់ហេតុបញ្ជីរឹបអូសផងដែរ : កំណត់ហេតុសរុបវត្ថុបិទស្លាកបោះត្រា) ។

ខ-ដោយសលាកប័ត្រ ឬស្លាកដែលត្រូវ :

ភ្ជាប់ទៅនឹងវត្ថុដោយរុំខ្សែជុំវិញវត្ថុនោះ ត្រូវឱ្យចុងខ្សែទាំងពីរកាត់ពីលើសលាកប័ត្រ ហើយចងភ្ជាប់ទៅនឹងទំព័រខ្នង

ជាងនេះទៅទៀត ចុងខ្សែទាំងពីរត្រូវតែចងលើទំព័រខ្នងសលាកប័ត្រ រួចបោះត្រាអង្គភាពពីលើ ។

**២.១.៣. ការសរសេរសលាកប័ត្រ**

សំខាន់ត្រូវបំពេញសលាកប័ត្រនេះឱ្យបានត្រឹមត្រូវ និងកុំឱ្យចន្លោះ : ពីព្រោះមានតែសលាកប័ត្រនេះប៉ុណ្ណោះអាចឱ្យគេធ្វើអត្តសញ្ញាណកម្មវត្ថុបិទស្លាកបោះត្រាបាន ។

ត្រូវតែសរសេរសលាកប័ត្រនេះឱ្យងាយយល់ ដោយត្រូវចុះ :

-លេខបញ្ជីនីតិវិធី

-កាលបរិច្ឆេទបិទស្លាកបោះត្រា

-ឈ្មោះ និងត្រកូលរបស់ជនសង្ស័យ ឬបើពុំមានទេ ត្រូវចុះនិទ្ទេសន៍ ករណីប្រឆាំងនឹងលោក........ប្តឹងដោយលោក........( ឈ្មោះ និងត្រកូលជនរងគ្រោះ)

-ឈ្មោះ និងត្រកូលរបស់អ្នកប្តឹង បើពុំមានទាំងជនសង្ស័យទាំងជនរងគ្រោះ

-ចំណាត់ថ្នាក់គតិយុត្តិនៃរឿងហេតុ

-ធម្មជាតិពិតប្រាកដរបស់វត្ថុ និងការអធិប្បាយឱ្យបានសុក្រិត្យបំផុតអំពីវត្ថុនោះ

-ហត្ថលេខាមន្ត្រីនគរបាលយុត្តិធម៌ដែលបានធ្វើការបិទស្លាកបោះត្រា

-ហត្ថលេខាជនសង្ស័យ ឬជាយថាហេតុហត្ថលេខាសាក្សីម្នាក់ ឬច្រើននាក់ដែលបានឃើញការរឹបអូស ។

ហត្ថលេខាមន្ត្រីនគរបាលយុត្តិធម៌ត្រូវតែមានអមត្រាសើមរបស់អង្គភាពតែងតាំង។

កាលណានៅក្នុងសំនុំរឿងតែមួយ មានការរឹបអូសវត្ថុច្រើនដែលនាំទៅដល់ការបង្កើតវត្ថុបិទស្លាកបោះត្រា ច្រើននោះ វត្ថុទាំងនោះត្រូវវិបានបង់លេខពី ១ ដល់....ដូចនេះត្រូវមានកំណត់ហេតុមួយ ឬច្រើន ហើយសលាកប័ត្រនីមួយៗត្រូវបង់លេខតាមវត្ថុបិទស្លាកបោះត្រា។ ប៉ុន្តែ បើសិនជារឹបអូសវត្ថុតែមួយវិញ ត្រូវចុះ និទ្ទេសន៍លើសលាកប័ត្រ វត្ថុបិទស្លាកបោះត្រាទោល។

ក្នុងករណីរឹបអូសដប កូនដប ឬផើងអ្វីមួយផ្ទុកវត្ថុរាវដែលមានធម្មជាតិដូចគ្នានោះ គ្រាន់តែធ្វើកញ្ចប់រួមមួយដែលបង្កើតជាស្លាកអាចម៍ត្រា (ឬកញ្ចប់ច្រើនដែលបង្កើតជាស្លាកអាចម៍ត្រាច្រើន បើមានកញ្ចប់ច្រើន)។ សលាកប័ត្របិទស្លាកបោះត្រាត្រូវតែ ចុះបញ្ជីសារពើ ភ័ណ្ឌលម្អិតពីរបស់ក្នុងកញ្ចប់រួមនោះ។

(ឧទាហរណ៍ : ប្រអប់មួយផ្ទុក១២ដប់ពេញដែលក្នុងមួយដបចំនុះ១០០ សង់ទីលីត្រ ស្មើគ្នា បិទស្លាក "វីស្គី X...")។

## ២.២. ប្រភេទខុសៗគ្នានៃស្លាកអាចមបោះត្រា

### ២.២.១. ស្លាកអាចម៍ត្រាមានគំរូ

**កញ្ចប់ផ្សេងៗ**

កញ្ចប់ប្រែប្រួលយ៉ាងខ្លាំងទៅតាមទម្រង់ វត្ថុធាតុ និងវិមាត្ររបស់វា ហើយបង្កឡើងដោយ :

-ស្រោម និងថង់ (ពីក្រដាស ឬផ្លាស្ទិក)

-ប្រអប់ (រាងជាគូប ឬស៊ីឡាំង) : ពីក្រដាសកាតុង ឈើ លោហៈ ផ្លាស្ទិក

-ដប ឬដបធំ (កែវ ឬផ្លាស្ទិក)។

**កំណត់សំគាល់ :** កាលណាវត្ថុរឹបអូសស្ថិតក្នុងទូរថភ្លើង ផ្ទះល្វែង ឬបន្ទប់ណាមួយដែលមានច្រកចេញ ត្រូវស្លាកអាចម៍ត្រាលើបន្ទះទ្វារ ដោយលៃយ៉ាងណាឱ្យស្លាកអាចម៍ត្រានោះ បាក់ជាដាច់ខាតបើមានគេចូលក្នុងកន្លែងនោះ (ស្លាកអាចម៍ត្រាបិទលើបន្ទះទ្វារ និងផ្នែកនឹងថ្កល់របស់ក្របទ្វារ)។

ត្រូវបិទស្លាកអាចម៍ត្រាមានគំរូ

-សំលៀកបំពាក់គ្រប់ធម្មជាតិទាំងអស់

-សៀវភៅ (លើកលែងតែសៀវភៅគណនី)

-វត្ថុតូចៗ

-វត្ថុភាវ

-ឥវ៉ាន់ និងកញ្ចប់

-ម៉ាស៊ីនថតរូប

-គ្រឿងអលង្ការ ដុំលោហៈ និងវត្ថុដែលមានតំលៃ។ ចំពោះវត្ថុទាំងនេះ ទោះជាក្នុងករណីណាក៏ដោយកុំពិពណ៌នាពីប្រភេទ និងតំលៃវាឡើយ។ គ្រាន់តែប្រាប់សមាសធាតុជាលោហៈ ឬថ្មទៅបានហើយដោយប្រើពាក្យ : លោហៈពណ៌លឿង លោហៈពណ៌ស ថ្មពណ៌នេះ ឬនោះ។

-សាស្ត្រាវុធ : កាំបិត កាំបិតស្នៀត កន្ត្រៃ កាំបិតកោរ ហើយតាមលក្ខណៈទូទៅ រាល់ឧបករណ៍ទាំងឡាយ ណាដែលមានផ្លែ និងចុងស្រួចដែលគេប្រយ័ត្នប្រយែងចំពោះចុង ឬផ្លែរបស់វា។

អាចម៍ស្លាកគ្រាមានគំរបផ្តល់នូវអត្ថប្រយោជន៍ដូចតទៅ :

-ការពារប្រកបដោយប្រសិទ្ធភាពប្រឆាំងនឹងសំណើក ការបែកបាក់ ការបាត់ និងបន្លំ។

ប៉ុន្តែក៏ផ្តល់ផងដែរនូវគុណវិបត្តិ :

-រំខានដល់ការស៊ើបអង្កេតនគរបាល (ការបង្ហាញ ការពិនិត្យ ការប្រៀបធៀប ការស្វែងរកប្រភព)។

-ពេលបើកត្រូវតែមានទម្រង់បន្ថែមសម្រាប់ចៅក្រម ក្នុងពេលស៊ើបសួរ។

ដើម្បីដោះស្រាយគុណវិបត្តិទាំងនេះ ត្រូវតែ :

-ថតរូបវត្ថុក្នុងកញ្ចប់

-ប្រើប្រាស់កញ្ចប់ថ្លាមួយ

### <u>២.២.២. ស្លាកអាចម៍គ្រាកណ្តាលវាល</u>

ស្លាកអាចម៍គ្រាកណ្តាលទាក់ទងនឹងគ្រប់វត្ថុទាំងអស់ដែលមានមាឌធំដូចជាទូរដែក សង្ហារិម សំភារៈអគ្គីសនីយធំៗក្នុងផ្ទះ ហឹប ។ល។

វាបង្កឡើងដោយចំនងសមល្មមដែលរុំជុំវិញ ឬក្នុងផ្នែកធំបំផុតរបស់វត្ថុ (ក្របកង់ ដងអាវុធ)។

ក្នុងករណីខ្លះ មិនត្រូវចងខ្សែឡើយ ដោយសារវត្ថុ ឬធម្មជាតិរបស់វត្ថុ (ឧទាហរណ៍ : ទ្វារបង្អួច ធ្នឹមឈើ ។ល។) ។ ដូចនេះ ស្លាកត្រូវបិទពីលើខ្សែតូចមួយដែលចងចុងខ្សែទាំងពីរ រួចបោះត្រាក្រមួនពីលើ។

**ត្រូវបិទស្លាកអាចមគ្រាកណ្តាលវាល :**

-កាំភ្លើងខ្លី (កាំភ្លើងរ៉ឺវ៉ុលវែរ កាំភ្លើងពីស្តូលេ...)

-អាវុធធម្មតាដូចជាដងចប កំណាត់ដែក ដុំថ្ម...

-កាំភ្លើងវែង និងកាប៊ីន

-យានជំនិះគ្រប់ប្រភេទ

ស្លាកអាចម៍ត្រាកណ្តាលវាលមានគុណសម្បត្តិជាអាទិ៍ :

-សេរីភាព និងភាពងាយស្រួលក្នុងការពិនិត្យ ការបង្ហាញ ការប្រៀបធៀប ការស្វែងរកប្រភព សម្រាប់នគរបាល ក៏ដូចជាសម្រាប់ចៅក្រម ឬអ្នកជំនាញការ

មានគុណវិបត្តិជាអាទិ៍ : អាចនឹងបាក់បែក បាត់បង់វត្ថុមួយផ្នែក បន្លំដោយជំនួស ឬកាត់យកមួយផ្នែក។

គេអាចដោះស្រាយគុណវិបត្តិទាំងនេះបានដោយ :

-ពិពណ៌នាលម្អិត និងសព្វជ្រុងជ្រោយ (ឧទាហរណ៍ : សំរង់វិមាត្រ ឬការចង្អុលលេខឆ្លាក់វត្ថុ លើសលាកប័ត្រ និងកំណត់ហេតុពិនិត្យកត់ហេតុ)។

-ថតរូបវត្ថុនៅខណៈរឹបអូ។

**២.២.៣. ស្លាកអាចម៍ត្រាចំហ**

ជាសារវន្ត គឺជាការបិទស្លាកបោះត្រាលើឯកសារ គេហៅដូចនេះពីព្រោះវាអាចបើកដូចសៀវភៅ។ ជាទូទៅគេចុះប្រហោងលើឯកសារ រួចស៊កខ្សែទាញចុងម្ខាងទៅចងជាមួយចុងម្ខាងទៀត ហើយបោះត្រាក្រមួនពីលើ។

ការបិទស្លាកបោះត្រាប្រភេទនេះផ្តល់នូវគុណសម្បត្តិដូចគ្នានឹងការបិទស្លាកបោះត្រាកណ្តាលវាលដែរ។

គុណវិបត្តិដូចគ្នានឹងការបិទស្លាកបោះត្រាកណ្តាលវាលដែរ ដោយសារតែវាអាចត្រូវបាន :

-រលុប

-បន្ថែមពាក្យ តួលេខ ឬឃ្លានៅដើម ឬចុងទំព័រ ឬលើទំព័រទទេមួយ។

ការថតរូបគឺជាដំណោះស្រាយ រូបថតត្រូវដាក់ជាឧបសម្ព័ន្ធនីតិវិធី ហើយហ្វីលរូបថតរក្សាជាបណ្ណសារ។

និទ្ទេសន៍សំខាន់អាចនឹងចំលងក្នុងកំណត់ហេតុណាមួយដែលមានចែងក្នុងនីតិវិធី កំណត់ហេតុបញ្ជីរឹបអូស ឬកំណត់ហេតុបិទស្លាកបោះត្រាសរុប)។

**២.៣. ការបិទស្លាកបោះត្រាដោយខ្សែក**

ទំនងជាមានប្រយោជន៍នឹងទាញចំនាប់អារម្មណ៍របៀបបិទស្លាកបោះត្រាមួយចំនួន។

**២.៣.១. វ៉ាលី និងកញ្ចប់**

អត្តន័យត្រូវបានសរសេរលម្អិតលើសលាកប័ត្រនៅពេលធ្វើបញ្ជីសារពើភ័ណ្ឌ គ្រឿងអលង្ការ និងវត្ថុមានតំលៃត្រូវបានដកហូតដើម្បីធ្វើការបិទស្លាកបោះត្រា ។

**២.៣.២. សំលៀកបំពាក់របស់អ្នកសក្នុងសំនុំរឿងព្រហ្មទណ្ឌ**

សំលៀកបំពាក់ដែលមានស្លាកស្នាម ឬប្រហោងដោយសារអំពើឧក្រិដ្ឋមួយត្រូវបិទស្លាកបោះត្រាមានគំរប ខុសប្លែកពីសំលៀកបំពាក់ដែលពីដំបូងទំនងជាមិនអាចធ្វើកោសល្យវិច្ច័យបាន ។

ចំពោះរឿង ចាំបាច់ត្រូវផ្តោតជាពិសេសលើវិធានការប្រុងប្រយ័ត្នដែលត្រូវប្រកាន់យកនៅពេលសម្រាតខោអាវជនរងគ្រោះកដូចជានៅពេលបិទបោះស្លាកបោះត្រាលើសំលៀកបំពាក់ដែរ (ជនសង្ស័យ ជនរងគ្រោះ) ដើម្បីជៀសវាងបាត់ស្លាកស្នាម កំទេចកំទី កាកសំនល់ដែលអាចមាន ។

ដើម្បីសម្រេចវិធាននេះតាមករណីនីមួយៗ ត្រូវគោរពវិធានដូចទៅ :

-ជាបឋម សំលៀកបំពាក់ត្រូវបានស្ងាប និងឆែកឆេរដើម្បីស្វែងរកតំរុយជាយថាហេតុ

-ម្យ៉ាងទៀត ខាងមិនបានត្រូវរក្សាប្រហោងគ្រាប់ចេញចូលដោយជៀសវាងរាល់ការប៉ះពាល់ដែលអាចកែប្រែទិដ្ឋភាពដើម និងការកំណត់លក្ខខណ្ឌការបាញ់ ។

-ទីបញ្ចប់ គេត្រូវជៀសវាងឱ្យអស់លទ្ធភាពកុំឱ្យខូចទ្រង់ទ្រាយវត្ថុតាងទាំងនេះដោយកាត់ ឬហែកត្រង់កន្លែងដែលមានស្នាមប្រលាក់ ឬប្រហោង ។

គួរកត់សំគាល់ផងដែរថាការប្រើប្រាស់ថង់ផ្លាស្ទិកដើម្បីបិទស្លាកបោះត្រាលើសំលៀកបំពាក់ដែលមានស្នាមឈាម ឬសារធាតុសរីរាង្គដទៃទៀតត្រូវហាមឃាត់ដើម្បីជៀសវាងរាល់ការខូចទ្រង់ទ្រាយ ។

ចាត់វិធានការប្រុងប្រយ័ត្នដើម្បីសំងួតសំលៀកបំពាក់សើម ។

**២.៣.៣. វត្ថុរាវដែលអាចឆេះ និងផ្ទុះ**

វត្ថុរាវដែលអាចឆេះ និងផ្ទុះនឹងត្រូវរឹបអូសតាមរយៈកំណត់ហេតុ ប៉ុន្តែមិនត្រូវបិទស្លាកបោះត្រាឡើយ ។ **អង្គភាពជំនាញនានា** (យោធា សន្តិសុខស៊ីវិល ភ្នាក់ងារពន្លត់អគ្គីភ័យ) **ត្រូវនាំយកវត្ថុរាវទាំងនោះទៅ** ។

**២.៣.៤. ដបឧស្ម័ន**

ដបឧស្ម័នត្រូវចាក់បន្ទុកចេញឱ្យអស់ ។ ត្រូវចាត់វិធានការប្រុងប្រយ័ត្នដើម្បីបំពេញប្រតិបត្តិការនេះ ។ **ជាយថាហេតុ គេអាចសុំជំនួយពីអង្គជំនាញមួយ ។**

**២.៣.៥. ថ្នាំញៀន និងផលិតផលឱសថ**

តាមធម្មតា ថ្នាំញៀន និងផលិតផលឱសថត្រូវទុកនៅការិយាល័យក្រឡាបញ្ជី លើកលែងតែនៅពេលមានបរិមាណច្រើន។ ក្នុងករណីនេះ ត្រូវតែជូនដំណឹងទៅអយ្យការមានសមត្ថកិច្ចដែលនឹងកំណត់ទីកន្លែងទុក (ញឹកញាប់បំផុតមន្ទីរពិសោធន៍ឱសថ)។

**២.៣.៦. កាំភ្លើង និងគ្រាប់រំសេវ**

ក្នុងសំនុំរឿងព្រហ្មទណ្ឌមួយដែលពាក់ព័ន្ធនឹងការប្រើប្រាស់កាំភ្លើង អាវុធ សំបកកាទូស ស្រោម និងក្បាល គ្រាប់ សំបកកាទូសក្នុងប្រអប់បាញ់ត្រូវតែបញ្ជូនជាមួយគ្នាបន្ទាប់ពីបិទស្លាកបោះត្រាផ្សេងគ្នារួច។ ត្រូវតែយកគ្រាប់ រំសេវចេញអស់ពីបង់គ្រាប់ រួចចងវាទៅនឹងស្វ័យកាំភ្លើង ឬគ្រឿងដែលអាចដោះចេញបាន (ឧទាហរណ៍ គុយឡាស់ចល័តកាំភ្លើងវែង)។ អាវុធទាំងមូលត្រូវបិទស្លាកបោះត្រាតែមួយដោយចងខ្សែកាត់តាមបង់គ្រាប់ និងស្វ័យកាំភ្លើង។

**កំណត់សំគាល់** : កុំដោះកាំភ្លើងដើម្បីពិនិត្យដំណើរការវាឱ្យសោះ។ អាចកើតមានការរាលកែ ហើយនាំឱ្យអ្នក ជំនាញខាងសិក្សាចលនាគ្រាប់នឹងមិនអាចសិក្សាពីកាំភ្លើងបានត្រឹមត្រូវ។

ការរកឃើញកាំភ្លើងស្វ័យប្រវត្តិដាច់ខាតត្រូវតែនាំទៅដល់ប្រតិបត្តិការដូចតទៅ :

-ដកបង់គ្រាប់ និងយកគ្រាប់រំសេវចេញ

-បិទសោរកាំភ្លើង

-ដកសំបកកាទូសពីក្នុងប្រអប់គ្រាប់

-បញ្ជូនកាំភ្លើងទៅមន្ទីរពិសោធន៍ ឬពុំនោះទេការិយាល័យក្រឡាបញ្ជី។

**២.៣.៧. គ្រឿងឧបភោគបរិភោគដែលអាចខូច**

ក្នុងការអនុវត្តន៍ តាមធម្មតា គ្រឿងឧបភោគបរិភោគដែលអាចខូច (អាហារ-ភេសជ្ជៈ) នឹងត្រូវរឹបអូស ដោយប្រើប្រាស់កំណត់ហេតុ តែមិនត្រូវបិទស្លាកបោះត្រានោះទេ។ របស់ទាំងនេះត្រូវសងទៅកម្មសិទ្ធិករស្រប ច្បាប់របស់វាវិញ។ បើមិនអាចទៅរួចទេ ត្រូវតែគោរពទៅតាមទំនៀមទម្លាប់នៃទីកន្លែងនោះ។

តាមគោលការណ៍ ត្រូវប្រគល់ឱ្យទៅគ្រឹះស្ថានជនចាស់ជរា មន្ទីរពេទ្យ ឬមជ្ឈមណ្ឌលកុមារកំព្រា។

ការប្រគល់នេះតម្រូវឱ្យមានការចេញបង្កាន់មួយដែលត្រូវភ្ជាប់ទៅនឹងកំណត់ហេតុ។

បើសិនជាផលិតផលទាំងនោះខូចគុណភាពហើយ ត្រូវបំផ្លាញចោលបន្ទាប់ពីបានជម្រាបព្រះរាជអាជ្ញារួច។

**២.៣.៨. វត្ថុដែលមិនអាចដឹកជញ្ជូនបាន**

ចំពោះវត្ថុដែលមិនអាចដឹកជញ្ជូនបានដូចជាម៉ាស៊ីនឧស្សាហកម្ម ទូក យន្តហោះ ត្រូវតែធ្វើការរឹបអូសនៅនឹងកន្លែង ហើយសុំឱ្យតតិយជនម្នាក់ឱ្យយាមវត្ថុបិទស្លាកបោះត្រា។ និទ្ទេសន៍ចាំបាច់នឹងត្រូវចុះក្នុងនីតិវិធី។

**សេចក្តីសន្និដ្ឋានលើជម្រើសរបៀបបិទស្លាកបោះត្រា**

ជម្រើសនេះអាស្រ័យជាចំបងនឹងធម្មជាតិវត្ថុនោះ ប៉ុន្តែក៏អាចត្រូវកំណត់ដោយវិធានរបស់ ការិយាល័យក្រឡាបញ្ជី ឬការទាមទារមួយចំនួនពីជំនាញការ។

តាមធម្មតា វត្ថុបិទស្លាកបោះត្រាត្រូវទុកនៅការិយាល័យក្រឡាបញ្ជីសាលាដំបូងដែលមានសមត្ថកិច្ច។

**៣. ការរឹបអូសដោយចៃដន្យ**

អ្នកស៊ើបអង្កេតម្នាក់ដែលធ្វើការឆែកឆេរលំនៅដ្ឋាន (ឬការឆែកឆេររាងកាយ) អាចរកឃើញដោយចៃដន្យនូវវត្ថុនានាដែលជាប់ពាក់ព័ន្ធនឹងបទល្មើសមួយផ្សេងពីបទល្មើសដែល មានសំអាងច្បាប់អំពីការចូលក្នុងលំនៅដ្ឋានពាក់ព័ន្ធ។

វត្ថុទាំងនេះអាចនឹងត្រូវរឹបអូសដោយពេញច្បាប់ក្រោមលក្ខខណ្ឌមួយចំនួន ក្រោមទំរង់រឹបអូសដោយចៃដន្យដែលអាចធ្វើឡើង ទោះបីជាការឆែកឆេរដំបូងបានប្រព្រឹត?ទៅក្នុងក្របខ័ណ្ឌតតិយុត្តិណាក៏ដោយ (បទល្មើស ជាក់សែ?ង ការស៊ើបអង្កេតបឋម ដីការចាត់ឱ្យស៊ើបសួរជំនួស)។

វត្ថុអាចត្រូវបានរឹបអូសដោយបង្ខំលុះត្រាតែវត្ថុនោះជាប់ពាក់ព័ន្ធនឹងបទល្មើសជាក់ស្តែ?ង ឬអនុញ្ញាតឱ្យបង្កើតបទល្មើសជាក់សែ?ង។

ប៉ុន្តែ ក្នុងករណីខ្លះ គេអាចធ្វើនីតិវិធីតាមរបៀបស៊ើបអង្កេតជាក់ស្តែង សម្រាប់បទល្មើសទទួលផលចោរកម្មដែលជាបទល្មើសមានចរិតជាបទល្មើសបន្ត។

កាលណាវត្ថុមួយទាក់ទងនឹងបទល្មើសដែលជាកម្មវត្ថុនៃការបើកការស៊ើបសួរ ក៏អាចត្រូវបានរឹបអូសដោយបង្ខំផងដែរ។ អ្នកស៊ើបអង្កេតត្រូវយោងដីកាចាត់ឱ្យស៊ើបសួរជំនួសចេញដោយចៅក្រមស៊ើបសួរដែលទាក់ទង។ កាលណាវត្ថុដែលរកឃើញមិនជាប់ពាក់ព័ន្ធនឹងបទល្មើសជាក់ស្តែង ឬបទល្មើសដែលជាកម្មវត្ថុនៃការ

បើកការស៊ើបសួរទេនោះ អ្នកស៊ើបអង្កេតត្រូវសុំពីបុគ្គលមានវត្ថុមាន នូវការអនុញ្ញាតរឹបអូសវត្ថុនោះ ហើយបើក ការស៊ើបអង្កេតបឋមមួយ។ ក្នុងករណីយល់ព្រម សាម៉ីខ្លួនត្រូវផ្តល់ការយល់ព្រមឱ្យរឹបអូស ជាលាយលក្ខណ៍អក្សរ ទៅតាមទំរង់ដែលមានចែងក្នុងមាត្រា ១១៣ នៃក្រមនិតិវិធីព្រហ្មទណ្ឌ។ ឯកសារនេះ នឹងត្រូវភ្ជាប់ ក្នុងឧបសម្ព័ន កំណត់ហេតុរឹបអូសដោយចៃដន្យ។

ក្នុងករណីបដិសេធ អ្នកស៊ើបអង្កេតត្រូវរាយការណ៍ភ្លាមជូន ព្រះរាជអាជ្ញាដែលមានលទ្ធភាពប្តឹងទៅ ចៅក្រមស៊ើបសួរ។ ចៅក្រមស៊ើបសួរនឹងអាចចេញដីកាចាត់ឱ្យស៊ើបសួរជំនួសដែលអញ្ញាតឱ្យរឹបអូសវត្ថុមាន វិវាទដោយបង្ខំ។ ក៏អាចអនុវត្តនីតិវិធីពិសេស ដែលមានចែងក្នុង មាត្រា ១១៤ កថាខ័ណ្ឌទី ៤ ផងដែរ (បញ្ជាឱ្យចូលខ្លួន)។

ការរឹបអូសដោយចៃដន្យត្រូវតែជាកម្មវត្ថុនៃកំណត់ហេតុដាច់ដោយមួយជាដាច់ខាត។ វត្ថុមួយ ឬច្រើន ដែលរកឃើញ មុននឹងត្រូវរឹបអូស ត្រូវតែបង្ហាញជូនសាម៉ីខ្លួនវិញ ហើយត្រូវចាប់ខ្លួនជននេះដោយសារប្រភព នៃវត្ថុទាំងនោះ។ ត្រូវកត់ត្រាចម្លើយជននេះក្នុងកំណត់ហេតុ។

ដីកាតុលាការគឺជាវិធានការច្បាប់ ដែលប៉ះពាល់ដល់សេរីភាពបុគ្គលនានាដែលចេញដោយចៅក្រមម្នាក់ដែលភាគច្រើនជាចៅក្រមស៊ើបសួរ។ វិធានការទាំងនេះបង្កើតជាមធ្យោបាយទទួលបានការបង្ហាញខ្លួនជនម្នាក់ ឬការឃុំខ្លួនជននេះ។

បច្ចុប្បន្ននេះ ដីកាតុលាការមានចំនួនបួន ហើយឆ្លើយតបនឹងនិយមន័យដូចខាងក្រោម :

"បញ្ជាដែលចេញដោយចៅក្រមមាននីតិសម្បទាដែលអនុញ្ញាតឱ្យខ្លួនធានាឱ្យជនម្នាក់មានវត្តមាន បើចាំបាច់ដោយការបង្ខំ។

ដីកាទាំងនេះមានចែងក្នុងក្រមនីតិវិធីព្រហ្មទណ្ឌ :

**ដីកាបង្គាប់ឱ្យចូលខ្លួន : មាត្រា ១៨៦ នៃក្រមនីតិវិធីព្រហ្មទណ្ឌ**

ដីកាបង្គាប់ឱ្យចូលខ្លួនមានគោលបំណងដាក់កំហិតជនម្នាក់ឱ្យបង្ហាញខ្លួន ចំពោះមុខចៅក្រមតាមកាលបរិច្ឆេទ និងម៉ោងដែលចង្អុលបង្ហាញក្នុងដីកានេះ។ ដីកានេះអាចត្រូវបានចេញប្រឆាំងនឹងជនត្រូវ ចោទម្នាក់ ឬជនម្នាក់ដែលមានតំរុយពិរុទ្ធភាព។

**ដីកាបង្គាប់ឱ្យនាំខ្លួន : មាត្រា ១៩០ នៃក្រមនីតិវិធីព្រហ្មទណ្ឌ**

គឺជាបញ្ជាចេញដោយចៅក្រម ទៅកាន់កំលាំងសាធារណៈឱ្យនាំមកចំពោះមុខខ្លួនភ្លាមនូវ ជនត្រូវចោទ ឬជនម្នាក់ដែលមានតំរុយពិរុទ្ធភាព។

**ដីកាបង្គាប់ឱ្យឃុំខ្លួន : ( មាត្រា ២២០ នៃក្រមនីតិវិធីព្រហ្មទណ្ឌ )**

គឺជាបញ្ជាចេញដោយចៅក្រម ទៅកាន់ប្រធានពន្ធធនាគារ ឬមជ្ឈមណ្ឌលឃុំឃាំងមួយឱ្យទទួល និងឃុំឃាំងជនត្រូវចោទម្នាក់។ ដីកានេះអនុញ្ញាតឱ្យស្វែងរក ឬផ្ទេរជនត្រូវចោទកាលណាជននេះត្រូវជូនដំណឹងពីដីកានេះរួច។

**ដីកាបង្គាប់ឱ្យចាប់ខ្លួន : ( មាត្រា ១៩៦ នៃក្រមនីតិវិធីព្រហ្មទណ្ឌ)**

គឺជាបញ្ជារទៅកាន់កំលាំងសាធារណៈឱ្យស្វែងរកជនត្រូវចោទ ឬជនសង្ស័យ ឱ្យធ្វើការចាប់ខ្លួនជននេះ ហើយនាំទៅមជ្ឈមណ្ឌលឃុំឃាំងដែលចុះក្នុងដីកា ដែលនៅទីនោះជននេះត្រូវបានទទួល និងឃុំខ្លួន។ ហើយក៏ជាបញ្ជាទៅកាន់ប្រធានពន្ធធនាគារ ឬមជ្ឈមណ្ឌលឃុំឃាំងមួយឱ្យទទួល និងឃុំឃាំងជននេះ។

## ១.អាជ្ញាធរមានសមត្ថកិច្ចដែលអាចចេញដីកាបាច

### ១.១. ចៅក្រមស៊ើបសួរ

ទៅតាមករណី ចៅក្រមស៊ើបសួរជាអ្នកចេញដីកាបង្គាប់ឱ្យចូលខ្លួន ដីកានាំខ្លួន ដីកាឃុំខ្លួន ឬ ចាប់ខ្លួន (មាត្រា ១៨៩ នៃក្រមនីតិវិធីព្រហ្មទណ្ឌ) ។

គួរកត់សម្គាល់ថា ក្នុងករណីណាក៏ដោយ អំណាចនេះមិនអាចត្រូវប្រគល់ឱ្យមន្ត្រីនគរបាលយុត្តិធម៌ ដែលអនុវត្តសេចក្ដីបញ្ជារបស់ដីកាចាត់ឱ្យស៊ើបសួរជំនួសមួយនោះឡើយ ។

### ១.២. សភាស៊ើបសួរ

កាលណាសភាស៊ើបសួរសំរេចប្ដឹងឧទ្ធរណ៍ប្រឆាំងនឹងសាលដីកាចៅក្រមស៊ើបសួរ សភាស៊ើបសួរ មានអំណាចទាំងអស់របស់ចៅក្រមស៊ើបសួរ ហើយក៏អាចទទួលបណ្ដឹងបានដែរ (មាត្រា ២៦២ នៃក្រមនីតិវិធីព្រហ្មទណ្ឌ) ។

### ១.៣. សាលាដំបូង

បើសិន ទន្ទិតមិនចូលខ្លួនទេនោះ តុលាការអាចបញ្ជាឱ្យបញ្ជូនសំនុំរឿង និងចេញដីកានាំខ្លួន ចំពោះបទមជ្ឈិម និងបទឧក្រិដ្ឋ (មា ត្រា ៣១០ នៃក្រមនីតិវិធីព្រហ្មទណ្ឌ) ។

## ២.អត្ថន័យ

### ២.១. ទម្រង់

ដីកានីមួយៗត្រូវបញ្ជាក់អត្តសញ្ញាណជនដែលដីកាត្រូវបានចេញប្រឆាំង ដែលមានបទល្មើសមួយត្រូវបានចោទប្រកាន់ប្រឆាំង ហើយមានអត្ថបទច្បាប់ដែលចែង និងបង្ក្រាបបទល្មើសនេះ ។ ដីកាត្រូវមានកាលបរិច្ឆេទ ហត្ថលេខា និងត្រាចៅក្រម (សេចក្ដីបញ្ជាទាំងនេះគួសបញ្ជាក់ពីសារៈសំខាន់ដែលភ្ជាប់ទៅនឹងភិនភាគជនសង្ស័យដើម្បីជៀសវាងរាល់ការភ័នច្រឡំអត្តសញ្ញាណជននេះ ក៏ដូចជាដើម្បីធានានូវភាពត្រឹមត្រូវនៃឯកសារមួយដែលចេញ ។ លើសពីនេះទៅទៀត កាលបរិច្ឆេទអនុញ្ញាតឱ្យត្រួតពិនិត្យថា តើចៅក្រមដែលចេញដីកានោះបានទទួល ដំណឹងពីការចោទប្រកាន់តាមផ្លូវច្បាប់ ឬទេ) ។

### ២.១. គតិច្បាប់

ដីកាចាប់ខ្លួន ឬដីកាឃុំខ្លួនអាចត្រូវចេញ បើសិនជាបទល្មើសចោទប្រកាន់នោះគឺជាបទឧក្រិដ្ឋ ឬបទមជ្ឈិមដែលទទួលទោសជាប់ពន្ធនាគារ ។

ដីកាចាប់ខ្លួនអាចត្រូវចេញ លុះត្រាតែសាមីខ្លួនដែលជាកម្មវត្ថុនៃដីកានេះកំពុងរត់គេច ឬជននេះស្នាក់នៅក្នុងកន្លែងមួយដែលគេមិនស្គាល់ ឬក្រៅពីដែនដីរបស់ព្រះរាជាណាចក្រកម្ពុជា ( មាត្រា ១៩៦ នៃក្រមនីតិវិធីព្រហ្មទណ្ឌ) ។

**៣. ការអនុវត្តដីកា**

ដីកាមានអនុភាពភ្លាមលើវិសាលភាពដែនដីព្រះរាជាណាចក្រទាំងមូល ។

**៣.១. បុគ្គលិកទទួលបន្ទុកអនុវត្តដីកា :**

**៣.១.១. ដីកាបង្គាប់ឱ្យចូលខ្លួន :**

ដីកាបង្គាប់ឱ្យចូលខ្លួនត្រូវបានជូនដំណឹងទៅសាមីខ្លួនដោយអាជ្ញាតុលាការ ឬមន្ត្រីនគរបាលយុត្តិធម៌ ឬភ្នាក់ងារនគរបាលយុត្តិធម៌ ( មាត្រា ១៨៨ នៃក្រមនីតិវិធីព្រហ្មទណ្ឌ) ។

**៣.១.២. ដីកានាំខ្លួន ឬដីកាចាប់ខ្លួន :**

ដីកានាំខ្លួន និងដីកាចាប់ខ្លួនត្រូវបានជូនដំណឹងដោយមន្ត្រីនគរបាលយុត្តិធម៌ម្នាក់ និងត្រូវចេញឱ្យជាច្បាប់ចំលងមួយច្បាប់ ( មាត្រា ១៩២ និង ១៩៩ នៃក្រមនីតិវិធីព្រហ្មទណ្ឌ) ។

អនុលោមតាមបទបញ្ញត្តិនៃមាត្រា ២០៦ នៃក្រមនីតិវិធីព្រហ្មទណ្ឌ ដីកាឃុំខ្លួនត្រូវ ជម្រាបដោយចៅក្រមស៊ើបសួរ និងអនុវត្តដោយនាយកពន្ធនាគារ ។

**៣.២. ការចូលក្នុងលំនៅដ្ឋាន :**

ដើម្បីអនុវត្តដីកានាំខ្លួន និងចាប់ខ្លួន មន្ត្រីនគរបាលយុត្តិធម៌ម្នាក់អាចចូលដោយកំលាំងទៅក្នុងលំនៅដ្ឋានជនដែលជាកម្មវត្ថុនៃដីកា។ ប៉ុន្តែ មន្ត្រីនគរបាលយុត្តិធម៌មិនអាចចូលក្នុងលំនៅដ្ឋាន មុនម៉ោងប្រាំមួយ និងក្រោយម៉ោង ១៨ បានឡើយ ( មាត្រា ១៩២ នៃក្រមនីតិវិធីព្រហ្មទណ្ឌ) ។

ការចូលក្នុងលំនៅដ្ឋាននេះមានគោលដៅតែមួយគត់គឺស្វែងរកសាមីខ្លួន ។ នេះមិនមែនជាប្រតិបត្តិការឆែកឆេរឡើយ ។ ត្រូវធ្វើការរុករកក្នុងលំនៅដ្ឋាន ដើម្បីរកឃើញសាមីខ្លួនជាយថាហេតុ ។

សញ្ញាណលំនៅដ្ឋានដែលត្រូវចាត់ជាបានការគឺសញ្ញាណនៃនិវេសនដ្ឋានចុងក្រោយដែលគេស្គាល់ ។

**៣.៣. ទំរង់ការ :**

ប្រតិបត្តិការទាំងអស់នេះសំដៅចាប់ខ្លួនជនដែលជាកម្មវត្ថុនៃដីកាដែលទទួលទម្រង់ការ តាមរយៈកំណត់

ហេតុ ដើម្បីបញ្ជូនទៅអាជ្ញាធរតុលាការ ទោះបីបានលទ្ធផល ឬមិនបានក៏ដោយ ។

កាលណាសាម៉ីខ្លួនត្រូវបានចាប់ខ្លួន មន្ត្រីនគរបាលយុត្តិធម៌ដែលទទួលបន្ទុកអនុវត្តត្រូវតែ ធានាថាដីកាត្រូវបានអនុវត្តត្រឹមត្រូវចំពោះសាម៉ីខ្លួន មន្ត្រីនគរបាលយុត្តិធម៌ត្រូវបង្ហាញដីកានេះ ហើយចុះក្នុងកំណត់ហេតុ រួចចេញដីកាចំលង ( មាត្រា ១៨៨ នៃក្រមនីតិវិធីព្រហ្មទណ្ឌ ) ។

ចៅក្រមស៊ើបសួរអាចនឹងចេញដីកាបង្គាប់ឱ្យឃុំខ្លួនបាន ក្រោយបានចេញដីកាឃុំខ្លួនបណ្ដោះអាសន្នមានសំអាងមួយរួច ( មាត្រា ២២០ នៃក្រមនីតិវិធីព្រហ្មទណ្ឌ) ។

## ៩.អានុភាពនៃដីកា

### ៩.១. ដីកាបង្គាប់ឱ្យចូលខ្លួន :

សាម៉ីខ្លួនដែលបង្ហាញខ្លួន នៅពេលអនុវត្តដីកាបង្គាប់ឱ្យចូលខ្លួនត្រូវបានសួរចម្លើយ ដោយចៅក្រមស៊ើបសួរភ្លាម ។

### ៩.២. ដីកានាំខ្លួន :

ជនដែលត្រូវបានចាប់ខ្លួនតាមដីកានាំខ្លួនត្រូវបានសួរចម្លើយដោយចៅក្រមស៊ើបសួរភ្លាម ។ ប៉ុន្តែ បើសិនជននេះមិនត្រូវបានសួរចម្លើយភ្លាមទេនោះ ជននេះត្រូវបាននាំទៅក្នុងការិយាល័យនគរបាល ឬកងអាវុធហត្ថមួយក្នុងពន្ធនាគារ ឬមន្ទីរឃុំឃាំង ។ សាម៉ីខ្លួនត្រូវតែបង្ហាញខ្លួនចំពោះមុខចៅក្រមស៊ើបសួរ ឬអ្នកជំនួសគាត់យ៉ាងយូរមួយថ្ងៃក្រោយ ពុំនោះសោតនឹងត្រូវដោះលែងវិញ ។

### ៩.៣. ដីកាបង្គាប់ឱ្យចាប់ខ្លួន :

ប្រធានពន្ធនាគារ ឬមណ្ឌលឃុំខ្លួន ត្រូវតែទទួល និងឃុំខ្លួនជនត្រូវចោទដែលជាកម្មវត្ថុនៃដីកាបង្គាប់ឱ្យចាប់ខ្លួន ។ ប្រធានពន្ធនាគារ ឬមណ្ឌលឃុំខ្លួនរក្សាទុកដើមដីកា ឬចុងដីកាដែលមានបញ្ជាក់ថាត្រឹមត្រូវតាមច្បាប់ដើម ។

បុគ្គលដែលពាក់ព័ន្ធត្រូវតែបានគេនាំទៅបង្ហាញដល់ចៅក្រមស៊ើបសួរ ឬអ្នកជំនួសចៅក្រមស៊ើបសួរក្នុងរយៈពេលយ៉ាងខ្លីបំផុត ប្រសិនបើស្ថិតក្នុងដំណាក់កាលស៊ើបសួរនៅឡើយ ។

ប្រសិនបើការនាំខ្លួនទៅបង្ហាញនេះ តម្រូវឱ្យមានការផ្ទេរបុគ្គលពាក់ព័ន្ធទៅពន្ធនាគារ ឬទៅមណ្ឌលឃុំខ្លួនមួយផ្សេងទៀត ការផ្ទេរនេះត្រូវចាត់ចែងដោយអយ្យការ ។

ប្រសិនបើបុគ្គលពាក់ព័ន្ធមិនត្រូវបានគេនាំខ្លួនទៅបង្ហាញដល់ចៅក្រមស៊ើបសួរ ឬអ្នកជំនួសចៅក្រមស៊ើបសួរនៅថ្ងៃបន្ទាប់ពីការចាប់ខ្លួន បុគ្គលនេះត្រូវតែបានព្រះរាជអាជ្ញានាទីកន្លែងឃុំខ្លួនស្តាប់ចម្លើយ ។

ព្រះរាជអាជ្ញានេះធ្វើកំណត់ហេតុស្តីពីការស្តាប់ចម្លើយ ដែលត្រូវបញ្ជូនទៅចៅក្រមស៊ើបសួរ ។ "

**៤.៤. ដីកាបង្គាប់ឱ្យឃុំខ្លួន :**

ចៅក្រមស៊ើបសួរអាចចេញដីកាឃុំខ្លួនបានលុះត្រាតែជនត្រូវទទួលការត្រួតពិនិត្យជាកម្មវត្ថុនៃដីកាឃុំឃាំងជាបណ្តោះអាសន្ន ។

"ប្រធានពន្ធនាគារ ឬមណ្ឌលឃុំខ្លួនត្រូវតែទទួល និងឃុំខ្លួនបុគ្គលដែលមានដីកាបង្គាប់ឱ្យឃុំខ្លួនរហូតទាល់តែបានទទួលការឱ្យដំណឹងអំពីការដោះលែងឱ្យមានសេរីភាពវិញ ។ ប្រធានពន្ធនាគារឬមណ្ឌល ឃុំខ្លួនរក្សាទុកដើម ដីកាបង្គាប់ឱ្យឃុំខ្លួន ឬចុងដីកានេះ ដែលបញ្ជាក់ថាត្រឹមត្រូវតាមច្បាប់ដើម ។ "

**៥-ការផ្សព្វផ្សាយដីកា**

ក្នុងករណីបន្ទាន់ដីកាបង្គាប់ឱ្យនាំខ្លួនមាត្រា១៩២នៃក្រមនិតិវិធីព្រហ្មទណ្ឌ ឬដីកាបង្គាប់ឱ្យចាប់ខ្លួន អាចការផ្សព្វផ្សាយតាមគ្រប់មធ្យោបាយ ( មាត្រា១៩៩ នៃក្រមនីតិវិធីព្រហ្មទណ្ឌ) ។

**ឬង់កំណត់ហេតុជូនដំណឹងពីដីកា**

**ឬង់កំណត់ហេតុជូនដំណឹងពីដីកានាំខ្លួន**

១. យោងដីការតុលាការ ។ ចង្អុលបង្ហាញសេចក្តីយោងដីកាដែលត្រូវអនុវត្តទាំងអស់ ( កាលបរិច្ឆេទចេញដីកា ឈ្មោះ និងគុណសម្បត្តិចៅក្រមដែលចេញបង្គាប់ចូលខ្លួន) ។

២. ជំនួយដោយសហការីម្នាក់ ឬច្រើន ។

៣. ធ្វើដំណើរទៅកាន់លំនៅដ្ឋានសាម៉ីខ្លួន ។

៤. មកដល់ទីកន្លែង ។

៥. មន្ត្រីនគរបាលយុត្តិធម៌ចុះអត្តសញ្ញាណបុគ្គលដែលទទួលខ្លួន ហើយពន្យល់ជននេះពីមូល ហេតុនៃទស្សនាការខ្លួន បន្ទាប់ពីបង្ហាញអត្តសញ្ញាណដើម្បីឱ្យគេដឹងអត្តសញ្ញាណប័ណ្ណវិជ្ជាជីវៈខ្លួន

ប៉ាន់ដែនគរបាល ( គ្មានប្រយោជន៍ទេ បើសិន មន្ត្រីនគរបាលយុត្តិធម៌ពាក់ឯក សណ្ឋាន) ។

៦. មន្ត្រីនគរបាលយុត្តិធម៌បង្ហាញដីការតុលាការដែលខ្លួនកាន់កាប់ ។

៧. ធ្វើការឆែកឆេរសុវត្ថិភាព ។

៨. ជូនដំណឹងពីដីកាដល់សាមីខ្លួន ( ទទួលស្តាប់សេចក្តីប្រកាសសង្ខេបរបស់សាមីខ្លួន ) ។

៩. ចេញដីការចំលងមួយច្បាប់ ។

១០. វិលត្រលប់មកអង្គភាពវិញ ។

១១. និទ្ទេសបិទកំណត់ហេតុត្រូវចុះម៉ោងបញ្ចប់ប្រតិបត្តិការ ហត្ថលេខាសាមីខ្លួន អ្នកចូលរួម និងមន្ត្រីនគរបាលយុត្តិធម៌ ។

១២. ជូនដំណឹងទៅចៅក្រមតាមទូរស័ព្ទ ។

១៣. សាមីខ្លួនបង្ហាញខ្លួនចំពោះមុខចៅក្រមដែលបង្គាប់ខ្លួន ។

**រម្លឹក :** ការប្រើកំលាំងអាចធ្វើទៅបានដើម្បីអនុវត្តដីកានាំខ្លួន ដីកាបង្គាប់ឱ្យចាប់ខ្លួន ដីកាបង្គាប់ឃុំខ្លួន លើកលែង តែដីការបង្គាប់ឱ្យចូលខ្លួន( ដីកានេះជាការកោះអញ្ជើញជនត្រូវ ចោទជាឱឡារិករបស់ចៅក្រម ស៊ើបសួរ) ។

ត្រូវគិតដល់ការគោរពម៉ោងស្របច្បាប់ ។

**<u>ឬងកំណត់ហេតុជូនដំណឹងពីដីកាចាប់ខ្លួនមិនបានសម្រេច</u>**

១.យោងដីកាតុលាការ ។

ចង្អុលបង្ហាញសេចក្តីយោងដីកាដែលត្រូវអនុវត្តទាំងអស់ ( កាលបរិច្ឆេទចេញដីកា ឈ្មោះ និងគុណសម្បត្តិចៅក្រមដែលចេញដីកា) ។

បញ្ជាក់ពីធម្មជាតិបទល្មើសដែលចោទលើសាមីខ្លួន ប្រភេទបទល្មើស និងមាត្រាច្បាប់ដែលអាចអនុវត្តបាន ។

២.ជំនួយដោយ ។

៣ ធ្វើដំណើរទៅកាន់លំនៅដ្ឋានសាមីខ្លួន ។

៤ មន្ត្រីនគរបាលយុត្តិធម៌ចុះនិទ្ទេសអត្តសញ្ញាណបុគ្គលដែលទទួលខ្លួនបន្ទាប់ពីបង្ហាញអត្តសញ្ញាណ

ខ្លួន ( អត្តសញ្ញាណប័ណ្ណវិជ្ជាជីវៈ ។ល ។) មន្ត្រីនគរបាលយុត្តិធម៌ប្រកាសពីមូលហេតុនៃទស្សនាការរបស់ខ្លួន រួចចេញដីការតុលាការដែលខ្លួនកាន់កាប់ ។

៥. មន្ត្រីនគរបាលយុត្តិធមិទទួលស្តាប់ការប្រកាសសង្ខេបផ្ទាល់មាត់របស់ជននេះ (កថាមិនផ្ទាល់) ស្តីពីអវត្តមានរបស់ជនដែលជាកម្មវត្ថុរបស់ដីកា ។

៦. ទស្សនាការទីកន្លែងក្នុងបំណងពិនិត្យថាតើសាម៉ីខ្លួនមានវត្តមាន ឬអវត្តមាន ។

បើសិន សាម៉ីខ្លួនមិនត្រូវបានចាប់ខ្លួន ត្រូវធ្វើរកំណត់ហេតុនៃកឆោរ និងស្វែងរកមិនបានសម្រេចមួយជូនចៅក្រមដែលចេញដីកា ។

ចំនុចសំខាន់ : កុំចាត់ទុកទស្សនាការលំនៅដ្ឋាននេះជាដីការឆែកឆេរលំនៅដ្ឋានដូចមានចែងក្នុង មាត្រា ១៥៩ នៃក្រមនិតិវិធីព្រហ្មទណ្ឌ ។ ទស្សនាការដែលត្រូវធ្វើឡើងជាទូទៅ ក្នុងលំនៅដ្ឋានចុង ក្រោយដែលត្រូវបានស្គាល់នេះមានគោលបំណងតែមួយគត់គឺឱ្យដឹងថាសាម៉ីខ្លួនមានវត្តមាន ឬអវត្តមាន ។

បើសិនពុំមាននរណាម្នាក់នៅក្នុងលំនៅដ្ឋានជនត្រូវចោទទេនោះ ទស្សនាការលំនៅដ្ឋាននឹងត្រូវធ្វើ ឡើង បន្ទាប់ពីបានសុំជំនួយពីជាងសោរម្នាក់ និងចំពោះមុខសាក្សីពីរនាក់ (អ្នកជិតខាង...)ដែលត្រូវ ស្នើសុំឱ្យដើម្បីប្រតិបត្តិការនេះ ។

៧. វិលត្រលប់មកអង្គភាពវិញ ។

៨. និទ្ទេសបិទកំណត់ហេតុត្រូវចុះម៉ោងបញ្ចប់ប្រតិបត្តិការ ហត្ថលេខាសាម៉ីខ្លួន អ្នកចូលរួម និង មន្ត្រីនគរបាលយុត្តិធមិ ។

៩.ជូនដំណឹងទៅចៅក្រមដែលបង្គាប់ខ្លួនពីលទ្ធផលនៃការស្វែងរក ។

១០. ការបិទ និងការបញ្ជូនកំណត់ហេតុ ។

| ក្របខណ្ឌតិយុត្តិ | ប្រភេទបណ្តឹង | ការឃាត់ខ្លួន | ជូនដំណឹងពីការបញ្ចប់ការឃាត់ខ្លួន | ជូនដំណឹងពីការពន្យារពេលឃាត់ខ្លួន | ជូនដំណឹងពីការបញ្ចប់ការឃាត់ខ្លួនដែលមានការពន្យារ | ការតែកនេរ-វិបអូស |
|---|---|---|---|---|---|---|
| ការស៊ើបអង្កេតបទល្មើសជាក់ស្តែង<br><br>ការស៊ើបអង្កេតបឋមដីកាចាត់អោយស៊ើបសួរជំនួស | -ដោយឯកឯងគ្មានការឃាត់ខ្លួន<br>-ដោយឯកឯងមានការឃាត់ខ្លួន<br>-ការដាក់ក្រោមការចាត់ចែងរបស់តុលាការ<br>-បណ្តឹង<br>-បណ្តឹងបរិហារ<br>-ការស៊ើបសួររបស់អយ្យការ<br>-ដីកាចាត់អោយស៊ើបសួរជំនួស<br>-ចំណាត់ការបន្តការដកសិទ្ធិពី បណ្តឹង<br>-ការទទួលបណ្តឹងថែដន្យ | -ចំណាត់ការបន្តដោយមានការឃាត់ខ្លួន<br>-តាមការកោះហៅ<br>-តាមបញ្ជារអយ្យការ<br>-តាមបញ្ជារចៅក្រមស៊ើបសួរ<br>-នីតិជន<br>-អនីតិជនអាយុ១៦ដល់១៨ឆ្នាំប្រព្រឹត្តបទឧក្រិដ្ឋ<br>-អនីតិជនអាយុ១៤ដល់១៦ឆ្នាំប្រព្រឹត្តបទឧក្រិដ្ឋ<br>-អនីតិជនអាយុ១៦ដល់១៨ឆ្នាំប្រព្រឹត្តបទមជ្ឈិម<br>-អនីតិជនអាយុ១៤ដល់១៦ឆ្នាំប្រព្រឹត្តបទមជ្ឈិម | -ការបញ្ជូនទៅអយ្យការ<br>-ការបញ្ជូនទៅចៅក្រមស៊ើបសួរ<br>-ការដោះលែង | -ការស៊ើបសួររបស់អយ្យការ<br>-ការស៊ើបសួរចៅក្រមស៊ើបសួរ | -ការបញ្ជូនជនសង្ស័យទៅអយ្យការ<br>-ការបញ្ជូនជនសង្ស័យទៅចៅក្រមស៊ើបសួរ<br>-ការដោះលែង | -ចំពោះមុខអ្នកកាន់កាប់ទីកន្លែង<br>-ចំពោះមុខសាក្សីពីរនាក់ |

| បិទស្លាកបោះត្រា នៅអង្គភាព | សេចក្ដីសន្និដ្ឋាន ស៊ើបសួរ | ពាក្យបណ្ដឹង | ការផ្ដល់ចម្លើយ | ការស្ដាប់ចម្លើយ ជនសង្ស័យ | ផ្សេងៗ | ដីកា |
| --- | --- | --- | --- | --- | --- | --- |
| -បិទស្លាកបោះត្រា | -សេចក្ដីសន្និដ្ឋានស៊ើបសួរគ្រូពេទ្យ | -ប្រឆាំងនឹង<br>-ប្រឆាំងនឹងឈ្មោះ | -នីតិជន<br>-អនីតិជន<br>-ដោយមានជំនួយអ្នកបកប្រែ<br>-ការបង្ហាញជនសង្ស័យឱ្យសាក្សីចំណាំមុខ | -នីតិជន<br>-អនីតិជន<br>-ដោយមានអ្នកបក ប្រែការប្រទល់មុខ | -ការឃ្លាំមើល និងការតាមដាន<br>-កំណត់ហេតុកត់ត្រាការស្ដាប់ចម្លើយ<br>-ការទទួលឯកសារ<br>-ការស្រាវជ្រាវសលាកប័ត្រ ឬរដ្ឋបាល<br>-ការសន្ទនាជាមួយមេធាវី | -ដីកាបង្គាប់អោយចូលខ្លួន<br>-ដីកានាំខ្លួន<br>-ដីកាចាប់ខ្លួន |

# បញ្ជីកំណត់ហេតុគំរូ

**កំណត់ហេតុទទួលបណ្តឹង :**

១-កំណត់ហេតុទទេ

២-កំណត់ទទួលបណ្តឹង-បណ្តឹង

៣-កំណត់ហេតុទទួលបណ្តឹង-ឃាត់ខ្លួន

៤-កំណត់ហេតុទទួលដីកាចាត់អោយស៊ើបសួរជំនួស

**កំណត់ហេតុស្តាប់ចម្លើយ-ប្រទល់មុខ :**

៥-កំណត់ហេតុស្តាប់ចម្លើយ-បណ្តឹង

៦-កំណត់ហេតុស្តាប់ចម្លើយ

៧-កំណត់ហេតុស្តាប់ចម្លើយសាក្សី

៨-កំណត់ហេតុប្រទល់មុខ

**កំណត់ហេតុជូនដំណឹងពីការឃាត់ខ្លួន :**

៩-កំណត់ហេតុជូនដំណឹងពីការឃាត់ខ្លួននីតិជនក្នុងករណីស៊ើបអង្កេតបទល្មើសជាក់ស្តែង :

១០-កំណត់ហេតុជូនដំណឹងពីការឃាត់ខ្លួននីតិជនក្នុងករណីស៊ើបអង្កេតបឋម :

១១-កំណត់ហេតុជូនដំណឹងពីការឃាត់ខ្លួននីតិជនតាមដីកាចាត់អោយស៊ើបសួរជំនួស

១២-កំណត់ហេតុជូនដំណឹងពីការឃាត់ខ្លួនអនីតិជនអាយុពី ១៦ ដល់១៨ឆ្នាំ ក្នុងករណីស៊ើបអង្កេតបទល្មើសជាក់ស្តែង ចំពោះបទឧក្រិដ្ឋ

១៣-កំណត់ហេតុជូនដំណឹងពីឃាត់ខ្លួនអនីតិជនអាយុពី ១៤ ដល់១៦ឆ្នាំ ក្នុងករណីស៊ើបអង្កេតបទល្មើសជាក់ស្តែង ចំពោះបទឧក្រិដ្ឋ

១៤-កំណត់ហេតុជូនដំណឹងពីការឃាត់ខ្លួនអនីតិជនអាយុពី ១៦ ដល់១៨ឆ្នាំ ក្នុងករណីស៊ើបអង្កេតបទល្មើសជាក់ស្តែង ចំពោះបទមជ្ឈិម

១៥-កំណត់ហេតុជូនដំណឹងពីការឃាត់ខ្លួនអនីតិជនអាយុពី ១៤ ដល់១៦ឆ្នាំ ក្នុងករណីស៊ើបអង្កេតបទល្មើសជាក់ស្តែង ចំពោះបទមជ្ឈិម

១៦-កំណត់ហេតុជូនដំណឹងពីការពន្យារពេលឃាត់ខ្លួន ក្នុងករណីស៊ើបអង្កេតបទល្មើសជាក់ស្តែង

**-កំណត់ហេតុឆែកឆេរលំនៅដ្ឋាន-ការឆែកឆេររាងកាយ :**

១៧-កំណត់ហេតុឆែកឆេរលំនៅដ្ឋាន ក្នុងករណីស៊ើបអង្កេតបទល្មើសជាក់ស្តែងដែលមានជនសង្ស័យ

១៨-កំណត់ហេតុឆែកឆេរលំនៅដ្ឋាន ក្នុងករណីស៊ើបអង្កេតបទល្មើសជាក់ស្តែងដែលមានសាក្សី២ នាក់

១៩-កំណត់ហេតុឆែកឆេរលំនៅដ្ឋាន ក្នុងករណីស៊ើបអង្កេតបឋមដែលមានជនសង្ស័យ

២០-កំណត់ហេតុឆែកឆេរលំនៅដ្ឋានតាមដីកាចាត់អោយស៊ើបសួរជំនួសដែលមានជនសង្ស័យ

២១-កំណត់ហេតុឆែកឆេររាងកាយ

**-កំណត់ហេតុបញ្ចប់ការឃាត់ខ្លួន :**

២២-កំណត់ហេតុបញ្ចប់ការឃាត់ខ្លួន ក្នុងករណីស៊ើបអង្កេតបទល្មើសជាក់ស្តែងដោយមានការបញ្ជូនខ្លួនជនសង្ស័យ

២៣-កំណត់ហេតុបញ្ចប់ការឃាត់ខ្លួន ក្នុងករណីស៊ើបអង្កេតបទល្មើសជាក់ស្តែងក្រោយពីបានពន្យារពេលឃាត់ខ្លួន ដោយមានការបញ្ជូនខ្លួនជនសង្ស័យ

**ផ្សេងៗ :**

២៤-កំណត់ហេតុសេចក្តីសន្និដ្ឋានស៊ើបសួរវេជ្ជបណ្ឌិត

២៥-ប្រមូលមនុស្សមួយក្រុមដើម្បីបង្ហាញឱ្យសាក្សីចំណាំ

២៦-កំណត់ហេតុកសាងសៀវភៅរូបថត

២៧-កំណត់ហេតុបង្ហាញចារីអោយសាក្សីចំណាំ

២៨-កំណត់ហេតុស៊ើបអង្កេតទីជិតខាងក្នុងករណីស៊ើបអង្កេតបទល្មើសជាក់ស្តែង

២៩-កំណត់ហេតុស៊ើបអង្កេតទីជិតខាងក្នុងករណីស៊ើបអង្កេតបឋម

៣០-កំណត់ហេតុជូនដំណឹងអយ្យការ-បិទកិច្ចស៊ើបអង្កេត និងបញ្ជូនរបាយការណ៍

**ក្រសួងមហាផ្ទៃ**

-------------

**អគ្គស្នងការដ្ឋាននគរបាលជាតិ**

-------------

**នាយកដ្ឋានកណ្តាលនគរបាលយុត្តិធម៌**

-------------

**កំណត់ហេតុ**

លេខ

**ករណី :**

ប្រឆាំង

**កម្មវត្ថុ :**

**ព្រះរាជាណាចក្រកម្ពុជា**

**ជាតិ-សាសនា-ព្រះមហាក្សត្រ**

# កំណត់ហេតុ

ឆ្នាំ ២០០...............ថ្ងៃទី..........................................................................

នៅម៉ោង :.......................................................................................................

យើង : **គោត្តនាម នាម**

**ឋានន្តរសក្តិ**

**ធ្វើការនៅ (ទីក្រុង ឬអង្គភាព)**

**មន្ត្រីនគរបាលយុត្តិធម៌នៅ : (ទីក្រុង)---**

| | |
|---|---|
| **ក្រសួងមហាផ្ទៃ** | **ព្រះរាជាណាចក្រកម្ពុជា** |
| ------------- | **ជាតិ-សាសនា-ព្រះមហាក្សត្រ** |
| **អគ្គស្នងការដ្ឋាននគរបាលជាតិ** | |
| ------------- | |
| **នាយកដ្ឋានកណ្តាលនគរបាលយុត្តិធម៌** | **កំណត់ហេតុ** |
| ------------- | ឆ្នាំ ២០០...............ថ្ងៃទី.................................................................. |
| | នៅម៉ោង :.............................................................................. |
| **កំណត់ហេតុ** | យើង : គោត្តនាម នាម |
| លេខ | អនុសេនីយ៍ឯកនគរបាល |
| | ធ្វើការនៅ (ទីក្រុង ឬអង្គភាព) |
| **ករណី :** | មន្ត្រីនគរបាលយុត្តិធម៌នៅ : (ទីក្រុង) --- |
| ប្រឆាំង/ គោត្តនាម នាម អាយុ | ---នៅអង្គភាព--- |
| ចំណាត់ថ្នាក់បទល្មើស | ---យើងបានដឹងពី.......(ទំនាក់ទំនងរឿងហេតុខ្លះៗ) --- |
| (ឧទាហរណ៍:អំពើហិង្សាដោយចេតនា) | ---ធ្វើសកម្មភាពក្នុងក្របខណ្ឌស៊ើបអង្កេត....(បទល្មើសជាក់ស្តែង ឬស៊ើបអង្កេតបឋម) |
| | ---បានឃើញមាត្រា ៨៦ និងបន្តបន្ទាប់ ឬមាត្រា ១១១ និងបន្តបន្ទាប់នៃក្រមនីតិវិធីព្រហ្មទណ្ឌ--- |
| **កម្មវត្ថុ :** | |
| ទទួលបណ្តឹង-បណ្តឹង ពី : | ---យើងបានធ្វើដំណើរទៅ....--- |
| (គោត្តនាម នាម អាយុ មុខរបរ លំនៅដ្ឋាន) | ---ឬនៅម៉ោង(...) --- |
| | ---យើងបានប្រាស្រ័យទាក់ទងជាមួយ......(អត្តសញ្ញាណខ្លះ) --- |
| | ---ដែលប្រកាសប្រាប់ថា :--- |
| | ---«(ចម្លើយប្រកាសរបស់ជនរងគ្រោះ)... |
| | ---ខ្ញុំដាក់ពាក្យបណ្តឹងប្រឆាំងលោក X ពីបទ(...) ។--- |
| | ---ខ្ញុំប្រគល់(...)អោយអ្នក ។--- |
| | ---ក្រោយពីអានដោយខ្លួនឯងរួចលោក(គោត្តនាម នាម) មិនផ្លាស់ប្តូរចម្លើយ ហើយយល់ព្រមចុះ ហត្ថលេខាលើកំណត់ហេតុនេះជាមួយយើង ។---------- |
| | **សាម៉ីខ្លួន** **ជំនួយការ** **អនុសេនីយ៍ឯកនគរបាល** |

| | |
|---|---|
| **ឧបសម្ព័ន** | ---យើងភ្ជាប់ក្នុងឧបសម្ព័នកំណត់ហេតុនេះ........... ។---------- |
| | **អនុសេនីយ៍ឯកនគរបាល** |
| ជូនដំណឹងអយ្យការ | ---ក្រោយមក នៅម៉ោង យើងបានជូនដំណឹងលោក (គោត្តនាម នាម) ព្រះរាជអាជ្ញាអមសាលា ដំបូងក្រុង(...)លោកព្រះរាជអាជ្ញាបញ្ជារអោយយើងធ្វើការស៊ើបអង្កេត ហើយរាយការណ៍ជូនគាត់ ជាប់ជានិច្ច ។--- |
| | **អនុសេនីយ៍ឯកនគរបាល** |

**ក្រសួងមហាផ្ទៃ**

-------------

**អគ្គស្នងការដ្ឋាននគរបាលជាតិ**

--------------

**នាយកដ្ឋានកណ្តាលនគរបាលយុត្តិធម៌**

--------------

**កំណត់ហេតុ**

លេខ

**ករណី :**

ប្រឆាំង/( គោត្តនាម នាម)

ចំណាត់ថ្នាក់អង្គហេតុតាមផ្លូវច្បាប់

( ការប៉ុនប៉ងលួចយានជំនិះ)

**កម្មវត្ថុ :**

**ទទួលបណ្តឹង-ឃាត់ខ្លួន** ឈ្មោះ:

គោត្តនាម នាម-អាយុ-

មុខរបរ-លំនៅដ្ឋាន)

**ព្រះរាជាណាចក្រកម្ពុជា**

**ជាតិ-សាសនា-ព្រះមហាក្សត្រ**

## កំណត់ហេតុ

ឆ្នាំ ២០០..............ថ្ងៃទី.................................................................

នៅម៉ោង :..........................................................................................

យើង : **គោត្តនាម នាម**

**អនុសេនីយ៍ឯកនគរបាល**

**ធ្វើការនៅ ( ទីក្រុង ឬអង្គភាព)**

**មន្ត្រីនគរបាលយុត្តិធម៌នៅ : ( ទីក្រុង) ---**

---យើងនៅក្នុងរថយន្តអង្គភាពដែលចត ( កន្លែងពិតប្រាកដ ឧទាហរណ៍នៅពីមុខផ្ទះលេខ២៥៦ ផ្លូវ៦១រាជធានីភ្នំពេញ) ---

---ជំនួយដោយលោកអនុសេនីយទោ( ...)និងឧត្តមសេនីយ៍ត្រី( ...) មកពីអង្គភាព

---យើងបានឃើញ( ពិពណ៌នាលំអិតអ្វីដែលគេឃើញ ឧទាហរណ៍បុរសម្នាក់អាយុប្រហែល៤០ឆ្នាំ ស្បែកពាក់ខ្មៅ) ........................................................................................ដើរចូលជិតរថយន្តតូយ៉ូតា៤វ៉ាន់នីរ....................

( ពិពណ៌នាពីរថយន្ត) ចតពីមុខ( កន្លែង) ........................................................

ជននោះបានបំបាក់សោរទ្វារមុខខាងឆ្វេងរថយន្តដោយប្រើ.........................រួចចូលកន្លែងបញ្ជា ហើយអោនទៅក្រោមតាប្លូឡាន ។---

---ធ្វើសកម្មភាពក្នុងក្របខ័ណ្ឌស៊ើបអង្កេតបទល្មើសជាក់ស្តែង---

---បានឃើញមាត្រា ៨៦ និងបន្តបន្ទាប់នៃក្រមនីតិវិធីព្រហ្មទណ្ឌ------

---បានធ្វើការឃាត់ខ្លួនសាម៉ីខ្លួននៅម៉ោង( ម៉ោងពិតប្រាកដ ឧទាហរណ៍ម៉ោង ៩:២០នាទី ) ។----

---ក្រោយពីបានធ្វើការស្ទាបសុវត្ថិភាព បានរកឃើញសាម៉ីខ្លួនកាន់កាប់......... ។------

---ពេលហៅសាម៉ីខ្លួនដើម្បីសួរអត្តសញ្ញាណ ជននេះបានប្រាប់យើងថា............. ..................................................................................---------

យើងប្រាប់សាមីខ្លួនថាគេត្រូវឃាត់ខ្លួនពីម៉ោង.............ក្នុងករណីប៉ុនប៉ងលួចរថយន្ត ។---

---យើងបានប្រាប់សាមីខ្លួនថាយើងនឹងចេញកំណត់ហេតុដើម្បីបញ្ជាក់ពីការឃាត់ខ្លួននេះពេលត្រលប់ទៅដល់អង្គភាពវិញ ។---

---យើងបានបង្ហាញជននេះនូវ................ដែលរកឃើញលើខ្លួនគេ។ សាមីខ្លួនប្រាប់ថា....

---យើងបានរឹបអូស ហើយបិទស្លាកបោះត្រា(...................) ។------

---បានសង្កេតឃើញថាសោរទ្វារខាងឆ្វេង........................... ។------

**រឹបអូស និងបិទស្លាកបោះត្រា**

---នៅដំណាក់កាលស៊ើបអង្កេតនេះ យើងបានប្រាប់ថា.................................. ........................................................................ ។----------------

---ក្រោយពីអានដោយខ្លួនឯងរួច សាមីខ្លួនមិនផ្លាស់ប្តូរចម្លើយ ហើយយល់ព្រមចុះហត្ថលេខាជា មួយយើង និងជំនួយការយើងលើកំណត់ហេតុនេះក៏ដូចជាលើសលាកប័ត្រដែលសរសេរ នៅម៉ោង ......... ។---

**សាមីខ្លួន** **ជំនួយការ** **អនុសេនីយ៍ឯកនគរបាល**

| ក្រសួងមហាផ្ទៃ<br>-------------<br>អគ្គស្នងការដ្ឋាននគរបាលជាតិ<br>--------------<br>នាយកដ្ឋានកណ្តាលនគរបាលយុត្តិធម៌<br>--------------<br><br>**កំណត់ហេតុ**<br>លេខ<br>ករណី :<br>**ចំណាត់ថ្នាក់អង្គហេតុតាមផ្លូវច្បាប់** | **ព្រះរាជាណាចក្រកម្ពុជា**<br>**ជាតិ-សាសនា-ព្រះមហាក្សត្រ**<br><br>**កំណត់ហេតុ**<br>ឆ្នាំ ២០០...............ថ្ងៃទី..................................................................<br>នៅម៉ោង :...............................................................................<br>យើង : **គោត្តនាម នាម**<br>**អនុសេនីយ៍ឯកនគរបាល**<br>**ធ្វើការនៅ (ទីក្រុង ឬអង្គភាព)** |
|---|---|
| ប្រឆាំង/(គោត្តនាម នាម ឬ X)<br><br>**ករណី :**<br>ទទួលដីកាចាត់អោយស៊ើបសួរជំនួសបេសកកម្មសម្រាប់មន្ត្រីនគរបាលយុត្តិធម៌<br><br>**និទ្ទេសន៍ :**<br>ការបញ្ចូលជាឧបសម្ព័ន្ធដើមដីកាចាត់អោយស៊ើបសួរជំនួស | ---នៅអង្គភាព...<br>---យើងទទួលបញ្ជាពីប្រធានអង្គភាពយើងអោយអនុវត្តដីកាចាត់អោយស៊ើបសួរជំនួស លេខ (..) ចេញថ្ងៃទី (កាលបរិច្ឆេទដីកា)ដោយលោក (គោត្ត នាម នាម) ចៅក្រមស៊ើបសួរអមសាលាដំបូងក្រុង (..)ដែលធ្វើការស៊ើបសួរក្នុងក្របខ័ណ្ឌស៊ើបសួរប្រឆាំងឈ្មោះ (គោត្តនាម នាម ឬអញ្ញាតជន)ក្រោមបទចោទប្រកាន់ :--------------------ចំណាត់ថ្នាក់អង្គហេតុតាមផ្លូវច្បាប់-----------។ បេសកកម្មដែលប្រគល់អោយយើង មានដូចតទៅ :-----------------------«---------------------------------------<br>--------ចំលងតំរូវដីកាចាត់អោយស៊ើបសួរជំនួសឡើងវិញទាំងស្រុង -----»<br>យើងបានប្រាប់ថាកិច្ចដែលសរសេរក្នុងក្របខ័ណ្ឌស៊ើបអង្កេតនេះនឹងដាក់តាមលំដាប់ខាងក្រោយកំណត់ហេតុនេះ ។-------------កំណត់ហេតុ-------។<br>**អនុសេនីយ៍ឯកនគរបាល**<br>---បន្ទាប់មក-------------------------------------------<br>---យើងបានប្រាប់អោយដាក់ដីកាចាត់អោយស៊ើបសួរជំនួសច្បាប់ដើមដែលចៅក្រមឈ្មោះ(គោត្តនាម នាម)បានចេញអោយយើងខាងក្រោយកំណត់ហេតុនេះ ។---------<br>**អនុសេនីយ៍ឯកនគរបាល** |

**ក្រសួងមហាផ្ទៃ**

-------------

**អគ្គស្នងការដ្ឋាននគរបាលជាតិ**

--------------

**នាយកដ្ឋានកណ្តាលនគរបាលយុត្តិធម៌**

--------------

**ព្រះរាជាណាចក្រកម្ពុជា**

**ជាតិ-សាសនា-ព្រះមហាក្សត្រ**

# កំណត់ហេតុ

ឆ្នាំ ២០០..............ថ្ងៃទី.....................................................................

នៅម៉ោង :..................................................................................

យើង : **គោត្តនាម នាម**

**អនុសេនីយ៍ឯកនគរបាល**

**ធ្វើការនៅ (ទីក្រុង ឬអង្គភាព)**

**មន្ត្រីនគរបាលយុត្តិធម៌នៅ :** (ទីក្រុងភ្នំពេញ) ---

---នៅអង្គភាព...

---ធ្វើការស៊ើបអង្កេត(ករណីជាក់ស្តែង ឬការស៊ើបអង្កេតបឋម) ------

---បានឃើញមាត្រា ៨៦ និងបន្តបន្ទាប់ក្រមនីតិវិធីព្រហ្មទណ្ឌ ឬមាត្រា ១១១ និងបន្តបន្ទាប់ ក្រម នីតិវិធីព្រហ្មទណ្ឌ។ ---

---បានឃើញឈ្មោះ (ឈ្មោះ ត្រកូល) មកបង្ហាញខ្លួនហើយបានរាយការណ៍ថា ជាជនរងគ្រោះនៃ (បទល្មើស) ប្រព្រឹត្តនៅ (កន្លែង) ថ្ងៃ (កាលបរិច្ឆេទ) រវាងម៉ោង.....និងម៉ោង។---

---យើងបានស្តាប់ចម្លើយលោក(អត្តសញ្ញាណខ្លះៗ) ដែលប្រកាសប្រាប់យើងថា :---

---**ទាក់ទងនឹងអង្គហេតុ :**-----------------------

---« (ចម្លើយប្រកាសរបស់ជនរងគ្រោះ)...

---ខ្ញុំសូមដាក់ពាក្យបណ្តឹងប្រឆាំងលោក X ពីបទ(...) ។---

---ខ្ញុំសូមប្រគល់ជូនលោក(...) ។---

---ខ្ញុំកត់ត្រាថាលោកប្រគល់ច្បាប់ចំលងកំណត់ហេតុដាក់ពាក្យបណ្តឹងឱ្យខ្ញុំ។--- ក្រោយពីអានដោយខ្លួនឯងរួច លោក(ឈ្មោះ ត្រកូល) មិនផ្លាស់ប្តូរចម្លើយ ហើយយល់ព្រមចុះហត្ថលេខា លើកំណត់ហេតុនេះជាមួយយើង និងជំនួយការយើង នៅម៉ោង------------

**កំណត់ហេតុ**

លេខ

**ករណី :**

ប្រឆាំង/ឈ្មោះ ត្រកូល អាយុ

ប្រភេទបទល្មើស

(ឧទាហរណ៍:អំពើហិង្សា

ដោយចេតនា)

**កម្មវត្ថុ ៖**

**ស្តាប់ចម្លើយ-បណ្តឹងពី ៖**

(ឈ្មោះ ត្រកូល អាយុ

មុខរបរ លំនៅដ្ឋាន)

ឧបសម្ព័ន

និទ្ទេសន៍

ជម្រាបជូនអយ្យការ

លោក(ឈ្មោះ ត្រកូល) **អនុសេនីយ៍ឯកនគរបាល**

---ភ្ជាប់ជាឧបសម្ពនកំណត់ហេតុនេះ......--- **អនុសេនីយ៍ឯកនគរបាល**

ប្រគល់ជូនជនរងគ្រោះនូវច្បាប់ចំលងកំណត់ហេតុនេះ។ ------------

**អនុសេនីយ៍ឯកនគរបាល**

---នៅថ្ងៃដដែលនេះ នៅម៉ោង យើងបានរាយការណ៍ពីអង្គហេតុជូនលោកព្រ
រាជអាជ្ញា(ឈ្មោះ ត្រកូល) អមសាលាដំបូងក្រុង។

**អនុសេនីយ៍ឯកនគរបាល**

ក្រសួងមហាផ្ទៃ
-------------
អគ្គស្នងការដ្ឋាននគរបាលជាតិ
-------------
នាយកដ្ឋានកណ្តាលនគរបាលយុត្តិធម៌
-------------

កំណត់ហេតុ
លេខ

ករណី :
ប្រឆាំង/គោត្តនាម នាម
ចំពោះបទផ្ដាក់ព្រហ្មទណ្ឌ

កម្មវត្ថុ :
**ស្តាប់ចម្លើយពី :** (គោត្តនាម នាម អាយុ មុខរបរ លំនៅដ្ឋាន)

ព្រះរាជាណាចក្រកម្ពុជា
ជាតិ-សាសនា-ព្រះមហាក្សត្រ

# កំណត់ហេតុ

ឆ្នាំ ២០០..............ថ្ងៃទី........................................................................
នៅម៉ោង :.................................................................................................

យើង : **គោត្តនាម នាម**
**អនុសេនីយ៍ឯកនគរបាល**
**ធ្វើការនៅ (ទីក្រុង ឬអង្គភាព)**

មន្ត្រីនគរបាលយុត្តិធម៌នៅ : (ទីក្រុងភ្នំពេញ) ---
---នៅអង្គភាព...
---ធ្វើការស៊ើបអង្កេតបទល្មើសជាក់ស្តែង------
---បានឃើញមាត្រា ៨៦ និងបន្តបន្ទាប់នៃក្រមនីតិវិធីព្រហ្មទណ្ឌ------
---ជំនួយដោយលោកអនុសេនីយ៍ទោនគរបាល (គោត្តនាម នាម)------
---បញ្ជាឱ្យចូលខ្លួនចំពោះមុខយើងនូវឈ្មោះ(គោត្តនាម នាម) ដែលប្រកាសប្រាប់យើង :---
---**ទាក់ទងនឹងអត្តសញ្ញាណរបស់សាមីខ្លួនថា :**------
---«ខ្ញុំឈ្មោះ (គោត្តនាម នាម)។ កើតថ្ងៃ (...) នៅ (....) ជាកូនរបស់លោក(...) និងលោកស្រី (...) ពុំមានឈ្មោះក្រៅទេ »។--- ---- «បានរៀបការជាមួយឈ្មោះ (ឈ្មោះដើមរបស់ប្រពន្ធ) រយៈពេល១៥ឆ្នាំយើងមានកូន.....ចំនួន» ។
---«ខ្ញុំស្នាក់នៅ(...)ផ្លូវ(...)ក្រុង(...) ទូរស័ព្ទលេខ(........)» ----
---«ខ្ញុំមានសញ្ជាតិ(...)» ។------
---« ខ្ញុំ ប្រកបមុខរបរជា(...)សហគ្រាសខ្ញុំ ឈ្មោះ(...)ស្ថិតនៅអគារលេខ(...)ផ្លូវ(...)ក្រុង(...)» ។
បានចំណូលប្រចាំខែចំនួន...............................រៀល ។------
---«ខ្ញុំរៀនបានថ្នាក់ទី (...)នៅវិទ្យាល័យ(...)ក្រុង(...)» ។------

---«ខ្ញុំមានសញ្ញាប័ត្រ (សញ្ញាប័ត្រ)» ។------

---«ខ្ញុំកាន់ប័ណ្ណបើកបរលេខ (...)» ។

---«ខ្ញុំពុំមានកាន់អាវុធណាមួយឡើយ (...)» ។------

---«ខ្ញុំពុំធ្លាប់មានទោសឡើយ (...)» ។------

------**ទាក់ទងនឹងអង្គហេតុថា :**------

---«ជាការពិតដែលថាថ្ងៃនោះ.........ម៉ោងប្រហែល............ខ្ញុំត្រូវបាន ឃាត់ខ្លួនដោយនគរបាល នៅពេលដែលខ្ញុំ(..........)(..................)(...........) ។ រឿងហេតុបានកើតឡើងនៅផ្លូវ(...) ។ ខ្ញុំត្រៀមខ្លួនពន្យល់មូលហេតុដែលជំរុញខ្ញុំ ប្រព្រឹត្តដូច្នេះ........ ។មួយសប្តាហ៍មកហើយខ្ញុំបានដឹង (............)(.............) ។

សំនួរ : លោកអះអាងថា.................

ចម្លើយ: ខ្ញុំអះអាងថា.................(.............) ។------

---ខ្ញុំសំគាល់ឃើញថា(.............) ។------

---ខ្ញុំទទួលស្គាល់អំពើដែលចោទ គឺ(.............) ។------

ក្រោយពីអានដោយខ្លួនឯងរួច លោក(គោត្តនាម នាម) មិនផ្លាស់ប្តូរចម្លើយ ហើយយល់ព្រមចុះ ហត្ថលេខា លើកំណត់ហេតុនេះជាមួយយើង និងជំនួយការ យើងនៅម៉ោង------------

**អ្នកផ្តល់ចម្លើយ** **ជំនួយការ** **អនុសេនីយ៍ឯកនគរបាល**

**ក្រសួងមហាផ្ទៃ**

-------------

**អគ្គស្នងការដ្ឋាននគរបាលជាតិ**

-------------

**នាយកដ្ឋានកណ្តាលនគរបាលយុត្តិធម៌**

-------------

**កំណត់ហេតុ**

លេខ

**ករណី :**

ប្រឆាំង/គោត្តនាម នាម

ចំណាត់ថ្នាក់ព្រហ្មទណ្ឌ

**កម្មវត្ថុ :**

**ស្តាប់ចម្លើយពីសាក្សី :**

(អត្តសញ្ញាណ សង្ខេប)

**ព្រះរាជាណាចក្រកម្ពុជា**

**ជាតិ-សាសនា-ព្រះមហាក្សត្រ**

# កំណត់ហេតុ

ឆ្នាំ ២០០...............ថ្ងៃទី..........................................................................

នៅម៉ោង :..................................................................................................

យើង : **គោត្តនាម នាម**

**អនុសេនីយ៍ឯកនគរបាល**

**ធ្វើការនៅ (ទីក្រុង ឬអង្គភាព)**

មន្ត្រីនគរបាលយុត្តិធម៌នៅ : (ទីក្រុងភ្នំពេញ) ---

---នៅអង្គភាព...

---ធ្វើការស៊ើបអង្កេត( ក្របខ័ណ្ឌគតិយុត្តិ) ------

---បានឃើញមាត្រា (...) និងបន្តបន្ទាប់នៃក្រមនីតិវិធីព្រហ្មទណ្ឌ------

---ជំនួយដោយលោក( គោត្តនាម នាម ឋានន្តរសក្តិ) មកពីអង្គភាព------

---យើងបានកោះហៅ និងស្តាប់ចម្លើយលោក( គោត្តនាម នាម )(អត្តសញ្ញាណខ្លះៗ) ---

---ដែលប្រកាសប្រាប់យើងថា :------------------------

---«នៅថ្ងៃទី (កាលបរិច្ឆេទរឿងហេតុ) ម៉ោង(...)ខ្ញុំមកពី(...)ហើយទៅ(...).... ដោយជិះរថយន្តតែម្នាក់ឯង(...) ។ គឺនៅពេលនោះហើយដែលខ្ញុំបានឃើញ(...) ជនមួយក្រុម(ភិនភាគ) កំពុងវាយតប់គ្នា ខាងមុខរង្គសាល(...)" ---

---ខ្ញុំ បានឃើញក្នុងចំណោមនោះមានជនម្នាក់ មាឌតូចសម្បុរខ្មៅពាក់អាវខ្មៅបានយកកំណាត់ដែក វាយបុរសម្នាក់ទៀត... ។ល។ ------------

---បុរសដែលត្រូវគេវាយនោះដួលនៅនឹងដី ហើយព្យាយាមយកដៃរងកុំឱ្យគេវាយ ។ ខ្ញុំឃើញអ្នក ផ្សេងទៀតឈរមើលដោយគ្មានធ្វើអ្វីសោះ : ខ្ញុំទទួលអារម្មណ៍ថានេះគឺជាកាត់ទោសបុរសនោះ...។-----

សំនួរ : លោកប្រាកដហើយថាជននោះជាអ្នកប្រព្រឹត្តអំពើហិង្សា ? ---

ចម្លើយៈ ខ្ញុំប្រាកដថាពិតជាជនម្នាក់មាឌតូច សម្បុរខ្មៅ ពាក់អាវខ្មៅនោះហើយ ដែលបានយក កំណាត់ដែកវាយជនរងគ្រោះនោះ ។---

---បើគេយកជននោះមកបង្ហាញខ្ញុំ ខ្ញុំអាចចំណាំគេបានឱ្យ ។ ------------

---ក្រោយពីអានដោយខ្លួនឯងរួច លោក(គោត្តនាម នាម)មិនផ្លាស់ប្តូរចម្លើយ ហើយយល់ព្រមចុះ ហត្ថលេខាលើកំណត់ហេតុនេះជាមួយយើង និងជំនួយការ យើង នៅម៉ោង ។------------

**លោក(គោត្តនាម នាម)　　ជំនួយការ　　អនុសេនីយ៍ឯកនគរបាល**

ក្រសួងមហាផ្ទៃ

-------------

អគ្គស្នងការដ្ឋាននគរបាលជាតិ

-------------

នាយកដ្ឋានកណ្ដាលនគរបាលយុត្តិធម៌

-------------

**កំណត់ហេតុ**

លេខ

**ករណី :**

ប្រឆាំង/(គោត្តនាម នាម ឬខ)

ចំណាត់ថ្នាក់អង្គហេតុតាមផ្លូវច្បាប់

**កម្មវត្ថុ :**

**ការប្រទល់មុខរវាងឈ្មោះ :**

(គោត្តនាម នាម)

(គោត្តនាម នាម)

**ព្រះរាជាណាចក្រកម្ពុជា**

**ជាតិ-សាសនា-ព្រះមហាក្សត្រ**

# កំណត់ហេតុ

ឆ្នាំ ២០០...............ថ្ងៃទី..............................................................................

នៅម៉ោង :......................................................................................................

យើង : **គោត្តនាម នាម**

**អនុសេនីយ៍ឯកនគរបាល**

**ធ្វើការនៅ (ទីក្រុង ឬអង្គភាព)**

**មន្ត្រីនគរបាលយុត្តិធម៌នៅ :** (ទីក្រុងភ្នំពេញ)---

---យើងនៅអង្គភាព...

---ធ្វើការស៊ើបអង្កេត........------

---បានឃើញមាត្រា ... និងបន្តបន្ទាប់នៃក្រមនីតិវិធីព្រហ្មទណ្ឌ------

---ជំនួយដោយលោក.......................................មកពីអង្គភាព------

---បានឃើញចំនុចមិនស៊ីសង្វាក់ក្នុងពេលស្ដាប់ចម្លើយឈ្មោះ........................

.........................................................................................................។

---យើងបានកោះហៅ និងឃើញលោក.................................ចូលខ្លួន---

---យើងបានយកឈ្មោះ.............................ចេញពីបន្ទប់ឃុំខ្លួន---

---ហើយដាក់នៅចំពោះមុខយើងដើម្បីប្រទល់មុខ។ ---

---អោយពួកគាត់អានចម្លើយប្រកាសរបស់ពួកគាត់រៀង១ខ្លួន។ ---

---ពួកគាត់បានប្រកាសជាបន្តបន្ទាប់ : ------

---(គោត្តនាម នាម) : ------

---"ពួកអ្នកទើបនឹងជម្រាបខ្ញុំពីចម្លើយរបស់(គោត្តនាម នាម)។---

ខ្ញុំអះអាង ឬខ្ញុំបញ្ជាក់ ឬខ្ញុំទទួលស្គាល់ថាបានកុហក".....................................

.........................................................................................................------

---(គោត្តនាម នាម) : ------

---"ពួកអ្នកទើបនឹងជម្រាបខ្ញុំពីចម្លើយរបស់(គោត្តនាម នាម)។---

ខ្ញុំអះអាង ឬខ្ញុំបញ្ជាក់ ឬខ្ញុំទទួលស្គាល់ថាបានកុហក".....................................

---ក្រោយពីអានដោយខ្លួនឯងរួច......................................................
មិនផ្លាស់ប្តូរចម្លើយ ហើយយល់ ព្រមចុះហត្ថលេខាសម្រាប់អ្វីដែលពាក់ព័ន្ធនឹងខ្លួន លើកំណត់ហេតុនេះជាមួយយើង និងជំនួយការ យើងនៅម៉ោង.....................។

**លោក ក(ឈ្មោះ)  ជំនួយការ  អនុសេនីយ៍ឯកនគរបាល**

**លោក ខ(ឈ្មោះ)**

**ព្រះរាជាណាចក្រកម្ពុជា**
**ជាតិ-សាសនា-ព្រះមហាក្សត្រ**

**ក្រសួងមហាផ្ទៃ**
-------------
**អគ្គស្នងការដ្ឋាននគរបាលជាតិ**
-------------
**នាយកដ្ឋានកណ្តាលនគរបាលយុត្តិធម៌**
-------------

**កំណត់ហេតុ**
លេខ

**ករណី :**
ប្រឆាំង/ គោត្តនាម នាម
ចំណាត់ថ្នាក់អង្គហេតុតាមផ្លូវច្បាប់

**កម្មវត្ថុ:**
**ជូនដំណឹងពីការឃាត់ខ្លួន**
(នីតិជនក្នុងករណីជាក់ស្តែង) **ជូន**
(គោត្តនាម នាម អាយុ
មុខរបរ ទីលំនៅ)

# កំណត់ហេតុ

ឆ្នាំ ២០០...............ថ្ងៃទី.......................................................................

នៅម៉ោង :.........................................................................................

យើង : **គោត្តនាម នាម**

**អនុសេនីយ៍ឯកនគរបាល**

**ធ្វើការនៅ (ទីក្រុង ឬអង្គភាព)**

**មន្ត្រីនគរបាលយុត្តិធម៌នៅ : (ទីក្រុង)---**

---នៅអង្គភាព...

---ធ្វើការស៊ើបអង្កេតបទល្មើសជាក់ស្តែង------

---បានឃើញមាត្រា ៨៦ និងបន្តបន្ទាប់នៃក្រមនីតិវិធីព្រហ្មទណ្ឌ------

---បានឃើញមាត្រា ៩៦ នៃក្រមនីតិវិធីព្រហ្មទណ្ឌ------

---យើងបញ្ជាអោយចូលខ្លួនចំពោះមុខយើងឈ្មោះ :...............................

---(គោត្តនាម នាម ថ្ងៃខែឆ្នាំកំណើត និងទីកន្លែងកំណើត សញ្ជាតិ មុខរបរ អាស័យដ្ឋាន)---

---យើងបានប្រាប់សាម៉ីខ្លួនជាភាសាខ្មែរសម្គាល់ថាដើម្បីភាពចាំបាច់នៃការស៊ើបអង្កេត---

---សាម៉ីខ្លួនត្រូវឃាត់ខ្លួនចាប់ពីថ្ងៃនេះ (ម៉ោង) ការឃាត់ខ្លួនមានរយៈពេល ៤៨ម៉ោង ហើយដោយយថាហេតុអាចត្រូវពន្យារ យ៉ាងយូរ ២៤ម៉ោង បើសិនរកឃើញតំរុយដែលបង្ហាញឱ្យឃើញ ថាមានពិរុទ្ធភាពលើសាម៉ីខ្លួន។------

---យើងបានប្រាប់គាត់ភ្លាមពីបទបញ្ញត្តិនៃមាត្រា ៩៨ នៃក្រមនីតិវិធីព្រហ្មទណ្ឌ ដូចជា :---

---សិទ្ធិជួបសន្ទនាជាមួយមេធាវី ឬជនណាម្នាក់ដែលគាត់ជ្រើសរើស ក្រោយពីត្រូវបានឃាត់ខ្លួនអស់ ២៤ ម៉ោង---

---ឈ្មោះ (គោត្តនាម នាម) បានប្រកាសប្រាប់យើងថា : "ខ្ញុំសំគាល់ឃើញថា ក្រោយពីត្រូវបាន ឃាត់ខ្លួន២៤ម៉ោង ខ្ញុំអាចជួបសន្ទនាជាមួយមេធាវី ឬជនណាម្នាក់ដែលខ្ញុំជ្រើសរើសឱ្យ។

---ក្រោយពីអានដោយខ្លួនឯងរួចមិនផ្លាស់ប្តូរចម្លើយ ហើយយល់ព្រមចុះហត្ថលេខាជាមួយយើងនៅ ម៉ោង... ។------------

**សាមីខ្លួន** **អនុសេនីយ៍ឯកនគរបាល**

ជូនដំណឹងដល់អយ្យការ

---ថ្ងៃដដែលនេះ នៅម៉ោង យើងបានជូនដំណឹងលោក x (គោត្តនាម នាម) ព្រះរាជអាជ្ញាពីការ ឃាត់ខ្លួនឈ្មោះ(គោត្តនាម នាម)------

---លោកចៅក្រមរូបនេះបានបញ្ជាអោយយើងធ្វើការស៊ើបអង្កេតបទល្មើសជាក់ស្តែង។------

**អនុសេនីយ៍ឯកនគរបាល**

**ក្រសួងមហាផ្ទៃ**

-------------

**អគ្គស្នងការដ្ឋាននគរបាលជាតិ**

--------------

**នាយកដ្ឋានកណ្ដាលនគរបាលយុត្តិធម៌**

--------------

**កំណត់ហេតុ**

លេខ

**ករណី :**

ប្រឆាំង/ គោត្តនាម នាម

ចំណាត់ថ្នាក់អង្គហេតុតាមផ្លូវច្បាប់

**កម្មវត្ថុ :**

**ជូនដំណឹងពីការឃាត់ខ្លួន**(នីតិជនក្នុងការស៊ើបអង្កេតបឋម) **ដល់** (គោត្តនាម នាម អាយុ មុខរបរ លំនៅដ្ឋាន)

**ព្រះរាជាណាចក្រកម្ពុជា**

**ជាតិ-សាសនា-ព្រះមហាក្សត្រ**

# កំណត់ហេតុ

ឆ្នាំ ២០០...............ថ្ងៃទី..........................................................................

នៅម៉ោង :......................................................................................

យើង : **គោត្តនាម នាម**

**អនុសេនីយ៍ឯកនគរបាល**

**ធ្វើការនៅ (ទីក្រុង ឬអង្គភាព)**

**មន្ត្រីនគរបាលយុត្តិធម៌នៅ : (ទីក្រុង) ---**

---នៅអង្គភាព...

---ធ្វើការស៊ើបអង្កេតបឋម------

---បានឃើញមាត្រា ១១១ និងបន្តបន្ទាប់នៃក្រមនីតិវិធីព្រហ្មទណ្ឌ------

---បានឃើញមាត្រា ១១៦ នៃក្រមនីតិវិធីព្រហ្មទណ្ឌ------

---បានឃើញបទប្បញ្ញត្តិនៃមាត្រា ៩៦ និងបន្តបន្ទាប់ក្រៃមនីតិវិធីព្រហ្មទណ្ឌ

---យើងបញ្ជាអោយចូលខ្លួនចំពោះមុខយើងឈ្មោះ :..................................

---(គោត្តនាម នាម ថ្ងៃខែឆ្នាំកំណើត និងទីកន្លែងកំណើត សញ្ជាតិ មុខរបរ អាស័យដ្ឋាន) ---

---យើងបានប្រាប់សាម៉ីខ្លួនជាភាសាខ្មែរសម្មញ្ញថាដើម្បីភាពចាំបាច់នៃការស៊ើបអង្កេត---

---សាម៉ីខ្លួនត្រូវឃាត់ខ្លួន រយៈពេល៤៨ម៉ោងចាប់ពីថ្ងៃនេះទៅ (គិតចាប់ពីម៉ោងមកដល់អង្គភាព) ហើយដោយយថាហេតុអាចត្រូវពន្យារ យ៉ាងយូរ ២៤ម៉ោង បើឃើញមានតំរុយដែលបង្ហាញឱ្យឃើញ ពិរុទ្ធភាពលើសាម៉ីខ្លួន។------

---យើងបានប្រាប់គាត់ភ្លាមពីបទប្បញ្ញត្តិនៃមាត្រា ៩៨នៃក្រមនីតិវិធីព្រហ្មទណ្ឌ ដូចជា :---

---សិទ្ធិជួបសន្ទនាជាមួយមេធាវី ឬជនណាម្នាក់ដែលគាត់ជ្រើសរើស ក្រោយពីត្រូវបានឃាត់ខ្លួនរយៈ ២៤ ម៉ោង---

---ឈ្មោះ (គោត្តនាម នាម) បានប្រកាសប្រាប់យើងថា : "ខ្ញុំសំគាល់ឃើញថា ក្រោយពីត្រូវបាន ឃាត់ខ្លួន២៤ម៉ោង ខ្ញុំអាចជួបសន្ទនាជាមួយមេធាវី ឬជនណាម្នាក់ដែលខ្ញុំជ្រើសរើសឱ្យ។

---ក្រោយពីអានដោយខ្លួនឯងរួច លោក.........មិនផ្លាស់ប្តូរចម្លើយហើយយល់ព្រមចុះហត្ថលេខាលើ កំណត់ហេតុនេះជាមួយយើងនៅម៉ោង... ។----------

**សាម៉ីខ្លួន** **អនុសេនីយ៍ឯកនគរបាល**

ជូនដំណឹងដល់អយ្យការ

---ថ្ងៃដដែលនេះ នៅម៉ោង យើងបានជូនដំណឹងលោក X ( គោត្តនាម នាម ) ព្រះរាជអាជ្ញា អមសាលាដំបូងក្រុង(...)ពីការឃាត់ខ្លួនឈ្មោះ( គោត្តនាម នាម )

---លោកចៅក្រមរូបនេះបានបញ្ជាអោយយើងធ្វើការស៊ើបអង្កេតបទល្មើសជាក់ស្តែង។------

**អនុសេនីយ៍ឯកនគរបាល**

**ព្រះរាជាណាចក្រកម្ពុជា**
**ជាតិ-សាសនា-ព្រះមហាក្សត្រ**

**ក្រសួងមហាផ្ទៃ**
-------------
**អគ្គស្នងការដ្ឋាននគរបាលជាតិ**
-------------
**នាយកដ្ឋានកណ្តាលនគរបាលយុត្តិធម៌**
-------------

**កំណត់ហេតុ**
លេខ
**ករណី :**
ប្រឆាំង/ គោត្តនាម នាម
ឬអញ្ញាតជន
អនុវត្តដីកាចាត់អោយស៊ើបសួរជំនួស
លេខ......ចុះថ្ងៃ.........ចេញ
ដោយលោក ( គោត្តនាម នាម)
ចៅក្រមស៊ើបសួរ ( ទីកន្លែង)

**កម្មវត្ថុ :**
**ជូនដំណឹងពីការឃាត់ខ្លួន** ( នីតិជនតាមដីកាចាត់អោយស៊ើបសួរជំនួស)ដល់ ( គោត្តនាម នាម អាយុ មុខរបរ ទីលំនៅ)

# កំណត់ហេតុ

ឆ្នាំ ២០០...............ថ្ងៃទី......................................................................

នៅម៉ោង :.....................................................................................

យើង : **គោត្តនាម នាម**
**អនុសេនីយ៍ឯកនគរបាល**
**ធ្វើការនៅ ( ទីក្រុង ឬអង្គភាព)**

**មន្ត្រីនគរបាលយុត្តិធម៌នៅ : ( ទីក្រុង) ---**

---នៅអង្គភាព...

---អនុវត្តដីកាចាត់អោយស៊ើបសួរជំនួសលេខ( ...) ចុះថ្ងៃ( ...) ចេញដោយលោក ( គោត្តនាម នាម) ចៅក្រមស៊ើបសួរអមសាលាដំបូង ( ក្រុង) ---

---បានឃើញមាត្រា ១៧៣ និងបន្តបន្ទាប់នៃក្រមនីតិវិធីព្រហ្មទណ្ឌ------

---បានឃើញបទប្បញ្ញត្តិនៃមាត្រា ៩៦ និងបន្តបន្ទាប់នៃក្រមនីតិវិធីព្រហ្មទណ្ឌ -

---យើងបញ្ជាអោយចូលខ្លួនចំពោះមុខយើងឈ្មោះ :...................................

---( គោត្តនាម នាម ថ្ងៃខែឆ្នាំកំណើត និងទីកន្លែងកំណើត សញ្ជាតិ មុខរបរ អាស័យដ្ឋាន) ---

---យើងបានប្រាប់សាម៉ីខ្លួនជាភាសាខ្មែរសម្មញ្ញថាដើម្បីភាពចាំបាច់នៃការស៊ើបអង្កេត---

---សាម៉ីខ្លួនត្រូវឃាត់ខ្លួនចាប់ពីថ្ងៃនេះ( ម៉ោង) ការឃាត់ខ្លួនមានរយៈពេល ៤៨ម៉ោង ហើយដោយ យថាហេតុអាចត្រូវពន្យារ យ៉ាងយូរ ២៤ម៉ោង បើសិនរកឃើញតំរុយដែលបង្ហាញឱ្យឃើញថាមាន ពិរុទ្ធភាពលើសាម៉ីខ្លួន ។----

--- យើងបានប្រាប់គាត់ភ្លាមពីបទប្បញ្ញត្តិនៃមាត្រា ៩៨នៃក្រមនីតិវិធីព្រហ្មទណ្ឌ ដូចជា :---

---សិទ្ធិជួបសន្ទនាជាមួយមេធាវី ឬជនណាម្នាក់ដែលគាត់ជ្រើសរើស ក្រោយពីត្រូវបានឃាត់ខ្លួនអស់ ២៤ ម៉ោង---

---ឈ្មោះ (គោត្តនាម នាម) បានប្រកាសប្រាប់យើងថា : «ខ្ញុំសំគាល់ឃើញថា ក្រោយពីត្រូវបាន ឃាត់ខ្លួន២៤ម៉ោង ខ្ញុំអាចជួបសន្ទនាជាមួយមេធាវី ឬជនណាម្នាក់ដែលខ្ញុំជ្រើសរើស---   » ។

---ក្រោយពីអានដោយខ្លួនឯងរូចលោក........មិនផ្លាស់ប្តូរចម្លើយហើយ យល់ព្រមចុះហត្ថលេខា ជាមួយ យើងលើកំណត់ហេតុនេះនៅម៉ោង...។-------

**សាម៉ីខ្លួន** **អនុសេនីយ៍ឯកនគរបាល**

ជូនដំណឹងអយ្យការ

---ថ្ងៃដដែលនេះ នៅម៉ោង យើងបានជូនដំណឹងលោក X ( គោត្តនាម នាម ) ចៅក្រមដែលបញ្ជា អោយធ្វើការឃាត់ខ្លួនឈ្មោះ(គោត្តនាម នាម)------

---លោកចៅក្រមរូបនេះបានបញ្ជាអោយយើងធ្វើការស៊ើបអង្កេតតាមដីកាចាត់អោយស៊ើបសួរ។

**អនុសេនីយ៍ឯកនគរបាល**

**ក្រសួងមហាផ្ទៃ**

-------------

**អគ្គស្នងការដ្ឋាននគរបាលជាតិ**

-------------

**នាយកដ្ឋានកណ្តាលនគរបាលយុត្តិធម៌**

-------------

**កំណត់ហេតុ**

លេខ

**ករណី :**

ប្រឆាំង/(ឈ្មោះជនសង្ស័យ)

អនីតិជន

ចំណាត់ថ្នាក់អង្គហេតុតាមផ្លូវច្បាប់

**កម្មវត្ថុ :**

**ជូនដំណឹងពីការឃាត់ខ្លួន**(អនីតិជនប្រព្រឹត្តបទឧក្រិដ្ឋអាយុពី១៦ដល់១៨ឆ្នាំក្នុងករណីបទល្មើសជាក់ស្តែង) ឈ្មោះ(គោត្តនាម នាម អាយុ អាស័យដ្ឋាន)

**ព្រះរាជាណាចក្រកម្ពុជា**

**ជាតិ-សាសនា-ព្រះមហាក្សត្រ**

## កំណត់ហេតុ

ឆ្នាំ ២០០...............ថ្ងៃទី.......................................................................

នៅម៉ោង :...........................................................................................

យើង : **គោត្តនាម នាម**

**អនុសេនីយ៍ឯកនគរបាល**

**ធ្វើការនៅ (ទីក្រុង ឬអង្គភាព)**

**មន្ត្រីនគរបាលយុត្តិធម៌នៅ : (ទីក្រុង)---**

---យើងនៅអង្គភាព...

---ធ្វើការស៊ើបអង្កេតបទល្មើសជាក់ស្តែង------

---បានឃើញមាត្រា ៨៦ និងបន្តបន្ទាប់នៃក្រមនីតិវិធីព្រហ្មទណ្ឌ------

---បានឃើញមាត្រា ៩៦ និងបន្តបន្ទាប់នៃក្រមនីតិវិធីព្រហ្មទណ្ឌ------

---បានឃើញមាត្រា ១០០ នៃក្រមតែមួយ---

---យើងបញ្ជាអោយចូលខ្លួនចំពោះមុខយើងឈ្មោះ :..................................

---(គោត្តនាម នាម) កើតថ្ងៃ(...)នៅ(ទីក្រុង)សញ្ជាតិ (ខ្មែរ ឬបរទេស) ស្ថានភាព(សិស្ស ឬផ្សេងទៀត) ស្នាក់នៅ(អាស័យដ្ឋាន)----------------

---យើងបានប្រាប់សាម៉ីខ្លួនជាភាសាខ្មែរសម្ពញ្ញថាដើម្បីភាពចាំបាច់នៃការស៊ើបអង្កេត សាម៉ីខ្លួនត្រូវឃាត់ខ្លួនចាប់ពីថ្ងៃនេះ នៅម៉ោង(ម៉ោងឃាត់ខ្លួន)ការឃាត់ខ្លួនមិនអាចមានរយៈ**ពេលលើសពី៤៨ ម៉ោងឡើយ** ។------

---យើងបានប្រាប់សាម៉ីខ្លួនភ្លាមពីបទបញ្ញាតិនៃមាត្រា ៩៨ នៃក្រមនីតិវិធីព្រហ្មទណ្ឌ ដូចជា :----

---សិទ្ធិជួបសន្ទនាជាមួយមេធាវី ឬជនណាម្នាក់ដែលគាត់ជ្រើសរើសក្រោយពីត្រូវបានឃាត់ខ្លួនរយៈ ពេល ២៤ ម៉ោង---

---ឈ្មោះ(គោត្តនាម នាម)ប្រកាសប្រាប់យើងថា :«ខ្ញុំសំគាល់ឃើញថាក្រោយពីត្រូវឃាត់ខ្លួនរយៈ ពេល២៤ម៉ោង ខ្ញុំអាចជួបសន្ទនាជាមួយមេធាវី ឬជនណាម្នាក់ដែលខ្ញុំជ្រើសរើស» ------

